# **រឿង សាមកុក**

## អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

## កណ្ឌទី ៧០

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពីព្រះចៅ**ចូភី**បានសោយរាជសម្បត្តិ នាង**គុយហេង (ព្រះស្នំ)** ធ្វើកលឧបាយជាមួយនឹង**តៀវថូ (ខន្ទី)** កប់រូបព្រះចៅ**ចូភី**ក្រោមក្រឡាបន្ទំនាង**អៀនស៊ី** (អគ្គមហេសី) ព្រះចៅ**ចូភី**លុះកល សម្លាប់នាង**អៀនស៊ី**ស្លាប់ រហូតដល់**ខុងបេង**វាយបានស្រុកឡាំអាន់ **អងប៉េង**ចាប់ខ្លួន**ហែហ៊ូលីម**បាន)។*

**ព្រះចៅចូភី** តាំងពីមិនទាន់បានសោយរាជ្យកើតបុត្រនឹងនាង**អៀនស៊ី**ឈ្មោះ**ចូយ៉យ**។ នាង**អៀនស៊ី**នោះ ដើមឡើយជាកូនប្រសារ**អ៊ូនសៀវ** កាលគ្រា**ចូឆូ**ទៅវាយបានស្រុកងៀបគុន **ចូភី**ក៏បាននាងនេះមកធ្វើជាភរិយា។ លុះព្រះចៅ**ចូភី**បានរាជសម្បត្តិ ទើបលើកនាង**អៀនស៊ី**ជាអគ្គមហេសីឯក ក្រោយមកយកនាង**គុយហេង**ជាបុត្រី**គុយហ៊ុយ**ធ្វើជាមហេសីខាងឆ្វេង នាងនោះរូបល្អ ព្រះចៅ**ចូភី**សព្វព្រះទ័យណាស់។ **គុយហ៊ុយ**ជាបិតាគិតចង់ឲ្យបុត្រីអាត្មាធ្វើជាបណ្ដាច់ ទើបចូលទៅគិតការសម្រេចនឹង**តៀវថូ**ជាខន្ទី។

**តៀវថូ**គិតថា កុំឲ្យ**គុយហ៊ុយ**ព្រួយបារម្ភ ព្រោះឥឡូវនេះ ព្រះចៅ**ចូភី**ទ្រង់ព្រះប្រឈួនសូមឲ្យអ្នកគិតកលឧបាយធ្វើរូបព្រះចៅ**ចូភី** ហើយសរសេរឆ្នាំខែថ្ងៃព្រះកំណើតជាប់ជាមួយនឹងរូបនោះ នាំយកទៅកប់ទុកក្រោមគ្រែបន្ទុំនាង**អៀនស៊ី** ខ្ញុំនឹងទៅចាប់ជីកយករូបនោះទៅថ្វាយព្រះចៅ**ចូភី** ៗមុខជានឹងទ្រង់ព្រះពិរោធ ឲ្យសម្លាប់នាង**អៀវស៊ី**ពុំខាន បុត្រីអ្នកគង់នឹងបានធំបណ្ដាច់តែឯង។ **គុយហ៊ុយ**បានស្ដាប់ដូច្នោះ ក៏យល់ឃើញត្រូវ ទើបចេញទៅធ្វើរូបនោះហើយនាំយកទៅកប់ក្រោមព្រះដំណាក់។ **តៀវថូ**ក៏ទៅស្ទាក់ចាប់យករូបនោះទៅថ្វាយព្រះចៅ**ចូភី** ៗមិនបានដឹងក្នុងកលឧបាយ ក៏ក្ដៅក្រហាយក្នុងព្រះទ័យចាប់ទោសអគ្គមហេសីថា ក្លែងធ្វើព្រះអង្គឲ្យទ្រង់អាពាធ ក៏ត្រាស់ប្រើពេជ្ឈឃាដឲ្យនាំនាង**អៀនស៊ី**ទៅប្រហារជីវិតបង់

ហើយទ្រង់តាំងនាង**គុយហេង**ជាអគ្គមហេសី តែនាងនោះមិនមានព្រះរាជបុត្រីបុត្រា ឃើញ**ចូយ៉យ**ជាបុត្រនាង**អៀនស៊ី**មានតម្រិះប្រាជ្ញាស្រស់ស្រួច ក៏គួចចិត្តគិតស្រឡាញ់ ទើបអស់អញថ្នមបីបាច់ជាបុត្របណ្ដូលបណ្ដាច់ដូចកើតពីឧទរ។ **ចូយ៉យ**ក៏ចម្រើនវ័យបានដប់ប្រាំឆ្នាំ ចេះចាំវិជ្ជាសិល្បសាស្ត្រឆ្លាតពូកែខាងបាញ់ធ្នូ និងប្រើអាវុធទាំងពួង។

លុះព្រះចៅ**ចូភី**សោយរាជសម្បត្តិបានប្រាំពីរឆ្នាំ (ព.ស ៧៦៩) ដល់ខែផល្គុនរដូវក្ដៅ ព្រះចៅ**ចូភី**ក៏នាំ**ចូយ៉យ**ជាព្រះរាជឱរសចេញទៅប្រពាតព្រៃ ដើម្បីបាញ់សត្វជាទីប្រៀនបង្ហាត់វិជ្ជា បណ្ដាខ្ញុំរាជការនូវពលទាហាន ក៏កៀងបានប្រើសមេនិងកូនចេញពីព្រៃ ព្រះចៅ**ចូភី**ក៏ទ្រង់ធ្នូជ័យបាញ់ទៅត្រូវមេប្រើសស្លាប់ កូនប្រើសក៏បោលក្រឡាប់រត់សំដៅទៅចំមុខ**ចូយ៉យ** ៗមានចិត្តអាណិតណាស់ ប្រាសប្រែភក្ត្រទម្លាក់ធ្នូនៅស្ងៀមមិនបាញ់។ ព្រះចៅ**ចូភី**ជាបិតាត្រាស់ថា ម្នាលបុត្រសម្លាញ់ ហេតុម្ដេចបានជាមិនបាញ់កូនប្រើសដូច្នោះ? **ចូយ៉យ**ក្រាបទូលដោយស្មោះថា ប្រើសមេកូន ព្រះបិតាបាញ់មេវាក្ស័យសូន្យជីវិតទៅហើយ ទូលព្រះបង្គំជាខ្ញុំឃើញកូនវានៅឡើយ វាក៏ភិតភ័យបោលត្រង់មកលើមនុស្សម្នា វាមិនដឹងខ្លាចដោយអំណាចសេចក្ដីអាល័យមេ វាក៏កំព្រាដូចទូលព្រះបង្គំជាខ្ញុំដែរ។ ទូលព្រះបង្គំជាខ្ញុំមានចិត្តអាណិតវាណាស់ នឹងលើកដៃរហ័សបាញ់មិនបាន សូមព្រះរាជទានទោស។

ព្រះចៅ**ចូភី**បានទ្រង់ព្រះរាជសណ្ដាប់ព្រះរាជឱរស ក៏ទ្រង់ថ្ងោះព្រះភក្ត្រផ្កាក់ព្រះទ័យបង្កើតសេចក្ដីអាណិតរាជបុត្រា របូតស្នាពីព្រះហត្ថាធ្លាក់ដល់ដី គិតថា បុត្រយើងនៅក្មេងសេចក្ដីក៏មែន តែមានចិត្តគិតមេត្តាសត្វ គួរនឹងគ្រងរាជសម្បត្តិជាម្ចាស់ផែនដីបាន គិតហើយ ក៏ឡើងគង់លើព្រះរាជយាននាំព្រះរាជបុត្រវិលចូលមកព្រះបរមរាជវាំងវិញ។ ព្រះចៅ**ចូភី**ក៏ទ្រង់តាំង**ចូយ៉យ**ជារាជបុត្រាជា**ភេងង្គួនអង**គឺស្ដេចតាងក្រុម។

លុះដល់ខែអាសាធ ព្រះចៅ**ចូភី**ទ្រង់ប្រឈួនធ្ងន់ដោយរោគខ្យល់ ពេទ្យព្យាបាលប៉ុន្មានក៏មិនស្រាក ទើបមានព្រះតម្រាស់ឲ្យហៅ**ចូជិន១, តាន់កុង១, សុម៉ាអ៊ី១** ដែលជានាហ្មឺនធំ ហើយនិង**ចូយ៉យ**ជារាជបុត្រ ឲ្យចូលគាល់ផ្ទាល់ព្រះអង្គ

ព្រះចៅ**ចូវភី**ទ្រង់ត្រាស់ថា វេលានេះខ្លួនយើងឈឺធ្ងន់ណាស់ មើលទៅមុខជាធន់ពុំបាន ហើយយើងក៏មានសេចក្តីព្រួយដោយ**ចូយ៉យ**នៅក្មេងសេចក្តី ខ្វីគំនិត បើកាលណាយើងអស់អាយុជីវិតទៅ អ្នកទាំងអស់ធ្លាប់នៅធ្វើរាជការជាមួយនឹងយើងដូចម្តេច ចូរជួយឈឺឆ្អាលរាជការ រក្សាសេចក្តីសុខទំនុកបម្រុងស្រុកទេសឲ្យបានរៀបរយដោយធម៌ សូម្បីភរិយាបុត្ររបស់យើង ៗបានឧបត្ថម្ភយ៉ាងណា សុំឲ្យជួយព្យាបាលរក្សាយ៉ាងនោះផងចុះ។ នាហ្មឺនទាំងបីនាក់បានឮព្រះតម្រាស់ក៏ទូលរហ័សតបថា សូមកុំឲ្យព្រះអង្គទ្រង់ព្រះបរិវិតក្កឡើយ ទូលព្រះបង្គំជាខ្ញុំទាំងបីនាក់នេះហើយ នឹងតាំងចិត្តធ្វើរាជការថ្វាយឆ្លងព្រះតេជព្រះគុណដរាបដល់អស់ជីវិត។ ព្រះចៅ**ចូវភី**ត្រាស់ថា យើងបានឃើញហេតុជាទីអាភេទក្នុងចិត្តណាស់ ព្រោះខ្លោងទ្វារព្រះនគរជាទីប្រជុំធំឥតហេតុផលអ្វីសោះ ស្រាប់តែបាក់រលំចុះឯង ឃើញថាខ្លួនយើងនឹងអស់បុណ្យជាក់ស្តែងប្រាកដក្នុងគ្រានេះ។

ខណៈនោះ មានពួកខន្ទីចូលទៅទូលថា **ចូហ៊ីវ**ជានាហ្មឺនធំសម្រាប់កម្ចាត់សត្រូវខាងទិសឯកើតសុំចូលមកគាល់។ ព្រះចៅ**ចូវភី**ក៏ត្រាស់ហៅឲ្យចូលទៅ ហើយទ្រង់ព្រះកន្សែងពិលាបត្រាស់សួរ**ចូហ៊ីវ**ថា អ្នកជានាហ្មឺនធំ បានជួយប្រាបប្រាមសត្រូវតាំងពីស្រុកហ៊ូតោនៅមិនទាន់បានជាទីមាំមួន រហូតមកដល់ទាល់ធំទូលាយត្រឹមនេះហើយ ខ្លួនយើងក៏នៅល្មមនៅឡើយមិនទាន់នឹងជរាប៉ុន្មាន ទើបតែបានសែសិបឆ្នាំ បានសោយរាជ្យប្រាំពីរឆ្នាំ ជាផលកម្មនាំឲ្យកើតរោគធ្ងន់ យើងក៏ឃើញថានឹងធន់នៅតទៅពុំបានទេ អ្នកនៅឯក្រោយចូរជួយទំនុកបម្រុងបុត្រយើងដោយសុចរិត ឲ្យចិត្តយើងអស់ព្រួយវិតក្កផងចុះ។ លុះទ្រង់ចប់ព្រះវាចាព្រះចៅ**ចូវភី**ក៏ទិវង្គត។

**ចូជិន១, តាន់កុង១, សុម៉ាអ៊ី១** នូវអស់នាហ្មឺមុខមន្ត្រីតូចធំ ក៏ប្រជុំអញ្ជើញ**ចូយ៉យ**ឲ្យឡើងគ្រងរាជសម្បត្តិ តាំងនាមក្សត្រជាព្រះចៅ**តែងុយហោងតេ** (ព.ស ៧៧០)។ លុះព្រះចៅ**ចូយ៉យ**សោយរាជសម្បត្តិជាក្សត្រាធិរាជ ក៏ទ្រង់ព្រះអំណាចលើកលែងមនុស្សទោសក្នុងគុកទាំងអស់ ហើយទើបចាត់ចែងតែងការព្រះបរមសពព្រះចៅ**ចូវភី**ជាបិតាតាមប្រវេណី។ លុះធ្វើស្រេច ស្តេចក៏តាំងនាហ្មឺនមុខមន្ត្រីឲ្យ

ឡើងយសស័ក្តិតាមថ្នាក់តូចធំជាលំដាប់ តាមដែលមានគុណគាប់ក្នុងរាជការ ហើយទ្រង់មានព្រះតម្រាស់នឹង**សុម៉ាអ៊ី**ថា ស្រុកសេលៀងនោះជាជិតគ្នានឹងស្រុកសៃឈួនជាស្រុកមុខសឹក លុះតែមានអ្នកប្រាជ្ញាដ៏អធិកជ្រៅជ្រះ មានតបះក្លៀវក្លាហានទើបបានទៅនៅរក្សាខ្ជាប់ខ្ជួន។ **សុម៉ាអ៊ី**បានឮព្រះតម្រាស់ ក៏តែងរឿងរ៉ាវក្រាបទូលថ្វាយ សុំចេញទៅយកអាសានៅរក្សាស្រុកសេលៀង។ ព្រះចៅ**ចូយ៉យ**ក៏យល់ព្រមចាត់**សុម៉ាអ៊ី**ឱ្យចេញទៅនៅស្រុកសេលៀង។

ខណៈពួកល្បាតស៊ើបការណ៍ដឹងថា **ចូភី**ទិវង្គត **ចូយ៉យ**ព្រះរាជបុត្របានឡើងសោយរាជ្យជំនួសបិតា ហើយតាំង**សុម៉ាអ៊ី**ដែលមានតម្រិះប្រាជ្ញាឱ្យទៅឈររក្សាស្រុកសេលៀង អ្នកស៊ើបការណ៍ក៏នាំអាថ៌ព័ត៌មានចូលទៅជម្រាប**ខុងបេង**គ្រប់ប្រការ។ **ខុងបេង**ដឹងដូច្នោះ ក៏ព្រួយចិត្តណាស់ថា **សុម៉ាអ៊ី**នោះជាមនុស្សមានតម្រិះប្រាជ្ញាស្រួចស្រស់ បើបានបញ្ចុះបញ្ចូលពលទាហានបានច្រើនហើយ មិនលែងឡើយនឹងលើកទ័ពមកធ្វើអន្តរាយដល់ដែនរបស់យើង ត្រូវយើងគិតលើកទាហានទៅវាយយកស្រុកហ៊្វូតោ កាត់សឹកចេញជាមុនទើបបាន បើ**សុម៉ាអ៊ី**អស់កម្លាំងមិនមានទីអាស្រ័យវេលាណា គង់នឹងប្រវាមកទីពឹងយើងខាងនេះ **ម៉ាចេក**នឹកឃើញក៏និយាយតបទៅនឹង**ខុងបេង**ថា មហាឧបរាជលើកកងទ័ពទៅច្បាំងនឹង**បេងហេក**ទើបតែនឹងត្រឡប់មកវិញសោះ ទាហានទាំងអស់មិនទាន់បាត់ហត់នឿយ បើនឹងលើកទៅវាយស្រុកហ៊្វូតោទៀតហើយ ផ្លូវនោះក៏ឆ្ងាយដាច់អាល័យ ទាហាននឹងលើកទៅក៏បានសេចក្តីព្រួយលំបាកណាស់ សុំឱ្យលោកឈប់បង្អង់កុំអាលរូតរះពេក ខ្ញុំបាទនឹងគិតឧបាយកលឱ្យប្លែក ដើម្បីឱ្យ**ចូយ៉យ**សម្លាប់**សុម៉ាអ៊ី**ចេញឱ្យបាន។ **ខុងបេង**ក៏សួរព័ត៌មានថា កលរបស់អ្នកនឹងធ្វើដូចម្តេច?

**ម៉ាចេក**ឆ្លើយថា ដែល**ចូយ៉យ**ឱ្យ**សុម៉ាអ៊ី**មកនៅឈររក្សាស្រុកសេលៀងនោះ **ចូយ៉យ**ក៏នៅមានចិត្តកំណាន់ មិនទាន់ទុកចិត្ត**សុម៉ាអ៊ី**ជាប្រាកដទេ ខ្ញុំបាទឃើញកលឧបាយមួយ ត្រូវសរសេរសំបុត្រ ហើយចាត់បម្រើឱ្យលបយកទៅបិទនៅទ្វារស្រុកឡុកអៀង និងអាណាខេត្តឯទៀតៗថា **សុម៉ាអ៊ី**គិតក្បត់ បើ**ចូយ៉យ**ដឹងហើយ គង់នឹងសម្លាប់**សុម៉ាអ៊ី**ចេញ។ **ខុងបេង**បានស្តាប់សព្ទ ក៏នឹកឃើញយល់ត្រូវ ទើបឱ្យ

សរសេរសំបុត្រជាសេចក្ដីថា ខ្លួនយើងឈ្មោះ**សុម៉ាអ៊ី** ជាទីនាហ្មឺនធំប្រាប់ដំណឹងដល់អ្នកទាំងពួង ពីដើម ព្រះចៅ**វុយអេង**បំណាងនឹងប្រគល់រាជសម្បត្តិឲ្យ**ចូសិត** តែមានមនុស្សកាច គិតញុះញង់ព្រះចៅ**ចូភី** ទើបបង្វែររាជសម្បត្តិឲ្យទៅ**ចូភី**វិញ ឥឡូវ**ចូភី**បង្វែររាជសម្បត្តិឲ្យទៅព្រះចៅ**ចូយ៉យ**ជាបុត្រា **ចូយ៉យ**នោះជាក្មេងសេចក្ដីខ្លីគំនិត នឹងគិតធ្វើការអ្វីៗ ក៏មិនមានសេចក្ដីប្រណីអាណិតរាស្ត្រសោះ តទៅនឹងបានសេចក្ដីអាប់យសរលាយរាជសម្បត្តិសោះឥតការ យើងជានាហ្មឺនធំនឹងសំងំស្ងៀមនៅឲ្យផែនដីជាចលាចល ក៏មិនគួរ ទើបយើងត្រូវបញ្ចុះបញ្ចូលពលទាហានឲ្យបានច្រើនហើយ នឹងលើកទៅកម្ចាត់**ចូយ៉យ**ចេញ ដើម្បីនឹងលើក**ចូសិត**ឲ្យសោយរាជសម្បត្តិវិញ តាមព្រះតម្រិះព្រះចៅ**វុយអេង**ជាតម្កល់លើត្បូង បើអ្នកទាំងពួងយល់ព្រមល្មមនឹងចូលធ្វើការជាមួយនឹងយើង ក៏សូមឲ្យស្រូតប្រញាប់រហ័សនាំអស់ពួកភឿនទៅចូលនឹងយើងចុះ បើអ្នកឯណាបានឃើញសេចក្ដីសំបុត្រនេះហើយ មិនចូលនឹងយើងទេ បើយើងបានធ្វើការសម្រេចតាមគ្នេរវេលាណា យើងនឹងត្រូវប្រហារជីវិតឲ្យអស់ទាំងគោត្រ។

**ខុងបេង**ឲ្យសរសេរសំបុត្រឆ្នោត មានសេចក្ដីដូចៗគ្នាដូច្នេះហើយ ក៏ចាត់បម្រើឲ្យដើរបំបែកគ្នាលបទៅបិទសព្វទ្វារស្រុក ដែលគិតទុករាល់អន្លើ ហើយឲ្យបម្រើនាំយកទៅបិទនៅទ្វារស្រុកឡុកអៀងជាក្រោយ។

លុះព្រឹកឡើង ស្រាប់តែនាយទ្វារបានឃើញសំបុត្របិទដូច្នោះ ក៏នាំចូលទៅថ្វាយព្រះចៅ**ចូយ៉យ** ៗទតព្រះនេត្រចប់សេចក្ដី ក៏មានព្រះទ័យតក់ស្លុតរន្ធត់វិញ្ញាណ បានប្រជុំទីប្រឹក្សាទាំងពួងមកពិគ្រោះថា វេលានេះ**សុម៉ាអ៊ី**ចេញជាក្បត់ហើយ អស់អ្នកទាំងឡាយនឹងយល់ឃើញប្រការម្ដេច? **ហួហ៊ឹម**ទូលថា កាលព្រះចៅ**វុយអេង**នៅគង់ព្រះជន្មនៅឡើយ ក៏មិនបានទុកព្រះទ័យនឹង**សុម៉ាអ៊ី**ជាប្រាកដ បានត្រាស់ជារឿយៗថា **សុម៉ាអ៊ី**នេះបើនឹងជប់លៀងឲ្យធ្វើធំត្រួតត្រាលើទាហានវេលាណា ក៏គង់នឹងក្លាចិត្ត គិតក្បត់ផែនដីវេលានោះ ដែល**សុម៉ាអ៊ី**ធ្វើរឿងរ៉ាវជាផ្លូវឧបាយថ្វាយសុំខ្លួនចេញទៅយកអាសាថាជាអ្នករក្សាស្រុកសេលៀងនោះ ប្រាថ្នានឹង

បញ្ចុះបញ្ចូលទាហាន ឲ្យបានជាកម្លាំងមាំមួន ដើម្បីនឹងតាំងខ្លួនធ្វើធំ សមជាក្បត់នឹងផែនដីជាប្រាកដ។

**អងឡូង**បានឮដូច្នោះក៏ទូលថា **សុម៉ាអ៊ី**ជាមនុស្សមានសតិបញ្ញាឆ្លៀវឆ្លាស ហើយចំណានបទបាទនឹងការសង្គ្រាម ធ្លាប់បានច្បាំងជាច្រើនគ្រា បើ**សុម៉ាអ៊ី**តាំងខ្លួនបានដូច**ហ្សហ៊ឹម**ថា យើងក៏ធ្វើការលំបាកទៅមុខ សូមព្រះអង្គកុំទ្រង់ទុកព្រះទ័យ គប្បីតែនឹងលើកទាហានទៅកម្ចាត់ចេញឲ្យឆាប់រហ័ស ទាន់កម្លាំងនៅតិច កុំឲ្យក្រឡ្ហះរត់រួចបាន។

ព្រះចៅ**ចូយ៉យ**ទ្រង់ព្រះសណ្ដាប់ ក៏យល់ត្រូវ ទើបត្រូវឲ្យរៀបចាត់ទាហានលើកចេញទៅ។ **ចូជិន**ទូលថា កាលព្រះបិតាព្រះអង្គទៀបនឹងទ្រង់អស់ព្រះជន្ម ក៏បានផ្ញើរាជការឲ្យទូលបង្គំ និង**សុម៉ាអ៊ី**ជួយទំនុកបម្រុង **សុម៉ាអ៊ី**ក៏គង់មិនប្រែចិត្តគិតក្បត់នឹងព្រះអង្គទេ ដែលមានគេមកសរសេរឆ្នោតបិទទុកយ៉ាងនេះ ទូលព្រះបង្គំជាខ្ញុំឃើញថា ប្រហែលជាកលឧបាយរបស់**ខុងបេង**ពិត ឬពុំនោះក៏ជាគំនិត**ស៊ុនគួន**ក្លែងធ្វើដោយអំពើឥច្ឆា ប្រាថ្នានឹងឲ្យចៅហ្វាយ និងបាវមានមន្ទិលពិភាល់ចិត្តនឹងគ្នា ដែលព្រះអង្គទ្រង់នឹងលើកពលយោធាទៅកម្ចាត់តែម្ដង ពុំទំនងទេ គួរទ្រង់គ្នេរឲ្យល្អិតល្អន់សិនចុះ។

ព្រះចៅ**ចូយ៉យ**ត្រាស់ថា ដែលអ្នកឃាត់ហាមយើងមិនឲ្យលើកទ័ពទៅចាប់**សុម៉ាអ៊ី**នោះ បើប្រសិនណាជា**សុម៉ាអ៊ី**ប្រែចិត្តជាក្បត់ប្រាកដស្មោះចំពោះមានកម្លាំងខ្លាំងច្រើន តើអ្នកនឹងរិះគិតយ៉ាងម្ដេចទៅទៀត? **ចូជិន**ទូលថា ព្រះអង្គទ្រង់ព្រះតម្រិះដូច្នោះក៏គួរហើយ ប៉ុន្តែ បើយើងលើកទ័ពទៅគ្រានេះតែម្ដង ចុះបើ**សុម៉ាអ៊ី**ដឹងខ្លួនជាមុន យើងនឹងមិនធ្វើការដោយលំបាកទេឬ? បើដូច្នេះ សូមព្រះអង្គទ្រង់ប្រើកលឧបាយឲ្យដំណឹងទៅថា ទ្រង់នឹងទៅរៀបចំស្រុកទេសឲ្យរៀបរយឲ្យ**សុម៉ាអ៊ី** ៗ ក៏នឹងសម្គាល់ថាពិតត្រង់ គង់តែនឹងចេញមកទទួលដល់ក្រៅស្រុក សឹមយើងគ្រលុកចាប់ខ្លួននឹងបានដោយងាយ។

ព្រះចៅ**ចូយ៉យ**យល់ត្រូវ ទើបត្រាស់បង្គាប់ឲ្យ**ចូជិន**កេណ្ឌពលបានដប់ម៉ឺនតាំងក្បួនហែស្ដេចចេញចាកស្រុកហ៊ូតោ

ថានឹងទៅរៀបចំស្រុកសេលៀងឲ្យ**សុម៉ាអ៊ី** ឯ**សុម៉ាអ៊ី**ដឹងថា ព្រះចៅ**ចូយ៉យ**ស្ដេចទៅដល់ដែនស្រុកសេលៀង ក៏មានសេចក្ដីត្រេកអរណាស់ នាំទាហានប្រាំម៉ឺនចេញមកទទួលស្ដេច អស់នាហ្មឺនទាំងពួងក៏ក្រាបទូលព្រះចៅ**ចូយ៉យ**ថា ឃើញថា**សុម៉ាអ៊ី**ចេញអាការជាក្បត់មែនពិតហើយ បានជាលើកទាហានចេញមកច្រើនដូច្នេះ។ ព្រះចៅ**ចូយ៉យ**ទ្រង់ព្រះសណ្ដាប់ ក៏រឹតតែឆ្ងល់ក្នុងព្រះទ័យណាស់ ទើបឲ្យ**ចូហ៊ីវ**លើកទាហានជាកងមុខចេញទៅមុន។

ឯ**សុម៉ាអ៊ី**ឃើញ**ចូហ៊ីវ**លើកទ័ពមក សម្គាល់ថាព្រះចៅ**ចូយ៉យ**ស្ដេចលើកមក ក៏តម្រង់ចូលទៅប្រាថ្នានឹងទទួលស្ដេច **ចូហ៊ីវ**ក៏ស្រែកទៅឲ្យ**សុម៉ាអ៊ី**ថា អ្នកឯងជានាហ្មឺនមានឈ្មោះថាជាអ្នកទៀងត្រង់នឹងរាជការមកពីដើម ព្រះចៅ**ចូភី**បានផ្ញើរាជការផែនដីឲ្យអ្នកជួយទំនុកបម្រុង ឥឡូវហេតុម្ដេចបានជាអ្នកឯងមកប្រែចិត្តគិតក្បត់នឹងព្រះចៅ**ចូយ៉យ**ដូច្នេះ? **សុម៉ាអ៊ី**បានឮដូច្នោះ ក៏ធ្លាក់ចិត្តគិតភ័យស្លាំងកាំងរឹងអស់ទាំងខ្លួន មានវាចាឆ្លើយថា ខ្ញុំតាំងចិត្តធ្វើរាជការថ្វាយឆ្លងព្រះតេជព្រះគុណព្រះករុណាជាម្ចាស់ដោយសុចរិត ហេតុម្ដេចបានជាអ្នកមកថាដូច្នេះ? **ចូហ៊ីវ**ក៏ពណ៌នារាយរឿងតាមសំបុត្រឆ្នោតដែលបិទនៅគ្រប់ទ្វារស្រុក ហើយមានអ្នករក្សាទ្វារនាំទៅថ្វាយព្រះចៅ**ចូយ៉យ**ឲ្យស្ដាប់សព្វប្រការ។

**សុម៉ាអ៊ី**ឆ្លើយថា បើដូច្នោះ ខ្ញុំសុំចូលទៅក្រាបបង្គំគាល់ព្រះចៅ**ចូយ៉យ**ឲ្យបានច្បាស់សេចក្ដីសិន **សុម៉ាអ៊ី**ក៏ឲ្យពួកទាហានដែលទៅជាមួយនោះថយទៅនៅពីចម្ងាយ ហើយខ្លួនក៏ចុះពីលើសេះ ដើរចូលទៅដល់មុខរថព្រះទីនាំងព្រះចៅ**ចូយ៉យ**។ **សុម៉ាអ៊ី**ក្រាបថ្វាយបង្គំ ហើយយំទូលថា កាលព្រះបិតាព្រះអង្គគង់ព្រះជន្មនៅ ក៏ឃើញថាទូលព្រះបង្គំជាខ្ញុំជាមនុស្សត្រឹមត្រូវសុចរិត បានជាទ្រង់ផ្ញើកិច្ចរាជការផែនដី ឲ្យទូលព្រះបង្គំជាខ្ញុំជួយឧបត្ថម្ភដល់មកព្រះអង្គ ឲ្យគង់ក្នុងរាជសម្បត្តិជាសុខក្សេមក្សាន្ត ទូលព្រះបង្គំជាខ្ញុំ ក៏មិនបានគិតជាទុច្ចរិតនឹងព្រះអង្គសោះ មានតែសេចក្ដីត្រង់ស្មោះរហូតមកដល់ថ្ងៃនេះ ដែលបង្កើតហេតុដូច្នេះ គឺជាកលឧបាយ**ខុងបេង** និង**ស៊ុនគួន** មកគុំគួនធ្វើឲ្យព្រះអង្គទ្រង់ស្អប់ទូលព្រះបង្គំជាខ្ញុំពិត បើដូច្នេះទូលព្រះបង្គំជាខ្ញុំសុំយកអាយុជីវិតទៅប្ដូរយកស្រុកសែឈ្នួននិងស្រុកកាំងតាំង មក

ថ្វាយព្រះអង្គឲ្យបាន ទើបព្រះអង្គនឹងទ្រង់រាប់អានថា ទូលព្រះបង្គំជាខ្ញុំ ជាខ្ញុំក្រោមព្រះបាទមែន។

**ហ្សហ៊ីម**បានស្តាប់ហើយឆ្លើយទូលទាស់ថា ដែល**សុម៉ាអ៊ី**សុំយកអាសាដូច្នេះ ប្រយោជន៍នឹងតាំងខ្លួនឲ្យមាំមួនធំឡើងទៀត សុំកុំឲ្យព្រះអង្គឆ្ងៀតទុកព្រះទ័យឲ្យសោះ គួរតែទ្រង់នឹងទារយកគ្រឿងកិត្តិយសសម្រាប់ងារ ហើយដកហូតត្រាពី**សុម៉ាអ៊ី**ឲ្យចេញពីទីមន្ត្រីទើបត្រូវ។ ព្រះចៅ**ចូយ៉យ**ក៏យល់ឃើញត្រូវផង ទើបឲ្យដកហូតងារ**សុម៉ាអ៊ី**ចេញជារាស្ត្រធម្មតា ហើយឲ្យវិលទៅធ្វើស្រែចម្ការឯទីលំនៅដើម រួចតាំងឲ្យ**ចូហ៊ីវ**ទៅហៅឈរក្សាស្រុកសេលៀង ព្រះចៅ**ចូយ៉យ**ក៏លើកទ័ពត្រឡប់ទៅស្រុកហ៊ូតោវិញ។

ឯ**ខុងបេង** លុះដឹងថា **សុម៉ាអ៊ី**ត្រូវហូតងារចេញចាកតំណែងដូច្នោះ ក៏មានអំណរណាស់ ទើបនិយាយថា ឥឡូវព្រះចៅ**ចូយ៉យ**ចាញ់កលយើងហើយ យើងត្រូវទៅវាយយកស្រុកឡុកអៀងឲ្យបាន។ លុះពេលព្រឹក នាហ្មឺនមុខមន្ត្រីចូលគាល់គ្រប់គ្នា **ខុងបេង**ក៏តែងរឿងរ៉ាវថ្វាយព្រះចៅ**ឡៅសៀន** សេចក្តីថា ទូលព្រះបង្គំជាខ្ញុំ **ខុងបេង** សូមក្រាបបង្គំទូលសូមទ្រង់ជ្រាប ព្រោះព្រះចៅ**ឡៅពី**បានធ្វើសង្គ្រាមប្រាបប្រាមផែនដី នៅមិនទាន់រាបទាបសោះ អាណាខេត្តទាំងអស់ក្នុងប្រទេស ចិត្តត្រឡប់ទៅជាបីកុក ព្រះអង្គក៏ទ្រង់ព្រះវិតក្កទាល់តែក្លាយជារោគទ្រង់សុវណ្ណគតទៅ ឥឡូវស្រុកសៃឈួនជាស្រុកតូចពេក នឹងតាំងជាស្រុកឯក រាជធានីពុំបាន សូមព្រះអង្គទ្រង់ព្រះតម្រិះដោយស្មោះស្មាន កុំមានតូចព្រះទ័យអ្វីឡើយ គ្រានេះហើយមាននាហ្មឺនមុខមន្ត្រីច្រើនណាស់សុទ្ធតែជាអ្នកឆ្លៀវឆ្លាត មានតម្រិះប្រាជ្ញា ទាំងទាហានសេនាក៏មានថ្វីដៃខ្លាំងពូកែ ព្រមលួមនឹងធ្វើការយកអាសាថ្វាយព្រះតេជព្រះគុណបានទាំងអស់ ដូចមានឈ្មោះខាងក្រោមនេះគឺ **គុយហ៊ីវជី១, ប៊ីហ៊ុយ១, ត័នអ៊ុន១** បីនាក់នេះជានាយទាហានឯកមានថ្វីដៃខ្លាំងពូកែស្ទាត់ក្នុងការសង្គ្រាមធ្លាប់បានតាមធ្វើសឹកមានជ័យជម្នះរាល់ដង ឈ្មោះទាំងនេះ ព្រះចៅ**ឡៅពី**ក៏ទ្រង់ទុកព្រះទ័យរាប់អានមកពីដើម គួរព្រះអង្គនឹងទ្រង់ប្រឹក្សាពិគ្រោះដោយកិច្ចរាជការទាំងពួងផងចុះ ឯខ្លួនទូលព្រះបង្គំនេះ ក៏ជាមនុស្សទាល់គំនិតទេ កាលពីដើមនៅក្នុង

ស្រុកឡាំអៀង ព្រះចៅ**ឡៅពី**មានព្រះទ័យឧស្សាហ៍ស្ដេចយាត្រាទៅរកដល់បីដង ទទួលយកទូលព្រះបង្គំជាខ្ញុំមកជួយធ្វើរាជការ ទោះបីលើសលស់ខុសត្រូវយ៉ាងណា ក៏ទ្រង់ព្រះមហាករុណាមិនប្រកាន់ទោសឡើយ។ គ្រានេះទូលព្រះបង្គំជាខ្ញុំ គិតព្រះតេជព្រះគុណណាស់ហើយ បានជាស៊ូប្ដូរជីវិតក្រោមព្រះបាទ ព្រះអង្គក៏ទ្រង់សង្វាតផ្ដាំទុកថា ឲ្យទូលព្រះបង្គំជាខ្ញុំខំជួយឧបត្ថម្ភទំនុកបម្រុងផែនដីឲ្យបានសេចក្ដីសុខតទៅ ឥឡូវទូលព្រះបង្គំជាខ្ញុំសុំអាសាលើកទ័ពទៅវាយយកស្រុកឡុកអៀងមកថ្វាយ សូមអញ្ជើញព្រះអង្គគង់នៅឲ្យសប្បាយក្នុងរាជសម្បត្តិចុះ ទោះព្រះអង្គនឹងមានកិច្ចរាជការជាធុរៈ ដោយហេតុអ្វីៗទៅថ្ងៃក្រោយ ក៏សូមឲ្យប្រឹក្សាពិគ្រោះនឹងអស់នាហ្មឺនដែលមានសតិបញ្ញា សូមព្រះអង្គទ្រង់ឲ្យដូចយឿងយ៉ាងនៃព្រះចៅ**ឡៅពី** ជាព្រះវរបិតាចុះ។

ព្រះចៅ**ឡៅសៀន**បានទ្រង់ព្រះសណ្ដាប់សុភអក្សរ ក៏ត្រាស់ប្រាវព្វនឹង **ខុងបេង**ថា លោកទៅធ្វើសឹកនឹង**បេងហេក** ទើបតែនឹងវិលត្រឡប់មកមិនទាន់បាត់ហត់នឿយ គួរហើយតែនឹងឈប់សម្រាកយកកម្លាំងពលទាហានឲ្យបានបរិបូរសិនចុះ។ **ខុងបេង**ទូលថា ឯស្រុកឡុកអៀងនោះ ទូលព្រះបង្គំជាខ្ញុំគិតនឹងលើកទ័ពទៅវាយយូរហើយ តែឃើញថា**បេងហេក**ជាសឹកសត្រូវនៅពីម្ខាង ក្រែងជាទ័ពវាយខ្ទប់ពីក្រោយ បានជាទៅធ្វើឲ្យ**បេងហេក**បរាជ័យ។ ឥឡូវ**បេងហេក**ក៏អស់ដៃទទួលចំណុះចុះចាញ់ហើយ ត្រូវតែយើងទៅវាយយកស្រុកហ៊ូតោឲ្យបានទៀត។

**ចៅជីវ**ជានាហ្មឺនធំបានឮដូច្នោះ ក៏និយាយនឹង**ខុងបេង**ថា កាលពីយប់មិញខ្ញុំបាទបានពិគ្រោះមើលឫក្សលើអាកាស ឃើញផ្កាយប្រចាំស្រុកខាងជើងមានរស្មីរុងរឿងនៅឡើយ មហាឧបរាជក៏មានប្រាជ្ញាស្រាប់ហើយ អាចនឹងជ្រាបសព្វកិច្ចការទាំងពួង ដែលនឹងលើករំលងទៅវាយស្រុកហ៊ូតោនោះ ក្រែងមិនសម្រេច បានបំណាច់តែមាននឿយព្រួយការទទេ ទេដឹង?

**ខុងបេង**ថា ដែលនឹងប្រកាន់យកឫក្សលើអាកាសជាប្រមាណនោះ មិនបានទេ ត្រូវតែពិគ្រោះយកកិច្ចការក្នុងស្រុកទេសជាប្រមាណវិញ ទើបត្រូវពិត ទោះបីជាផ្កាយប្រចាំស្រុកនឹងវិបរិតយ៉ាងណា បើមិនមានខ្មាំងសត្រូវមកបៀតបៀនទេ ស្រុក

នោះក៏នៅបានជាប្រក្រតី ឥឡូវយើងនឹងលើកទ័ពទៅតាំងនៅស្រុកហាន់តុងស្តាប់ដំណឹងជាថ្មី តើនឹងជាម្តេច បើឃើញថាឡុកអៀងមានកិច្ចជាចន្លោះ គួរនឹងធ្វើការបាន យើងក៏ត្រូវលើកពលទាហានទៅវាយតែម្តង។

**ចៅជីវ**ចេះតែហាមឃាត់**ខុងបេង**ជាច្រើនសា **ខុងបេង**មិនព្រមស្តាប់ ទើបបង្គាប់ឲ្យ**គុយហ៊ុវជី, ប៊ឺហ៊ុយ, ត័នអ៊ុន, ហៀងធុង, ត័នជីន, ចៀវអ៊ួន, តៀវហ៊ី, តៅខេង, តោប៊ឺ, ហៀវហង, បេកកង, ឡៃប៊ិន, អ៊ិនបេត, លីចួន, ហ៊ុយស៊ី, ចៅជីវ** នូវអស់នាហ្មឺនធំៗចំនួនមួយរយប្លាយ ជានាយត្រួតលើកទាហានទៅរក្សាស្រុកសៃឈួន ហើយ**ខុងបេង**ក៏ថ្វាយបង្គំលាមកកាន់ទីលំនៅវិញ រួចចាត់ចែងនាយទាហានសាមសិបបីនាក់គឺ **អ៊ុយអៀន, តៀវអិត, អងប៉េង, ម៉ាតាយ, ម៉ាតង, ទៀវងី, ឡៅតាំ, តៀវប៉ោ, គួនហ៊ិន**...។ល។ នឹងលើកទៅវាយស្រុកហ៊ូតោ ហើយឲ្យ**លីងៀម**ទៅនៅរក្សាបន្ទាយមុខគយស្រុកកាំងតាំង។

ខណៈកាល**ខុងបេង**ចាត់រៀបទ័ពនឹងលើកទៅនោះ ជាទេសកាលខែពិសាខព្រះចៅ**ឡៅសៀន**សោយរាជសម្បត្តិបានប្រាំឆ្នាំ (ព.ស ៧៧០)។ ឯ**ជូឡុង**ដឹងថា**ខុងបេង**នឹងលើកទ័ពទៅវាយស្រុកហ៊ូតោដូច្នោះ ក៏ចូលទៅគំនាប់**ខុងបេង** ហើយជម្រាបថា ខ្លួនខ្ញុំបាទនេះចាស់តែត្រឹមអាយុ និងសតិបញ្ញា ឯកម្លាំងពលាការ និងថ្វីដៃដែលច្បាំង នៅខ្លាំងពូកែនៅឡើយ។

**ខុងបេង**ឮហើយឆ្លើយថា យើងបានទៅប្រាប់ប្រាម**បេងហោក**ម្តងនេះ**ម៉ាឈៀវ**ស្លាប់ យើងគិតស្តាយណាស់ ដូចជាបាក់ដៃម្ខាងទៅ តែខ្លួនអ្នកមួយដែលជាមនុស្សចាស់មកពីដែនដីមុន គួរអ្នកខំអត់ធន់នៅធ្វើរាជការឯអាយឲ្យស្រួលសប្បាយខ្លួនចុះ បើអ្នកនឹងទៅខាងណោះ ក្រែងនឹងថ្លោះការក្នុងទីចម្បាំង នឹងបង់កេរ្តិ៍ឈ្មោះយសសក្តិរបស់អ្នកស្រុកសៃឈួនទេដឹង។

**ជូឡុង**ឆ្លើយថា ខ្ញុំបាទបានធ្វើសឹកមកតាំងពីកំឡោះ លុះដល់ចំណាស់ប៉ុណ្ណេះ ហើយមិនដែលថ្លោះដោយសត្រូវនឹងមើលងាយបានឡើយ កើតមកជាជាតិទាហានគ្មានស្តាយជីវិតសោះ ទោះបីនឹងស្លាប់ក្នុងទីចម្បាំង ក៏គង់មានកេរ្តិ៍ឈ្មោះទុកវែងឆ្ងាយ ឥឡូវខ្ញុំបាទសុំនាំទាហានពីអាយលើកទៅជាទ័ពមុនលោក ៗចូរទទួលឲ្យខ្ញុំ

បាទទៅផងចុះ។ **ខុងបេង**និយាយរាំងរាឃាត់ដល់បីដង **ជូឡុង**មិនព្រមឈប់ខាន ចេះតែសុំខ្លួនទៅឲ្យបាន **ខុងបេង**ថា បើអ្នកនឹងទៅក៏ទៅចុះ យើងនឹងឲ្យ**តេងជី**ទៅ ជាមួយឲ្យបានជាគ្នា បើមានការក្រងាយត្រូវនិយាយពិគ្រោះឲ្យដឹងការជ្រៅរាក់ ហើយ**ខុងបេង**ក៏ប្រគល់ទាហានឯកដប់នាក់ និងកូនទាហានប្រាំពាន់ឲ្យ**ជូឡុង** ៗក៏មានអំណរណាស់ សំពះលាចេញនាំពលទាហាននោះមិញស្រូតទៅជាទ័ពមុខ។

**ខុងបេង** ក៏ចូលទៅក្រាបថ្វាយបង្គំព្រះចៅ**ឡៅសៀន** ហើយលើកទាហានចេញអំពីព្រះរាជធានីទីក្រុងសែឈួន អស់បណ្ដានាហ្មឺនតូចធំក៏នាំគ្នាចេញទៅជូនដំណើរដល់ក្រៅក្រុងចម្ងាយហាសិបសិន (២ គ.ម) **ខុងបេង**ក៏ឲ្យទាហានលើកទង់ជ័យ ហែជាក្បួនទ័ពទៅដល់ស្រុកហាន់តុង។

ឯស្រុកគយល្បាតខាងស្រុកហ៊ូតោ បានដឹងការ ក៏នាំសារទៅក្រាបទូលព្រះចៅ**ចូយ៉យ**ឲ្យជ្រាបសេចក្ដីថា **ខុងបេង**លើកទាហានប្រមាណសាមសិបម៉ឺនទៅតាំងនៅស្រុកហាន់តុង ហើយឲ្យ**ជូឡុង**និង**តេងជីវ**ជានាយកងមុខ លើកឆ្លងស្រូតចូលមកក្នុងដែនស្រុកយើងហើយ។

ព្រះចៅ**ចូយ៉យ**បានជ្រាបដូច្នោះ ក៏ព្រួយព្រះទ័យណាស់ ត្រាស់ប្រឹក្សានឹងនាហ្មឺននូវនាយទាហានទាំងពួងថា សឹកគ្រានេះជាធំពន្លឹកណាស់ អស់អ្នកទាំងពួងនឹងយល់ឃើញដូចម្ដេច? គួរនឹងចាត់ប្រើនរណាឲ្យចេញទៅធ្វើការតស៊ូ ទល់នឹងទាហានស្រុកសែឈួនបាន? **ហែហ៊្វូលឹម**ជាកូន**ហែហ្វូទុន**បានស្ដាប់ព្រះតម្រាស់ ក៏នឹកខឹងណាស់នឹង**ហាងតុង**ដែលបានបញ្ឆោតសម្លាប់**ហែហ្វូអៀន**ជាមា ទើបខាំមាត់សង្កៀតធ្មេញ ហើយទូលថា មាទូលព្រះបង្គំជាខ្ញុំស្ដាប់ទៅ ក៏នៅមិនទាន់សងសឹកនឹងអាស្រុកសែឈួនសោះ ទូលព្រះបង្គំជាខ្ញុំសុំអាសាដោយស្មោះ ទៅនាំទាហានស្រុកសេលៀងដែលមានថ្វីដៃ លើកទៅវាយទ័ពសែឈួនឲ្យបានវិញ។ ឯ**ហែហ៊្វូលឹម**នោះជាមនុស្សមានសតិបញ្ញាតិច តែ**ចូយ៉យ**ទ្រង់មានចិត្តអាណិតស្រឡាញ់ណាស់ ព្រោះមានពូជជាអ្នកទៀងត្រង់នឹងចៅហ្វាយនាយ លុះតែ**ហែហ៊្វូលឹម**សុំទទួលអាសា **ចូយ៉យ**ក៏ទ្រង់ព្រះចិន្តាត្រេកអរណាស់ ត្រាស់ឲ្យកេណ្ឌទាហានស្រុកសេលៀងដែលមានថ្វីដៃម្ភៃម៉ឺន ឲ្យចេញទៅធ្វើសឹកនឹង**ខុងបេង**។ **អងឡុង**ទូលថា ដែលឲ្យ

**ហែហ៊្សូលឹម**ចេញទៅធ្វើជាមេទ័ពនោះ ទូលព្រះបង្គំជាខ្ញុំមិនទាន់យល់ឃើញផងសោះ ព្រោះ**ហែហ៊្សូលឹម**នោះជាមនុស្សមោហោច្រើន ហើយមិនធ្លាប់ធ្វើការសឹកឲ្យស្ពាញស្ពាត់ ឯ**ខុងបេង**ជាមនុស្សមានសតិបញ្ញាឆ្លៀវឆ្លាស បើនឹងសង្វាតធ្វើការអ្វី ក៏ប្រកបដោយកលឧបាយជាប្រមាណ តាមដោយស្មានឃើញថា **ហែហ៊្សូលឹម**នឹងស៊ូថ្វីដៃ**ខុងបេង**ពុំបានទេ។

**ហែហ៊្សូលឹម**ឮដូច្នោះខឹងណាស់ ស្រែកគំហកឲ្យ**អងឡុង**ថា ហេតុម្ដេចអ្នកឯងមកចរចាមើលងាយយើងដូច្នេះ? ដែលអ្នកឯងរាប់ថា **ខុងបេង**ចេះដឹងណាស់នោះ មែនហើយ តែថ្វីដៃច្បាំងមិនមែនខ្លាំងពូកែស្មើនឹងយើងទេ យើងចេញទៅតស៊ូយកជ័យជម្នះ**ខុងបេង**ឲ្យបាន បើមិនសមតាមពាក្យយើងប្រមាណថាដូច្នេះ យើងក៏មិនវិលវេះមកគាល់ឲ្យឃើញព្រះភក្ត្រព្រះករុណាតទៅឡើយ។ **ហែហ៊្សូលឹម**និយាយហើយ ក៏ថ្វាយបង្គំលាចេញទៅ លើកពលយោធាម្ភៃម៉ឺនទៅតាំងនៅស្រុកតៀងអ័ន។

ឯ**ខុងបេង**ក៏លើកទ័ពចេញពីស្រុកហាន់តុង ទៅដល់ស្រុកកៃអៀង ដែលជាទីបញ្ចុះសព**ម៉ាឈៀវ**។ **ខុងបេង** និង**ម៉ាតាយ**ក៏តែងគ្រឿងសែនទៅគំនាប់សពតាមទំនៀម ទទួលទាហានចូលមកជម្រាបថា ឥឡូវ**ចូយ៉យ**ឲ្យ**ហែហ៊្សូលឹម**នាំទាហានមកចាំទទួលកងទ័ពលោក នៅនាស្រុកតៀងអ័នច្រើនណាស់។ **អ៊ុយអៀន**បានឮដូច្នោះក៏និយាយនឹង**ខុងបេង**ថា **ហែហ៊្សូលឹម**មានថ្វីដៃខ្លាំងពូកែក៏មែនហើយ តែទន់ខ្ចីសេចក្ដីរិះគិត ព្រោះដ្បិតមិនធ្លាប់ធ្វើការធំ ខ្ញុំបាទសុំគិតកលឧបាយយកទាហានប្រាំពាន់លើកព័ទ្ធទៅតាំងនៅតំបន់ខនជួង ខាងទិសឯកើត ស្កាត់ផ្លូវស្រុកតៀងអ័ន គង់នឹងបានដោយងាយ។ **ហែហ៊្សូលឹម**លើសកម្លាំងនឹងចោលស្រុក រត់ទៅស្រុកឡុកអៀង យើងក៏ត្រូវលើកដេញតាមទៅ វាយយកស្រុកឡុកអៀងទៀត ក៏នឹងបានដោយងាយ។

**ខុងបេង**ឮហើយក៏អស់សំណើច ហើយថា គំនិតអ្នកឯងនឹងសម្ដែងអំណាចយកជ័យជម្នះតែម្ខាងធ្វើម្ដេចបាន! អ្នកកុំអាលស្មានមើលងាយទាហានស្រុកឡុកអៀងដូច្នោះ ដែលអ្នកនឹងលើកទាហានប្រាំពាន់ប៉ុណ្ណោះទៅបោះស្ទាក់កណ្ដាលផ្លូវ ក្រែងទាហានស្រុកឡុកអៀងដឹងទៅ នឹងលើកមកវាយខ្ទប់ពីក្រោយ អ្នកឯងនឹង

មិនភ្លួយស្លាប់ក្នុងកណ្តាប់ដៃសត្រូវទេឬ? យើងធ្វើការធំយ៉ាងនេះ ហើយមករិះរក ឫក្សជោគ ដោយមកធ្វើការឲ្យថ្លោះនឹងសត្រូវដូច្នេះ មិនបានទេ។ **អ៊ុយអៀន**ថា បើមហាឧបរាជមិនយល់ដូចគំនិតខ្ញុំបាទ ថានឹងលើកទាហានវាយសង្គ្រញពីមុខចូលទៅទេ **ហែហ្វ៊ូលីម**ក៏នឹងលើកចេញទល់ដោយពេញកម្លាំង ទោះយើងនឹងច្បាំងវាយបានស្រុកឡុកអៀង ក៏គង់យូរការ អស់ពលយោធា ក៏នឹងបានសេចក្តីលំបាកណាស់។ **ខុងបេង**ថា ខនោះអ្នកកុំព្រួយបារម្ភ ខ្ញុំនឹងលើកទាហានសម្រុកបំពារចូលទៅយកជ័យជម្នះឲ្យបាន។ **អ៊ុយអៀន**ក៏ទាល់គំនិត នៅស្ងៀមពុំប៉ានតបតទៅទៀត។ **ខុងបេង**ក៏លើកទាហានទៅប្រាប់**ជូឡុង**ឲ្យបង្ហំស្រូតចូលទៅវាយស្រុកតៀងអ័ន។

ឯ**ហែហ្វ៊ូលីម**តាំងទ័ពនៅក្នុងស្រុកនោះ លុះដឹងថា**ជូឡុង**លើកទ័ពជិតចូលមកដល់ភ្នំហាងបេងសាន់ ក៏ចាត់ទាហានប្រាំពាន់ចូលតនឹង**ជូឡុង**។ **ហ័នតេក** (នាយទាហានក្នុងស្រុកសេលៀង) និងកូនបួននាក់ឈ្មោះ **ហ័នអេង, ហ័នអៀវ, ហ័នខេង, ហ័នគី** ក៏និយាយនឹង**ហែហ្វ៊ូលីម**ថា ខ្ញុំបាទនិងកូនបួននាក់សុំយកអាសានាំពលយោធាប្រាំបីម៉ឺនជាទ័ពមុខ ចេញតតាំងនឹង**ជូឡុង**។ **ហែហ្វ៊ូលីម**ឮដូច្នោះក៏គិតឃើញថា **ហ័នតេក**មានកម្លាំងក្លាហាន ក៏មានអំណរណាស់ ឲ្យបំណាច់រង្វាន់ជាច្រើន ហើយក៏ចាត់ទាហានប្រាំបីម៉ឺនឲ្យ**ហ័នតេក** ៗក៏តែងតួឡើងជិះសេះកាន់ពូថៅធំដងវែង នាំបុត្រលើកទ័ពចេញអំពីកំពែងស្រុកទៅភ្នំហាងបេងសាន់ ទទួលទ័ព**ជូឡុង**លើកចេញមក។ **ហ័នតេក**និងកូនបួននាក់ ក៏បំផាយសេះវាំពូថៅចេញមុខទាហាន ហើយស្រែកជេរ**ជូឡុង**ថា អាចោរពួក្សត់ផែនដី ហេតុអ្វីឯងមិនស្រឡាញ់អាយុជីវិតសោះ អាចប៉ានពានលើគ្រោះចូលមកក្នុងដែនអញ?

**ជូឡុង**បានឮដូច្នោះខឹងណាស់ បំផាយសេះវាំលំពែងចូលច្បាំងនឹង**ហ័នតេក**។ **ហ័នអេង**ឃើញដូច្នោះ ក៏បង្រុះចូលទៅតនឹង**ជូឡុង**ជួសបិតាបានបីភ្លែង **ជូឡុង**ក៏ចាក់នឹងលំពែងត្រូវ**ហ័នអេង**ធ្លាក់ពីលើសេះស្លាប់។ **ហ័នអៀវ**ឃើញបងស្លាប់ ខឹងណាស់ បំផាយសេះវាំដាវចូលតនឹង**ជូឡុង**យ៉ាងអង់អាច **ហ័នខេង**ឃើញបងកម្លាំងតិច ខ្លាចថ្លោះការនឹង**ជូឡុង** ក៏ស្ទុះស្ទង់ទៅហៅ**ហ័នគី**ជាប្អូនចូលទៅជួយព្រួតគ្នាជាបីមុំ **ជូឡុង**ក៏មិនញញើតកោតខ្លាច លើកលំពែងសស្វាចចាក់ត្រូវ**ហ័នគី**ធ្លាក់ពី

លើសេះ ទាហានស្ទុះទៅជួយប្រឡេះគ្រាហ៍យកខ្លួន**ហ័នគី**ចូលទៅក្នុងស្រុកបាន។ **ជូឡុង**ក៏ដេញទន្ទ្រានតាមទៅ **ហ័នខេង**យកធ្នូបាញ់សំដៅ**ជូឡុង**បានបីព្រួញ **ជូឡុង**ក៏យកញញួរលំពែងគ្រវែងទាត់ភ្លាត់ធ្លាក់ទៅវិញបាន **ហ័នខេង**ខឹងពន់ប្រមាណ បំផាយសេះចូលទៅកាប់**ជូឡុង** ៗក៏លើកធ្នូបាញ់ទៅត្រូវកំផ្លៀង**ហ័នខេង**ធ្លាក់ពីលើសេះស្លាប់។ **ហ័នអៀវ**បំបាយសេះប្រញាប់ចូលទៅត្រង់លើកដាវតម្រង់នឹងកាប់ **ជូឡុង**គេចក្រឡាប់ឆក់យកដាវ ការវួបជាប់ទាំងខ្លួន**ហ័នអៀវ** ទាហានស្ទុះខ្សៀវទៅជួយចងបាន **ជូឡុង**ក៏បរបំពានចូលទៅក្នុងកងទ័ព**ហ័នតេក** ៗក៏ភ័យតក្កមា បំផាយសេះចូលទៅបន្ធំក្នុងពួកទាហានហើយថា **ជូឡុង**នេះ ឮតែគេនិយាយថាមានថ្វីដៃខ្លាំងពូកែណាស់ លុះមកជួបប្រទះក៏ឃើញមែនគ្រប់ប្រការ **ហ័នតេក**នឹករអាខ្លាច ក៏លើកទាហានត្រឡប់ចូលទៅក្នុងស្រុកវិញ។ **ជូឡុង**ក៏បំផាយសេះតាមដេញទៅតែឯង **តេងជី**នឹកបារម្ភភ័យ ក៏បំផាយសេះតាមទៅទាំងពីរនាក់ ក៏កាប់ត្រូវទាហាន**ហ័នតេក**ស្លាប់ច្រើនណាស់ **ហ័នតេក**ឃើញ**ជូឡុង**ដេញជិតនឹងប៉ះមកដល់ខ្លួន ក៏ភ័យរលះរលាំងស្ទុះលោតចុះពីលើសេះដោះអាវក្រោះបោះចោលទៅ ហើយខំសំដៅរត់ចូលទ្វារបាន ទាហានក៏ច្រានបិទជាប់ទៅវិញ ឯ**ជូឡុង** និង**តេងជី**នោះមិញ ក៏នាំទាហានត្រឡប់ទៅបន្ទាយឯភ្នំហាងបេងសាន់។ **តេងជី**ក៏និយាយនឹង**ជូឡុង**ថា មិនបង់ម្សៀតដែលលោកជាជាតិទាហាន មានអាយុដល់៧០ឆ្នាំហើយនៅខ្លាំងពូកែ នឹងរកអ្នកណាស្មើគ្មាន។ **ជូឡុង**ឆ្លើយថ្កានថា មហាឧបរាជអាចមើលងាយយើងថាចាស់ជរា បានជាមិនចង់ឲ្យមកធ្វើការ ក្រែងយើងជរាគ្មានកម្លាំងនឹងច្បាំងពុំបានជ័យជម្នះ បើធ្លោយធ្លោះនឹងបានសេចក្ដីអាប់យសខ្មាសសត្រូវ ឯខ្លួនយើងគិតថាចាស់តែអាយុប៉ុណ្ណោះ ឯកម្លាំង និងថ្វីដៃនោះ បើឲ្យតស៊ូនឹងក្មេងកំឡោះ ដែលមានវិជ្ជាខ្លាំងពូកែយ៉ាងណា យើងក៏ឥតញញើតខ្លាចសោះឡើយ និយាយហើយ**ជូឡុង**ក៏តែងសេចក្ដីសំបុត្រមួយច្បាប់ ឲ្យបម្រើចងនាំខ្លួន**ហ័នអៀវ**ទៅជូន**ខុងបេង**។

ឯ**ហ័នតេក**នោះ លុះចូលទៅដល់**ហែហ៊្វលឹម** ក៏យំជម្រាបសេចក្ដីឲ្យស្ដាប់គ្រប់ប្រការ **ហែហ៊្វលឹម**បានស្ដាប់សព្វគ្រប់ ក៏ខឹងណាស់ លើកទាហានចេញចាក

ស្រុកទៅដល់ភ្នំហាងហេងសាន់ ក៏ឲ្យបោះទ័ពបញ្ឈប់តាំងបន្ទាយ **ជូឡុង**ដឹងការក៏ជិះសេះកាន់លំពែងចេញមកជាមួយនឹងទាហានមួយពាន់នាក់ នៅមុខបន្ទាយ។

**ហែហ៊្វលឹម** តែងតួពាក់ពួកមាស កាន់ដាវវែងចេញមកបញ្ឈរសេះនៅមុខទាហាន លុះ**ជូឡុង**លើកមកដល់ **ហែហ៊្វលឹម**ក៏បរសេះចូលប្រយុទ្ធគ្នា **ហ័នតេក**ថា **ជូឡុង**សម្លាប់កូនខ្ញុំបាទអស់ ខ្ញុំបាទសុំចេញទៅសងសឹកជាមុនសិន **ហ័នតេក**ក៏បំផាយសេះច្បាំងនឹង**ជូឡុង**បានបីភ្លែង **ជូឡុង**លើកលំពែងចាក់ត្រូវ**ហ័នតេក** ធ្លាក់ពីលើសេះស្លាប់ **ហែហ៊្វលឹម**ក៏ថយទ័ពត្រឡប់ទៅ បន្ទាយចម្ងាយពីទីនោះប៉ែតសិបសិន (៣២០០ម) **ជូឡុង** និង**តេងជី** ក៏នាំទាហានដេញតាមទៅសម្លាប់ទាហាន**ហែហ៊្វលឹម**ស្លាប់ច្រើនណាស់។

**ហែហ៊្វលឹម**នោះ លុះតាំងបន្ទាយមួយមាំមួនហើយ ក៏ប្រឹក្សានឹងទាហានទាំងពួងថា **ជូឡុង**នោះ យើងគ្រាន់តែឮល្បីដោយសារគេនិយាយយូរមកហើយ មិនដែលបានដឹងស្គាល់យល់ប្រទះ ឥឡូវទើបឃើញមុខច្បាស់ជាមានថ្វីដៃខ្លាំងពូកែមែននឹងរកនរណាតស៊ូក៏មិនបាន យើងនឹងរិះអានយ៉ាងម្ដេច ទើបនឹងយកជ័យជម្នះបាន? **ទៀប៊ូ**ជាកូន**ទៀយ៉ុក**ឆ្លើយថា **ជូឡុង**ល្អតែថ្វីដៃទេ ឯគំនិតគិតគូរមិនចេះ ពេលព្រឹកនេះ សុំឲ្យលោកចាត់ទាហានចេញទៅបង្កប់ទុកនៅសងខាងផ្លូវ រួចសឹមលើកទ័ពធំចេញទៅច្បាំងនឹង**ជូឡុង** ហើយធ្វើជាចាញ់រត់បញ្ឆោតឲ្យដេញរួចយើងនឹងបញ្ចេញទាហានឲ្យចោមព័ទ្ធចាប់ខ្លួន**ជូឡុង**ឲ្យបាន។

**ហែហ៊្វលឹម**យល់ឃើញត្រូវ ទើបប្រើ**តាំងហ៊ីវ** និង**ជីចេក**ឲ្យនាំទាហានម្នាក់បីម៉ឺនលើកទៅបង្កប់នៅសងខាងផ្លូវ លុះវេលាព្រឹក **ហែហ៊្វលឹម**ក៏ឲ្យទាហានវាយឃ្មោះស្រែកហ៊ោលើកចេញទៅតម្រង់បន្ទាយ**ជូឡុង** ៗនិង**តេងជី**ឃើញដូច្នោះ ក៏ឡើងសេះលើកទាហានចេញពីបន្ទាយ **តេងជី**ឃើញទាហាន**ហែហ៊្វលឹម**ធ្វើអាការអង់អាច ក៏គិតសង្ស័យ ទើបស្រដីសួរទៅ**ជូឡុង**ថា កាលពីម្សិលមិញ ទាហាន**ហែហ៊្វលឹម**ចាញ់ប្រៀបរបស់យើងស្លាប់ជាច្រើនណាស់ ហេតុម្ដេចថ្ងៃនេះក៏នៅមិនខ្លាចរអាថ្វីដៃ នៅលើកទាហានជាច្រើនក្រៃមកច្បាំងនឹងយើងទៀត? ឬ**ហែហ៊្វលឹម**មានស្នៀតនឹងប្រើឧបាយបញ្ឆោតយើងទេដឹង? សុំឲ្យលោករំពឹងគិត ពិនិត្យមើល

ឲ្យយល់ការសិន។ **ជូឡុង**ថា **ហែហ៊្វលឹម**នៅក្មេងសេចក្ដី ខ្ចីតម្រិះប្រាជ្ញាណាស់ ទឹកដោះនៅមាត់មិនទាន់មាត់ក្លិននៅឡើយផង កាលណាហើយវានឹងចេះគិតធ្វើកលឧបាយ ដូចសេចក្ដីរបស់អ្នកថានោះទេ វេលាថ្ងៃនេះ យើងនឹងយកជ័យជម្នះឲ្យបាន ហើយយើងត្រូវរិះគិតអានព័ទ្ធចាប់**ហែហ៊្វលឹម**ជាមុន។ និយាយហើយ **ជូឡុង**ក៏បរសេះចូលច្បាំងនឹង**ហែហ៊្វលឹម**។ **ឡូស៊ុយ**ក្រឡេកឃើញ ក៏បរសេះចូលតស៊ូនឹង**ជូឡុង**បានបីភ្លែង **ឡូស៊ុយ**ធ្វើជាចាញ់បរសេះរត់ **ជូឡុង**និង**តេងជី**ក៏ញាក់សេះដេញតាមទៅ នាយទាហានឯក**ហែហ៊្វលឹម**ប្រាំបីនាក់ឃើញដូច្នោះ ក៏បណ្ដោយឲ្យ**ហែហ៊្វលឹម**រត់ទៅមុន ហើយក៏នាំគ្នាព័ទ្ធចោមរោម**ជូឡុង** និង**តេងជី**ឲ្យនៅជាកណ្ដាល រួចទើបនាយទាហានទាំងប្រាំបីនាក់ ក៏ញាក់សេះរត់ទៅទៀត។ **ជូឡុង** និង**តេងជី** ក៏បំផាយសេះដេញប្រចៀតហួសចូលទៅ ទទួលឮសំឡេងទាហានវាយឃ្មោះក្នុងព្រៃជ្រៅលាន់ទាំងបួនទិស **តេងជី**ភ័យណាស់ប្រញាប់ញាក់សេះនឹងរត់ **ជីចេក**ស្ទុះដេញទាហានព័ទ្ធពីម្ខាងខាងស្ដាំដៃ **តាំងហ៊ី**ស្ទុះដេញទាហានពីព្រៃនៅខាងឆ្វេង ព័ទ្ធ**ជូឡុង**និង**តេងជី**នៅជាកណ្ដាល ហើយវាយគ្នាចូលទៅនៅជើងភ្នំខាងទិសឧត្ដរ **ជូឡុង**ឃើញសត្រូវស្ទុះស្រព័ទ្ធជុំវិញ ក៏ដេញតាមឆ្លាមិនរាថយ មើលទៅខាងក្រោយទិសឯជើងស្ដើងទាហានជាងគេ **ជូឡុង**ក៏បរសេះពារត្រង់ទៅនឹងរកផ្លូវរត់ចេញ ឯពួកទាហានដេញចោមរោមតាមទៅព័ទ្ធជិតចង្កេះភ្នំ **ហែហ៊្វលឹម**នាំទាហានទៅពួនខាងលើកំពូល ដេញទាហានខ្មៅខ្ចូលឲ្យប្រមៀលទម្លាក់ដុំថ្មចុះមក ដូចគេបាចសាច **ជូឡុង**ក៏នៅអង់អាច ដេញតាមសម្លាប់ទាហាន**ហែហ៊្វលឹម** តាំងពីព្រលឹមទល់ព្រលប់មិនឈប់សោះ ក៏នៅរកច្រកគេចដោះចេញទៅមិនរួច **ជូឡុង**ហាបហត់ដូចជានឹងរលេះដៃជើង ក៏លោតចុះពីលើសេះវេះចូលទៅអង្គុយអែបនឹងពើងសិលា ឯ**តេងជី**ក៏ភ្លាត់ព្រាត់បាត់ពីគ្នា មិនដឹងរស់ ឬស្លាប់ លុះឃើញខែរះស្រអាប់ព្រាងៗ ពួកសត្រូវដែលព័ទ្ធទាំងសងខាង ក៏ដុតភ្លើងភ្លឺឡើងទាំងបួនទិស ហើយបាញ់នឹងធ្នូចម្រុះទៅត្រង់**ជូឡុង** បីដូចគ្រាប់ភ្លៀងហើយស្រែកថា **ជូឡុង** អ្នកឯងត្រូវចេញមុខមករកយើង ៗនឹងទុកជីវិត។ **ជូឡុង**បានឮដូច្នោះក៏ខឹងណាស់ ចាប់លំពែងគ្រវែងលើកឡើង ហើយឡើងសេះបរបង្រុះទៅតាមទាហានដែលព័ទ្ធទាំងបួនទិស ទាហានទាំង

នោះក៏ប្រឹងបង្រុះប្របៀតច្រៀតគ្នាចូលទៅ **ជូឡុង**អស់សេចក្ដីគិត ក៏ងើបមុខឡើងមើលអាកាស ហើយដកដង្ហើមធំថា យើងធ្វើសឹកសង្គ្រាមរៀងមកតាំងពីកំឡោះលុះចំណាស់ប៉ុណ្ណេះហើយ មិនដែលឡើយនឹងចាញ់អ្នកឯណា គ្រានេះ យើងនឹងស្លាប់អសារជាប្រាកដ។

ខណៈនោះ ទទួល**ខុងបេង**ឲ្យ**តៀវប៉ោ**លើកទាហានប្រាំពាន់ លើកតាម**ជូឡុង**មកបន្ទាន់គ្នា **តៀវប៉ោ**ឃើញទាហាន**ហែហ៊្វូលឹម**ព័ទ្ធ**ជូឡុង**នៅក្នុងចំណោម ហើយឃើញ**ជីចេក**ចេញមកស្ទាក់ពីមុខជាប់ **តៀវប៉ោ**ក៏បំផាយសេះសន្ធាប់ចាប់លំពែងប្រវែងបីព្យាមពីរហត្ថរបស់បីតា ចូលទៅចាក់**ជីចេក**ធ្លាក់ពីលើសេះស្លាប់ ហើយកាត់យកក្បាលចងព្យួរនឹងកសេះ ពុះទម្លាយហ្វូងទាហានទន្ទ្រានចូលដល់**ជូឡុង**ក្នុងចំណោមបាន **ជូឡុង**ឃើញ**តៀវប៉ោ**ចូលទៅដល់ ក៏សែនសល់អំណររកអ្វីប្រៀបពុំបាន **តៀវប៉ោ**ក៏ប្រាប់**ជូឡុង**ថា មហាឧបរាជយល់ឃើញថា មាមានជរាភាពណាស់ ក្រែងធ្លោះការនឹងសត្រូវ ទើបតម្រូវប្រើខ្ញុំបាទឲ្យលើកទាហានប្រាំពាន់មកបន្ទាន់ជាក្រោយ ហើយ**ជូឡុង** និង**តៀវប៉ោ**ក៏លើកទាហានទាំងប្រាំពាន់ចេញមកពីក្នុងចំណោម បានពារទន្ទ្រានតម្រង់ទៅទិសបស្ចិម ក្រឡេកឃើញ**គួនហ៊ិន**បំផាយសេះសន្ធឹមមកពីចម្ងាយ ដៃម្ខាងយួរក្បាលមនុស្ស ពុះទម្លាយចូលមកដល់ **គួនហ៊ិន**ក៏ជម្រាប**ជូឡុង**ថា មហាឧបរាជប្រើខ្ញុំបាទឲ្យនាំទាហានប្រាំពាន់លើកមកជួយលោកមា ទទួល**តាំងហ៊ី**ទាហាន**ហែហ៊្វូលឹម**នៅរាំងរាស្ទាក់ពីមុខ ខ្ញុំបាទក៏បំផាយសេះសម្រុកចូលទៅកាត់ក្បាលបាននាំមកនេះ ឯមហាឧបរាជនោះលើកទ័ពតាមមកជាក្រោយ។

**ជូឡុង**ក៏ឆ្លើយបណ្ដោយថា ដែលក្មួយទាំងពីរបានលើកមកជួយមាវេលានេះមាមានអំណរណាស់ បើដូច្នោះគួរយើងជួយគ្នាចាប់ខ្លួន**ហែហ៊្វូលឹម**ឲ្យបាន ទើបនឹងមានសេចក្ដីគាប់ប្រសើរ។ **តៀវប៉ោ** និង**គួនហ៊ិន**បានស្ដាប់ ក៏យល់ព្រមគ្នា ទើបមីម្នាលើកទាហានឡើងទៅលើភ្នំ ដើម្បីនឹងចាប់**ហែហ៊្វូលឹម**។ **ជូឡុង**ក៏បំផាយសេះចុះទៅបបួលកងទាហាន ពានប្រទះនឹង**តេងជី**ទើបស្ទុះរួចពីក្នុងចំណោមមក **ជូឡុង**ក៏នាំយកឡើងទៅជាមួយគ្នា ហើយ**ជូឡុង**ក៏និយាយនឹង**តេងជី**ថា យើងបានធ្វើសឹកតាំង

ពីគ្រាព្រះចៅ**ឡៅពី**គង់ព្រះជន្ម យើងក៏មិនដែលអាប់ចុនថ្លោះការនឹងសត្រូវសោះគួរឬ? វេលានេះមកអាប់យសបង់ប្រៀបនឹងអា**ហែហ្ស៊ូលឹម**ក្មេងទឹកដោះនៅមាត់ នេះហាក់ជាបាន**តៀវប៉ៅ** និង**គួនហ៊ុន**លើកទាហានមកជួយស្កាត់ដោះពីចំណោមបាន កុំអីយើងនឹងបង់ប្រាណអសារឥតការ។ ឥឡូវ**តៀវប៉ៅ, គួនហ៊ុន** គេនៅប្រាថ្នាលើកតាម**ហែហ្ស៊ូលឹម**ទៅលើភ្នំហើយ យើងនឹងនៅព្រងើយ មិនទៅជួយឯណាបាន ត្រូវតែគិតអានសងសឹកវិញ កុំឲ្យខ្មាសមុខវា នោះ**ជូឡុង** និង**តេងជី**ក៏ម្នីម្នាលើកទាហានឡើងតាមទៅ ក្នុងពេលកណ្តាលយប់ជ្រៅនោះ បញ្ចូលទាហានជាមួយគ្នានឹង**តៀវប៉ៅ**, **គួនហ៊ុន** រួចបំបែកគ្នាជាបីកង ឆ្លងតាមផ្លូវឡើងទៅប្រទះនឹងកងទ័ព**ហែហ្ស៊ូលឹម** ក៏ចូលប្រកាប់សម្លាប់គ្នាជាជ្រួលច្របល់។

**ហែហ្ស៊ូលឹម**ក៏ទញ់ទាល់ច្រកផ្លូវនឹងដោះ ចេះតែស្ទុះស្ទាទៅវិញទៅមកជាច្រើនសា ទើបនាំទាហានដែលបានការជាស្និទ្ធចំនួនមួយរយប្លាយនាក់ រត់ប្រពូនប្រពាក់ចុះទៅតាមផ្លូវស្រុកឡាំអ័ន ទាហាន**ហែហ្ស៊ូលឹម**ដែលសំខាន់ ក៏បែកខ្ញែកគ្នាទៅដោយខ្លួន ខ្លះរេះពួនយកឲ្យរួចតែអាយុជីវិត **គួនហ៊ុន** និង**តៀវប៉ៅ**ក៏ស្រូតមឹតលើកទាហានតាម**ហែហ្ស៊ូលឹម**ទៅ។ **ហែហ្ស៊ូលឹម**ក៏រត់កាត់ផ្លូវទៅចូលស្រុកបានហើយឲ្យទាហានខ្ទាស់បិទទ្វារខ្ជាប់ បំបែកពួកកងទ័ពឲ្យត្រួតត្រាលើបន្ទាយដោយមាំមួន។

**តៀវប៉ៅ**, **គួនហ៊ុន**ក៏លើកទាហានប៉ះព័ទ្ធជុំវិញកំពែងស្រុកចំនួនដប់ថ្ងៃ **ហែហ្ស៊ូលឹម**នៅសំងំមិនចេញច្បាំងសោះ វេលានោះមានបម្រើចូលមកប្រាប់ថា មហាឧបរាជលើកព្យុហៈទ័ពមកដល់ដែនស្រុកនេះហើយ ឯស្រុកកៃអៀង, អៀងប៉េង និងចឹសៀ ទាំងបីរអន្លើនេះ ចាត់ទាហានឲ្យនៅត្រួតត្រារក្សា។ **ជូឡុង, តេងជី, តៀវប៉ៅ** និង**គួនហ៊ុន**ទាំងបួននាក់បានដំណឹងដូច្នោះ ក៏នាំគ្នាចេញទៅទទួលគំនាប់ហើយជម្រាបសេចក្តីថា យើងខ្ញុំបានលើកទាហានមកព័ទ្ធស្រុកនេះទុកជាយូរថ្ងៃហើយ នឹងរកចន្លោះបង្រុះចូលទៅពុំបាន។ **ខុងបេង**បានស្តាប់ ក៏ឡើងជិះរទេះតូចបរចូលទៅ មើលឃើញភូមិឋានមានទំនងស្រួល ហើយឃើញមានទាហានឡើងរក្សាសើនបន្ទាយមាំមួន ទើបនិយាយនឹងទាហានទាំងពួងថា ស្រុកឡាំអ័ននេះជាទី

មាំមួនណាស់ បើដូច្នេះយើងនឹងគិតប្រការម្ដេច? បើនឹងបង្អង់ទុកយូរថ្ងៃ ក្រែង**ចូយ៉យ**នឹងមិនលើកទ័ពវាងទៅវាយយកស្រុកហាន់តុងបង់ការ យើងនឹងមិនខូចអសារទេឬ?

**តេងជី**ថា **ហែហ៊្លលឹម**ជាសាច់សារលោហិតនឹង**ចូយ៉យ** បើនឹងចាប់ខ្លួន**ហែហ៊្លលឹម**និងទាហាមួយរយបាន **ចូយ៉យ**ក៏នឹងអស់តម្រិះគិតក្នុងគំនិតរត់ចុះ ឃើញថា ការដែលយើងធ្វើនោះនឹងសម្រេចដោយងាយ។ **ខុងបេង**ក៏យល់ឃើញត្រូវ ទើបគិតកលឧបាយខ្សឹបប្រាប់ទាហានដែលស្និទ្ធពីរនាក់ ឲ្យបន្លំធ្វើជាទាហាន**ហែហ៊្លលឹម**កាន់សំបុត្រទៅឲ្យ**ម៉ាជុន**ចៅហ្វាយស្រុកតៀនស៊ុយ និង**ស៊ុយលៀង**ចៅហ្វាយស្រុកហាន់តេងជាសេចក្ដីថា **ហែហ៊្លលឹម**ឲ្យលើកទាហានមកជួយ។ ទាហានទាំងពីរក៏លា**ខុងបេង**ទៅ ហើយ**ខុងបេង**ក៏ហៅ**អ៊ុយអៀន** និង**គួនហ៊ិន**, **តៀវប៉ៅ**មកខ្សឹបបង្គាប់ជាសេចក្ដីសម្ងាត់ ឲ្យលើកទាហានតាមទៅ។ **ខុងបេង**នៅជាក្រោយ ឲ្យជញ្ជូនឧសនិងសំរាមទៅគរទុកនៅក្បែរកំពែងស្រុកជាច្រើន ហើយឲ្យយកភ្លើងដុតឆេះឡើង ពួកអ្នកស្រុកឃើញដូច្នោះក៏នាំគ្នាសើចថា **ខុងបេង**ចប់ប្រាជ្ញាចេះកលឧបាយ អស់សេចក្ដីគិតហើយ បានជាយកភ្លើងមកលាបកំពែងស្រុកយើង។

ឯ**ស៊ុយលៀង**ចៅហ្វាយស្រុកហ័នតេងដឹងដំណឹងថា **ខុងបេង**លើកកងទ័ពទៅព័ទ្ធកំពែងស្រុកឡាំអ័ន **ហែហ៊្លលឹម**នៅក្នុងចំណោម ទើបប្រឹក្សាយល់ព្រមនឹងនាយទាហានទាំងពួងថា **ហែហ៊្លលឹម**ជាសាច់សារលោហិតព្រះចៅ**ចូយ៉យ** យើងនឹងបណ្ដោយនៅស្ងៀម ពុំគួរសោះ ត្រូវតែលើកទាហានទាំងអស់ទៅជួយការពារស្រុកឡាំអ័ន ដើម្បីនឹងរួសរាន់ដោះយកខ្លួន**ហែហ៊្លលឹម**បញ្ជូនឡើងទៅស្រុកក្រុង ទើបនឹងរួចទោសខុស។ ខណៈនោះបម្រើចូលទៅជម្រាបថា **ហែហ៊្លលឹម**ឲ្យបម្រើនាំសំបុត្រមកជូន។ **ស៊ុយលៀង**ក៏ឲ្យហៅចូលទៅ បម្រើក៏ជូនសំបុត្រទៅហើយជម្រាបថា ដ្បិត**ខុងបេង**លើកទ័ពទៅព័ទ្ធស្រុកឡាំអ័នជាមាំមួនណាស់ **ហែហ៊្លលឹម**ទើបរូតរះប្រើខ្ញុំនាំសំបុត្រមកសុំឲ្យលោកលើកទាហានទៅជួយ ព្រោះឯណោះជាទុក្ខព្រួយដោយតទល់ពុំឈ្នះសព្វថ្ងៃ បានជាដុតភ្លើងជាសម្រាស ដើម្បីឲ្យលោកលើកទៅឃើញជាសម្គាល់ ឯការធ្វើមិនឲ្យសត្រូវដឹងស្គាល់ ជាយូរថ្ងៃមកហើយ ហេតុម្ដេច

ឡើយក៏លោកមិនលើកទៅជួយ ទើបប្រើខ្ញុំបាទមកតែខ្លួនមួយដោយប្រថុយវាសនា ខ្ញុំបាទក៏កាប់ឆ្មារចេញមកបាន ៗជម្រាបលោកចៅហ្វាយស្រុកតៀនស៊ុយឲ្យលើកទៅជួយដែរ បើទៅហើយថា សុំឲ្យគិតតែវាយទ័ព**ខុងបេង**ខ្ទប់ប្រសព្វគ្នា **ហែហ៊្សឹម**នឹងវាយទម្លាយបំពារចេញមកពីក្នុង ចាប់**ខុងបេង**ឲ្យបាន។

**ស៊ុយលៀង**បានស្តាប់បម្រើនិយាយ និងមើលតាមសេចក្តីសំបុត្រ ក៏ចូលចិត្តថាមែនឥតសង្ស័យ ទើបប្រើបម្រើឲ្យរវៀសរវៃកាន់សំបុត្រនោះទៅឲ្យចៅហ្វាយស្រុកតៀនស៊ុយ ទទួលបម្រើ**ខុងបេង**ទៅដល់ម្នាក់ទៀត ក៏ចូលទៅជម្រាប**ស៊ុយលៀង**ថា ឥឡូវ**ម៉ាជុន**ចៅហ្វាយស្រុកតៀនស៊ុយលើកទ័ពចេញទៅជួយស្រុកឡាំអ័នហើយ ថាឲ្យលោកស្រូតលើកតាមទៅឲ្យឆាប់។ **ស៊ុយលៀង**បានស្តាប់ ក៏ប្រញាប់កេណ្ឌកូនទាហានដែលមានថ្វីដៃ លើកចេញចាកស្រុកទៅដល់ទៀបស្រុកឡាំអ័ន ក្រឡេកឃើញពន្លឺភ្លើងជាសម្គាល់ ក៏ខំស្រូតទ័ពទៅនៅចម្ងាយប្រមាណបីរយសិន (១២ គ.ម) **គួនហ៊ុន**ដែល**ខុងបេង**ឲ្យនៅចាំស្កាត់នៅទីនោះ ក៏បំផាយសេះដេញទាហានចូលទៅប្រកាប់នឹងចាប់**ស៊ុយលៀង** ៗភ័យស្លុតក៏ប្រញាប់ញាក់សេះរត់ទៅ ទទួល**តៀវប៉ោ**លើកទាហានស្ទាក់ពីមុខចូលមក កាប់សម្លាប់ទាហាន**ស៊ុយលៀង**បែកខ្ចាត់ខ្ចាយអស់ ស្លាប់នៅទីនោះជាច្រើន **ស៊ុយលៀង**និងទាហានដែលសល់ប្រហែលមួយរយប្លាយក៏នាំគ្នារត់ខ្ចាត់ខ្ចាយទៅស្រុកតាមផ្លូវកាត់ ឯ**អ៊ុយអៀន**ដែល**ខុងបេង**ប្រើឲ្យទៅចាំស្កាត់ ក៏លើកទ័ពចូលទៅនៅក្នុងស្រុកហ័នតេងបាន។ លុះឃើញ**ស៊ុយលៀង**និងទាហានទាំងប៉ុន្មានរត់ទៅដល់មុខទ្វារស្រុក ក៏ឲ្យយកធ្នូបាញ់ចម្រុះចេញមក ហើយស្រែកថា យើងឈ្មោះ**អ៊ុយអៀន**ចូលស្រុកបានហើយ ឲ្យប្រញាប់ចូលមកអង្វរលន់តួគំនាប់យើងដោយស្រួលចុះ យើងនឹងទុកជីវិត។ **ស៊ុយលៀង**ឃើញដូច្នោះក៏ស្លុតព្រលឹង ប្រឹងបំផាយសេះនឹងវេះរត់ទៅស្រុកតៀនស៊ុយ ក៏ប្រទះនឹង**ខុងបេង**ជិះរទេះតូចមួយ កាន់ផ្លិតរោមសត្វធំ លើកទាហានស្កាត់ផ្លូវចេញមក។ **ស៊ុយលៀង**ក៏រត់បណ្តោយវិលវល់ទាល់គំនិតសោះអស់ដៃ លោតចុះពីលើសេះ បោះអាវុធចេញចូលទៅគំនាប់**ខុងបេង** ៗក៏នាំយកខ្លួន**ស៊ុយលៀង**មកបន្ទាយ ហើយសួរអំពីចៅហ្វាយស្រុកឡាំអ័ននេះថា តាំងពី**ហែហ៊្សឹម**មិនទាន់បានមកនៅ តើ

នរណាជាចៅហ្វាយស្រុកនៅមុន? **ស៊ុយលៀង**ឆ្លើយថា ចៅហ្វាយស្រុកមុននោះ ឈ្មោះ**អៀវឡេង**ជាក្មួយ**អៀវហ៊្វ** ឯខ្ញុំបាទនិងអ្នកទាំងពីរនោះក៏ជាមនុស្សត្រូវអធ្យាស្រ័យគ្នា។ **ខុងបេង**ថា យើងចង់ឲ្យអ្នកឯងចូលទៅនិយាយការគិតគ្នានឹង**អៀវឡេង** ដើម្បីចាប់យកខ្លួន**ហែហ៊្វលឹម**មកឲ្យយើង ៗនឹងឲ្យបំណាច់រង្វាន់អ្នកឯង យើងនឹងតាំងតំណែងឲ្យអ្នកឯងធ្វើជាធំតទៅក្នុងស្រុកឡាំអ៊ែននេះ។ **ស៊ុយលៀង**ក៏ទទួលអាសា**ខុងបេង** ៗក៏ថយពលយោធាចេញទៅតាំងបន្ទាយនៅឆ្ងាយពីស្រុកនោះពីររយសិន (៨ គ.ម)។

**ស៊ុយលៀង**ក៏គំនាប់លា**ខុងបេង** ឡើងសេះចេញទៅដល់ទ្វារស្រុកឡាំអ៊ែន ហើយហៅអ្នកយាមឲ្យបើកទ្វារ **អៀវឡេង**ឃើញហើយក៏ម៉្នីម្នាដោយត្រេកអរណាស់ រហ័សហៅទាហានឲ្យបើកទ្វារទទួល**ស៊ុយលៀង** ៗក៏ចូលទៅគំនាប់គ្នា ហើយ**ស៊ុយលៀង**ក៏សាស្រាយនិយាយបញ្ចុះបញ្ចូល**អៀវឡេង**តាមដែល**ខុងបេង**បង្គាប់។

**អៀវឡេង**ឆ្លើយថា ព្រះចៅ**ចូយ៉យ**មានព្រះតេជព្រះគុណនឹងយើងច្រើនណាស់ ដែលនឹងប្រែចិត្តក្បត់រត់ទៅចូលខាងសត្រូវវិញនោះ មិនគួរសោះឡើយ បើតាមគំនិតខ្ញុំហើយ ត្រូវតែគិតត្រួតកល**ខុងបេង**វិញ ដើម្បីនឹងយកជ័យជម្នះឲ្យបាន។ ថាហើយក៏នាំ**ស៊ុយលៀង**ចូលទៅកាន់**ហែហ៊្វលឹម** នាំព័ត៌មានឲ្យស្តាប់គ្រប់ប្រការ។ **ហែហ៊្វលឹម**ឮវាចាក៏ថា បើដូច្នោះយើងនឹងគិតប្រការម្តេចទៅវិញ ទើបនឹងចាប់ខ្លួន**ខុងបេង**បាន?

**អៀវឡេង**ថា ខ្ញុំបាទចាំបើកទ្វារទទួលចុះ បើ**ខុងបេង**ឃើញចំពោះប្រាកដដូចសេចក្តីគិតហើយ គង់នឹងលើកចូលមកពុំខាន យើងនឹងលើកទាហានចោមចាប់ឲ្យបានខ្លួនតែម្តង។ **ហែហ៊្វលឹម**យល់ឃើញត្រូវ **ស៊ុយលៀង**ក៏លាចេញទៅឲ្យដំណឹងដល់**ខុងបេង**ឯបន្ទាយ និយាយជម្រាបថា ខ្ញុំបាទបានចូលទៅគិតគូរគ្នានឹង**អៀវឡេង** ៗទទួលថានឹងចាប់ខ្លួន**ហែហ៊្វលឹម**ជូនលោកឲ្យបាន តែថាទាហានមានតិច ក្រែងធ្វើការមិនសម្រេចដូចចិត្ត បានជាខ្ញុំបាទចូលមកគិតជម្រាបលោកឲ្យជ្រាបថា ពេល

យប់នេះ នឹងចាំបើកទ្វារទទួលទ័ពខាងលោក ចូរលោកលើកទ័ពប្រញាប់ចូលទៅក្នុងស្រុកចុះ ខាងណោះនឹងជួយព្រួតចាប់ខ្លួន**ហែហ្វ៊ូលឹម**ឲ្យបាន។

**ខុងបេង**បានឮសម្តីទាំងប៉ុន្មានក៏ក្លែងជាថា ការទាំងនេះមុខជានឹងសម្រេចសេចក្តីប្រាថ្នាតាមប្រាជ្ញាអ្នកឯងគិតនោះហើយ ទើបហៅ**គួនហ៊ិន** និង**តៀវប៉ោ**ចូលទៅខ្សឹបប្រាប់តម្រិះបញ្ឆេះជាសម្ងាត់ ហើយចាត់ទាហានឈ្លើយប្រហែលមួយរយប្លាយ បញ្ចូលគ្នានឹងទាហានពីអាយទៅខ្លះ ប្រគល់ឲ្យ**គួនហ៊ិន** និង**តៀវប៉ោ**។ លុះដល់ពេលព្រលប់ក៏បង្គាប់ឲ្យលើកទៅប្រជុំគ្នា **ខុងបេង**ក៏ឲ្យហៅ**ស៊ុយលៀង**មកផ្តាំថា អ្នកឯងចូរនាំទាហានអម្បាលនេះចូលទៅមុនចុះ ដើម្បីនឹងឲ្យ**អៀវឡេង**នៅខាងនោះរិះគិតធ្វើការឲ្យមួនមាំ គឺត្រូវនាំទាហានទាំងនេះទៅពួនបង្កប់ឲ្យបាត់ ដល់យាមពីរយប់ស្ងាត់ យើងនឹងលើកទ័ពតាមទៅទៀត អ្នកឯងខំឆ្លៀតដុតភ្លើងឲ្យឆេះឡើងជាសញ្ញា ហើយចាំបើកទ្វារទទួលយើងចុះ។

**ស៊ុយលៀង**បានឮដូច្នោះ កាលបើមិនព្រមទទួលការ ក៏ខ្លាច**ខុងបេង**ចាប់ពិរុទ្ធទើបប្រមាណនឹកថា បើកាលណាដល់ពេលកំណត់ហើយ យើងនឹងសម្លាប់ទាហានពួកនេះចេញឲ្យអស់ រួចសឹមបើកទ្វារជាចន្លោះឲ្យ**ខុងបេង**ចូលទៅជាក្រោយ។ **ស៊ុយលៀង**គិតហើយ ក៏គំនាប់លា**ខុងបេង**ចេញទៅ។ ឯ**អៀវឡេង**ឈរនៅលើសើនបន្ទាយ ក្រឡេកឃើញ**ស៊ុយលៀង**នាំទាហានទន្ទ្រានចូលមក ក៏គិតសង្ស័យណាស់ ហើយស្រែកសួរថា ទាហានទាំងអស់នេះលើកមកពីណា? **ស៊ុយលៀង**ស្រែកតបថា យើងនាំទាហានស្រុកហាន់តុងមកជួយទេតើ! ហើយក៏យកសំបុត្រចងនឹងចុងព្រួញបាញ់ចូលទៅ។ **អៀវឡេង**ឃើញសំបុត្រនោះ ក៏យកមកមើល ឃើញសេចក្តីថា **ខុងបេង**ឲ្យបញ្ចូលទាហានគេផ្សំគ្នាមួយរយមកជាមួយ ដើម្បីបញ្ឆេះបញ្ចូលជួយធ្វើការ ឯ**ខុងបេង**នឹងលើកតាមមកជាក្រោយឥឡូវនេះហើយ អ្នកកុំបីព្រួយចិត្តឲ្យបែកការនេះឡើយ បើខ្ញុំចូលមកដល់ហើយ គង់នឹងដឹងសេចក្តីច្បាស់ តាមគំនិតដែលគិតខ្ញុំនឹងនិយាយឲ្យស្តាប់។

**អៀវឡេង**បានឃើញសេចក្តីដូច្នោះ ក៏នាំយកសំបុត្រនោះចូលទៅបង្ហាញ**ហែហ្វ៊ូលឹម** ៗសប្បាយចិត្តណាស់ សម្គាល់ថា**ខុងបេង**ចាញ់តម្រិះខ្លួនដែលប្រើ

ឧបាយកល ទើបចាត់ពលទាហានដែលជាទំនុកទុកចិត្តមួយរយប្លាយ ព្រមទាំងគ្រឿងសាស្ត្រាវុធគ្រប់ដៃឲ្យទៅពួនបង្កប់ចាំ ហើយបង្គាប់**អៀវឡេង**ឲ្យធ្វើតាមបណ្ដាំថា អ្នកឯងចូរបើកទ្វារស្រុកទទួល**ស៊ុយលៀង**ឲ្យលើកចូលមកចុះ យើងនឹងចាប់ទាហានវាទាំងអម្បាលនោះសម្លាប់ឲ្យអស់ រួចសឹមបើកឲ្យ**ខុងបេង**ចូលមកទៀត។ **អៀវឡេង**ទទួលបង្គាប់ហើយ ក៏ថយប្រញាប់ទៅបើកទ្វារ ហើយស្រែកហៅថា បើទាហានស្រុកហាន់តុង ក៏ឲ្យប្រុងប្រៀបចូលជាប្រញាប់មកចុះ។

**គួនហ៊ិន**ឮដូច្នោះ ក៏បំផាយសេះស្ទុះចេញទៅមុខ**ស៊ុយលៀង** វាងទៅផុតមុខទាហាន ក្រឡេកឃើញ**អៀវឡេង**ជិះសេះបញ្ឈរ ក៏បរបំពានត្រង់ចូលទៅផុតទ្វារ យារដាវឡើងកាប់ត្រូវ**អៀវឡេង**ធ្លាក់ពីលើសេះស្លាប់។ **ស៊ុយលៀង**ឃើញហើយ ក៏ឡប់វិញ្ញាណហាក់គ្មានព្រលឹងសោះ បំផាយសេះស្ទុះចេញទៅហួសទ្វារ បំពារនឹងឆ្លងស្ពានគូក្រៅ **តៀវប៉ៅ**ក៏ស្រែកសន្ធាប់យ៉ាងខ្លាំងថា នែ៎អាចោរអន្តរាយ! អាឯងប៉ានគិតកលឧបាយនឹងបញ្ឆោតមហាឧបរាជហើយ ម្ដេចក៏វេះរត់ព័ទ្ធទៅណា? ក៏យារលំពែងឡើងចាក់ត្រូវ**ស៊ុយលៀង**ធ្លាក់ពីលើសេះស្លាប់។

**គួនហ៊ិន**ក៏ស្ទុះចូលប្រញាប់ទៅដល់កណ្ដាលស្រុក គ្រលុកដេញកាប់ទាហាន និងអ្នកស្រុកភ្ញាក់ផ្អើលជ្រួលច្របល់ខ្លាំងណាស់ ហើយយកភ្លើងឈ្នួលដុតផ្ទះឆេះឡើងជាសម្គាល់ដែលណាត់គ្នា **ខុងបេង**ក៏បរពលយោធាចូលស្រុកបានទាំងបួនទិស រឹករវណែនណាន់ខ្នាន់ខ្នាប់។

**ហៃហ៊្វលឹម**ក៏ភ័យភិតស្ទើរស្លាប់ ប្រញាប់ឡើងសេះទាំងភ្ញាក់ភ្លាំងពុំដឹងខ្លួន ខំបរស្រូតទៅប្រពាក់ប្រពូនតម្រង់ទៅទិសឯត្បូង ប្រទះលើហ្វូងកងទ័ព**អងប៉េង**ទប់ឃាំងនៅពីមុខ **អងប៉េង**ក៏ស្ទុះគំហុកដេញចូលមក ព័ទ្ធចាប់ខ្លួន**ហៃហ៊្វលឹម**បាន ហើយទន្ទ្រានស្ទុះទៅចាក់កាប់សម្លាប់វេហ៍ពល**ហៃហ៊្វលឹម**ស្លាប់គរលើគ្នាជាច្រើនណាស់។

ឯ**ខុងបេង**ចូលស្រុកបាន ក៏ប្រកាសឃោសនាបណ្ដារាស្ត្រអ្នកស្រុកទាំងអស់គ្នាថា អ្នកទាំងឡាយរាល់គ្នា កុំបីភ័យខ្លាចអ្វីឡើយ វេលានេះហើយមហាឧបរាជនឹងគ្រប់គ្រងថែរក្សា បីដូចមាតាបិតាព្យាបាលបុត្រ ដើម្បីឲ្យបានសេចក្ដីសុខតទៅ។

លុះវេលាព្រឹកឡើង **អងប៉េង**ក៏ចងនាំខ្លួន**ហៃហ៊្លលឹម**ទៅជូន**ខុងបេង** ៗបង្គាប់ឲ្យយកខ្លួន**ហៃហ៊្លលឹម**ទៅឃុំទុកក្នុងរទេះ។ វេលានោះ**តេងជី**ក៏សួរ**ខុងបេង**ថា **ស៊ីុយលៀង**វាគិតឧបាយដោយអាថ៌កំបាំងណាស់ ហេតុម្ដេចបានជាមហាឧបរាជជ្រាបដឹងដល់? **ខុងបេង**ឆ្លើយថា យើងដឹងយោបល់របស់**ស៊ីុយលៀង**ល្អៀងចិត្ត មិនមែនជាគំនិតវាត្រង់ ប្រុងនឹងធ្វើរាជការជាមួយនឹងយើងដោយសុចរិតទេ បានជាយើងគិតក្លែងប្រើវាឲ្យចូលមកក្នុងស្រុក ប្រាថ្នានឹងឲ្យ**ហៃហ៊្លលឹម**ឆោតឆុតគិតត្រួតកលដល់យើង ៗត្រូវត្រួតកលដល់វា ប្រាថ្នាយកជ័យជម្នះតវាចុងដៃឲ្យបាន។ ពួកនាយទាហានទាំងអស់បានស្ដាប់ ក៏នាំគ្នាឱនគំនាប់ក្រាបសិរសាសរសើរថា មហាឧបរាជមានតម្រិះប្រាជ្ញាវិសេសក្រៃពេកណាស់ នឹងរកនរណាមកផ្ទឹមប៉ះក៏ពុំបាន។

**ខុងបេង**និយាយការថា វេលានេះស្រុកឡាំអ័ន យើងក៏ជិះជាន់បានស្រេចហើយ នៅឡើយតែទាហានដែលយើងប្រើកាន់សំបុត្រទៅស្រុកតៀនស៊ីុយនោះ ម្ដេចក៏មិនឃើញត្រឡប់មកវិញសោះ តើនឹងជាគ្រោះថ្នាក់យ៉ាងណាទៅដឹងហើយ? គួរហើយនឹងធ្វើសំបុត្រទៅសួរ ឬលើកកងទ័ពទៅវាយយកស្រុកតៀនស៊ីុយតែម្ដងទៅចុះ ថាតែប៉ុណ្ណោះ ក៏ចាត់ឲ្យ**ឡៅតាយ**នៅរក្សាស្រុកឡាំអ័ន ចាត់**អ៊ីុយអៀន**ជាមេកងកំណាន់ទ័ពស្រួច រួចក៏លើកចេញទៅ។ **ខុងបេង**ក៏លើកតាមទៅជាក្រោយលំដាប់។

*លោកអ្នកអានអាចរកមើលសៀវភៅផ្សេងទៀតតាមរយៈគេហទំព័រ*

www.khmerliterature.wordpress.com

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៧១

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ម៉ាជុន**ចៅហ្វាយស្រុកតៀនស៊ុយ ដឹងថា**ខុងបេង**ព័ទ្ធស្រុកឡាំអ័ន **ម៉ាជុន**គិតនឹងលើកទ័ពទៅជួយ**ហែហ៊្លឹម** ទទួលបម្រើ**ខុងបេង**កាន់សំបុត្រជាឧបាយទៅដល់**ម៉ាជុន, កៀងអ៊ុយ**ដឹងដល់ ឃាត់**ម៉ាជុន**កុំឲ្យលើកទ័ព រហូតដល់**ចូជិន**ចៅហ្វាយស្រុកសេកៀងចាញ់ទ័ព**ខុងបេង**ស្លាប់**ចូជុន** និង**ចូចាន**។ នាយទាហានបានធ្វើសំបុត្រទៅសុំកងទ័ពព្រះចៅ**ចូយ៉យ** ឲ្យលើកមកជួយ)។*

**ខណៈកាលខុងបេង**ព័ទ្ធស្រុកឡាំអ័នហើយ **ម៉ាជុន**ចៅហ្វាយស្រុកតៀនស៊ុយដឹងដំណឹងក៏ហៅក្រមការភ្នាក់ងារទៅជំនុំប្រឹក្សាថា ដ្បិត**ហែហ៊្លឹម**នោះជាត្រកូលអ្នកមានវង្សខ្ពស់មកពីដើម ហើយជាបុត្រប្រសាព្រះចៅ**វុយអេង**ផង ប្រៀបដូចដើមឈើមាសស្លឹកកែវមានតម្លៃណាស់ មិនធ្លាប់ប្រទះធ្វើការធំ ឥឡូវមករលំនៅកណ្តាលចំណោមគេ គឺ**ខុងបេង**ព័ទ្ធជាប់ដូច្នេះ តើយើងនឹងត្រូវរិះគិតដូចម្តេច? អស់មុខមន្ត្រីក្រមការឆ្លើយថា **ហែហ៊្លឹម**ជាព្រះញាតិរបស់ព្រះចៅ**ចូយ៉យ**ពិត បើប្រសិនបច្ចាមិត្ត គឺ**ខុងបេង**ធ្វើឲ្យធ្លោះការហើយ ខ្លួនលោកជាធំនៅទីនេះក៏គង់នឹងខុសដោយព្រះរាជអាជ្ញាមិនខាន វេលានេះគួរតែលោកលើកទាហានទៅជួយចុះ ដើម្បីនឹងដោះយកខ្លួន**ហែហ៊្លឹម** នាំចូលទៅស្រុកក្រុងឲ្យបាន ទើបត្រូវ។ **ម៉ាជុន**បានឮដូច្នោះ ក៏ឃើញត្រូវណាស់ ទទួលទាហានដែល**ខុងបេង**ប្រើបន្លំឲ្យនាំសំបុត្រនោះចូលទៅដល់អ្នកចាំទ្វារក៏ចូលទៅជម្រាប**ម៉ាជុន** អធិប្បាយសេចក្តីដូចកាលទៅប្រាប់**ស៊ុយលៀង** ហើយហុចសំបុត្រជូនទៅទៀត។ លុះព្រឹកឡើង បម្រើ**ខុងបេង**ក៏ចូលទៅជម្រាប**ម៉ាជុន**ថា ឥឡូវនេះចៅហ្វាយស្រុកហ័នតេងលើកទៅហើយ ឲ្យលោកប្រញាប់លើកទ័ពតាមទៅចុះ នោះ**ម៉ាជុន**ក៏រលះរលាំងនឹងលើកទ័ពចេញពីស្រុកទៅ។

ខណៈនោះ មានឈ្មោះ**កៀងអ៊ុយ** ដែលជានាយទាហាននៅស្រុកនោះ មានសតិបញ្ញាស្រៀវស្រួចពីតូចមក បានរៀនវិជ្ជាជំនាញស្ទាត់ក្នុងកលសង្គ្រាម ហើយមានកតញ្ញូនឹងបិតាមាតា បណ្ដាអ្នកស្រុកទាំងពួងក៏កោតញញើតរាប់អាន លុះឃើញ**ម៉ាជុន**នឹងលើកទាហានទៅដូច្នោះ ក៏និយាយហាមឃាត់ថា ដ្បិត**ខុងបេង**នោះមានសតិបញ្ញាណាស់ ដែលថាទាហាន**ហែហ៊្វលឹម**កាន់សំបុត្រមកនោះ ខ្ញុំបាទមិនយល់ឃើញផងសោះ ព្រោះ**ខុងបេង**ព័ទ្ធស្រុកឡាំអ័នយ៉ាងមាំមួន ឯទាហាននោះសោត ពីដើមមកក៏មិនប្រាកដថាឈ្មោះអ្វី ដែលមកប្រាប់ថា ខ្លួនគេបានពារទម្លាយចំណោមទ័ពកាន់សំបុត្រចេញមកបាននោះ ឃើញដូចមិនសមប្រកបសោះ ក្រោយនោះមានទាហានម្នាក់មកប្រាប់ទៀតថា ថៅហ្វាយស្រុកប័នតេងលើកទ័ពចេញទៅហើយនោះ ក៏គ្មានអ្វីជាលក្ខណ៍សំខាន់សោះ ខ្ញុំបាទយល់ឃើញថា ប្រហែលជាឧបាយ**ខុងបេង**ក្លែងបញ្ឆោតឱ្យយើងលើកទ័ពទៅ ដើម្បីនឹងបង្កប់ទាហានឱ្យនៅចាំដណ្ដើមស្រុកយើងជាក្រោយទេដឹង?

**ម៉ាជុន**បានស្ដាប់ដូច្នោះ យល់ឃើញត្រូវនឹងគំនិតខ្លួន ក៏ដកដង្ហើមធំថា ដែលមានអ្នករំឭកស្មារតីយើងនេះ ត្រូវណាស់ បើកុំបានអ្នកមកនិយាយដូច្នោះ ក៏នឹងថ្លោះការទទេទៅដោយនូវឧបាយ**ខុងបេង**។ **កៀងអ៊ុយ**អស់សំណើចហើយថា ដែល**ខុងបេង**ក្លែងធ្វើកលដូច្នេះ មុខជាមានទាហានមកពួនបង្កប់ជាប្រាកដណាស់ ខ្ញុំបាទនឹងសុំទាហានបីពាន់ លើកព័ទ្ធវាងទៅតាមផ្លូវតូច ដើម្បីនឹងស្កាត់រាំងទ័ព**ខុងបេង**ឱ្យបាន រួចសឹមលោកលើកទាហានចេញទៅជាក្រោយ បណ្ដោយចម្ងាយមួយរយហាសិបសិន (៦ គ.ម) ត្រូវបញ្ឈប់កងទ័ពរង់ចាំទីនោះ បើឃើញខ្ញុំបាទដុតភ្លើងឡើងជាសម្គាល់ ហើយឃើញកងទ័ពធំលើកមកដល់ ក៏ឱ្យបរពលចូលច្បាំងចោមចាប់ខ្លួន**ខុងបេង**ឱ្យបាន។ **ម៉ាជុន**បានស្ដាប់ ក៏យល់ត្រូវដូចគំនិត ទើបចាត់ឱ្យកេណ្ឌទាហានបីពាន់ប្រគល់ឱ្យ**កៀងអ៊ុយ**លើកចេញទៅ ហើយ**ម៉ាជុន**ក៏លើកទ័ពធំចេញទៅតាមជាលំដាប់គ្នា។

ឯ**ជូឡុង** ដែល**ខុងបេង**ឱ្យនាំទាហានទៅពួនបង្កប់នៅក្បែរជើងភ្នំក្រៅស្រុកតៀនស៊ុយនោះ លុះដឹងថា **ម៉ាជុន**លើកទ័ពចេញពីស្រុកមកហើយ ក៏មានអំណរ

ណាស់ ប្រើបម្រើយ៉ាងរហ័សឲ្យទៅប្រាប់**ទៀវអេក** និង**ចោអ៊ី** ដែលលើកតាមជាក្រោយឲ្យចេញស្កាត់ផ្លូវចាំទទួល**ម៉ាជុន**ព័ទ្ធចាប់យកខ្លួនឲ្យបាន ឯ**ជូឡុង**ក៏លើកទាហានប្រាំពាន់ ចូលទៅដល់ជើងកំពែងស្រុកតៀនស៊ុយ ហើយស្រែកថា យើងឈ្មោះ**ជូឡុង** ជាពួកស្រុកសៀងសាន់ លើកទ័ពមក ឯងចាញ់ឧបាយកលយើងហើយ ឯងដឹងឬទេ? ឲ្យប្រញាប់បើកទ្វារទទួលយើងដោយស្រួលបួលទៅចុះ កុំឲ្យទាហានទាំងអស់បានសេចក្ដីលំបាក នោះទាហានដែលនៅក្នុងស្រុកបានឮសម្ដីដូច្នោះ ក៏អស់សំណើចហើយថា អ្នកឯងកុំមកចរចាប្រមាថមើលងាយយើងឡើយ។ អ្នកឯងចាញ់តម្រិះរិះគិត**កៀងអ៊ុយ**ហើយ ម្ដេចក៏នៅមិនទាន់ដឹងខ្លួនសោះដូច្នេះ?

**ជូឡុង**ឮដូច្នោះក៏ខឹងណាស់ បរពលចូលប៉ងនឹងទម្លាយយកស្រុកនោះឲ្យបានទទួលឃើញពន្លឺភ្លើងឆេះសន្ធោឡើង ទាហានក៏ស្រែកហ៊ោព័ទ្ធចូលមកគ្រប់ទាំងបួនទិស **កៀងអ៊ុយ**ក៏ឡើងសេះកាន់លំពែងបំផាយចូលត្រង់មក ហើយស្រែកប្រកាសថា យើងឈ្មោះ**កៀងអ៊ុយ**កើតនៅស្រុកតៀនស៊ុយ។ **ជូឡុង**ឃើញដូច្នោះក៏បំផាយសេះចូលទៅប្រយុទ្ធនឹង**កៀងអ៊ុយ**បានប្រាំបួនភ្លែង **ជូឡុង**ឃើញ**កៀងអ៊ុយ**មានកម្លាំងខ្លាំងពូកែ ក៏គិតថា ក្នុងស្រុកតៀនស៊ុយនេះ ពីដើមមកមិនដែលបានសង្កេតថា មានទាហានឯកដល់ម្ល៉េះសោះ នោះស្រាប់តែ**ម៉ាជុន**ដេញទាហានព័ទ្ធចូលមកទៀត។ **ជូឡុង**អស់កម្លាំងណាស់ ក៏បំផាយសេះពុះទម្លាយចេញពីក្នុងចំណោមបាន **កៀងអ៊ុយ**ក៏បំផាយសេះដេញជិតដោយពីក្រោយទៅ លុះទៅដល់ផ្លូវដែល**ទៀវអេក**និង**ចោអ៊ី**ពួន **ទៀវអេក** និង**ចោអ៊ី**ក៏ចេញមកស្កាក់ពីមុខ ហើយបំបោលសេះចូលទៅជួយ**ជូឡុង**។ **កៀងអ៊ុយ**ក៏ញាក់សេះត្រឡប់ក្រោយ ទទួល**ខុងបេង**មកដល់ **ជូឡុង**ក៏ចូលទៅជួបនឹង**ខុងបេង** ហើយថ្លែងការណ៍តាមរឿងឲ្យ**ខុងបេង**ស្ដាប់គ្រប់ប្រការ។

**ខុងបេង**បានដឹងសេចក្ដី ក៏ឲ្យភ័យស្លុតគិតថា នាយទាហាននេះឈ្មោះអ្វីហ៎: បានជាមានតម្រិះប្រាជ្ញាកន្លងដឹងដល់គំនិតយើងបាន? នោះមានពួកស្រុកឡាំអ័នដែលមកចុះចូលនឹង**ខុងបេង**ឆ្លើយជម្រាបថា នាយទាហាននោះឈ្មោះ**កៀងអ៊ុយ** គឺសែ**កៀង** ឈ្មោះ**អ៊ុយ** មានប្រាជ្ញាស្រៀវស្រួចណាស់ ឈ្លាសវៃក្នុងការរណរង្គសង្គ្រាម។ **ជូឡុង**ថា **កៀងអ៊ុយ**នេះជំនាញក្វែនស្ទាត់ក្នុងការចម្បាំងប្លែកជាងគេ

ច្រើនណាស់ រួច**ជូឡុង**ក៏រាំភ្លេងអាវុធតាមលំនាំ**កៀងអ៊ុយ**ជូន**ខុងបេង**មើល **ខុងបេង**ឃើញហើយថា យើងមិនបានសម្គាល់ថាក្នុងស្រុកតៀនស៊ុយនេះ នឹងមានទាហានឯកដល់ប៉ុណ្ណេះសោះ ហើយ**ខុងបេង**ក៏ឲ្យលើកទ័ពទៅស្រុកតៀនស៊ុយ។

ឯ**កៀងអ៊ុយ** លុះត្រឡប់វិញក៏និយាយនឹង**ម៉ាជុន**ថា **ជូឡុង**ចាញ់ប្រៀបនឹងយើងក្នុងគ្រានេះ មុខជានឹងប្រាប់រឿងហេតុដល់**ខុងបេង** ៗគង់នឹងយល់ឃើញថាក្នុងស្រុកយើងមិនសូវមានទាហាន ក៏គិតត្រឡប់ស្រូតលើកទ័ពលបមកវាយយកស្រុកយើងវិញហើយ បើដូច្នេះហើយ យើងត្រូវញែកទាហានចេញទៅពួនបង្កប់នៅក្រៅស្រុក ខ្ញុំបាទនឹងលើកទ័ពមុខទៅនៅទិសខាងកើត ឲ្យ**លៀងខៀន** និង**អ៊ិនសុង**នាំទាហានទៅបង្កប់នៅទិសឯលិច ឲ្យ**លៀងស៊ី**នាំទាហានទៅនៅរក្សាស្រុក ឯខ្លួនលោកត្រូវលើកទ័ពទៅនៅទិសខាងត្បូង បើ**ខុងបេង**លើកទ័ពឆ្លងមកឃើញភ្លើងសញ្ញាខាងខ្ញុំបាទហើយ ក៏ឲ្យវាយទ័ពព័ទ្ធ ប្រជិតគ្នាចូលមកចាប់យកខ្លួន**ខុងបេង**ឲ្យបាន។ **ម៉ាជុន**បានស្តាប់ព័ត៌មានសព្វគ្រប់ ក៏យល់ត្រូវនឹងគំនិតខ្លួន ទើបចាត់ចែងរៀបជាក្បួនទ័ពទុកព្រម តាមពាក្យ**កៀងអ៊ុយ**គ្រប់ប្រការ។

ឯ**ខុងបេង**កាលលើកទៅដល់ស្រុកតៀនស៊ុយកាលណា ជាពេលកណ្តាលយប់ ក៏ដេញទាហានឲ្យចូលខ្ទប់ប្រសព្វទ័ពសត្រូវ នោះទាហានទាំងពួងនឹងចូលទៅក្នុងស្រុក ឃើញទង់ជ័យដោតរៀងរាយជាច្រើន ក៏មិនអាចនឹងហែកទម្លាយចូលទៅបាន លុះទៅដល់យាមពីរទើបឃើញពន្លឺភ្លើងឆេះរន្ទាលភ្លឺឡើងខាងទិសឯកើត ទាហានស្រែកហ៊ោកក្រើកព័ទ្ធចូលបាន ក៏វាយឃោះគោះគងទូងស្គរច្បាំងគ្នាជាកោលាហលអឺងកង។

**ខុងបេង**ឃើញដូច្នោះ ក៏ភ័យស្លុតស្មារតី នាំ**គួនហ៊ិន, តៀវប៉ៅ** នូវអស់ទាហានបំផាយសេះរត់ពារទម្លាយ វាយកាប់កងទ័ពចេញពីក្នុងចំណោមទៅទិសឯកើត ឃើញ**កៀងអ៊ុយ**នាំទាហានចេញមកស្ទាក់ពីមុខ ហើយដុតភ្លើងឆេះឡើងច្រើនអន្លើ ក៏រឹតតែភ័យណាស់ នាំទាហានពានប៉ះរត់គេចចូលទៅបន្ទាយ ហើយ**ខុងបេង**ក៏ហៅទាហានស្រុកហ័នតេងទាំងឡាយមកសួរពិចារណាថា **កៀងអ៊ុយ**នេះមានសតិបញ្ញាស្រៀវស្រួចណាស់ បិតាមាតានៅទីតំបន់ឯណា? ធ្វើម្តេចយើងនឹងបានខ្លួនមក

ធ្វើការជាមួយ? ទាហានទាំងនោះឆ្លើយឲ្យការណ៍ថា បិតា**កៀងអ៊ុយ**ស្លាប់ហើយ នៅតែមាតានៅស្រុកអេកកួន។ **ខុងបេង**បានស្ដាប់ ទើបហៅ**អ៊ុយអៀន**មកបង្គាប់ថា អ្នកឯងត្រូវលើកទាហានទៅបោះទ័ពភ្ជាប់នឹងកំពែងស្រុកអេកកួនទុកឲ្យមាំមួនចុះ បើឃើញ**កៀងអ៊ុយ**លើកទ័ពទៅ ត្រូវឲ្យធ្វើជាចាញ់ ចេញទៅពួនបង្កប់ បណ្ដោយឲ្យ**កៀងអ៊ុយ**ចូលទៅក្នុងស្រុកនោះចុះ បើ**កៀងអ៊ុយ**ត្រឡប់ចេញពីក្នុងស្រុកនោះមកវិញ សឹមលើកទាហានពានយកស្រុកនោះឲ្យបាន ហើយត្រូវប្រើឧបាយឲ្យទាហានបន្លំជាពួកអ្នកស្រុក មកតាមផ្លូវពីស្រុក**តៀនស៊ុយ**។ **អ៊ុយអៀន**ក៏លា**ខុងបេង**ចេញទៅ។

**ខុងបេង**ក៏សាកសួរទាហានស្រុកហ័នតេងថា ក្នុងទីដែននេះ តំបន់ណាជាទីសំខាន់ខ្លះ? ពួកទាហាននោះឆ្លើយថា ស្រុកសៀងឆេងមានស្បៀងអាហារក្រាស់ក្រួនមួនមាំជាងគេ ស្រុកតៀនស៊ុយក៏ប្រាស្រ័យស្រុកនោះជាកម្លាំង បើប្រសិនមហាឧបរាជបានស្រុកសៀងឆេង ហើយស្រុកតៀនស៊ុយក៏នឹងដាច់ស្បៀងអាហារជាមិនខាន។

**ខុងបេង**ឮដូច្នោះ ក៏សប្បាយចិត្តណាស់ ប្រើ**ជូឡុង**ឲ្យលើកទ័ពទៅវាយយកស្រុកសៀងឆេង ហើយក៏រំកិលទ័ពហ្លួងទៅតាំងបន្ទាយយ៉ាងមាំមួន ឆ្ងាយពីស្រុកតៀនស៊ុយប្រហែលមួយពាន់ប្រាំរយសិន (៦០ គ.ម)។ ពួកទាហានអ្នកស្រុកក៏ចូលទៅប្រាប់**ម៉ាជុន**ថា **ខុងបេង**ថយរំកិលកងទ័ពចេញទៅហើយ ៗញែកទាហានជាបីកង ឲ្យទៅវាយយកស្រុកអេកកួនមួយកង ឲ្យទៅវាយយកស្រុកសៀងឆេងមួយកង។

**កៀងអ៊ុយ**ឮដូច្នោះក៏ភ័យស្លុតស្មារតី និយាយជម្រាប**ម៉ាជុន**ថា ឥឡូវ**ខុងបេង**លើកទ័ពទៅវាយស្រុកអេកកួនហើយ មាតាខ្ញុំបាទនៅក្នុងស្រុកនោះ មុខជានឹងដល់នូវសេចក្ដីអន្តរាយពុំខាន បើដូច្នេះខ្ញុំបាទនឹងសុំលាលោក សុំទាហានមួយកងលើកទៅជួយការពារមាតាក្នុងស្រុកអេកកួនចុះ។ **ម៉ាជុន**បានឮដូច្នោះ ក៏ចាត់ទាហានបីពាន់ឲ្យ**កៀងអ៊ុយ**លើកចេញទៅ ហើយឲ្យ**លៀងខៀន**នាំទាហានបីពាន់លើកតម្រង់ទៅស្រុកសៀងឆេង។

ឯ**កៀងអ៊ុយ**នោះ លុះលើកពលទៅដល់ស្រុកអេកកួនហើយ ឃើញ**អ៊ុយអៀន**នាំទាហានស្ទាក់ពីមុខជាប់ **អ៊ុយអៀន**ក៏បរសេះសន្ធាប់ចូលទៅប្រយុទ្ធនឹង**កៀងអ៊ុយ** បានប្រាំបួនភ្លែង **អ៊ុយអៀន**ធ្វើជាចាញ់ញាក់សេះរត់ **កៀងអ៊ុយ**ក៏ដេញប្រផិតកិតផិតដោយតាម លុះមិនទាន់ហើយក៏ត្រឡប់ចូលស្រុកអេកកួនបាន ហើយចាត់ទាហានឲ្យរក្សាសើនបន្ទាយជុំវិញយ៉ាងមាំមួន។

ឯ**លៀងខៀន** កាលលើកទាហានទៅដល់ស្រុកសៀងឆេង ឃើញ**ជូឡុង**តាំងបន្ទាយភ្ជាប់នឹងកំពែងស្រុក ហើយ**ជូឡុង**បើកផ្លូវឲ្យ**លៀងខៀន**លើកទាហានចូលទៅក្នុងស្រុកបាន។

ខណៈកាល**អ៊ុយអៀន**និងទាហាន**ជូឡុង**លើកទ័ពចេញទៅនោះ ក្រោយនោះ **ខុងបេង**គិតកលឧបាយឲ្យទាហានទៅយកខ្លួន**ហែហ៊្លលឹម**មកនិយាយថា ខ្លួនអ្នកឯងត្រូវដល់ទីស្លាប់ហើយ យើងក៏នៅអែអង់រង់ឲ្យបានយូរដល់ថ្ងៃនេះ មិនទាន់សម្លាប់ តើអ្នកឯងនឹងរិះគិតរកចំណាប់ប្រការម្ដេច? **ហែហ៊្លលឹម**បានឮដូច្នោះ ក៏ភ័យខ្លាំងណាស់ ក្រាបសំពះចុះហើយក៏អង្វរករសុំអាយុជីវិត។ **ខុងបេង**ថា **កៀងអ៊ុយ**ទាហាន**ម៉ាជុន**ដែលទៅនៅរក្សាស្រុកអេកកួន ឥឡូវឲ្យសំបុត្រមកថា ឲ្យយើងចិញ្ចឹមអ្នកឯងទុកធ្វើការផង ហើយ**កៀងអ៊ុយ**ក៏ស្ម័គ្រមកនៅនឹងយើងដែរ។ អ្នកឯងនឹងយកអាសាយើងទៅនាំ**កៀងអ៊ុយ**មកបានឬទេ?

**ហែហ៊្លលឹម**ឆ្លើយថា មហាឧបរាជកុំវិតក្កឡើយ ការនេះទុកមុខងារខ្ញុំបាទនឹងទៅបបួល**កៀងអ៊ុយ**នាំមកឲ្យបាន។ **ខុងបេង**ក៏ចាត់រើសយកអាវព្រៃយ៉ាងល្អហើយនិងសេះជំនិះមួយឲ្យ**ហែហ៊្លលឹម** ៗក៏លាប្រញាប់ចេញទៅស្រុកអេកកួន។ កាលចេញផុតទៅហើយ **ហែហ៊្លលឹម**នឹកត្រេកអរណាស់ ព្រោះឃើញថារួចពីកណ្ដាប់ដៃ**ខុងបេង**ហើយ ក៏ខំស្រូតបរសេះទៅ ដល់ពាក់កណ្ដាលផ្លូវប្រទះនឹងទាហានដប់នាក់ដែល**អ៊ុយអៀន**ប្រើជាឧបាយកលជាអ្នកស្រុកអេកកួនរត់មក។ ទាហានទាំងនោះស្រែកប្រាប់**ហែហ៊្លលឹម**ថា **កៀងអ៊ុយ**ស្ម័គ្រចូលទៅនៅខាង**ខុងបេង**ហើយ ៗបើកទ្វារស្រុកទទួល**អ៊ុយអៀន**ចូលទៅតាំងទ័ពក្នុងស្រុកអេកកួនហើយ ឥឡូវ**អ៊ុយអៀន**

កំហែងកំចោករាស្ត្រ ៗបានសេចក្តីក្តៅក្រហាយខ្លាំងណាស់ យើងខ្ញុំទាំងឡាយទ្រាំពុំបាន ៗជានាំគ្នាគេចរត់មក ប្រាថ្នានឹងទៅនៅស្រុកសៀងឆេង។

**ហៃហ្វ៊ូលីម**សួរថា នរណានៅរក្សាស្រុកតៀនស៊ុយនោះ? ពួកនោះឆ្លើយថា **ម៉ាជុន**ចៅហ្វាយស្រុកចាស់នៅរក្សាស្រុកដដែល។ **ហៃហ្វ៊ូលីម**ឮដូច្នោះ ក៏ស្រួតបរសេះតម្រង់ទៅស្រុកតៀនស៊ុយ ទទួលប្រទះនឹងពួកទាហានបន្ទំរបស់**អ៊ុយអៀន**មួយកងទៀត ធ្វើអាការបីដូចជាទើបរត់មកថ្មីទៀត ខ្លះពុនរែករបស់ទ្រព្យ ខ្លះពុនរែកស្រូវអង្ករ ខ្លះពកូនចៅ ហើយនិយាយប្រាប់**ហៃហ្វ៊ូលីម**ដូចជាសម្តីពួកដប់នាក់មុនគ្រប់ប្រការ។ **ហៃហ្វ៊ូលីម**ឮហើយក៏រឹតតែភ័យណាស់ ខំបំផាយសេះទៅដល់ស្រុកតៀនស៊ុយ។ ទាហានក្នុងស្រុកឃើញ**ហៃហ្វ៊ូលីម**ទៅដល់ ក៏បើកទ្វារអញ្ជើញឲ្យចូលទៅស្រុក។ **ម៉ាជុន**ក៏គំនាប់**ហៃហ្វ៊ូលីម** នាំទៅកាន់ទីឋាន។ **ហៃហ្វ៊ូលីម**ក៏ពណ៌នារឿងរ៉ាវ ដែល**កៀងអ៊ុយ**ប្រែចិត្តក្បត់ ស្ម័គ្រចិត្តចូលទៅនៅខាង**ខុងបេង** និងសេចក្តីដែលពួកទាហាននិយាយប្រាប់កណ្តាលផ្លូវនោះ ឲ្យ**ម៉ាជុន**ស្តាប់គ្រប់ប្រការ។

**ម៉ាជុន**ឮដូច្នោះ ក៏ដកដង្ហើមធំហើយថា ឯ**កៀងអ៊ុយ**នេះ ពីមុនមកក៏ឃើញថាជាមនុស្សទៀងត្រង់ល្អណាស់ មិនឃើញច្បាស់ថានឹងប្រែចិត្តជាក្បត់ គិតប្រែទៅចូលនឹងសត្រូវនោះឡើយ។ **លៀងសុី**នាយទាហានឮហើយ ក៏ជម្រាប**ម៉ាជុន**ថា ដែល**កៀងអ៊ុយ**ប្រែចិត្តគិតក្បត់ទៅចូលគំនិតនឹង**ខុងបេង**ដោយពិតនោះ ខ្ញុំបាទមិនយល់ឃើញផងសោះ ខូចជាមុខជា**កៀងអ៊ុយ**នឹងគិតឧបាយបញ្ឆោត**ខុងបេង**ទេ។ **ម៉ាជុន**ឮដូច្នោះឆ្លើយថា ដែលឯងនិយាយនេះយើងមិនទាន់ឃើញផងសោះ ព្រោះ**កៀងអ៊ុយ**ប្រាកដជាក្បត់ទៅចូលនឹង**ខុងបេង**ពិតហើយ បានជាទទួល**អ៊ុយអៀន**ឲ្យចូលទៅក្នុងស្រុក ទាល់តែរាស្ត្របានកើតសេចក្តីទុក្ខក្តៅក្រហាយពេញខេត្តខណ្ឌ រត់ចោលផ្ទះសម្បែងប្រពាក់ប្រពូនចេញមក យកតែអាយុជីវិត។ ខណៈនោះទទួលពេលក៏ព្រលប់ **ខុងបេង**លើកទ័ពចូលមកដល់ជើងកំពែងស្រុកតៀនស៊ុយ ទើបចាត់ទាហានម្នាក់ៗ មានរូបនិងមុខមាត់ប្រហែល**កៀងអ៊ុយ**ឲ្យឡើងជិះសេះចូលទៅស្រែកថា ឲ្យអញ្ជើញ**ហៃហ្វ៊ូលីម**ចេញមកជួបនឹងយើងជាប្រញាប់ នឹងបានសន្ទនាគ្នាបន្តិច។ **ហៃហ្វ៊ូលីម**និង**ម៉ាជុន**ឡើងឈរមើលពីលើសើនបន្ទាយ ឃើញច្បាស់ជា

**កៀងអ៊ុយ**បំបោលសេះវាំលំពែងចូលមកក៏នឹកភ័យណាស់។ **កៀងអ៊ុយ**បន្លំក្លែងនោះស្រែកឡើងថា ដែលយើងទៅចូលខាង**ខុងបេង**នោះ ក៏ពីព្រោះ**ហែហ៊្យូលីម**នាំគិតជាមុន ហេតុម្ដេចអ្នកឯងមកត្រឡប់ពាក្យសម្ដីវិញដូច្នោះ?

**ហែហ៊្យូលីម**ឆ្លើយថា អ្នកឯងជានាយទាហាននៅក្នុងដែនដីព្រះចៅ**ចូយ៉យ** ហេតុម្ដេចមកភ្លយភ្លេចព្រះតេជព្រះគុណអម្ចាស់វិញដូច្នេះ ថែមទៅចូលខាងបច្ចាមិត្តគិតទ្រុស្ដម្ចាស់ឯងវង្វេងយក**ខុងបេង**ជាគ្នា ហ៊ានមកចរចាច្រឡោងខាមតាមអំពើចិត្តឥតអៀនខ្មាស។ **កៀងអ៊ុយ**ក្លែងស្រែកឡើងថា អ្នកឯងបានសរសេរសំបុត្រប្រាកដផ្ញើទៅដល់យើង ថាឲ្យយើងស្ម័គ្រចិត្តគិតចូលទៅខាងមហាឧបរាជ**ខុងបេង**ចុះ យើងពិគ្រោះឃើញពិតបានជាតាំងចិត្តចូលទៅខាងណោះ យើងមិនដឹងសោះថាអ្នកឯងក្លែងបញ្ឆោតយើងឡើយ អ្នកឯងនេះហើយពេញជាមនុស្សអាក្រក់ ចេះកុហកឲ្យបានតែរួចខ្លួនពីស្លាប់ប៉ុណ្ណោះ គ្រានេះមហាឧបរាជអាចតាំងបណ្ដុះបណ្ដាលឲ្យយើងបានឡើងជានាហ្មឺនធំ បានជាយើងខិតខំមកធ្វើការយកអាសាវាយបំបែកស្រុកនេះឲ្យបានជូនមហាឧបរាជ។ ហើយ**កៀងអ៊ុយ**ក្លែងនោះ ក៏ស្ទុះបរពលចូលប្រកាប់ប្រចាក់។ **ហែហ៊្យូលីម** និង**ម៉ាជិន**ក៏ស្ទុះស្ទាក់តដៃគ្នាជាពន្លឹកសន្ធឹកសន្ធាប់។ **កៀងអ៊ុយ**ក្លែងក៏វាថយទ័ពត្រឡប់ទៅរក**ខុងបេង** ៗក៏តាំងតែថយទ័ពចំតម្រង់ទៅស្រុកអេកក្បួន។

ឯ**កៀងអ៊ុយ**មិនបានដឹងខ្លួន ឡើងឈរមើលលើសើនខ្ពស់ ឃើញ**ខុងបេង**ឲ្យទាហានបររទេះផ្ទុកស្បៀងតម្រង់មកបន្ទាយ**អ៊ុយអៀន**ច្រើនណាស់ ក៏ចុះនាំទាហានបីពាន់លើកចេញពីកំពែងស្រុក សម្រុកទៅដណ្ដើមយកស្បៀង**ខុងបេង**។ ពួកទាហាននាំស្បៀងក៏ព្រួតដៃប្រឹងតាំងត ហើយធ្វើជាស្ទុះឈ្លូសរចោលរទេះស្បៀងទាំងអស់ចេញ។ **កៀងអ៊ុយ**ក៏សម្រុកដេញដណ្ដើមយករទេះស្បៀងទាំងអស់បានមានអំណរណាស់ លើកទាហានក្រឡះវិលនឹងចូលទៅស្រុក ទទួល**ទៀវអេក** នាំទាហានមកស្ទាក់ពីមុខជាប់។ **ទៀវអេក**ក៏ស្ទុះសន្ធាប់ចូលទៅប្រយុទ្ធនឹង**កៀងអ៊ុយ**បានប្រាំបួនភ្លែង ទទួល**អងប៉េង**លើកទ័ពឈ្មួនមកជួយពីក្រោយថែមទៀត ក៏ព្រួតគ្នា

ពារប្រយុទ្ធនឹង**កៀងអ៊ុយ**ដោយសន្ធឹកសន្ធាប់ណាស់។ **កៀងអ៊ុយ**នឹងទល់ប៉ះដោយកម្លាំងពុំបាន ក៏បំពានបរសេះទម្លុះកងទ័ពរត់ទៅសំដៅទ្វារស្រុក។

ខណៈកាល**កៀងអ៊ុយ**លើកពលចេញពីស្រុកមកនោះ **អ៊ុយអៀន**ក៏បរពលទម្លុះទម្លាយវាយចូលទៅក្នុងស្រុកបាន ហើយឲ្យទាហានឡើងរក្សាសើនបន្ទាយដោយមាំមួនណាស់ **កៀងអ៊ុយ**ត្រឡប់មកឃើញទង់សម្គាល់ដោតនៅដេរដាសជាទង់របស់**ខុងបេង** ក៏ដូចជាស្លុតស្លុងវិញ្ញាណគ្មានកម្លាំងសោះ បំផាយសេះនាំពលទាំងអស់ដប់នាក់ស្រូតទៅស្រុកតៀនស៊ុយ ប្រទះនឹង**តៀវប៉ៅ**លើកលុកលុយស្ទាក់ពីមុខ **តៀវប៉ៅ**ក៏បរសេះគំហុកចូល ទាំងពលទាហានក៏ទន្ទ្រានតនឹង**កៀងអ៊ុយ**ដោយអង់អាចឥតញញោចភ្លឹក **កៀងអ៊ុយ**ក៏ចូលតទល់យ៉ាងពន្លឹកមហិមា តែថា កម្លាំងនឹងប្រឹងពារតទៅពុំបាន ក៏បំបោលសេះចោលទាហានទាំងអស់ ខំបង្រុះរត់ទៅដល់ស្រុកតៀនស៊ុយ ហៅទាហានឲ្យបើកទ្វារ នាយទ្វាររាទៅប្រាប់**ម៉ាជុន**ថា ដែល**កៀងអ៊ុយ**រត់មកនេះដោយសំណេះនឹងបញ្ឆោតយើងទេ ធ្វើឲ្យយើងបើកទ្វារទទួល។ **ម៉ាជុន**ក៏ឲ្យទាហានខ្មៅខ្នួលបាញ់ធ្នូចម្រុះពីក្នុងចេញមកដូចគ្រាប់ភ្លៀង។ **កៀងអ៊ុយ**ក៏ស្ទុះវាងគេចត្រឡប់មកវិញ។ ទ័ព**ខុងបេង**ក៏លើកដេញចោមរោមព័ទ្ធខ្លួន**កៀងអ៊ុយ**នៅជាកណ្ដាលរឿណរង្គ។ ឯ**កៀងអ៊ុយ**ក៏ស្ទុះស្ទុងពារទម្លាយសំដៅទៅរក**លៀងខៀន**ឯស្រុកសៀងឆេង។

ឯ**លៀងខៀន**នៅលើសើនកំពែងខ្ពស់ ក្រឡេកឃើញ**កៀងអ៊ុយ**បរសេះបង្រុះរួចពីក្នុងចំណោមទៅជិតមាត់ទ្វារ ក៏ខឹងណាស់ ស្រែកដៀលត្មះដេរថា អាចោរក្បត់! អាឯងរត់គេចទៅចូលខ្មាំងហើយ នឹងត្រឡប់ក្បាលវិលមកបញ្ឆោតឲ្យយើងបើកទ្វារទទួលម្ដេចបាន! អាឯងកុំស្មានថា យើងឆោតនឹងបើកទ្វារឲ្យខូចស្រុកយើងឬ? ថាហើយក៏ឲ្យទាហានបាញ់ធ្នូចម្រុះចុះទៅ។ **កៀងអ៊ុយ**ភ័យណាស់ ស្រែកយំខំបំបោលសេះកាត់សំដៅទៅស្រុកឡេងអាន់ ដល់ទៅព្រៃញាតិស្បាតមួយអន្លើបានឮសំឡេងទាហានស្រែកហ៊ោគឹកកង **គួនហ៊ិន**ក៏ស្ទុះចេញត្រសងមករងពីមុខ **កៀងអ៊ុយ**ភ័យស្លុតស្ទើរបាត់វិញ្ញាណ គិតនឹងស្ទុះបំពានចូលទៅតដៃនឹង**គួនហ៊ិន** ឃើញថាកម្លាំងក៏កាន់តែទន់ថយណាស់ ក្រឡាស់ញាក់សេះឲ្យគេចមកវិញ ស្រាប់តែឃើញកងទ័ព

**ខុងបេង**ស្ទុះដេញស្រចូលមក **ខុងបេង**ក៏ជិះរទេះតូចតាមច្រកភ្នំតម្រង់មកដល់។ **កៀងអ៊ុយ**ក៏ទាល់ផ្លូវបញ្ឈរសេះនៅទីនោះ។

**ខុងបេង**ស្រែកថា នែ៎**កៀងអ៊ុយ**! អ្នកឯងអស់កម្លាំងនិងតម្រិះរិះគិតហើយអ្នកអើយ! អ្នកឯងកុំខំប្រឹងទៅដល់ណា ខ្លួនអ្នកធ្លាប់មានតម្រិះប្រាជ្ញា ឥឡូវអ្នកអស់ថ្វីដៃ បានសេចក្តីលំបាកដល់ទីនេះហើយ ម្តេចឡើយមិនមកទទួលចំណុះចូលយើងតែម្តងទៅ? តើនឹងខំនៅធ្វើអ្វីទៀត? **កៀងអ៊ុយ**បានឮហើយ ក៏ឲ្យតឹងចង្អៀតក្នុងឱរា គិតថា ខ្លួនអញវេលានេះ នៅក្នុងកណ្តាប់ដៃគេ មិនដឹងថានឹងរដោះខ្លួនទៅខាងណា នឹងថយក្រោយដោយពលាការ **គួនហ៊ិន**នៅស្ទាក់ជាប់មាំមួនណាស់ ឃើញថាកម្លាំងអញនឹងប៉ះក៏អស់ណាស់ទៅហើយ បើនឹងចូលទៅជាឈ្លើយ**ខុងបេង**ក្នុងវេលានេះ ក៏នឹងរួចអាយុជីវិតប្រាកដ តែនឹងមាននិន្ទាថា ខ្លួនអញជាអ្នកក្បត់នឹងម្ចាស់របស់ឯង ខ្លួនអញពេញជាជាតិទាហាន គួរធ្វើឲ្យមានកេរ្តិ៍ឈ្មោះជាក់ស្តែងតទៅមុខចុះ លុះគិតដូច្នោះហើយ **កៀងអ៊ុយ**ក៏លោតចុះពីលើខ្នងសេះ ប្រញាប់ដៃចាប់គ្រប៊ីហូតឡើង នឹងអារ-កខ្លួនឯងសម្លាប់។

**ខុងបេង**ក៏ស្ទុះទៅប្រញាប់ដោយកម្លាំងភ័យ ព្រោះអាល័យស្តាយតម្រិះប្រាជ្ញានិងវិជ្ជាថ្វីដៃ**កៀងអ៊ុយ**ណាស់ ក៏លើកដៃទះដណ្តើមយកគ្រប៊ីពីដៃ**កៀងអ៊ុយ**បានហើយមានវាចាលួងលោមថ្នមចិត្តទៅ**កៀងអ៊ុយ**ថា ខ្លួនយើងនេះ តាំងពីព្រះចៅ**ឡៅពី**មិនទាន់យកមកទំនុកបម្រុងនៅឡើយ អ្នកអើយ យើងក៏នៅជាមនុស្សកម្សត់ទុគ៌តណាស់ តែចិត្តរបស់យើងគិតស្វែងស្វះរកមិត្តសម្លាញ់ដែលមានសិល្ប៍វិជ្ជា ក៏មិនបានជួបប្រទះនឹងអ្នកឯណា ដែលមានសតិបញ្ញាមុតមាំ ទើបតែថ្ងៃនេះ ជាបុណ្យព្រេងមកដឹកនាំឲ្យជួបប្រទះនឹងអ្នក យើងក៏ពេញចិត្តស្ម័គ្រស្រឡាញ់ហាក់ជាតិលោហិតនឹងគ្នា គួរតែអ្នកនឹងមានមេត្រីស្នេហាដល់យើងវិញ នឹងបានរួមចិត្តស្រឡាញ់ជួយធ្វើការទំនុកបម្រុងផែនដី ឲ្យបានសេចក្តីសុខតទៅ កុំឲ្យមានកេរ្តិ៍អាស្រូវថា មានតម្រិះវិជ្ជា ជាសេនាទាហានហើយ មិនសម្តែងនូវគុណវិជ្ជានោះឲ្យសមតាមប្រាថ្នា។

**កៀងអ៊ុយ**បានស្ដាប់សព្ទវាចា**ខុងបេង**ពោលដូច្នោះ ក៏ចុះចិត្តគិតឃើញវែងឆ្ងាយ សេចក្ដីទោមនស្សពីហឫទ័យវត្ថុជ្រះថា លើកហត្ថាឱនគំនាប់**ខុងបេង**ទៀបបាទ ដោយអភិវាទគោរព។ **ខុងបេង**ក៏ទាញដៃ**កៀងអ៊ុយ**ឲ្យក្រោកឡើង ឲ្យអង្គុយស៊ិប់លើរទេះជាមួយគ្នា ហើយបរម្ទីម្នាត្រឡប់ទៅក្នុងបន្ទាយ កាលចូលទៅដល់ទីសំណាក់ហើយ **ខុងបេង**ក៏ឲ្យរៀបអាហារលើតុតាំងអញ្ជើញ**កៀងអ៊ុយ**បរិភោគសេពសុរា **ខុងបេង**ក៏ធ្វើបដិសណ្ឋារៈពិគ្រោះនឹងវាយយកស្រុកតៀនស៊ុយនិងស្រុកសៀងឆេង ព្រោះយល់ឃើញចិត្ត**កៀងអ៊ុយ**មិនប្រែផ្សេងពីគ្នា។ **កៀងអ៊ុយ**ឆ្លើយថា ឈ្មោះ**អ៊ិនឆៀង** និង**លៀងស៊ី** ដែលជានាយទាហាននៅក្នុងស្រុកតៀនស៊ុយនោះ ជាភឿនទំនុកទុកចិត្តរបស់ខ្ញុំបាទ ៗនឹងធ្វើកលឧបាយឲ្យឈ្មោះទាំងពីរនាក់ស្ម័គ្រចិត្តមកចូលនៅនឹងមហាឧបរាជឲ្យបាន ឧបាយនោះខ្ញុំបាទនឹងគិតអានសរសេរសំបុត្រពីរច្បាប់ ចងនៅចុងព្រួញហើយបាញ់ចូលទៅឲ្យ**អ៊ិនឆៀង** និង**លៀងស៊ី** ធ្វើជាកលសឹកនៅក្នុងស្រុក សឹមយើងលើកទាហានពានសម្រុកព័ទ្ធពីក្រៅចូលទៅ គង់នឹងបានដោយងាយ។

**ខុងបេង**ឮដូច្នោះ ក៏យល់តាម។ ទើប**កៀងអ៊ុយ**សរសេរសំបុត្រភ្លាមបានពីរច្បាប់ ចងនឹងចុងព្រួញភ្ជាប់រួចហើយ ក៏ឡើងសេះបរសំដៅទៅដល់ជើងកំពែងលើកធ្នូឡើងគ្រវែងបាញ់ចូលទៅ។ ទាហានក្នុងស្រុកដែលនៅល្បាត ឃើញហើយក៏យកសំបុត្រនោះទៅឲ្យ**ម៉ាជុន** ៗយកទៅមើលដឹងសេចក្ដីក៏សង្ស័យណាស់ និយាយនឹង**ហែហ៊្វលឹម**ថា **អ៊ិនឆៀង** និង**លៀងស៊ី**ពីរនាក់នេះ ហើយនិង**កៀងអ៊ុយ**នោះជាមនុស្សមិត្តភក្ដិនឹងគ្នាមកពីដើម ឥឡូវនេះ**អ៊ិនឆៀង** ហើយនិង**លៀងស៊ី**ប្រែចិត្តគំនិតអាក្រក់ ធ្វើជាកលសឹកខាងក្នុងហើយ តើយើងនឹងគិតប្រការម្ដេច?

**ហែហ៊្វលឹម**ឆ្លើយថា **អ៊ិនឆៀង, លៀងស៊ី** ទាំងពីរនាក់នេះនៅក្នុងកណ្ដាប់ដៃយើងហើយ យើងត្រូវឲ្យបម្រើទៅហៅយកខ្លួនមកដោយឧបាយបញ្ឆោតកុំឲ្យដឹងខ្លួន បើមកដល់ហើយត្រូវចាប់សម្លាប់ចោលទាំងពីរនាក់ទៅ ទើបអស់ចម្រូងចម្រាស។ មនុស្សទំនុកទុកចិត្តរបស់**អ៊ិនឆៀង**នៅជិតនោះ លុះបានឮជាក់ ក៏លបលាក់គេចខ្លួនទៅប្រាប់**អ៊ិនឆៀង** ៗក៏វាងចុះទៅប្រាប់**លៀងស៊ី**តាមដំណើរហេតុគ្រប់

ប្រការ ហើយថា យើងនឹងស្ងៀមនៅម្តេចបាន ប្រាណនៃយើងគង់នឹងស្លាប់អសារ ត្រូវតែយើងរកឧបាយប្រាជ្ញាលបចេញទៅស្ម័គ្រនៅនឹង**ខុងបេង**វិញ ទើបរួចពីអន្តរាយ។ **លៀងស៊ី**បានស្តាប់ក៏ចាប់ចិត្តគិតឃើញត្រូវណាស់ លុះវេលាយប់**ហៃហ្វ៊ូលឹម**ឲ្យបម្រើមកហៅ**លៀងស៊ី, អ៊ិនផៀង**ជាច្រើនសា ដើម្បីនឹងប្រឹក្សាការរាជការ។ **អ៊ិនផៀង, លៀងស៊ី**ក៏ពុំបានទៅ នៅតែពិគ្រោះគិតគ្នាថា យើងនឹងទៅឥឡូវនេះ មុខជា**ម៉ាជុននឹង**សម្លាប់យើងហើយយើងក៏កុំទៅឡើយ គួរនឹងគិតរកឧបាយដោះខ្លួនឲ្យរួចទៅចុះ។ លុះពេលយប់ស្ងាត់**អ៊ិនផៀង** និង**លៀងស៊ី**ទាំងពីរនាក់ ក៏លបលាក់នាំទាហានដែលទុកចិត្តដប់នាក់ ចេញទៅបើកទ្វារទទួល**ខុងបេង**ចូលទៅក្នុងស្រុកបាន។ **ហៃហ្វ៊ូលឹម** និង**ម៉ាជុន**ឃើញពួកទាហានកងទ័ព**ខុងបេង**ចូលស្រុកបានដូច្នោះក៏ភ័យរលះរលាំងនាំទាហានសម្រាំងប្រមាណមួយរយនាក់ រត់ចេញទៅតាមច្រកទ្វារទិសឯលិច គេចតម្រង់ទៅស្រុកកៀងសៀ។

**លៀងស៊ី** និង**អ៊ិនផៀង** ទទួល**ខុងបេង**នាំទៅតាំងទ័ពប្រថាប់នៅក្នុងស្រុកហើយ ក៏បញ្ចុះបញ្ចូលប្រជាឲ្យនៅជាប្រក្រតីធម្មតា **ខុងបេង**ក៏ពិគ្រោះប្រឹក្សាការផែនដី នឹងនាហ្មឺនមុខមន្ត្រីនាយទាហានថា ធ្វើម្តេចយើងនឹងវាយយកបានស្រុកសៀងឆេងបាន? **លៀងស៊ី**ឆ្លើយថា **លៀងខៀន**ដែលនៅឈររក្សាស្រុកនោះជាប្អូនខ្ញុំបាទ ៗនឹងសុំយកអាសាទៅល្បួងលួងលោម**លៀងខៀន**ឲ្យមានចិត្តស្ម័គ្រមកចូលខាងមហាឧបរាជ ឲ្យបានទាំងស្រុកនោះផង។ **ខុងបេង**ឮដូច្នោះក៏សោមនស្សអរណាស់ ប្រើឲ្យ**លៀងស៊ី**រូតរះចេញទៅដល់ស្រុកសៀងឆេង លុះទៅដល់ហើយក៏ចូលទៅជួបនឹង**លៀងខៀន** បានសន្ទនាគ្នាដោយវាចារល្បួងលួងលោមតាមឧបាយ **លៀងខៀន**ក៏រួសរាយស្រាកស្រួលទទួលការ រួចទើបនាំគ្នាចូលមកគំនាប់**ខុងបេង** ៗក៏ទទួលសាទរមហិមា ឲ្យទ្រព្យជាបំណាច់ដល់**លៀងស៊ី, លៀងខៀន** និង**អ៊ិនផៀង** យ៉ាងគួរសមយ៉ាងច្រើន រួចហើយតាំង**លៀងស៊ី**ជាទីចៅហ្វាយស្រុកតៀនស៊ុយ តាំង**លៀងខៀន**ជាទីចៅហ្វាយស្រុកសៀងឆេង តាំង**អ៊ិនផៀង**ជាទីចៅហ្វាយស្រុកអេកកួន។

ទាហានទាំងឡាយក៏និយាយសាកសួរ**ខុងបេង**ថា មហាឧបរាជបើកលែង**ហែហ្វ៊ូលឹម**ទៅវិញមានប្រយោជន៍អ្វី? **ខុងបេង**ឆ្លើយថា យើងបើកលែង**ហែហ្វ៊ូលឹម**ទៅវិញ ព្រោះឃើញថាចំណេញបាន**កៀងអ៊ុយ**ម្នាក់ ដូចបានសត្វពាហនៈមួយ ឲ្យចម្រើនការគ្រប់ជំពូក លែង**ហែហ្វ៊ូលឹម**ទៅ ដូចលែងមាន់គកមួយប៉ុណ្ណោះ។ ស្លាប់**បាំងថង**បាត់ទៅ ចំពោះនឹងរកនរណាជំនួសគ្មានឡើយ បាន**កៀងអ៊ុយ**មកហើយ ដូចជា**បាំងថង**រស់ឡើងវិញដូចគ្នា បណ្ដាពួលពលយោធាឮ**ខុងបេង**ថា ដូច្នោះ ក៏ក្រាបចុះព្រមគ្នាសរសើរតម្រិះប្រាជ្ញា**ខុងបេង**ថា មហាឧបរាជដ៏វិសេសលើសមនុស្សលោកិយ វន្ទីឮល្បីទៅវែងឆ្ងាយណាស់។ ក្នុងខណៈនោះបណ្ដាស្រុកតូចធំនិគមជនបទនានា សឹងនាំគ្នាមកចំណុះចុះចូល**ខុងបេង**ច្រើនណាស់ **ខុងបេង**ក៏ប្រែផ្លាស់វាសីជ្រះថ្លាគិតភ្ជុំពលយោធាលើកទៅវាយយកខេត្តដែនខាងព្រះចៅ**ចូយ៉យ**ថែមទៀត លុះលើកទ័ពទៅដល់ភ្នំគីសាន់ ក៏បោះបង្គោលវាយកងទ័ពនៅក្បែរឆ្នេរស្ទឹងអ៊ុយឈុន។

ពួកល្បាតសេះក៏នាំព័ត៌មានទៅចូលស្រុកឡុកអៀង ដើម្បីឲ្យយកសេចក្ដីក្រាបទូលព្រះចៅ**ចូយ៉យ**ទ្រង់ជ្រាប ខណៈនោះព្រះចៅ**ចូយ៉យ**សោយរាជសម្បត្តិបានកន្លះឆ្នាំ (ព.ស ៧៧០) ជាទេសកាលខែមិគសិរ ស្ដេចចេញគង់ព្រះទីនាំងសេងទៀន នាហ្មឺនតូចធំជួបជុំទូលថា **ហែហ្វ៊ូលឹម**ចេញទៅធ្វើការរណរង្គសង្គ្រាមគ្រានេះ ចាញ់ប្រៀប**ខុងបេង** រត់ទៅនៅស្រុកកៀងសៀវលានេះ **ខុងបេង**លើកកងទ័ពចូលមកភ្នំគីសាន់ហើយ ទ័ពស្រួចលើកមកដល់ទល់មាត់ស្ទឹងអ៊ុយឈុន ឲ្យតាំងបន្ទាយនៅត្រើយខាងលិច គួរយើងនឹងប្រើល្បិចលើកទ័ពទៅតទល់ពីចម្ងាយទើបបាន។

ព្រះចៅ**ចូយ៉យ**ឮច្បាស់ ក៏ព្រួយព្រះទ័យណាស់ត្រាស់ថា បើដូច្នោះតើនរណាខ្លះនឹងមានអាសាចេញទៅធ្វើការយកជ័យជម្នះ**ខុងបេង**ឲ្យបាន? **អងឡុង**ក្រាបទូលថា បណ្ដានាហ្មឺនដែលមានបណ្ដាសក្តិដ៏ធំខ្ពស់មានកេរ្តិ៍ឈ្មោះតាំងពីព្រះចៅ**វុយអេង**នោះ នៅនឹងរឹងប៉ឹងពូកែមានតែ **ចូជិន១** សូមឲ្យព្រះអង្គទ្រង់ត្រាស់ហៅ**ចូជិន**ចូលទៅគាល់ហើយត្រាស់ថា កាលព្រះចៅ**ចូភី**ទៀបនឹងអស់ព្រះជន្មវស្សានោះ ក៏តាំងទុកព្រះទ័យធ្វើរាជការផែនដីលើលោក ឲ្យជួយអភិបាលរក្សា ឥឡូវ**ខុងបេង**លើក

ព្យុហៈយោធាកន្លងចូលមកក្នុងដែនយើងជ្រុលណាស់ហើយ ម្ដេចក៏លោកធ្វើព្រងើយកន្តើយដូច្នេះ? លោកភ្លេចព្រះតម្រាស់បណ្ដាំព្រះចៅ**ចូភី**ហើយឬ?

**ចូជិន**ទូលតបថា ទូលព្រះបង្គំជាខ្ញុំពុំបានភ្លេចព្រះតេជព្រះគុណព្រះចៅ**ចូភី**សោះ តាំងចិត្តជាសប្បុរសទៀងត្រង់ ប្រុងខ្លួនធ្វើរាជការថ្វាយស្នងព្រះតេជព្រះគុណដែលជាទម្ងន់ត្រាតែអស់ជីវិត តែទូលព្រះបង្គំជាខ្ញុំមកជញ្ជឹងគិតឃើញថាខ្លួនខ្ញុំឯងជាអ្នកមានសតិបញ្ញាតិចតួចស្ដួចស្ដើងណាស់ នឹងចេញមុខខំរូតរះ ក៏ឃើញថាគង់នឹងមិនសម្រេចឲ្យរហូតទៅបាន។ **អងឡង**ឆ្លើយឡើងថា លោកជាមន្ត្រីធំខ្ពស់មានយសពេញជាតិសេនាបតី ធ្លាប់ធ្វើរាជការជួយទំនុកបម្រុងផែនដីមក តាំងពីរាជ្យព្រះចៅ**វុយអេង** ចម្បងលើសគេ ដែលនឹងមកចរចាបន្ទាបបន្ថោកខ្លួនពួនមុខដូច្នេះ ឃើញថាជាការមិនសមគួរសោះ។ វេលានេះ គួរតែលោកនឹងអះអាងកាងក្រទា ខ្ញុំដែលចាស់ជរាមានអាយុ៧៦ឆ្នាំហើយ ក៏នឹងជួយចេញខ្លួនទៅអមរាជការអាសាផែនដីជាមួយនឹងលោកដែរ។

**ចូជិន**បានឮដូច្នោះ ក៏យកសេចក្ដីក្រាបទូលព្រះចៅ**ចូយ៉យ**ថា ដែលទូលព្រះបង្គំជាខ្ញុំទូលដូច្នេះ ព្រោះគិតជៀមខ្លួនណាស់ មិនមែននឹងព្រងើយកន្តើយនោះទេ បើប្រសិនមិនមានគេអ្នកឯណាមួយនឹងចេញមុខយកអាសាហើយ ទូលព្រះបង្គំជាខ្ញុំនឹងទៅខ្លួនឯង ដើម្បីធ្វើការតបស្នងព្រះតេជព្រះគុណត្រាតែសូន្យជន្មាយុ មិនអាល័យស្ដាយ តែសុំយក**គុយហ្វួយ**ជាបាល័ដ្ឋទ័ពជាប់ទៅផង។ ព្រះចៅ**ចូយ៉យ**ក៏មានព្រះទ័យត្រេកអរណាស់ ត្រាស់តាំង**ចូជិន**ជាមេកងទ័ពធំ តាំង**គុយហ្វួយ**ជាបាល័ដ្ឋទ័ព តាំង**អងឡង**ជាទីប្រឹក្សា ឲ្យលើកពលយោធាម្ភៃម៉ឺនចេញទៅ។ **ចូជិន**ក៏តាំងឲ្យ**ចូជុន**ជានាយទ័ពស្រួច តាំង**ចូចាន**ជាបាល័ដ្ឋ។ លុះបានឫក្សពារជានក្ខត្តសួស្ដីជ័យមង្គល ក៏ប្រជុំពួកពលជាក្បួនហែយ៉ាងទ័ពក្សត្រ លើកជាជួរសង្កាត់ចេញពីទីក្រុង។ ព្រះចៅ**ចូយ៉យ**ក៏ទ្រង់យាងជូនដំណើរទ័ពផុតកំពែងក្រៅ។ កងទ័ពក៏លើកសំដៅទៅដល់ឆ្នេរស្ទឹងអ៊ុយស៊ុយ ហើយក៏ឆ្លងទៅត្រើយម្ខាង តាំងបោះទ័ពឈប់នៅទិសបស្ចិម។

**ចូជិន** ក៏ប្រជុំសេនាទាហានប្រឹក្សាការរណរង្គសង្គ្រាមជាមួយនឹង**អងឡួង, គុយហ្គួយ**ដោយផ្លូវរាជការថា យើងនឹងគិតធ្វើម្ដេច ទើបនឹងមានជ័យជម្នះ**ខុងបេង**ក្នុងវេលានេះ? **អងឡួង**ឆ្លើយថា ប្រសាសន៍កុំព្រួយឲ្យសោះ ពេលព្រឹកស្អែកនេះ សូមឲ្យចាត់ទាហានទៅលើកទង់ជ័យវាយខាងមុខបន្ទាយឲ្យជាទីរុងរឿង ខ្ញុំបាទនឹងឡើងសេះចេញទៅចរចានឹង**ខុងបេង**ឲ្យដឹងបទបាទ គ្រាន់តែវាយ**ខុងបេង**ដោយអណ្ដាតពីរផ្ទាប់ ក៏នឹងចាប់**ខុងបេង**ឲ្យលើកដៃប្រណម្យសំពះ យកជ័យជម្នះបានហើយឲ្យ**ខុងបេង**ត្រឡប់ទ័ពទាំងប៉ុន្មានវិលទៅស្រុកសៃឈួនវិញ ទាហានហើយក៏មិនមានព្រួយទោម្នេញជាទីលំបាកឡើយ។

**ចូជិន**ឮដូច្នោះហើយ ក៏សោមនស្សរីករាយណាស់ ក្រោកយ៉ាងរហ័សទៅសរសេរសំបុត្រមួយច្បាប់ បិទស្រោមឲ្យបម្រើនាំទៅឲ្យ**ខុងបេង**ក្នុងបន្ទាយ សេចក្ដីថា ពេលព្រឹកស្អែកនេះ ឲ្យ**ខុងបេង**លើកទាហានចេញពីបន្ទាយមកចុះ នឹងបានច្បាំងគ្នាពីព្រលឹម ហើយ**ចូជិន**ក៏បង្គាប់ទាហានទាំងពួងឲ្យដាំបាយស៊ី និងត្រៀមខ្លួនជាស្រេចតាំងពីយាមបី ព្រលឹមស្រាងនឹងបានលើកទៅច្បាំងនឹង**ខុងបេង**។ លុះព្រឹកឡើង ទាហានទាំងសងខាង ក៏វាយឃ្មោះគោះគងទូងភេរីលើកទ័ពចេញពីបន្ទាយវាយឲ្យប្រទល់ទ័ពជាលំដាប់នៅមុខភ្នំគីសាន់ទាំងសងខាង។ ទាហាន**ខុងបេង**ក្រឡេកឃើញទាហាន**ចូជិន** មានកម្លាំងពលំខ្លាំងពូកែជាជាងទាហាន**ហែហ្គិលីម**ច្រើនណាស់ ខ្លះក៏គិតកោតញញើតដៃ។ លុះបានជោគជ័យត្រូវលើកចេញទៅប្រទល់មុខគ្នាវេលាព្រឹកនេះ សួរគងឃ្មោះក៏ស្ងប់ឈប់វាយទាំងសងខាង **អងឡួង**ក៏ឡើងសេះបរចេញទៅបញ្ឈរពីមុខទាហាន ឲ្យ**ចូជិន**នៅអមខាងស្ដាំ **គុយហ្គួយ**នៅអមខាងឆ្វេង នាយទាហានទ័ពស្រួចទាំងពីរកង ចេញត្រសងជាគូឃៀងខាងមុខទ័ព។

**អងឡួង**បង្គាប់ឲ្យទាហានសេះស្រែកទៅថា វើយទ័ពខាងនាយ ឲ្យអញ្ជើញចៅហ្វាយជាមេកងធំចេញមុខមក ឲ្យចៅហ្វាយយើងបាននិយាយការបន្តិច។ **ខុងបេង**បានឮដូច្នោះ ក៏ឡើងជិះរទេះតូចតែងខ្លួនពេញជាទីមហាឧបរាជ ឲ្យ**គួនហ៊ិន**នៅអមខាងស្ដាំ ឲ្យ**តៀវប៉ៅ**នៅអមខាងឆ្វេង ឲ្យ**ជូឡុង**និងនាយទាហានឯទៀតនៅជាកងក្រោយ ហើយក៏លើកចេញទៅពីមុខទ័ពធំ ក្រឡេកទៅឃើញមេទ័ពម្ខាងភ្ជុំពល

បញ្ឈរសេះមុខទាហាន មានបាំងសប្បធន់ ជាគូយៀងរៀងរាយគ្នាទាំងបីសេះ។ **ខុងបេង**ក៏គិតត្រិះរិះថា នាយទាហានចាស់ដែលនៅកណ្ដាលប្រហែលជាទីប្រឹក្សាមេទ័ពសម្រាប់ការ ឲ្យហៅយើងចេញមកចរចា ប្រាថ្នានឹងបញ្ចុះបញ្ចូលឲ្យយើងទទួលចំណុះចុះចាញ់ជាប្រាកដណាស់។ **ខុងបេង**ក៏បររទេះស្រូតចេញរហ័សទៅមុខទ័ព បង្គាប់ទាហានឲ្យស្រែកតបទៅថា ចៅហ្វាយធំរបស់យើង អញ្ជើញចេញមកហើយ ចៅហ្វាយអ្នកឯងនឹងថ្លែងប្រាស្រ័យយ៉ាងណា ឲ្យថាមកចុះ!

**អងឡុង**ឮដូច្នោះ ក៏បរសេះចូលទៅដល់មុខរទេះ**ខុងបេង**។ ទាំងពីរប្រាណក៏ឱនគំនាប់គ្នាតាមទំនៀម ហើយ**អងឡុង**និយាយនឹង**ខុងបេង**ថា ខ្ញុំបាទឮកិត្តិសព្ទល្បីល្បាញឈ្មោះអ្នកណាស់មកហើយ អ្នកអើយ! ថ្ងៃនេះទើបប្រទះឃើញមុខគ្នាជាភ័ព្វគាប់ប្រពៃណាស់ ខ្លួនអ្នកជាមនុស្សមានវិជ្ជាឆ្លៀវឆ្លាស ដឹងច្បាស់នូវទំនៀមទម្លាប់ច្បាប់រាជការផែនដី ហេតុអ្វីទៅចូលគប់ប្រសព្វនឹងអាមនុស្សពាលត្រកូលចោក ហើយលើករេហ៍ពលមកតទល់តនឹងយើងដូច្នេះ?

**ខុងបេង**ឆ្លើយតបថា អ្នកឯងមិនគួរនឹងប៉ោនមកចរចាដូច្នេះសោះ ព្រោះព្រះចៅ**ឡៅពី**ជាម្ចាស់ខ្ញុំនោះ ប្រាកដជាពូជព្រះរាជវង្សាព្រះចៅ**ហៀនតេ**ប្រាកដមែន ព្រះអង្គទ្រង់រិះគិតទំនុកបម្រុងផែនដីឲ្យសុខ ត្រាស់បង្គាប់យើងទុកឲ្យចាំកម្ចាត់អាចោរក្បត់ សត្រូវរាជសម្បត្តិចេញឲ្យបាន បានជាយើងលើកទាហានទន្ទ្រានចូលមក។ **អងឡុង**ឆ្លើយថា បុរាណរាជប្រវេណីពីដើមមកលោកថា ផែនដីនោះនឹងចំពោះកាន់យកជាទៀងពុំបាន នរណាក្លាហានមានចេស្ដានុភាពអាចកម្រាបបច្ចាមិត្តយករាជសម្បត្តិបានដោយពលការ ត្រូវហៅថា អ្នកនោះជាក្សត្រដ៏ប្រពៃ ឯផែនដីនៃវង្សព្រះ**ហៀនតេ**នោះ ចុះរៀវរោយដោយសេចក្ដីអន្តរាយគ្រប់ខេត្ត មានកើតហេតុជាចលាចលរាល់ឆ្នាំរៀងមកពុំដាច់ កាលព្រះចៅ**ឡេនតេ**នៅសោយរាជ្យជាស្ដេច ក៏កើតពួកចោរជូតក្បាលលឿងបះបោរឡើងពេញស្រុក បណ្ដារាស្ត្រក៏កើតកលយុគជាទុក្ខក្ដៅក្រហាយណាស់ លុះព្រះចៅ**ហៀនតេ**បានសោយរាជ្យជាម្ចាស់ **តាំងតុះ**ប្រព្រឹត្តអាក្រក់ផ្សេងៗកើតចលាចលរាល់កន្លែងទូទាំងព្រះរាជធានី ក្រោយទៀត **លីឈុយ, គុយគី** ក៏ញីញក់ធ្វើឲ្យស្ដេចនិងរាស្ត្រកើតទុក្ខ នោះអស់ពួកចៅហ្វាយ

ស្រុកគឺ **អ៊្វួនសុត, អ៊្វួនសៀវ, ឡៅពៀវ, លីប៉ោ**ជាក្បត់ តាំងខ្លួនជាស្ដេចដោយសទ្ធត តែគ្នាឯង ប្រជែងដណ្ដើមស្រុកមិនចំណុះអ្នកណា រាស្ត្រប្រជាក៏កើតក្ដៅក្រហាយពន់ប្រមាណ។ គ្រានោះ ព្រះចៅ**ហៀនតេ**ក៏បាននូវទុក្ខទុរន់ដូចពងមាន់តាំងនៅលើថ្មសិលា ហាក់តែបានព្រះចៅ**វុយអេង**មានបុណ្យវាសនាជាម្ចាស់យើង ជួយឧបត្ថម្ភគាំពារ ភ្ជុំពលយោធាកម្ចាត់សត្រូវទាំងនោះឲ្យវិនាសប្រាសទៅបាន ទើបព្រះចៅ **ហៀនតេ** នូវអស់អាណាប្រជានុរាស្ត្រសព្វឋាន បានធ្មេចភ្នែកដេកលក់សុខមកដល់សព្វថ្ងៃនេះ ហេតុដូច្នេះ ទើបបណ្ដាលឲ្យមានភ្លៀងបង្អុរជោរជន់រាល់រដូវ រាស្ត្របានធ្វើស្រែស្រូវ នូវសារពើដំណាំដាំចម្ការ ស្បៀងអាហារក៏បរិបូរពេញលេញឈ្មួញជួញប្រែក៏ទ្វេមានចំណេញ មិនខ្វះខាតសព្វទីឋាន។

ពាក្យចាស់បុរាណមានពោលទុកថា កើតជាមនុស្សានៅលើផែនដី គប្បីឲ្យចេះពិគ្រោះពិចារណាមើលការសម្ដាយ បើនឹងរើសរកចៅហ្វាយរកនាយ ត្រូវឲ្យរកអ្នកមានបុណ្យសម្ភារបារមី ទើបគប្បីឲ្យចូលទៅលំអុតលំឱន ជ្រកកោនខ្លួននៅនឹងអ្នកនោះ ទើបនឹងមានកេរ្ដិ៍ឈ្មោះខ្ពស់ថ្លៃ បានសេចក្ដីសុខវែងឆ្ងាយ បើចោលពាក្យបុរាណទាំងឡាយកាលណា អាត្មាក៏គង់នឹងវិនាសសោះសូន្យដល់ជីវិត ឥឡូវព្រះចៅ**ចូយ៉យ**បរមពិត្រ មានព្រះតម្រាស់ឲ្យយើងនាំទាហានឯកមួយពាន់ កូនទាហានម្ភៃម៉ឺនលើកមករឹបជាន់ពួកអ្នក ៗគប្បីសម្លឹងមើលឲ្យជាក់ចុះ ចំពោះទ័ពយើងដូចជាភ្លើងឆេះព្រៃព្រឹក្សា យើងគន់មើលពលយោធារបស់អ្នក ហាក់បីដូចអំពិលអំពែកតូចហើរគួចទៅជាប់នៅចុងស្មៅជើងក្រាស បើនឹងខំច្រឡាសចេញមុខមកតស៊ូនឹងយើងទំនើងនឹងបរាជ័យក្ស័យវិនាសអស់ជីវិតរលីង ខ្លួនអ្នកឯងជាមនុស្សមានសតិបញ្ញាស្រៀវស្រួចណាស់ បានដឹងច្បាស់នូវទម្លាប់ទំនៀមតាមក្រសែបុរាណ ម្ដេចក៏គ្មានស្គាល់កំហុសជាទោសមហន្ត ដែលខ្លួនភពភាន់ទៅនៅនឹង**ឡៅពី**នោះសោះឡើយ នេះអ្នកអើយ! អ្នកឯងចូរមកឱវាទលន់តួយើងដោយស្រួលចុះ យើងនឹងអនុគ្រោះនាំយកសេចក្ដីទៅក្រាបទូលព្រះចៅ**ចូយ៉យ**ឲ្យត្រាប្រណីអភ័យទោស សូមឲ្យទ្រង់ប្រោសតាំងឲ្យអ្នកធ្វើជានាហ្មឺនធំតទៅទៀត ឃើញថាល្អជាជាងនៅនឹង**ឡៅសៀន**ច្រើនប្រការ សូម្បីទាំងពលសេនា ក៏នឹងបានសេចក្ដីសុខតាមអ្នកផង។

**ខុងបេង**តាំងស្តាប់ចប់សព្វវាចា ក៏អស់សំណើចហើយថា យើ! អ្នកឯងនេះជានាហ្មឺនចាស់ទុំ បានធ្វើជាធំក្នុងរាជការព្រះចៅ**ហៀនតេ**ទ្រង់ប្រោសប្រាណ គួរតែប្រមាណនាំយកព្រះតេជព្រះគុណដែលមានលើខ្លួននោះមកចរចា ឲ្យបានជាបែបច្បាប់ទម្លាប់ទំនៀមខ្លះទៅ ម្តេចក៏ត្រឡប់រមិលគុណម្ចាស់សោះសូន្យដូច្នេះ! ចូរអ្នកឯងទប់បង្អៀរសេះឲ្យនឹង ប្រុងស្តាប់យើងនិយាយតែមួយមាត់ឲ្យដឹងខ្លួនសិន៖

“កាលពីព្រះចៅ**ឡេនតេ**បានសោយរាជសម្បត្តិនោះ ចំពោះមានពួកខន្ទីវាញាំញីញុះញង់ឲ្យស្តេចទ្រង់វង្វេងព្រះទ័យ បានជារាជការផែនដីភាន់ប្រែជាចលាចល កើតពួកអាចោរកំណាចកំហល់ជួតក្បាលលឿងពេញស្រុក គ្រាក្រោយ ដោយ**តាំងតុះ**ជារាជសត្រូវវាញាំញី កន្លងមក **លីឈុយ, គុយគី** ប្រែចិត្តក្បត់ប្រព្រឹត្តទុច្ចរិតនឹងផែនដី ទាល់តែព្រះចៅ**ហៀនតេ**មានព្រះទ័យក្តៅក្រហាយវាយមាយដោយទុក្ខទោមនស្ស ចាត់ការឲ្យខុសនឹងព្រះរាជកំណត់បទតបះអយ្យការដោយសារតែមនុស្សថោកទាប ស្តេចមិនបានជ្រាប យកមកតាំងជាមនុស្សឲ្យទំនុកបម្រុងរាជការ ខ្លួនឯងយើងក៏យល់ស្គាល់ឥរិយា គឺជាអំបូរត្រកូលហីនជាតិ កើតនៅក្នុងស្រុកកាំងហែ អាស្រ័យដោយមានសតិបញ្ញា ទើបមានគេស្នេហាស្រឡាញ់រាប់អាន ហើយជាអ្នកមានកតញ្ញូនឹងមាតាបិតា គិតធ្វើការថ្វាយឆ្លងព្រះតេជព្រះគុណព្រះចៅ**ហៀនតេ**ដោយសុចរិត ជួយយកចិត្តឃើផ្អាលដល់ក្រសែព្រះរាជវង្ស និងទ្រទ្រង់លើកតម្កើងឲ្យដល់ទៅរាជសម្បត្តិ ទើបពិតជាមនុស្ស ដែលអ្នកឯងមកជាត្រឡប់ជាមិត្តទ្រុស្ត ទៅចុះចិត្តស្និទ្ធស្រឡាញ់អាចោរកំណាច អាចដណ្តើមយករាជសម្បត្តិរបស់ព្រះមហាក្សត្រវិញ ដូច្នេះ ទោសអ្នកឯងត្រង់នេះ មិនទម្ងន់លើសអាចោរកំណាចទេឬ? មនុស្សត្រង់ល្អគេដឹងឮកេរ្តិ៍ឈ្មោះអ្នកឯងអាក្រក់យ៉ាងនេះ គេក៏ឈឺឆេះពុះក្តៅទូទាំងពេញនគរ ទើបនាំគ្នារឹករវមកប្រឡេះសាច់អ្នកឯងស៊ីទាំងរស់ឲ្យបាន សូម្បីទេវតា អារក្ស ស្ថិតនៅលើមេឃអាកាសសព្វឋាន ក៏មានចិត្តពុះក្តៅមួម៉ៅខ្លាំងណាស់ មុខជានឹងចុះមកវះពន្លះសាច់ផ្តាច់ជីវិតអ្នកឯងឥឡូវនេះពុំខានទេ យើងក៏បានគិតគ្នេរឃើញថា បុណ្យបារមីនៃពូជព្រះរាជវង្សព្រះចៅ**ហៀនតេ**នោះ នៅមានច្រើនអនេកណាស់។ ព្រះចៅ**ឡៅពី**ជាម្ចាស់ ក៏ទើបបានជាប់ពិភពគ្រប់គ្រងប្រជាជននៅមណ្ឌលស្រុកសៃឈួន

តព្រះរាជវង្សមក ខ្លួនយើងក៏បានកាន់យកនូវព្រះតម្រាស់ នៃព្រះចៅ**ឡៅសៀន** ឲ្យលើករេហ៍ពលសកលយោធាមកប្រហារបំផ្លាញអាចោរសត្រូវរាជសម្បត្តិ ឲ្យខ្ចាត់វិនាសឥឡូវនេះ អ្នកឯងគិតនឹងធ្លាក់របេះក្បាលពីលើស្មា បើខ្លាចស្តាយអាយុសង្ខារគួរតែមុខជ្រកសិកលាក់ខ្លួនពួនឲ្យបាត់ទៅ កុំបីមកនៅបង្ហាញមុខជាឧកជាទុក្ខប្រារព្ធពីរាជការផែនដីនោះឡើយ ឲ្យថយទៅគិតឲ្យហើយថា ខ្លួនចាស់ជរា អស់ការគេនឹងប្រាស្រ័យប្រើប្រាស់ បីដូចគោកញ្ចាស់ឈរនៅមាត់ទ្វារក្រោល បើនឹងដួលស្លាប់ទៅមើលមុខពួកព្រះរាជវង្សព្រះចៅ**ហៀនតេ**ដូចគេម្តេចបាន។ នែ៎! អាចោរកញ្ចាស់សាមាន្យ អាឯងចូរវិលត្រឡប់ទៅប្រាប់ចៅហ្វាយអាឯង ជាមេចោរក្បត់រាជសម្បត្តិឲ្យចាត់លើកកងទ័ពមកច្បាំងគ្នាឲ្យឆាប់ នឹងបានឃើញថ្វីដៃចំណាប់ទៅខាងណាជាអ្នះជាចាញ់”។

**អងឡុង**ឮហើយ ក៏ឲ្យក្តៅខ្នាញ់ពេញកម្លាំងណាស់ ដោយអាការជាមនុស្សចាស់ទន់ពលាការ ក៏ស្រែកដោយសំឡេងខ្លាំងអស្ចារ្យលើសប្រមាណ ទាល់តែភ្លាត់ខ្លួនប្រាណធ្លាក់ពីលើខ្នងសេះ របេះបោកទៅលើព្រះធរណី ដូចគេបត់កបាក់ជាពីរក្ស័យជីវិតក្នុងខណៈនោះ។ **ខុងបេង**ឃើញដូច្នោះ ក៏លើកស៊ែចង្អុរមុខ**ចូជិន**ហើយស្រែកថា នែ៎! **ចូជិន** អ្នកឯងត្រូវចាត់ចែងសេនាទាហានរើសសុទ្ធតែដៃឯក ព្រឹកស្អែក យើងនឹងលើកចេញមកច្បាំងគ្នា។ ថាហើយ**ខុងបេង**ក៏លើកពលយោធាចូលបន្ទាយ។

ឯ**ចូជិន**ក៏ចាត់ចែងតែងសំស្កាសព**អងឡុង** តាមទំនងយសជាមន្ត្រីធំ ហើយឲ្យហែនាំចូលទៅស្រុកក្រុង។ **គុយហ្វួយ**និយាយនឹង**ចូជិន**ថា **ខុងបេង**ឃើញថាយើងកំពុងជ្រួលច្របល់នឹងសព**អងឡុង**ដូច្នេះ មុខជាយប់នេះ**ខុងបេង**នឹងឲ្យលើកមកលុកបន្ទាយយើងពុំខាន សុំឲ្យលោកចាត់ទាហានទៅបង្កប់សព្វច្រកផ្លូវ នៅខាងក្រោយភ្នំគីសាន់ បើឃើញទាហាន**ខុងបេង**លើកមកហើយ ត្រូវចេញដណ្តើមយកបន្ទាយវាឲ្យបាន ឯយើងខាងនេះ ត្រូវនាំទាហានចេញទៅពួនបង្កប់នៅក្រៅបន្ទាយ មុខជាយើងនឹងទម្លាយទ័ព**ខុងបេង**ឲ្យបរាជ័យបាន។

**ចូជិន**បានស្តាប់ក៏យល់ឃើញត្រូវ ទើបថា គំនិតដែលអ្នកគិតដូច្នេះ ត្រូវដូចគំនិតយើងគិតទុកគ្រប់ប្រការ ហើយក៏ចាត់**ចូជុន** និង**ចូថាន**ឲ្យលើកពលយោធាទៅក្រោយភ្នំគីសាន់ បំបែកទាហានពួនបង្កប់តាមបង្គាប់**គុយហួយ**សព្វគ្រប់។ លុះដល់ពេលយប់ **ចូជិន**ក៏ឲ្យទាហាននៅរក្សាបន្ទាយប្រហែលដប់នាក់ រួចឲ្យជញ្ជូនសំរាមនិងឧសទៅដាក់គររោយពេញភាគបន្ទាយ រួចក៏និយាយប្រាប់ថា បើ**ខុងបេង**លើកមកដល់ឲ្យដុតភ្លើងឡើងជាសញ្ញា។

ខណៈកាល**ខុងបេង**វិលចូលទៅក្នុងបន្ទាយនោះ លុះដល់ពេលយប់ក៏ឲ្យហៅ**ជូឡុង**ទៅប្រាប់ជាមួយនឹង**អ៊ុយអៀន**ថា ពេលយប់នេះ ត្រូវឲ្យអ្នកទាំងពីរលើកទាហានទៅលុកបន្ទាយ**ចូជិន**ឲ្យបាន។ **អ៊ុយអៀន**ជម្រាប**ខុងបេង**ថា ឯ**ចូជិន**ជាមនុស្សមានសតិបញ្ញា ធ្លាប់ធ្វើការណរង្គសង្គ្រាម ដែលយើងនឹងធ្វើតាមគំនិតគិតមើលងាយថា **ចូជិន**កំពុងរវល់នឹងសំស្ការសព**អងឡង** ហើយប៉ងលើកទាហានទៅលុកបន្ទាយឲ្យបាននោះ ខ្ញុំបាទយល់ឃើញថាមុខជាមិនស្រួលទេ ព្រោះ**ចូជិន**គេបម្រុងប្រយ័ត្នការអស់ហើយ។ **ខុងបេង**អស់សំណើច ហើយថា យើងចូលចិត្តឲ្យ**ចូជិន**ដឹងខ្លួនរៀបពួនបង្កប់ទ័ពឲ្យស្រេចទៅចុះ បើមែនដូច្នោះ ទើបយើងធ្វើការបានស្រួលទាំងអស់ យើងក៏បានពិគ្រោះស្គាល់គំនិត**ចូជិន**អស់ហើយ មុខជាលើកទាហានទៅពួនបង្កប់ក្រោយភ្នំគីសាន់ ចាំដណ្តើមយកបន្ទាយយើងជាប្រាកដ បានជាយើងដាក់កំណត់ឲ្យអ្នកទាំងពីរលើកទ័ពទៅឲ្យគ្រាន់តែ**ចូជិន**ឃើញប៉ុណ្ណោះ បើឃើញបន្ទាយច្បាស់ ត្រូវឲ្យបោះទ័ពបង្កប់នៅពីឆ្ងាយ កាលណាបើឃើញយើងដុតភ្លើងជាសម្គាល់ហើយ អ្នកឯងត្រូវលើកទាហានចេញទៅស្ទាក់ផ្លូវឲ្យជាប់ បើឃើញទ័ព**ចូជិន**បែករត់ពីយើងទៅ ត្រូវឲ្យបើកផ្លូវហើយដេញតាមកាប់សម្លាប់ពួកវាត្រាតែដល់បន្ទាយ **ចូជិន**ក៏គង់នឹងបែកបាក់ព្រាត់ព្រាយនឹងពួកយើងប្រាកដ។

**ខុងបេង**ឲ្យ**គួនហ៊ិន** និង**តៀវប៉ៅ**នាំទាហានទៅតាំងបង្កប់នៅក្រោយភ្នំគីសាន់ ហើយបង្គាប់ថា បើឃើញ**ចូជិន**បែកទ័ពត្រឡប់រត់ទៅ ត្រូវឲ្យដេញតាមត្រាតែដល់បន្ទាយ។ **គួនហ៊ិន**, **តៀវប៉ៅ** ក៏លើកទាហានទៅធ្វើតាម**ខុងបេង**បង្គាប់គ្រប់ប្រការ **ខុងបេង**ទើបចាត់ប្រើ**ម៉ាតាយ**, **ទៀវអេក**, **ទៀវងី** និង **អងប៉េង** បួននាយឲ្យនាំ

ទាហានទៅពួនបង្កប់នៅក្រៅបន្ទាយ ហើយបង្គាប់ថា បើឃើញភ្លើងឆេះឡើងជាសញ្ញា ត្រូវឲ្យចោមព័ទ្ធប្រជិតចូលមក ហើយ**ខុងបេង**ប្រើទាហានឲ្យជញ្ជូនឧសនិងសំរាមទៅគរទុកក្នុងបន្ទាយជាច្រើន រួចនាំទាហានពួនពីក្រោយបន្ទាយ។

ឯ**ចូជុន** និង**ចូចាន** ដែលលើកទាហានទៅពួនបង្កប់នៅក្រោយភ្នំគីសាន់នោះ លុះពេលយាមពីរយប់ ក៏ចាត់ទាហានឲ្យចេញទៅល្បាតមើលតាមផ្លូវមុខភ្នំ ឃើញកងទ័ពធំដែល**ខុងបេង**ប្រើទៅ ក៏នឹកសរសើរថា **គុយហ្គួយ**មានសតិបញ្ញាស្រៀវស្រួចមែនណាស់ ដឹងច្បាស់ការប្រមាណមិនល្អៀងខុសទៅបាន គ្មាននរណានឹងប្រៀបផ្ទឹមឲ្យដល់។ បម្រើក៏វិលទៅពន្យល់**ចូជិន**ឲ្យដឹងការ នោះ**ចូជុន, ចូចាន**ក៏ស្រូតលើកទាហានទៅដល់បន្ទាយ**ខុងបេង** តាំងឲ្យពារទម្លាយបន្ទាយចូលទៅ ឃើញស្ងាត់សូន្យទាំងអស់ គ្មានមនុស្សនៅពិភ័ក្តិរក្សា ក៏នាំគ្នាតក់ស្លុតរន្ធត់ចិត្តគិតថា មុខជា**ខុងបេង**ធ្វើកល តាំងតែជ្រួលច្របល់ត្រឡប់ទ័ពថយចេញ ភ្លើងក៏ឆេះពេញអណ្តាតស្ពាត់ជុំវិញបន្ទាយ ទ័ព**ចូជិន**ក៏បាក់ធ្លាយប្រពាក់ប្រពូនជាន់លើគ្នា។ នាយទាហានបួននាក់ដែលពួនបង្កប់ ក៏ម្នីម្នាវាយឃ្មោះគោះគងទូងភេរីស្រែកហ៊ោ ចេញមកប្រឡូកកាប់ចាក់**ចូជុន** និង**ចូចាន** ក៏បែកបាក់កងទ័ពជាប់តែទាហានសេះមួយរយដោយនឹងខ្លួន រត់ប្រពូនចេញទៅតាមផ្លូវធំ។ **ខុងបេង**ស្ទុះចេញពីមុខភ្នំមកស្ទាក់ទទឹងផ្លូវ ហើយស្រែកថា អាចោរ! អាឯងទៅណា? **ចូជុន** និង**ចូចាន**ភ័យខ្លាំងណាស់ ក៏បំផាយសេះប៉ះទម្លាយបន្ទាយចេញទៅ។ **អ៊ុយអៀន** និង**ជូឡុង**ក៏លើកទាហានដេញសំដៅទៅពីក្រោយ។

ឯទាហាន**ចូជិន**ដែលនៅក្នុងបន្ទាយ ឃើញ**ចូជុន**និង**ចូចាន**នាំទាហានបំផាយសេះរត់តម្រង់ចូលមក ក៏ស្មានថា ជាទាហាន**ខុងបេង**លើកមកលុកបន្ទាយ ទើបនាំគ្នាប្រញាយដុតភ្លើងឡើងជាសម្គាល់ **ចូជិន** និង**គុយហ្គួយ** ក៏នៅពិភាល់មិនទាន់ច្បាស់ ក្រឡាស់បរពលវាយប្រសព្វចូលមកទៀត ទទួល**គួនហ៊ិន** និង**តៀវប៉ៅ**ដែលជែកជៀត លើកទ័ពមកដល់ស្គាល់ជាក់ជាទ័ព**ចូជិន**វង្វេងច្របល់កាប់ចាក់គ្នា **គួនហ៊ិន** និង**តៀវប៉ៅ**ក៏លើកបំពារចូលទៅត្រួតនឹងទ័ព**អ៊ុយអៀន**បានជាបីមុំ ភ្ជុំគ្នាព្រួតចាក់កាប់សម្លាប់ទាហាន**ចូជិន**ស្លាប់ច្រើនណាស់ ខ្លះស្ទុះរត់រួចជីវិតក៏រត់ព្រាត់ព្រាយ

ផ្ដាយពីក្នុងចំណោមចេញទៅ។ នាយទាហានខាង**ខុងបេង**ទាំងប៉ុន្មាន លុះបានជ័យជម្នះហើយ ក៏នាំកងទ័ពត្រឡប់ទៅរក**ខុងបេង**ក្នុងបន្ទាយ។

លុះព្រឹកព្រាងស្វាងអរុណោទ័យ **ចូជិន**និង**គុយហ្វួយ**ក៏ប្រមូលទាហានដែលសល់ពីស្លាប់លើកប្រញាប់ចូលទៅក្នុងបន្ទាយវិញ ហើយប្រឹក្សាគ្នាថា យើងធ្វើសឹកសង្គ្រាមតនឹង**ខុងបេង**វេលានេះ ក៏អស់តម្រិះដែលខ្លួនចេះដឹងប៉ុណ្ណឹងដែរ តែថា នៅគង់ចាញ់ប្រៀបរបស់គេផ្ទេរកលលើយើងទៀត យើងនឹងគិតឆ្លៀតរកផ្លូវឧបាយយ៉ាងណា ឲ្យ**ខុងបេង**អាចរអាត្រឡប់ទ័ពទៅវិញបាន? **គុយហ្វួយ**ឆ្លើយថា ធម្មតាការសង្គ្រាមនេះ នឹងសម្គាល់តាមចេះគិតឲ្យបានតែឈ្មោះមួយយ៉ាងមិនបានទេ ទោះនឹងអាងថ្វីដៃខ្លាំងពូកែយ៉ាងណា ក៏គង់មានថ្លោះការបរាជ័យមិនលែង។ លោកកុំអាលចំបែងតូចចិត្ត ខ្ញុំបាទនឹងគិតធ្វើឲ្យ**ខុងបេង**ថយទ័ពទៅវិញ។

**គុយហ្វួយ**និយាយថា ស្រុកសែកៀងនៅឆៀងទិសឯលិចដាច់ពីដែនយើងនេះ កាលព្រះចៅ**វុយអេង**មានព្រះជន្មនៅឡើយ ស្រុកនេះហើយរមែងចងមេត្រីនឹងគ្នាទៅវិញទៅមក ហើយទ្រង់ក៏តែងនាំយកគ្រឿងបណ្ណាការទៅគំនាប់ថ្វាយ **ទៀតលីកៀត** ជាម្ចាស់ស្រុកសែកៀងគ្រប់ៗឆ្នាំ ឥឡូវសូមលោកចាត់ឲ្យនាំសំបុត្រទៅដល់**ទៀតលីកៀត** សេចក្ដីថា សូមឲ្យលើកពលយោធាគេចពីក្រោយចូលមកជួយវាយស្រុកសៃឈួន បើបានស្រេចការវេលាណា យើងនឹងតែងគ្រឿងបណ្ណាការនាំចូលទៅតបស្នងសងគុណឲ្យពេញខ្នាត។ **ចូជិន**បានស្ដាប់បទបាទដែល**គុយហ្វួយ**និយាយ ក៏ឲ្យឃើញត្រូវនឹងចិត្ត ទើបតែងសេចក្ដីសំបុត្រមួយច្បាប់និងគ្រឿងបណ្ណាការ ចាត់បម្រើឲ្យនាំសារនោះចូលទៅថ្វាយដល់ **ទៀតលីកៀត**ឯស្រុកសែកៀង។

ឯក្នុងស្រុកសែកៀងនោះ មាននាហ្មឺនធំពីរនាក់ ម្នាក់កាន់ក្រសួងខាងក្រុមព្រះនគរបាលឈ្មោះ**ង៉ែតាន់** ម្នាក់កាន់ក្រសួងខាងក្រុមយោធាឈ្មោះ**អតគិត**។ លុះបម្រើ**ចូជិន**ចូលទៅដល់ក៏ទៅគំនាប់**ង៉ែតាន់** ៗក៏នាំបម្រើនោះព្រមទាំងសារនូវគ្រឿងបណ្ណាការ ចូលទៅគាល់ព្រះចៅ**ទៀតលីកៀត** ៗក៏យកសេចក្ដីសារនោះមកពិគ្រោះសួរនាហ្មឺនទាំងពួង **ង៉ែតាន់**យកសេចក្ដីក្រាបទូលថា ពីដើមមក ព្រះចៅ**វុយអេង**បាននាំសួយសារមកថ្វាយ ដោយស្ពានមេត្រីនឹងផែនដីដរាប វេលានេះ **ចូជិន**ធ្វើ

សង្គ្រាមមុនដាបនឹង**ខុងបេង**ហើយ បានជាចម្លើយឲ្យសំបុត្រមកយើងសុំលើកទ័ពទៅជួយ បើយើងនៅព្រងើយមិនឲ្យលើកទ័ពទៅតាមសុំសោះ ក៏ដូចជាមិនសប្បុរសនឹងគ្នា។

ព្រះចៅ**ទៀតលីកៀត**ទ្រង់ព្រះសណ្ដាប់ ក៏ចាប់ចូលព្រះទ័យមេត្រីអរណាស់ ត្រាស់បង្គាប់**ង៉ែតាន់** និង**អតគិត**ឲ្យរូតរះកេណ្ឌពលដល់ម្ភៃម៉ឺនលើកទៅជួយ ហើយឲ្យបើកយកគ្រឿងសាស្ត្រាវុធឲ្យសេនាយោធាគ្រប់ដៃ បើកទាំងរទេះដែកសម្រាប់សង្គ្រាមជ័យគ្រប់ប្រដាប់។ **ង៉ែតាន់** និង**អតគិត** ក៏ប្រញាប់ចេញទៅចាត់ការ លុះបានពលយោធា ក៏ឲ្យចាត់ស្បៀងលៀងកងទ័ពដោយគ្រប់គ្រាន់ លុះបានឫក្សជោគជ័យជាមង្គល ក៏លើកពួកពលកាត់សំដៅទៅត្រង់គយសែប៉េង នោះ**អាន់ចែង**ដឹងដំណឹងសឹកច្បាស់ ក៏ចាត់បម្រើសេះយ៉ាងរហ័សទៅជម្រាប**ខុងបេង** ៗដឹងការហើយក៏សួរនាយទាហានទាំងពួងថា នរណានឹងទទួលអាសាចេញទៅច្បាំងតទល់នឹងរេហ៍ពលស្រុកសែកៀងបានខ្លះ? **គួនហ៊ុន** និង**តៀវប៉ៅ**ឆ្លើយជម្រាបថា យើងខ្ញុំទាំងពីរនាក់ សូមទទួលធុរៈអាសាចេញទៅតនឹងកងទ័ពស្រុកសែកៀងឲ្យបាន។ **ខុងបេង**ថា ក្មួយទាំងពីរប្រាណមិនដែលទៅស្គាល់គយសែប៉េងសោះ បើដូច្នោះយើងនឹងឲ្យ**ម៉ាតាយ**ទៅជួយកំដរ ព្រោះ**ម៉ាតាយ**គេធ្លាប់សញ្ចរទៅមកតាមផ្លូវនោះរឿយៗ ហើយក៏ដឹងស្គាល់យល់សំណើកស្រុកសែកៀងផង រួច**ខុងបេង**ក៏ចាត់ទាហានមួយកងចំនួនប្រាំម៉ឺន ប្រគល់ឲ្យ**គួនហ៊ុន, តៀវប៉ៅ**នូវ**ម៉ាតាយ**អ្នកទាំងបីនាយក៏លើកសំដៅទៅគយសែប៉េង។

**គួនហ៊ុន**កាន់ពលមួយរយនាក់ ឡើងទៅសំណាក់នៅលើកំពូលភ្នំ សម្លឹងមើលទៅឃើញទ័ពស្រុកសែកៀងលើមកដល់ ហើយយកគ្រឿងសាស្ត្រាវុធដោតរាយប្រគប់រទេះជុំវិញ មើលទៅឃើញត្រង់រលេញជាសម្បើមណាស់ **គួនហ៊ុន**ឈរពិគ្រោះពិចារណាមើលយូរណាស់ ក៏មិនឃើញឧបាយដែលនឹងគិតយកជ័យជម្នះបាន ទើបត្រឡប់នាំទាហានចុះមកបន្ទាយខាងក្រោមវិញ ក៏ពណ៌នារបៀបទ័ពឲ្យ**តៀវប៉ៅ**ស្ដាប់គ្រប់ប្រការ ហើយប្រឹក្សាជួបជុំនឹង**ម៉ាតាយ**ថា យើងនឹងគិតប្រការម្ដេច ទើបបានទាហានស្រុកសែកៀងលើកទ័ពថយត្រឡប់ទៅវិញ? **ម៉ាតាយ**និយាយ

ថា ព្រឹកស្អែកយើងលើកពលចេញទៅច្បាំងល្បងថ្វីដៃមើលម្តងសិន បើឃើញបានចំណាប់ក្នុងកលឯណា សឹមរិះគិតតាមប្រាជ្ញាតទៅទៀត។ **គួនហ៊ិន**ក៏យល់ឃើញតាម។

លុះព្រឹកភ្លឺស្វាងព្រះសុរិយា **គួនហ៊ិន**ក៏ចាត់ការឲ្យ**ម៉ាតាយ**ជានាយកងប៉ែកឆ្វេង ឲ្យ**តៀវប៉ោ**ជានាយកងប៉ែកស្តាំ ខ្លួន**គួនហ៊ិន**ជានាយកងប៉ែកកណ្តាល លើកតម្រង់ទៅបន្ទាយកងទ័ពសែកៀង។ **អតគិត**ធ្វើជាបញ្ឆោតថយភ្លាមទៅក្រោយ ឲ្យដេញហួសចូលទៅ ហើយរុញរទេះដែកស្កាត់ព័ទ្ធជុំវិញ។ **តៀវប៉ោ** និង**ម៉ាតាយ**ក៏បំផាយសេះទម្លាយចេញមក ឯ**គួនហ៊ិន** និងទាហានមួយកង ក៏នៅក្នុងចំណោមរទេះដែក ដែកចេញពុំបាន ទើបនាំទាហានគេចឡើងទៅលើភ្នំតូចមួយនៅទិសខាងជើង **អតគិត**ក៏បំផាយសេះដេញតាម ព្រមដោយទាហានកាន់ទង់ខ្មៅហែមុខ ហើយ**អតគិត**ស្រែកគំហកឲ្យ**គួនហ៊ិន**ថា វើយ! អាទាហានក្មេងច្រម៉ក់ ឯងនឹងទៅណា?

**គួនហ៊ិន**ឃើញដូច្នោះ ក៏ភ័យណាស់ បំផាយសេះចុះពីលើភ្នំ ពេលក៏ព្រលប់ធំងងឹតណាស់ ក្រឡេកទៅប្រទះឃើញត្រពាំងទឹកមួយនៅពីមុខ **គួនហ៊ិន**ក៏វាត្រឡប់មកច្បាំងនឹង**អតគិត**។ **គួនហ៊ិន**ទ្រាំកម្លាំងពុំបានក៏បំផាយសេះរត់ទៅទៀត **អតគិត**ក៏ដេញជិតលើកញញួរវាយផុត ត្រូវសេះពាក់កណ្តាលខ្នងដួលចុះ **គួនហ៊ិន**ក៏ធ្លាក់ជ្រុះខ្ទាតទៅធ្លាក់ក្នុងត្រពាំង **អតគិត**ស្រែកខ្លាំងឲ្យទាហានចោមចាប់**គួនហ៊ិន** ៗភ័យណាស់ស្ទុះទៅ ក្រឡេកក្រោយឃើញទាហានរត់ជ្រួលច្របល់ដួលគរលើគ្នា ឃើញ**អតគិត**ភ្លាត់ធ្លាក់ពីលើខ្នងសេះ **គួនហ៊ិន**ក៏ស្ទុះតទៅវិញ លើកដាវឡើងនឹងកាប់**អតគិត**ក៏គេចក្រឡាស់ហែលទឹកទៅ **គួនហ៊ិន**ក៏ស្ទុះឡើងលើគោកកន្ត្រាក់យកសេះ**អតគិត**បានក៏ឡើងជិះ ក្រឡេកទៅឃើញមនុស្សម្នាក់ធំណាស់ ស្ទុះដេញកាប់កងទ័ព**អតគិត**រត់ព្រាត់ព្រាយ **គួនហ៊ិន**ក៏រសាយចិត្តបាត់ខ្លាច នឹកថានរណាអេះ! ទើបអង់អាចមកជួយជីវិតយើងគ្រានេះ គេក៏មានគុណធ្ងន់អនេកណាស់ គួរមើលឲ្យច្បាស់នឹងបានតបគុណគេទៅថ្ងៃមុខ **គួនហ៊ិន**ក៏ស្រូតសេះបរសម្រុកតាមជិតទៅ ក៏ឃើញច្បាស់ជារូប**គួនអ៊ូ**បិតានៃខ្លួន មានពុកមាត់វែង មុខក្រហមទុំទែង ចិញ្ចើមត្រង់វែងពាក់អាវស្រោបក្រោះលាយមាសពាសទាំងសាព៌ាង្គកាយ ជិះលើសេះសឹកថៅដ៏ហៅ

ហាន ដៃស្តាំកាន់លំពែង ដៃឆ្វេងច្បូតពុកមាត់ អណ្តែតទៅលើអាកាស **គួនហ៊ិន** ឃើញច្បាស់ ក៏ឱនក្បាលក្រាបសំពះលើខ្នងអស្សពាហ៍។

អសុរកាយ**គួនអ៊ូ**ក៏លើកហត្ថចង្អុលទៅទិសខាងកើត ស្រែកថា កូនឯងចូរ ដោះខ្លួនទៅត្រង់នេះចុះ ឪពុកនឹងនាំបង្រុះឲ្យដល់ទៅបន្ទាយ រូបអសុរកាយក៏ អន្តរធានបាត់ទៅ **គួនហ៊ិន**ក៏ស្រូតសេះសំដៅចេញទៅទិសបូព៌ា ប្រទះគ្នានឹង**តៀវប៉ៅ** ក៏សួរ**គួនហ៊ិន**ថា ហេតុម្តេចបានជាប្អូនឯងដឹង ប្រឹងដោះខ្លួនរួចមកដល់ទីនេះ ប្អូន បានជួបប្រទះនឹងបិតាឬទេ? **គួនហ៊ិន**ឆ្លើយតបថា ម្តេចក៏បានជាសួរដូច្នេះ? **តៀវប៉ៅ** ប្រាប់ថា កាលបងគេចរត់ចេញពីចំណោមទៅ ទាហានស្រុកសែកៀងក៏លើកគ្នា ដេញតាមជាច្រើនណាស់ បងប្រទះឃើញបិតាប្អូនមកជួយរាំងរាដេញពួកវាថយ ត្រឡប់ទៅវិញ ហើយបង្គាប់ឲ្យបងមកចាំទទួលនៅទីនេះ។ **គួនហ៊ិន**បានឮដូច្នោះ ក៏ សោមនស្សត្រេកអរនាំព័ត៌មានមកប្រាប់**តៀវប៉ៅ**ឲ្យដឹង រួចក៏លើកទ័ពត្រឡប់ចូល បន្ទាយ ហើយប្រឹក្សាគ្នាថា យើងនឹងរិះគិតយ៉ាងណា ទើបធ្វើឲ្យពលយោធាស្រុក សែកៀងថយត្រឡប់ទៅវិញបាន? **ម៉ាតាយ**ឆ្លើយថា ទ័ពស្រុកសែកៀងមានកម្លាំង ច្រើនណាស់ យើងនឹងយកជ័យជម្នះដោយកម្លាំងត្រង់ៗមិនបានទេ សុំឲ្យអ្នករិល ទៅប្តឹងឲ្យការមហាឧបរាជលើកទ័ពមកជួយជាឆាប់ ខ្លួនខ្ញុំនឹងឃុំទាហាននៅរក្សា បន្ទាយ។

**គួនហ៊ិន** និង**តៀវប៉ៅ** ក៏យល់ត្រូវនឹងគំនិតគិត ទើបឡើងសេះស្រូតកាត់ទៅ ជម្រាប**ខុងបេង**ក្នុងបន្ទាយភ្នំគីសាន់ បានជ្រាបគ្រប់ប្រការ។ **ខុងបេង**ក៏ចាត់ការប្រើ **ជូឡុង** និង**អ៊ុយអៀន**ឲ្យលើកទាហានចេញទៅកងមុខមុន ហើយប្រមូលទាហាន បីម៉ឺន នាំ**គួនហ៊ិន** និង**តៀវប៉ៅ, កៀងអ៊ុយ, ទៀវអេក** លើកទៅជាក្រោយ លុះ ទៅដល់បន្ទាយ**ម៉ាតាយ** **ខុងបេង**ក៏ឡើងទៅឈរលើកំពូលភ្នំ ក្រឡេកទៅមើលជំរំ ក្បួនទ័ពស្រុកសែកៀង រៀបរៀងរទេះដែកញែករង់ជាបន្ទាយ ហើយរាយទាហាន ឲ្យវេនរក្សាជាការមាំមួនណាស់។ **ខុងបេង**គិតរហ័ស ក៏ឃើញដោយបញ្ញាថា របៀបទ័ពស្រុកសែកៀងប៉ុណ្ណោះ ក៏ល្មមតម្រិះយើងនឹងធ្វើយកជ័យជម្នះបាន មិន លំបាកប៉ុន្មានទេ។ **ខុងបេង**សម្លឹងមើលសព្វ ក៏ចុះត្រឡប់មកបន្ទាយ ហៅ**ម៉ាតាយ**

មកជាមួយនឹង**ទៀវអេក** ហើយខ្សឹបប្រាប់ជាការអាថ៌កំបាំង ឲ្យលើកទាហានទៅតាំងពួនបង្កប់នៅក្រោយភ្នំ ហើយប្រមូលទាហានឲ្យជីកគូធំទុកខាងមុខបន្ទាយ ឲ្យវាយដីឥដ្ឋបិទមាត់គូ លើដីឥដ្ឋឲ្យយកចំបើងនិងសំរាមវាយឲ្យជិតរហូតទៅ ដោយឧបាយហើយ **ខុងបេង**ហៅ**កៀងអ៊ុយ**មកពិសោធសួរថា អ្នកឯងគិតយ៉ាងណា ទើបនឹងច្បាំងឲ្យឈ្នះទ័ពស្រុកសែកៀងបាន?

**កៀងអ៊ុយ**ដឹងដល់ឧបាយកល**ខុងបេង** ក៏ឆ្លើយថា ពួកកងទ័ពស្រុកនេះ មានថ្វីដៃខ្លាំងពូកែក៏មែនហើយ ក៏ប៉ុន្តែពុំសូវមានតម្រិះប្រាជ្ញាប៉ុន្មានទេ ការសឹកសង្គ្រាមក៏ពុំយល់កលឧបាយរាក់ជ្រៅ បើយើងបញ្ឆោតបន្តិចទៅគង់នឹងចាញ់ថ្វីដៃយើងពុំខាន។ **ខុងបេង**ដឹងថា **កៀងអ៊ុយ**យល់ឧបាយក៏និយាយហើយសើចថា ការនេះត្រូវតែយើងគិតធ្វើឲ្យរួសរាន់ទាន់រដូវរងា ទឹកសន្សើមធ្លាក់រលាខ្លាំងទើបបាន ហើយក៏ឲ្យ**គួនហ៊ិន**នាំទាហានចេញទៅបង្កប់នៅក្រៅបន្ទាយខាងទិសឧត្តរ ឲ្យ**តៀវប៉ោ**ទៅបង្កប់ខាងទិសទក្សិណ ឯក្នុងបន្ទាយឲ្យដោតទង់តាប់តាន់ពេញទាំងបរិវេណ។ កាល**ខុងបេង**គិតធ្វើការនោះ ជាទេសកាលខែបុស្ស ទឹកសន្សើមធ្លាក់ចុះដោកស្មៅព្រៃសព្វអន្លើ មើលទៅឃើញតែទឹកកកពេញស្មើដូចស្រែអំបិល។

លុះដល់ពេលជិតភ្លឺស្រាង **ខុងបេង**ឲ្យ**កៀងអ៊ុយ**នាំទាហានចេញពីបន្ទាយតម្រង់ទៅចំកងទ័ពធំស្រុកសែកៀង **អតគិត**ក្រឡេកឃើញ ក៏នាំទាហានរុញរទេះដែកចរចេញមកតស៊ូនឹង**កៀងអ៊ុយ** ៗក៏ធ្វើជាថយរត់ប្រពាក់ប្រពូនចូលបន្ទាយ **អតគិត**ក៏បរពលចូលវាយពីក្រោយ ដោយទាំងរទេះដែកដែកចូលទៅដល់មុខបន្ទាយ**ខុងបេង**។ **កៀងអ៊ុយ**ក៏ខំប្រឹងរត់រហូតទៅក្រោយបន្ទាយ ពួកទាហានទាំងឡាយដែលដេញទៅនោះ បានឮសំឡេងគេដេញថាប៉ីទ្រូ សំឡេងស្គរគងឃ្មោះពេញបន្ទាយ ឃើញទង់រៀបរាយហែជាលំដាប់គ្នា ក៏នឹករួញរាក្រែង**ខុងបេង**ធ្វើកលក៏ត្រឡប់នាំពលវិលត្រឡប់ទៅសួរ**អតគិត** ៗក៏គិតសង្ស័យ។

**ង៉ែតាន់**ឆ្លើយថា ការសង្គ្រានេះ បើគេមានទាហានច្រើន ទើបបញ្ឆោតយកជ័យជម្នះយើង គឺគេធ្វើជាស្ងប់ស្ងាត់ បំបាត់ហាក់បីដូចជាទាហានតិច ដើម្បីឲ្យសត្រូវជឿទុកចិត្ត បើគេមានទាហានតិច ទោះដូចម្តេច ក៏យកជ័យជម្នះយើងមិន

បានទេ ពុំនោះ ធ្វើជាសន្ទឹកសន្ទាប់ដូចមានកងទ័ពច្រើន ប្រាថ្នានឹងឲ្យសត្រូវរាប់សែនម៉ឺនកោតញញើត មិនឲ្យលើកទៅកាច់ទម្លាយបានក៏មាន ដែល**ខុងបេង**ធ្វើអាការមានលំអានដូច្នេះ ប្រហែលទាហានក្នុងបន្ទាយតិចទេ បានជាគេធ្វើកលបញ្ឆោតយើងយ៉ាងនេះ យើងត្រូវតែកាច់ទម្លាយយកបន្ទាយវាឲ្យបានទើបត្រូវ។

**អតគិត**យល់ត្រូវ ក៏នាំទាហានទន្ទ្រានចូលទៅក្នុងបន្ទាយ**ខុងបេង** ឃើញ**ខុងបេង**កំពុងតែដេញចាប៉ីលើរទេះតូច ហើយនាំទាហានសេះប្រហែលដប់នាក់រត់ចេញតាមផ្លូវទៅក្រោយបន្ទាយ។ **អតគិត**ក៏បរពលទម្លាយដេញតាមទៅដល់ប្រហបភ្នំក្រោយបន្ទាយ **ខុងបេង**ក៏គេចចូលទៅក្នុងព្រៃញឹកញាតស្បាតងងឹត **ង៉ែតាន់**ក៏និយាយនឹង**អតគិត**ថា ដែល**ខុងបេង**ធ្វើដូច្នេះ មុខជាកលឧបាយហើយ តែបើជាកលយ៉ាងណា យើងក៏មិនត្រូវរួញរាខ្លាច ត្រូវតែប្រឹងដោយអង់អាចយកជ័យជម្នះឲ្យបាន លោតែក្រឡេកទៅឃើញ**កៀងអ៊ុយ**លើកទាហានចេញមកប្រទល់មុខ នឹកខឹងឈ្នួល ក៏បង្គាប់ទាហានរទេះដែកឲ្យស្ទុះជ្រុលចូលមក ហើយ**អតគិត**ក៏មឹតចូលទៅ។ **កៀងអ៊ុយ**ក៏បញ្ឆោតឲ្យដេញតាមទៅលើគូ ដែលបំបាំងទុកនោះ **អតគិត**និង**ង៉ែតាន់**មិនទាន់សង្កេតដឹងថាជាគូ ព្រោះមានទឹកសន្សើមមកពោរពាសពីលើ ក៏បរពលចូលទៅព្រមទាំងរទេះដែកដែកចូលទៅទាំងទាហានសេះ ទាហានថ្មើរជើងកាន់គ្រឿងសាស្ត្រាវុធ ក៏ស្រុតរបេះធ្លាក់ទៅក្នុងគូមូរនបលើគ្នា ឯទាហានរទេះដែកដែលដែកទៅមិនទាន់ ក៏ថយប្រញូនប្រពាក់មកវិញខ្លះក៏រត់សស្រាញ់ចូលបន្ទាយ។ **គួនហ៊ុន, តៀវប៉ោ**ក៏នៅចាំស្ទាក់ពីមុខជាប់ តាំងតែប្រឡូកចាក់កាប់បោះបាញ់ដោយធ្នូស្នាជាកោលាហល។ **កៀងអ៊ុយ, ម៉ាតាយ** និង**ទៀវអេក**ក៏ចូលផ្តល់ទាំងបីផ្លូវ ទៅថែមទៀតដែកជៀតលើគ្នា។ **ម៉ាតាយ**ក្រឡេកឃើញ**ង៉ែតាន់**ស្ទុះពារឡើងពីក្នុងគូបាន ក៏ទន្ទ្រានដេញតាមទៅទាន់ ចាប់**ង៉ែតាន់**បាន ឯ**គួនហ៊ុន**បានឃើញ**អតគិត**រត់ឡើងពីក្នុងគូ ក៏ត្រដរដេញជិតទាន់**អតគិត** ហើយក៏លើកដាវកាប់ដាច់កស្លាប់នៅទីនោះ ហើយស្ទុះទៅកាប់សម្លាប់ទាហានស្រុកសៃកៀងស្លាប់ច្រើនណាស់ ណាដែលនៅរស់ក៏រត់បែកខ្ញែកគ្នា ព្រាត់ព្រាយគ្នា **ម៉ាតាយ**ក៏ម្នីម្នានាំ**ង៉ែតាន់**ចូលទៅជូន**ខុងបេង**ៗឲ្យស្រាយចំណង**ង៉ែតាន់**ចេញ ឲ្យរៀបតុលៀងអាហារ អញ្ជើញ**ង៉ែតាន់**បរិភោគ

សេពសុរា ចរចាល្បងល្បួងលោមដោយសុភាពរៀបរយ។ **ខុងបេង**ឃើញថា **ង៉ែតាន់** មានកតញ្ញូស៊ូដិតដោយខ្លួន ក៏មានមេត្រីអាណិតណាស់ និយាយពន្យល់ឲ្យច្បាស់ថា ព្រះចៅ**ឡៅសៀន**ជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** មានព្រះតម្រាស់ប្រើយើងទៅបង្ក្រាបកម្ចាត់អាចោរជាសត្រូវរាជសម្បត្តិទេតើ ត្រូវអ្នកឯងវិលទៅទូលស្នើព្រះចៅ**ទៀតលីកៀត**ឲ្យជ្រាបចុះថា ការដែលធ្វើលើសលស់ហួសទៅហើយ កុំឲ្យចងអាឃាតព្យាបាទនឹងយើងឡើយ គួរធ្វើសេចក្ដីមេត្រីនឹងគ្នាតទៅ ហើយក៏ចាត់ចែងទាហាននិងរទេះដែកគ្រឿងសាស្ត្រាវុធ ដែលចាប់បានជាឈ្លើយនោះ ប្រគល់ឲ្យវិញទាំងអស់។ **ង៉ែតាន់**ក៏ទទួលដោយស្មោះសរ អរគុណជាទម្ងន់ណាស់ ឱនក្រាបលាសំពះ**ខុងបេង** នាំទាហានវិលទៅស្រុកសែកៀងវិញ។

**ខុងបេង**បានជ័យជម្នះហើយ ក៏ឲ្យបម្រើនាំសំបុត្រចូលទៅក្រាបទូលព្រះចៅ**ឡៅសៀន**បានជ្រាបគ្រប់ប្រការ ហើយបែងពលយោធាជាបីកង ឲ្យ**គួនហ៊ិន, តៀវប៉ោ**និង**អ៊ុយអៀន**ជាទ័ពមុខ **ខុងបេង**និងនាយទាហានឯទៀតជាទ័ពហ្លួង ស្រូតលើករំលងទៅភ្នំគីសាន់វិញ។

ឯ**ចូជិន**នោះ លុះឲ្យសំបុត្រទៅស្រុកសែកៀងហើយ ក៏ចាត់ឲ្យទាហានល្បាតសង្កេតស៊ើបមើលបន្ទាយ**ខុងបេង**ជាដរាប លុះដឹងថា**ខុងបេង**ចោលបន្ទាយ លើកទ័ពទៅតនឹងទ័ពស្រុកសែកៀង ក៏មានអំណរណាស់។ **គុយហ្វួយ**និយាយនឹង**ចូជិន**ថា **ខុងបេង**ម្ដងនេះមុខជាថ្លោះការនឹងកងទ័ពស្រុកសែកៀងទៀងប្រាកដហើយ ត្រូវតែយើងលើកទ័ពទៅខ្ទប់ពីក្រោយឲ្យបាន។ **ចូជិន**យល់ឃើញត្រូវ ទើបតម្រូវឲ្យ**ចូជុន**នាំពលទៅលុកបន្ទាយ**ខុងបេង** ឯពួកទាហានដែលរក្សាបន្ទាយ ក៏ធ្វើជាផ្កាយរត់ចេញទៅអស់ **ចូជុន**ក៏ដេញតាមទៅដល់ផ្លូវតូចមួយ ឃើញ**អ៊ុយអៀន**នាំទាហានចេញមកស្ទាក់ពីមុខ ហើយ**អ៊ុយអៀន**ស្រែកគំហាកជេរ**ចូជុន**ថា វើយអាចោរ! អាឯងរត់មករកអ្វី? **ចូជុន**ក៏ស្ទុះវ៉ៃចូលប្រយុទ្ធនឹង**អ៊ុយអៀន**បានបីភ្លែង **អ៊ុយអៀន**ក៏លើកដាវវែងកាប់**ចូជុន**ធ្លាក់ពីលើសេះស្លាប់។ **ចូចាន**នាំទាហានជំនួយចូលទៅជួយ ប្រទះនឹង**ជូឡុង**បញ្ឈរសេះស្ទាក់ពីមុខ **ជូឡុង**ក៏ស្ទុះគំហុកទៅប្រទល់មុខនឹង**ចូចាន** ហើយលើកលំពែងចាក់**ចូចាន**ធ្លាក់ពីលើសេះស្លាប់ **ចូជិន** និង**គុយហ្វួយ**លើកទ័ពតាមមក

ជាក្រោយ លុះដឹងថាទ័ពមុខបែកហើយ ក៏ភ័យរលះរលាំង ប្រមូលពលរាំងនឹងត្រឡប់ទៅក្រោយ ទទួលប្រទះនឹង**គួនហ៊ិន** និង**តៀវប៉ៅ**លើកបណ្ដោយមកដល់ក៏បរពលចូលព័ទ្ធច្បាំងនឹង**ចូជិន**ជាពន្លឹក។ **ចូជិន**និង**គុយហួយ**ភ័យវរវឹកជាចលាចល ក៏ខំបរពលពារទម្លាយចេញពីក្នុងចំណោម រត់ឆ្លងទៅត្រើយម្ខាងបាន ហើយតែងសំបុត្រតាមដើមដានដែលបានធ្វើការ ឲ្យបម្រើកាន់ចូលទៅស្រុកឡុកអៀង ក្រាបទូលព្រះចៅ**ចូយ៉យ**សុំឲ្យលើកទ័ពមកជួយ។

*លោកអ្នកអានអាចរកមើលសៀវភៅផ្សេងទៀតតាមរយៈគេហទំព័រ*

www.khmerliterature.wordpress.com

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៧២

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពីព្រះចៅ**ចូយ៉យ**ព្រួយព្រះទ័យ ជួបជុំមុខមន្ត្រីត្រឡប់ឲ្យហៅយកខ្លួន **សុម៉ាអ៊ី**ចូលមកធ្វើមេទ័ព លើកទៅច្បាំងនឹង**ខុងបេង**។ **បេងតាត់**ត្រឡប់ចូលមករួបរួមធ្វើការខាងព្រះចៅ**ឡៅសៀន** ហើយលើកទ័ពទៅវាយស្រុកឡុកអៀង **សុម៉ាអ៊ី**លើកទ័ពទៅសម្លាប់**បេងតាត់**បាន រហូតដល់**សុម៉ាអ៊ី**ឡោមព័ទ្ធ**អ៊ុយអៀន កោសៀង**បែកទ័ព រត់ត្រឡប់ទៅស្រុកលិងសៀ)។*

**ព្រះចៅចូយ៉យ**ទ្រង់ជ្រាបតាមសំបុត្រ ក៏ស្លុតព្រះទ័យណាស់ ត្រាស់ឲ្យប្រជុំក្រុមប្រឹក្សានឹងបណ្ដានាហ្មឺនទាំងពួងថា កងទ័ពស្រុកយើងចាញ់ប្រៀបទ័ព**ខុងបេង**ប្រឹងរត់បែកខ្ញែកមកដូច្នេះ អស់អ្នកទាំងឡាយនឹងយល់ដោយអភិប្រាយយ៉ាងម្ដេច? **ហួហ៊ីម**ក្រាបទូលថា ទ័ព**ខុងបេង**លើកមកគ្រានេះធំពន្លឹកសន្ធឹកសន្ធាប់ណាស់ បើនឹងលះចិត្តគិតតែនៅស្ងៀមពុំគិត មុខជា**ខុងបេង**ប្រឹងរុករានទន្ទ្រានចូលមកជិតហើយ ក្រោយទៀត យើងក៏ធ្វើការដោយលំបាកណាស់ សូមព្រះអង្គទ្រង់គិតឲ្យរហ័ស លើកទ័ពហ្លួងចេញទៅឯងទើបបាន។ អស់នាហ្មឺនតូចធំទាំងប៉ុន្មាននឹងបានតាំងចិត្តគិតប្រឹងធ្វើការថ្វាយឲ្យអស់ពីដៃ។

**ចុងហ៊ីវ**ក្រាបទូលថា ឯធម្មតាមេកងទ័ពធំ សមគួរនឹងត្រួតត្រាបង្គាប់បញ្ជាលើមេនាយឲ្យដឹងទីបង់ទីបាន ហើយចេះយកចិត្តសេនាទាហានឲ្យចម្រើនបានការក៏អាស្រ័យដោយមានសតិបញ្ញា និងអធ្យាស្រ័យប្រពៃល្អមែនៗ គឺបើឃើញថានរណាវៃឆ្លៀវក្លៀវក្លាខ្មាត់ប្រាកដក្នុងរណរង្គសង្គ្រាម ក៏ព្យាយាមនឹងលើកគុណបំណាច់ឲ្យដាច់លើសគេ បើឃើញថានរណាមិនបានការអ្វីទេ ឬធ្វើខុសលស់លើសពីបញ្ញត្តិក៏ត្រូវប្រើតឲ្យមានទោសតាមធ្ងន់ស្រាល ផ្ចាលឲ្យរអែងក្រែងខ្លាចតាមអំណាចមេទ័ព ដូច**ចូជិន**ក៏ជាធំមាំ ទម្លាប់តែធ្វើការជានាហ្មឺនក្នុងប៉ុណ្ណោះ លុះនឹងឲ្យចុះទៅកាន់

កាប់ជាមេកងទ័ពធំ ក៏មិនសមជាគូដៃនឹង**ខុងបេង**ឲ្យតាំងនៅបាន ទូលព្រះបង្គំឃើញមានតែមនុស្សម្នាក់មានសិទ្ធិសក្តិខ្លាំងពូកែមុតមាំ សមជាមហានាយកខាងការរណរង្គសង្គ្រាម បើព្រះអង្គទ្រង់ប្រោសឲ្យចេញទៅតទល់នឹង**ខុងបេង**ហើយ ត្រឡប់ទៅជាបរាជ័យចាញ់ថ្វីដៃ**ខុងបេង**វិញ ទូលព្រះបង្គំប៉ានធានាថ្វាយសិរសាឲ្យអស់ទាំងគោត្រ តែក្រែងព្រះអង្គមិនចង់ពិសោធឲ្យឃើញច្បាស់ការ។

ព្រះចៅ**ចូយ៉យ**ត្រាស់ថា ឥឡូវ**ខុងបេង**ធ្វើការកំរើបចិត្តរឹតតែទន្ទ្រានចូលមក ហើយ បើអ្នករាល់គ្នាយល់ឃើញថា អ្នកឯណានឹងអាសាចេញធ្វើការបាន ក៏ចូរគិតអានឲ្យប្រមូលឲ្យមូលមាត់គ្នារើសយកមកធ្វើការចុះ យើងក៏ពុំបានយល់ទាស់ទេ។ **ចុងហ៊ីវ**ក្រាបទូលទៀតថា ឯបណ្តាមន្ត្រីធំនៅក្នុងក្រុងនេះ ទូលព្រះបង្គំត្រិះរិះមើលមិនឃើញមានអ្នកឯណា មានតម្រិះប្រាជ្ញាស្រួចស្រល់ ក៏ចំពោះមានតែ**សុម៉ាអ៊ី**មួយប៉ុណ្ណោះ ល្មមនឹងចេញមុខទៅតទល់យកជ័យជម្នះ**ខុងបេង**បាន។ ព្រះចៅ**ចូយ៉យ**ត្រាស់តបថា អ្នកបានចេញវាចាមកទាំងប៉ុន្មាន ក៏ប្រពៃណាស់ តែឥឡូវនេះ**សុម៉ាអ៊ី**នៅទីឯណា? **ចុងហ៊ីវ**ទូលថា ទូលព្រះបង្គំបានដំណឹងថា សព្វថ្ងៃនេះ**សុម៉ាអ៊ី**នៅស្រុកអួនសៀ។

ព្រះចៅ**ចូយ៉យ**ទ្រង់ព្រះសណ្តាប់ ក៏ត្រាស់ប្រាប់អាល័ក្សឲ្យតែងព្រះសុភអក្សរជាសេចក្តីថា ទ្រង់ប្រោសព្រះរាជទានតាំង**សុម៉ាអ៊ី**ឲ្យជាមន្ត្រីធំតាមតំណែងដើម ហើយឲ្យចាត់ប្រមូលរេហ៍ពលសកលយោធា លើកទៅទល់ទ័ពនៅភ្នំគីសាន់ រួចបញ្ចូលគ្នានឹងកងទ័ពហ្លួងទាំងប៉ុន្មាន ដែលលើកមកពីស្រុកទៀងអាន់ ដើម្បីនឹងចាត់ចែងឲ្យមានមេកំណាន់លើកទៅតនឹងទ័ព**ខុងបេង** ហើយឲ្យព្រះរាជបម្រើស្រួតរូតនាំទៅឲ្យ**សុម៉ាអ៊ី**ឯស្រុកអ៊ួនសៀ។

ឯ**ខុងបេង**តាំងលើកទ័ពទៅឈប់នៅភ្នំគីសាន់ ដឹងព័ត៌មានថា **ចូជិន**បែកទ័ពរត់ត្រឡប់ទៅក្រោយ ក៏ឲ្យមានសេចក្តីសប្បាយរួសរាយណាស់ **ខុងបេង**រួតរះបរពលចូលទៅតាំងនៅក្នុងបន្ទាយ**ចូជិន** ខណៈនោះ មានមនុស្សបម្រើចូលទៅជម្រាប**ខុងបេង**ថា **លីង៉ៀម**នៅស្រុកតេងអាន់ប្រើ**លីអង**ជាបុត្រឲ្យចូលមកគំនាប់មហាឧបរាជដោយកិច្ចរាជការ។ **ខុងបេង**ក៏ភ្ញាក់អាត្មាថា អែះ! នេះប្រហែលមានកងទ័ត

ស្រុកកាំងតាំងនឹងលើកមកច្បាំងយកស្រុកសែឈ្នួនទេដឹង? **ខុងបេង**ក៏ឲ្យហៅ**លីអង**ចូលទៅក្នុង ហើយសួរថា អ្នកឯងមកមានការអ្វី? **លីអង**ជម្រាបថា ខ្ញុំបាទមកប្រណិប័តន៍មហាឧបរាជដោយរឿង**បេងតាត់** ដែលរត់ទៅចូលនៅខាង**ចូភី**អំពីថ្ងៃមុននោះ ព្រោះដោយសេចក្ដីភ័យខ្លាចខ្លួនទេ ឯចិត្តគិតថានឹងត្រឡប់មកវិញ តែ**ចូភី**ឃើញ**បេងតាត់**មានសតិបញ្ញា ក៏មានមេត្តាប្រោសប្រាណ បានប្រទានទ្រព្យរបស់ជាច្រើន ហើយតាំងឲ្យលឿនទីជាមន្ត្រីធំ ឲ្យទៅឈរបន្ទុំជាចៅហ្វាយស្រុកសុងយ៉ុង លុះ**ចូភី**ទិវង្គតទៅ ព្រះចៅ**ចូយ៉យ**សោយរាជសម្បត្តិ អស់នាហ្មឺនដែលនៅជិតព្រះមហាក្សត្រ ចេះតែមានចិត្តឫស្យាញុះស្ដេចឲ្យដាច់ផ្លូវមេត្តាសោះ ពេលនេះ**បេងតាត់**ក៏អស់សេចក្ដីសុខសប្បាយ តាំងចិត្តគិតព្រះតេជព្រះគុណទាំងឡាយដែលមានលើខ្លួនមកពីអតីត ទើបរិះគិតចាត់ប្រើខ្ញុំបាទឲ្យមកសូមសារភាពថា ការដែលបានប្រព្រឹត្តខុសទៅហើយនោះ សូមឲ្យមហាឧបរាជអនុគ្រោះប្រោសមេត្តាលើកចោលទៅចុះ ពីត្រឹមថ្ងៃនេះទៅមុខទៀត នឹងសុំតាំងគំនិតមារយាទធ្វើការកែខ្លួនឲ្យបាន បើមហាឧបរាជប្រោសប្រាណ ក៏សូមឲ្យលើកទ័ពទៅវាយយកស្រុកទៀងអាន់ចុះ **បេងតាត់**នឹងលើកទាហានស្រុកសុងយ៉ុងខាងនោះ និងស្រុកស៊ិនសៀ ស្រុកគិមសៀ បញ្ចូលគ្នាទៅសន្ធាប់គប់វាយទម្លាយយកស្រុកឡុកអៀង តបគុណមហាឧបរាជឲ្យបាន។ **ខុងបេង**បានស្ដាប់សព្វចប់ព័ត៌មាន ក៏មានអំណរណាស់ ឲ្យរង្វាន់ប្រាក់មាសទៅ**លីអង**ជាច្រើន។

ខណៈនោះ មានទាហានល្បាតនាំហេតុទៅជម្រាប**ខុងបេង**ថា ឥឡូវ**ចូយ៉យ**ឲ្យបម្រើនាំសំបុត្រទៅតាំង**សុម៉ាអ៊ី**ជានាហ្មឺនធំតំណែងដដែល ហើយឲ្យប្រមូលរេហ៍ពលឲ្យក្រាស់ក្រែល លើកទៅបញ្ចូលគ្នានឹងទ័ព**ចូយ៉យ**ឯស្រុកទៀងអាន់។ **ខុងបេង**ដឹងព័ត៌មានដូច្នោះ ក៏លុះស្មារតីភ័យដូចគេកន្ត្រាក់ខ្លួន **ម៉ាចេក**ដឹងសំនួនក៏ជម្រាបទៅ**ខុងបេង**ថា ទោះបី**ចូយ៉យ**នឹងលើកទ័ពហ្លួងឆ្លងមកតាំងក្នុងស្រុកទៀងអាន់ពិតក៏មិនត្រូវគិតខ្លាចអ្វី ត្រូវតែយើងប្រឹងយកជ័យជម្នះឲ្យបាន។ **ខុងបេង**ឆ្លើយថ្កានថា យើងមិនមែននឹងកោតញញើត**ចូយ៉យ**បន្តិចសោះ យើងបារម្ភចំពោះតែ**សុម៉ាអ៊ី**មួយ ព្រោះជាមនុស្សមានសតិបញ្ញាស្រៀវស្រួចណាស់ ទោះបី**បេងតាត់**នឹងក្រឡាស់លើក

ទ័ពទៅវាយយកស្រុកក្រុងនោះ បើប្រទះនឹង**សុម៉ាអ៊ី** ក៏គង់នឹងខ្មេចខ្ចីពុំខាន ព្រោះ **បេងតាត់**ពុំបានជាមនុស្សមានប្រាជ្ញាស្មើនឹង**សុម៉ាអ៊ី**។

**ម៉ាចេក**បានស្តាប់ ក៏យល់ឃើញត្រូវ ទើបនិយាយថា បើដូច្នោះយើងនឹងបណ្តោយឱ្យ**បេងតាត់**បានសេចក្តីអន្តរាយម្តេចបាន ត្រូវតែមានសំបុត្រទៅតឿនរំឭកស្មារតី**បេងតាត់**ឱ្យប្រុងប្រយ័ត្នខ្លួនដោយមួនមាំ។ **ខុងបេង**ក៏ធ្វើសំបុត្រផ្តាំទៅឱ្យ**បេងតាត់**ថា ត្បិត**បេងតាត់**ជាអ្នកមានសតិបញ្ញា គិតនឹងធ្វើរាជការលើកទ័ពទៅវាយយកស្រុកឡកអៀង ស្នងព្រះគុណព្រះចៅ**ឡៅសៀន**នោះ យើងក៏មានចិត្តស្មោះត្រេកអរនឹងអ្នកណាស់ បើសម្រេចដូចប្រាថ្នាវេលាណា យើងនឹងយកសេចក្តីក្រាបទូលព្រះចៅ**ឡៅសៀន**ជាម្ចាស់ ឱ្យទ្រង់លើកគុណបំណាច់ឱ្យដាច់លើសគេ តែឥឡូវនេះ យើងបានឮកិត្តិស័ព្ទថា **ចូយ៉យ**តាំង**សុម៉ាអ៊ី**ជាមេកងទ័ពធំ ឱ្យលើករេហ៍ពលមកប្រជុំនឹងទ័ពហ្លួងនៅស្រុកទៀងអាន់ បើ**សុម៉ាអ៊ី**ដឹងថា អ្នកឯងប្រែប្រកាន់ជាចូលមកខាងយើងវិញ គង់នឹងលើកទ័ពមកផ្លាញ់បំបាក់ទ័ពដែលជាមុខសឹកបាន អ្នកឯងគង់នឹងធន់ពុំបាន គួរអ្នកនឹងរិះអានគិតរវាំងខ្លួនប្រាណកុំគប្បីប្រមាថ បើនឹងប្រើទាហាន ត្រូវឱ្យស្គាល់បទបាទខ្នាតពិជ័យសង្គ្រាម កុំធ្វើតាមចិត្ត ហើយត្រូវបាំងបិទកុំឱ្យដឹងកលដល់**សុម៉ាអ៊ី** លុះសរសេររួច ក៏ច្រកស្រោមបិទជិតប្រគល់ឱ្យ**លីអង**កាន់ទៅឱ្យ**បេងតាត់**ឯស្រុកសុងយ៉ុង។

**លីអង**ក៏ចូលទៅដល់**បេងតាត់** ហើយអធិប្បាយរឿងឱ្យស្តាប់គ្រប់ប្រការ ហុចទាំងសំបុត្រសារទៅឱ្យ **បេងតាត់**ក៏លាមើលឃើញសេចក្តីសព្វគ្រប់ ក៏អស់សំណើចហើយថាគំនិតប្រាជ្ញា**ខុងបេង**នេះវិសេសមែនណាស់ តែហួសលើសការពេក **បេងតាត់**ក៏តែងសំបុត្រមួយច្បាប់ផ្ញើត្រឡប់ទៅ**ខុងបេង**វិញសេចក្តីថា ខ្ញុំបាទ **បេងតាត់**សូមក្រាបប្រណិប័តន៍ចូលមកមហាឧបរាជសូមជ្រាប ដែលប្រសាសន៍មានមេត្តាជួយរំឭកសតិបញ្ញាខ្ញុំបាទទាំងប៉ុន្មាន មានព្រះគុណធ្ងន់ជាអនន្តអនេកណាស់ តែដែលមានប្រសាសន៍ថា **សុម៉ាអ៊ី**នោះ សូមកុំឱ្យព្រួយអ្វីឡើយ ជាភ្នាក់ងារនៃខ្ញុំបាទ ហើយនឹងទទួលជាធុរៈឯង ព្រោះ**សុម៉ាអ៊ី**សព្វថ្ងៃនៅមានកន្លែងឯស្រុកអួនសៀចម្ងាយផ្លូវពីស្រុកនេះទៅដល់ក្រុងឡកអៀង ប្រាំបីពាន់សិន (៣២០ គ.ម) បើរាប់

ពីក្រុងឡុកអៀងទៅដល់ខេត្តខ្ញុំបាទចម្ងាយមួយពាន់ពីររយសិន (៤៨០ គ.ម) ទោះណាជា**សុម៉ាអ៊ី**ដឹងកិច្ចកលយល់ជ្រៅណាស់ នឹងចាត់ការរហ័សទៅប្រាប់**ចូយ៉យ** ហើយលើកទ័ពត្រឡប់ទៅដល់ខេត្តខ្ញុំបាទក៏អស់រវាងមួយខែ ស្ទើរនឹងមិនដល់។ ប្រការមួយទៀត ពលទាហានដែលមានទាំងបីខេត្តនោះ ខ្ញុំបាទក៏បានកេណ្ឌប្រមូលទុកអស់ហើយ ទោះបីបើ**សុម៉ាអ៊ី**លើកមកដល់ ខ្ញុំបាទក៏មិនព្រួយរវល់នឹងខ្លាចក្រែងត្រូវតែប្រឹងប្រែងយកជ័យជម្នះឲ្យបាន។ លុះសរសេររួច ក៏ចាត់បម្រើគឺ**លីអង**ឲ្យកាន់ត្រឡប់ទៅជូន**ខុងបេង** ៗដឹងក្នុងសេចក្តីសំបុត្រដូច្នោះ ក៏ឲ្យនឹកខឹងខ្លាំងណាស់ បោះសំបុត្រនោះចោលទៅដី ហើយស្ទុះវៃក្តាប់ដៃទន្ទ្រាំជើងថា **បេងតាត់**គិតការនេះពេញជាមើលងាយគេណាស់ នឹងស្លាប់ស្រឡះព្រោះថ្វីដៃ**សុម៉ាអ៊ី**ពុំខានទេ។

**ម៉ាចេក**សួរថា ហេតុម្តេចបានជាមហាឧបរាជមានប្រសាសន៍ដូច្នេះ? **ខុងបេង**ឆ្លើយថា ពាក្យចាស់បុរាណបានពោលទុកមកថា ធម្មតាមនុស្សដែលក្បត់ផែនដី បើគេមិនដឹងសេចក្តីឲ្យច្បាស់ ទើបលះចេញទៅធ្វើការបានស្រួល ដូចយ៉ាង**បេងតាត់**ត្រឡប់ក្បត់ដោយទ្រង់អង់អាចដូច្នេះ ឃើញថាខុសនឹងចាស់បុរាណណាស់ ឯ**សុម៉ាអ៊ី**គេជានាហ្មឺនធំណាស់ បើដឹងច្បាស់ថា**បេងតាត់**ក្បត់ហើយ គេមិនចាំបាច់ទៅទូលស្តេច**ចូយ៉យ**ឲ្យយូរការទេ គង់តែនឹងស្រូតលើកទ័ពទៅក្នុងដប់ម្ភៃថ្ងៃ ឲ្យដល់ទៅខ្លួន**បេងតាត់** បើមិនប្រុងប្រយ័ត្នមុខជាអន្តរាយខ្លួន លុះគេធ្វើការពេញសំនួនហើយ ទើបយកសេចក្តីទូលឲ្យជ្រាបជាក្រោយមិនបានឬ? អស់ពួកនាយទាហានបានសេចក្តី ក៏ស្រដីសរសើរគំនិត**ខុងបេង**គ្រប់គ្នា ទើប**ខុងបេង**តែងសំបុត្រមួយច្បាប់ បង្គាប់ឲ្យបម្រើនាំទៅឲ្យ**បេងតាត់** សេចក្តីថា ឲ្យ**បេងតាត់**ប្រុងប្រយ័ត្នខ្លួនជាមួនមាំឲ្យណាស់ ក្រែងការនេះដឹងទៅដល់**សុម៉ាអ៊ី**ហើយមុខជាថ្លោះការ។ បម្រើក៏នាំសំបុត្រចេញទៅ។

ឯ**សុម៉ាអ៊ី**នៅស្រុកអួនសៀដឹងថា ព្រះចៅ**ចូយ៉យ**លើកទ័ពចេញទៅតច្បាំងនឹង**ខុងបេង**ចាញ់ប្រៀបជាច្រើនគ្រា ក៏ឲ្យឈឺផ្សាក្នុងចិត្ត ចេះតែអង្គុយគិតហើយដកដង្ហើមធំ **សុម៉ាស៊ូ**និង**សុម៉ាចៀវ**ជាបុត្រា មានសតិបញ្ញាឆ្លៀវឆ្លាត បិតាបានបង្ហាត់បង្រៀនសិល្បសាស្ត្រឲ្យចេះខាងតម្រិះក្បួនពិជ័យសង្គ្រាមតាំងពីដើមដឹងក្តី លុះឃើញបិតាជាទុក្ខសញ្ជប់សញ្ជឹងសព្វទិនរាត្រី ហើយមិនចេញស្រដី ចេះតែដកដង្ហើម

ធំដូច្នោះ ក៏ចូលទៅពិគ្រោះជម្រាបសួរថា បិតាកើតទុក្ខពីអ្វី? **សុម៉ាអ៊ី**ឆ្លើយថា ចៅឯងនៅក្មេងណាស់ បើបិតាប្រាប់ឲ្យច្បាស់ ក៏ពុំអាចដឹងដល់។ **សុម៉ាស៊ូ**ជាបងឆ្លើយថា រឿងដែលបិតាកើតទុក្ខវិតក្កព្រួយនោះ ខ្ញុំបាទដឹងយល់អស់ហើយ ព្រោះព្រះចៅ**ចូយ៉យ**ធ្វើល្មើសលើយើងណាស់ បានជាមានសត្រូវមកប៉ះពុំកោតខ្លាចអំណាចព្រះចេស្ដា។

**សុម៉ាចៀវ**ឮហើយឆ្លើយថា ខ្ញុំចង់តែអស់សំណើចទេ ដែលបងថាដូច្នោះ តែការនេះសូមកុំឲ្យបិតាព្រួយឡើយ ព្រោះខ្ញុំបាទបានគ្នេរមើលហើយ បើមិនព្រឹកក៏ថ្ងៃរសៀលនេះ មុខជាមានតម្រាស់ព្រះចៅ**ចូយ៉យ**ឲ្យមកដល់បិតា ៗគង់នឹងបានទទួលរាជការជួយទំនុកបម្រុងផែនដីជាប្រាកដ លុះនិយាយមិនទាន់ផុតមាត់ ស្រាប់តែឃើញអ្នកកាន់ព្រះតម្រាស់ចូលទៅដល់ **ស៊ុម៉ាអ៊ី**ក្រឡេកទៅយល់ស្គាល់ជាព្រះរាជបម្រើកាន់ព្រះតម្រាស់ ក៏ត្រេកអរមហិមា ចុះទៅលុតក្រាបវន្ទាដោយកិរិយាគោរព ហើយក៏អញ្ជើញទៅតម្កល់លើតុតាំង រួចបានមើលដឹងសេចក្ដីហើយ ក៏រលះរលាំងឲ្យកេណ្ឌប្រមូលរេហ៍ពលសកលយោធា នឹងលើកទៅស្រុកទៀងអាន់តាមព្រះតម្រាស់។ ក្នុងពេលនោះ ពួកល្បាតចូលទៅជម្រាបថា មានបម្រើពី**សុិនងី**ចៅហ្វាយស្រុកគិមសៀឲ្យមកប្ដឹងជាសម្ងាត់។ **សុម៉ាអ៊ី**ក៏ឲ្យហៅចូលទៅ បម្រើនោះក៏ជម្រាបថា ចៅហ្វាយខ្ញុំបាទឲ្យមកជម្រាបលោក ដ្បិត**បេងតាត់**ចៅហ្វាយស្រុកសុងយ៉ុងប្រែចិត្តក្បត់ទៅចូលគំនិតនឹង**ខុងបេង**ហើយ **តេងហៀន**និង**លីជូ**ទៅប្រាប់**សុិនងី** ៗប្រើខ្ញុំបាទស្រូតរូតមកប្ដឹងលោក។

**សុម៉ាអ៊ី**ក៏និយាយថា បើប្រសិនជា**បេងតាត់**ទៅចូលគំនិតនឹង**ខុងបេង**មែន មុខជា**បេងតាត់**នឹងសុំអាសាលើកទ័ពទៅវាយយកស្រុកឡុកអៀងហើយ ឯ**ខុងបេង**គង់នឹងចូលវាយយកស្រុកទៀងអាន់ខាងនេះមុខជានឹងសម្រេចដោយងាយ នេះហាក់ជាបុណ្យព្រះចៅ**ចូយ៉យ**នៅមានវាសនាបារមីបុណ្យមកអភិបាល ទើបបណ្ដាលឲ្យព្រះចៅ**ចូយ៉យ**មានព្រះទ័យមេត្រីរាប់អានឡើងវិញ ហើយតាំងយើងឲ្យធ្វើជានាហ្មឺនធំដូចដើម ថែមទាំងឲ្យយើងបានដឹងរឿងនេះ យើងនឹងស្ងៀមពុំត្រិះរិះក៏ពុំបាន ត្រូវ

តែគិតអានលើកស្រួតទៅចាប់ខ្លួន**បេងតាត់** កាត់ផ្ដាច់កិច្ចកលឃោបល់**ខុងបេង**ជាមុន ទើប**ខុងបេង**នឹងអាប់ចុនថយទ័ពលើកត្រឡប់ទៅឯង។

**សុម៉ាស៊ូ**ថា **បេងតាត់**គាត់ជានាហ្មឺនធំខ្ពស់ បើតាមពិគ្រោះ គួរតែបិតាធ្វើសំបុត្រក្រាបទូលព្រះចៅ**ចូយ៉យ**ឲ្យជ្រាបសិន។ **សុម៉ាអ៊ី**ថា ធម្មតាការក្បត់ផែនដីនោះ បើនឹងរង់ចាំពិគ្រោះទូលស្នើក៏ពុំបាន ព្រោះសត្រូវនឹងមានកម្លាំងច្រើនឡើងទៀត ត្រូវតែយើងគិតឆ្លៀតលើកទ័ពទៅចាប់ខ្លួន**បេងតាត់**ឲ្យហើយ សឹមយកសេចក្ដីក្រាបទូលឲ្យជ្រាបជាក្រោយទើបបាន ហើយ**សុម៉ាអ៊ី**ក៏រិះគិតប្រើកលឧបាយឲ្យឈ្មោះ**លៀងគី** កាន់សំបុត្រទៅប្រាប់**បេងតាត់**ជាសេចក្ដីថា ឲ្យ**បេងតាត់**ចាត់ចែងកងទ័ព និងប្រដាប់ស្បៀងអាហារការទុកឲ្យព្រមចុះ យើងនឹងលើកកងទ័ពខាងនេះមកបញ្ចូលផ្សំនឹងស្រុកទៀងអាន់ ដើម្បីនឹងធ្វើការរណរង្គសង្គ្រាមតនឹង**ខុងបេង**។ លុះ**លៀងគី**កាន់សំបុត្រចេញទៅហើយ **សុម៉ាអ៊ី**ក៏ចាត់ការប្រមូលយោធាទាហានលើកចេញចាកឋានចំនួនផ្លូវពីរថ្ងៃ ប្រទះនឹង**ស៊ីឡុង**លើកទ័ពជ័យទៅដល់ **ស៊ីឡុង**ក៏ចុះពីលើសេះ ចូលទៅជម្រាប**សុម៉ាអ៊ី**ថា ដ្បិតព្រះចៅ**ចូយ៉យ**បានរៀបចំប្រមូលពលទាហានលើកទៅស្រុកទៀងអាន់ ហើយជ្រាបថា ក្រែងលោកនៅយឺតយូរការ បានជាប្រើខ្ញុំបាទឲ្យមកតាម ដើម្បីឲ្យស្រួតរូតទៅប្រញាប់។ **សុម៉ាអ៊ី**បានស្ដាប់ក៏ឆ្លើយតបថា ឥឡូវនេះ **បេងតាត់**ចេញជាក្បត់ទៅហើយ ខ្ញុំលើកទ័ពទៅចាប់សិន ហើយក៏ពណ៌នារឿងរ៉ាវឲ្យ**ស៊ីឡុង**ស្ដាប់គ្រប់ប្រការ។ **ស៊ីឡុង**ថា បើដូច្នោះគួរហើយ។ **សុម៉ាអ៊ី**ឆ្លើយថា អ្នកឯងត្រូវទៅជាមួយនឹងខ្ញុំ ក្រុមរបស់អ្នកត្រូវចេញជាទ័ពមុខ ខ្ញុំឲ្យបុត្រាទាំងពីរនាក់ជាទ័ពក្រោយ ក៏ឲ្យលើកព្រមគ្នាទៅដល់ពាក់កណ្ដាលផ្លូវ ប្រទះនឹងពួកទាហាន**បេងតាត់**ដែលកាន់សំបុត្រទៅឲ្យ**ខុងបេង**នោះ ត្រឡប់ពី**ខុងបេង**មកវិញ។ កងទ័ពឃើញប្លែកក៏ស្រែកស្ទាក់ចាប់ខ្លួនបាន នាំទៅជូន**សុម៉ាអ៊ី**ៗក៏ដណ្ដឹងសួរពិចារណាថា ឯងជាទាហាននរណា? មកពីណា? ទៅណា? ឲ្យឆ្លើយតាមត្រង់ ទើបគង់អាយុជីវិត បើឆ្លើយមិនពិតនឹងកាត់ក្បាលឥឡូវនេះ។ បម្រើកាន់សំបុត្រនោះភ័យខ្លាំងណាស់ ក្រាបសំពះហើយឆ្លើយឲ្យការតាមត្រង់គ្រប់ប្រការ យកទាំងសំបុត្រលេខារបស់**ខុងបេង**នោះឲ្យទៅ**សុម៉ាអ៊ី** ៗមើលដឹងសេចក្ដីក៏ភ័យ

ណាស់និយាយថា តម្រិះប្រាជ្ញា**ខុងេងង**នោះ ត្រូវដូចគំនិតយើងគិតទាំងអស់ បើប្រសិនណាជា**បេងតាតន់**ដឹងតាមសំបុត្រនេះហើយ កាលណាឡើយនឹងធ្វើការនេះទៅរហូតបាន មុខជា**បេងតាត់**នឹងខំស្រូតរូតធ្វើតាមពាក្យ**ខុងបេង**បង្គាប់ ការគេក៏បានចំណាប់យ៉ាងមាំណាស់ នេះហាក់ថា អម្ចាស់យើងមានបុណ្យអស្ចារ្យ បានជាមានទេពតាមកបណ្ដាល ឲ្យយើងចាប់អ្នកកាន់សំបុត្រនេះបាន ហើយ**សុម៉ាអ៊ី**ក៏ស្រូតលើកទាហានទៅទៀត។

ឯ**បេងតាត់**នៅស្រុកសុងយ៉ុងនោះ ឲ្យមនុស្សទៅបបួល**ស៊ិនងី**ចៅហ្វាយស្រុកគិមសៀ និង**ស៊ិនតាំ**ចៅហ្វាយស្រុកស៊ិនសៀ ឲ្យចូលគំនិតតាមខ្លួន។ ចៅហ្វាយស្រុកទាំងពីរខ្លាច**បេងតាត់**ក៏ទទួលព្រមតាមតែមាត់ក្រៅដោយស្មោះ ឯក្នុងពោះគិតបម្រុងទាហានទុកស្រេច បើ**សុម៉ាអ៊ី**លើកទ័ពមកកាច់ពេលណា នឹងអាសាធ្វើកលសឹកខាងក្នុង។ **បេងតាត់**ក៏ជឿស្លុងក្នុងចិត្តឥតសង្ស័យ ទទួល**លៀងគី**កាន់សំបុត្រ**សុម៉ាអ៊ី**ទៅដល់ **បេងតាត់**ទទួលយកទៅមើលដឹងសេចក្ដីហើយសួរថា ឥឡូវ**សុម៉ាអ៊ី**លើកទ័ពមកដល់ហើយឬនៅ? **លៀងគី**ក្លែងប្រាប់ថា **សុម៉ាអ៊ី**ចាត់ចែងកងទ័ពលើកត្រឡប់ទៅស្រុកទៀងអាន់ហើយ។ **បេងតាត់**ឮដូច្នោះ ក៏សោមនុស្សត្រេកអរណាស់ ទើបរៀបតុតាំងលៀងអាហារ អញ្ជើញ**លៀងគី**បរិភោគផឹកស្រាជាសប្បាយ ស្រេចហើយ **លៀងគី**ក៏លា**បេងតាត់**ឡើងបំផាយសេះវេះទៅរក**ស៊ិនតាំ** និង**ស៊ិនងី**ប្រាប់អំពីការអាថ៌កំបាំងដែល**សុម៉ាអ៊ី**លើកទ័ពមកនោះឲ្យស្ដាប់គ្រប់ប្រការ។ **ស៊ិនតាំ** និង**ស៊ិនងី**ថា **បេងតាត់**ដាក់សញ្ញាឲ្យយើងថា ព្រឹកស្អែកនឹងលើកទង់**ខុងបេង**ឡើងជាសម្គាល់ ឲ្យយើងអស់ពិភាល់នឹងលើកទ័ពទៅវាយយកស្រុកឡុកអៀង។

ឯ**បេងតាត់**ចាត់ការរៀបសេនាទាហានក្នុងស្រុកនោះ ៗមានមនុស្សល្បាតចូលទៅប្រាប់ថា ក្រៅកំពែងស្រុកឃើញមានទ័ពអឹកអធឹកលើកមកច្រើនណាស់ មិនដឹងច្បាស់ជាទ័ពអ្នកឯណា។ **បេងតាត់**ឮដូច្នោះក៏ភ័យណាស់ ស្ទុះរហ័សឡើងទៅពិនិត្យមើលលើកំពែង ឃើញទង់ស្ដែងជាកងទ័ព**ស៊ីឡុង**លើកចូលមក ទើបបង្គាប់ទាហានឲ្យដឹងអូសស្ពានឆ្លងគូចេញអស់ ហើយឲ្យបិទទ្វារគ្រប់ចន្លោះមិនឲ្យសល់។

ឯ**ស៊ីឡុង**ប្រឹងបំផាយសេះដេញទាហានចូលដល់មាត់គូ ឃើញ**បេងតាត់**ឈរពីលើសើនកំពែង ក៏ស្រែកក្តែងៗជេរថា នែ៎អាចោរក្បត់ម្ចាស់ អាឯងពូកែណាស់ត្រូវចេញមុខមករកយើងដោយសារភាពចុះ យើងនឹងទុកឲ្យរស់ជីវិត។ **បេងតាត់**ស្តាប់ឮពិតក៏ខឹងខ្លាំងណាស់ ប្រើទាហានយ៉ាងរហ័សឲ្យយឺតធ្នូបាញ់តម្រង់ទៅត្រូវកំផ្លៀង**ស៊ីឡុង**លើខ្នងសេះ ពួកទាហានក៏ស្ទុះទៅគ្រាហ៍**ស៊ីឡុង**នាំទ័ពថយទៅវិញ **បេងតាត់**ឃើញដូច្នោះ ក៏ឲ្យបើកទ្វារលើកគ្នាដេញតាមទៅ ទទួល**សុម៉ាអ៊ី**លើកទ័ពមកដល់ **បេងតាត់**ក៏រចល់ថយមកក្រោយ ហើយត្រឡប់ទ័ពចូលទៅក្នុងស្រុកវិញឲ្យទាហានបិទទ្វារជាប់។ **សុម៉ាអ៊ី**ក៏ដេញប្រជាប់ចូលទៅព័ទ្ធជុំវិញកំពែង។

ឯ**ស៊ីឡុង**ត្រឡប់ទៅតាំងបន្ទាយ ពិសព្រួញក៏ជ្រាបរលាយចូលទៅសព្វសាច់ លុះថ្ងៃរសៀលក៏ដាច់ខ្យល់ស្លាប់ កាល**ស៊ីឡុង**ស្លាប់នោះអាយុបាន ៥៩ឆ្នាំ។ **សុម៉ាអ៊ី**ក៏រៀបចំសព**ស៊ីឡុង**ដាក់ក្នុងម្ឈូសតាមប្រវេណី ហើយក៏ឲ្យនាំទៅបញ្ចុះទុកឯស្រុកឡុកអៀងតាមបណ្តាស័ក្តិ។

ឯ**បេងតាត់**នោះ លុះព្រឹកឡើងក៏ឡើងទៅឈរមើលលើសើន ឃើញទាហាន**សុម៉ាអ៊ី**ព័ទ្ធប្រកិតគ្នាជុំវិញកំពែងស្រុក មើលទៅណែនណាន់តាន់តាប់ដូចគេប្រដាប់ច្រុះតារាងដែក ក៏ឲ្យប្លែកក្នុងចិត្តគិតព្រួយពេកពន់ កម្លាំងក៏មិនដឹងនឹងគិតតាំងយ៉ាងណា ទទួលឃើញ**ស៊ិនតាំ, ស៊ិនងី**លើកទ័ពចូលមកត្រៀបត្រា ក៏ធូរក្នុងចិត្តសម្គាល់គិតថា គេលើកមកជួយខ្លួន ទើបឲ្យបើកទ្វាររៀបខ្លួនចេញទៅទទួល។

ឯ**ស៊ិនតាំង** និង**ស៊ិនងី**ឃើញទំនងស្រួល ក៏បំផាយសេះហួសចូលទៅ កាលចូលហួសទៅហើយ ក៏ស្រែកហៅ**បេងតាត់**ថា វើយអាចោរក្បត់ម្ចាស់ អាឯងគិតទុរយសអាក្រក់ណាស់ណា ខ្លួនអានឹងវិនាសជីវិតហើយ ឲ្យប្រុងចុះ។ **បេងតាត់**ឮដូច្នោះ ក៏ស្លុតស្លាំងក្នុងចិត្ត ប្រឹងបង្រឹតសេះវេះត្រឡប់ទៅចូលកំពែងវិញ នោះ**តេងហៀន** និង**លីជូ**នៅលើសើន ក៏ឲ្យទាហានបាញ់ធ្នូចម្រុះស្ទុះទុកជាប់ ហើយស្រែកសន្ធាប់ជេរថា អាចោរក្បត់ អាឯងកុំរត់ចូលមកឡើយ ទ្វារនេះអញបើកហើយ ចាំទទួល**សុម៉ាអ៊ី**ទេ។ **បេងតាត់**ក៏បំផាយសេះនាំទាហានរត់ទន្ទ្រានចេញពីចំណោមទ័ព **ស៊ិនតាំ**ដេញប្រកិតដិតជាប់ពីក្រោយទៅទាន់ ក៏លើកលំពែងចាក់ត្រូវ

**បេងតាត់**ធ្លាក់ពីលើសេះស្លាប់ ហើយកាត់យកក្បាលនាំទៅឲ្យ**សុម៉ាអ៊ី**។ បណ្ដាទាហានទាំងអស់ឃើញ**ស៊ិនតាំ, ស៊ិនង៉ី**សម្លាប់**បេងតាត់**ដូច្នោះ ក៏ស្រុះស្រួលបបួលគ្នាទៅចូល**សុម៉ាអ៊ី**គ្មានសល់។ **តេងហៀន**និង**លីជូ**ក៏បើកអញ្ជើញ**សុម៉ាអ៊ី**ចូលទៅតាំងនៅក្នុងស្រុកនោះ។

**សុម៉ាអ៊ី**ក៏បញ្ចុះបញ្ចូលទាហានទាំងអស់ឲ្យនៅជាសុខសប្បាយ ហើយឲ្យទាហានទាំងឡាយយកក្បាល**បេងតាត់**ទៅដោតផ្គាល ហើយដាក់ជាលនាំទៅថ្វាយព្រះចៅ**ចូយ៉យ** ៗជ្រាបដឹងសេចក្ដី ក៏មានព្រះទ័យត្រេកអរណាស់ ត្រាស់ឲ្យយកក្បាល**បេងតាត់**ទៅដោតបញ្ឈរនៅផ្លូវបំបែក ហើយឲ្យតែងព្រះរាជតម្រាស់សេចក្ដីថា **ស៊ិនតាំ** និង**ស៊ិនង៉ី**ដែលបានធ្វើសេចក្ដីគាប់សម្លាប់**បេងតាត់**បាន ត្រូវតាំងឲ្យមានយសជាមន្ត្រីធំ ហើយត្រូវឲ្យប្រជុំលើកទ័ពទៅប្រសព្វនឹង**សុម៉ាអ៊ី** តាំងឲ្យ**ជូលី**ជាចៅហ្វាយស្រុកស៊ិនសៀ តាំងឲ្យ**តេងហៀន**ជាចៅហ្វាយស្រុកសុងយ៉ុង ហើយត្រាស់ឲ្យព្រះរាជបម្រើកាន់ទៅព្រះរាជទានឲ្យ**សុម៉ាអ៊ី**ឯទីក្រុងសុងយ៉ុង ព្រះចៅ**ចូយ៉យ**ក៏ប្រៀបប្រុងលើកកងទ័ពទៅប្រថាប់ឯស្រុកទៀងអាន់។

**សុម៉ាអ៊ី**បានទទួលព្រះតម្រាស់ ក៏ស្រូតរហ័សចាត់ការស្រេចហើយលើកកងទ័ពត្រឡប់ទៅស្រុកទៀងអាន់ លុះដឹងថាព្រះចៅ**ចូយ៉យ**លើកទ័ពទៅដល់ ចូលទៅប្រថាប់នៅក្នុងស្រុកហើយ ក៏ស្រូតលើកទ័ពទៅឈប់តាំងបន្ទាយនៅក្រៅកំពែងស្រុក ហើយ**សុម៉ាអ៊ី**ក៏ចូលទៅគាល់ព្រះចៅ**ចូយ៉យ** ៗឃើញ**សុម៉ាអ៊ី** ក៏មានព្រះទ័យសោមនស្សណាស់ត្រាស់ថា អ្នកកុំតូចចិត្តនឹងយើងឡើយ ដែលយើងគិតខុសហួសទៅហើយ ដោយចិត្តស្រាលរហ័ស ចាញ់ឧបាយកលរបស់**ខុងបេង** យើងសូមអភ័យទោសត្រង់ហ្នឹងទៅចុះ គ្រានេះ**បេងតាត់**ប្រែចិត្តក្បត់នឹងយើងកុំតែបានអ្នកដឹងការជាមុន កុំអីស្រុកយើងនឹងអាប់ចុនអន្តរាយ។ **សុម៉ាអ៊ី**ទូលថា កាល**ស៊ិនតាំ**ឲ្យបម្រើទៅប្រាប់ទូលព្រះបង្គំជាខ្ញុំថា **បេងតាត់**ជាក្បត់នោះ ទូលបង្គំជាខ្ញុំក៏ពិគ្រោះឃើញថា **បេងតាត់**ជានាហ្មឺនធំ បើនឹងចាំបកសំបុត្រក្រាបទូលព្រះអង្គឲ្យជ្រាបមុន ក្រែងស៊ិនឲ្យយូរការនឹងអសារខូចប្រយោជន៍ទៅ ទូលព្រះបង្គំក៏ត្រូវទៅចាប់កាប់អាក្បត់ឲ្យបាន ទោសដែលល្មើសទាំងប៉ុន្មាន ក្រៅព្រះតម្រាស់នោះ ពុំចេរនឹងទ្រង់ព្រះមេត្តា

ប្រោសឲ្យគង់ជាខ្ញុំព្រះរាជការ ហើយក៏ថ្វាយសំបុត្ររបស់**ខុងបេង**ដែលចាប់បាននោះទៅផ្ទាល់ព្រះហស្ថ។

ព្រះចៅ**ចូយ៉យ**ទតព្រះនេត្រាហើយត្រាស់ថា ខ្លួនអ្នកមានសតិបញ្ញាមុតមាំដ៏ប្រសើរនឹងរកនរណាស្មើគ្មាន តាំងពីនេះទៅមុខ បើអ្នកណាធ្វើការឈ្លានពានទោសដល់ស្លាប់ ត្រូវឲ្យសម្លាប់ទៅចុះ មិនបាច់ក្រាបទូលតាមកំហុសនោះឡើយ ត្រាស់ហើយ ក៏ទ្រង់ព្រះរាជទានគ្រឿងឥស្សរិយយសសម្រាប់ក្សត្រឲ្យ**សុម៉ាអ៊ី**ជាច្រើន ហើយឲ្យស្រូតលើកកងទ័ពទៅច្បាំងនឹង**ខុងបេង**។ **សុម៉ាអ៊ី**ទូលថា **ទៀវខាប់**មានថ្វីដៃខ្លាំងពូកែយ៉ាងចំណាប់ ធ្លាប់ធ្វើការសង្គ្រាមមកយូរហើយ ទូលព្រះបង្គំសុំឲ្យធ្វើជានាយទ័ពទៅផង។ ព្រះចៅ**ចូយ៉យ**ក៏ទ្រង់អនុញ្ញាត។ **សុម៉ាអ៊ី**ក៏ថ្វាយអភិវាទបង្គំលា នាំ**ទៀវខាប់**លើកពលយោធាតម្រង់ទៅភ្នំគីសាន់។ ឯព្រះចៅ**ចូយ៉យ**នោះលុះឲ្យ**ទៀវខាប់**លើកទ័ពទៅជាមួយនឹង**សុម៉ាអ៊ី**ហើយ ក៏ឲ្យ**ស៊ីនភី** និង**ស៊ីនឡូ**នាំទាហានមួយកងលើកទៅជួយ**ចូជិន**។

លុះ**សុម៉ាអ៊ី**លើកពលម្ភៃម៉ឺនឆ្លងដែនគយចូលទៅ ក៏តម្រូវឲ្យទាហានទាំងពួងតាំងបន្ទាយរាយចម្រូងតាមលំដាប់ ហើយឲ្យ**ទៀវខាប់**ចូលមកប្រឹក្សាថា ដែលនឹងចាត់ការច្បាំងនឹង**ខុងបេង**នោះ មិនត្រូវខ្ជីខ្ជា ព្រោះ**ខុងបេង**ជាចៅបញ្ញាជ្រាលជ្រៅណាស់ ឯស្រុកប៉ែសៀដែល**ចូជិន**ទៅឈររក្សានោះ ក៏បញ្ឆោតសឹងបាន មុខជា**ខុងបេង**នឹងចាត់ទាហានជាពីរប៉ែក លើកបំបែកទៅវាយយកស្រុកប៉ែសៀ តំបន់គីកុកឱបក្រសោបទុកជាប្រាកដ យើងនឹងឲ្យមានសំបុត្រទៅដល់**ចូជិន**ឲ្យប្រុងប្រយ័ត្ន ត្រួតត្រារក្សាឲ្យមួនមាំ ទម្រាំនឹង**ស៊ីនភី**និង**ស៊ីនឡូ**នាំពលទៅពួនបង្កប់នៅផ្ទាប់តំបន់គីកុក ចាំលុកទ័ព**ខុងបេង**។

**ទៀវខាប់**ថា លោកគិតយ៉ាងនេះគួរណាស់ តែខ្លួនលោកនោះនឹងលើកទៅឯណាវិញ? **សុម៉ាអ៊ី**ថា ឯតំបន់កេតេងនិងកន្លែងលីវសៀនោះ ក៏នៅជិតគ្នា ជាទីចំណាប់ណាស់ ហើយជាមាត់ផ្លូវនឹងចូលទៅស្រុកហាន់តុង យើងនឹងលើកទ័ពទៅបម្រុងពួនបង្កប់កុំឲ្យទ័ពសត្រូវវាដឹងខ្លួន មុខជា**ខុងបេង**នឹងប្រមាថសម្គាល់ថា ខ្លួន**ចូជិន**ធ្វេសប្រហែសការ មិនត្រៀមពលយោធាការពារស្រុកប៉ែសៀ ក៏នឹងលើក

រេហ៍ពលទៅវាយយក បើយើងឃើញច្រកល្ហកជាទ័ព**ខុងបេង**ឆ្លងមកតំបន់កេតេង ហើយ យើងនឹងស្ទាក់ផ្លូវទុក **ខុងបេង**គង់ជ្រុលមុខទាល់ច្រកនោះ បើនឹងដោះទៅតាំងទ័ពឯស្រុកឡុងសេ យើងនឹងរេលើកទាហានទៅស្កាត់តាមផ្លូវតូច និងផ្លូវធំឲ្យអស់ កុំឲ្យទាហាន**ខុងបេង**គេចដោះខ្លួនបាន បិទទាំងស្បៀងប៉ុន្មានៗ ឲ្យដាច់ផ្លូវទ្រាំនៅពុំជាប់ គង់នឹងត្រឡប់លើកទាហានរត់ទៅផ្លូវហាន់តុង ខាងយើងបានបម្រុងនឹងលើកប្រសព្វខ្ទប់វាយ ឃើញនឹងបានជ័យជម្នះដោយងាយមិនព្រួយការ។

**ទៀវខាប់**ស្តាប់ចប់វាចា ក៏លើកហត្ថាឡើងគំនាប់ ហើយសរសើរគំនិតដែលគិតរៀបរាប់ថា លោកមានប្រាជ្ញាដូចទេវតាថែដន្យពិតណាស់។ **ស៊ុម៉ាអ៊ី**ប្រឹក្សាស្រេចការស្រឡះ ក៏តែងសំបុត្រចាត់បម្រើយ៉ាងរហ័សឲ្យនាំទៅឲ្យ**ចូជិន**ឯតំបន់ស្រុកប៉ៃសៀ ហើយទើបកំជាប់**ទៀវខាប់**ថា យើងត្រូវគិតកលឧបាយទាំងឡាយទាំងពួងដែលយើងយល់ឃើញដូចគ្នា ក៏មែនហើយ តែថាការទាំងនោះ អស់ហើយដោយសេចក្តីមិនប្រមាទ ព្រោះ**ខុងបេង**នោះជាមនុស្សឆ្លៀវឆ្លាត មិនមែនមិនស្គាល់បទបាទដូច**បេងតាត់**ទេ ខ្លួនអ្នកមេលើទ័ពមុខ នឹងលើកទាហានចេញទៅមិនត្រូវគិតស្រាល ត្រូវតែអភិបាលត្រួតត្រាចាត់ការឲ្យមានទាហានល្បាតលាតក្រវែល មើលច្រកល្ហកផ្លូវព្រៃទៅខាងមុខជាដរាប បើមិនឃើញមានមនុស្សខ្ពស់ទាបនៅឆ្វេងស្តាំជាមណ្ឌលទេ សឹមលើកទ័ពទៅចុះ ទោះមិនបានត្រួតរាំងឲ្យដឹងខុសត្រូវដរាបណា ការអន្តរាយដែលយល់ថា បានការហើយចេះតែលើកទៅ ក៏នឹងត្រូវកលរបស់**ខុងបេង**ដោយមិនដឹងខ្លួន។ **ទៀវខាប់**ទទួលបង្គាប់ហើយ ក៏គំនាប់លាលើកកងពលយោធាជាទ័ពមុខចេញទៅ។

ខណៈនោះ **ខុងបេង**លើកទាហានទៅតាំងនៅប្របភ្នំគីសាន់ ពួកល្បាតនាំព័ត៌មានរាជការពីស្រុកស៊ិនសៀមកជម្រាប**ខុងបេង**ថា ឥឡូវ**ស៊ិនតាំ** និង**ស៊ិនងី, លីជូ, តេងហៀន** ដែលមហាឧបរាជឲ្យទៅនៅឈររក្សាស្រុកស៊ិនសៀជាមួយនឹង**បេងតាត់**នោះ ប្រែចិត្តជាក្បត់ត្រឡប់រត់ទៅចូលខាង**ស៊ុម៉ាអ៊ី**ជាកលសឹកខាងក្នុង តាំងប្រៀបប្រុងឲ្យលើកកងទ័ពកាត់ផ្លូវទៅចំនួន៨ថ្ងៃ **បេងតាត់**ផុតនិស្ស័យដោយមិនដឹងខ្លួន **ស៊ុម៉ាអ៊ី**លើកទ័ពធំមាំមួនចូលចោមវាយយកស្រុកសុងយ៉ុងបាន សម្លាប់

**បេងតាត់**ដល់សេចក្ដីស្លាប់ទៅហើយ ៗ**សុម៉ាអ៊ី**ទើបត្រឡប់ទៅទូលព្រះចៅ**ចូយ៉យ** ៗមានចិត្តកំរើបខ្លាំងណាស់ ត្រាស់ប្រើ**ទៀវខាប់**ជានាយទ័ពមុខ **សុម៉ាអ៊ី**ជាមេកងធំនាំទ័ពហ្លួងឆ្លងមក ប្រាថ្នាតច្បាំងនឹងលោក។

**ខុងបេង**ដឹងដូច្នោះ ក៏ថ្លោះទឹកមុខ ព្រួយទុក្ខភ័យណាស់និយាយថា **សុម៉ាអ៊ី** លើកទ័ពមកគ្រានេះ មុខជានឹងកន្លងចូលមកតាំងស្កាត់នៅតំបន់កេតេង ដើម្បីនឹងបិទទឹកន្លែងផ្លូវយើងទាំងអស់ នរណានឹងអាសាទៅរក្សាទីកេតេងទុកបាន? **ម៉ាចេក** ឆ្លើយថា ខ្ញុំបាទសូមទទួលអាសាទៅឯង។ **ខុងបេង**តបថា ដែលអ្នកនឹងទៅរក្សាតំបន់កេតេងនោះ ក៏គាប់ប្រពៃណាស់ អ្នកអើយ រីទីកេតេងនោះ ចំពោះជាតំបន់តូចឆ្មារណាស់ តែថាជាទីដ៏សំខាន់ ប៉ុន្តែឯកំពែងគ្មាន នឹងការពាររក្សាបានដោយកម្រទោះបីថ្វីដៃអ្នកខ្លាំងពូកែយ៉ាងណា ក៏គង់នាំអាត្មាអ្នកឲ្យប្រមាថទៅខ្លះ បើកេតេងតំបន់មួយនេះខូចនឹងសត្រូវហើយ អ្នកអើយ រីទាហានទាំងពួងគង់នឹងវិនាសទៅអស់។

**ម៉ាចេក**ថា បើដូច្នោះ ខ្ញុំបាទឃើញនឹងបង់កម្លាំង នូវសតិបញ្ញាដែលបានសិក្សាសូត្ររៀនវិជ្ជាសិល្បសាស្ត្រ សង្វាតខំពីតូចលុះធំ ទ្រាំធ្វើសឹកមកក៏ច្រើនគ្រាពុំដែលបរាជ័យសោះ ត្រឹមតែតំបន់កេតេងប៉ុណ្ណោះ ណាក៏នឹងរក្សាទុកមិនបាន ឲ្យស្លាប់អន្តរធានទៅចុះ រស់នៅឥតអំពើ។ **ខុងបេង**តបថា អ្នកឯងកុំអាលមើលងាយការ ព្រោះ**សុម៉ាអ៊ី**នោះ ជាមនុស្សមានសតិបញ្ញាចេះគិតច្រើនណាស់ ទាំងថ្វីដៃក៏មានតបះខ្លាំងពូកែ មួយទៀត **ទៀវខាប់**ក៏សុទ្ធតែជាអ្នកមានល្បីថ្វីដៃរែយ៉ាងឯកដូចគ្នាជាយកងទ័ពមុខមកផង អ្នកឯងនឹងប្រឡងដោយតម្រិះឬកម្លាំង ក្រែងមិនគង់ទីកេតេងនោះដឹងឬទេ?

**ម៉ាចេក**ថា កុំថាឡើយតែត្រឹម**សុម៉ាអ៊ី**និង**ទៀវខាប់**ប៉ុណ្ណោះ បើទោះជា**ចូយ៉យ**នឹងលើកពកមកព្រួតថែមទៀត ខ្ញុំបាទក៏ឥតកោតញញើតសោះ និយាយហើយក៏ធ្វើសំបុត្រសញ្ញាជូន**ខុងបេង**ថា បើខ្ញុំបាទធ្វើការមិនបានដូចវាចាថាទេ សូមឲ្យមហាឧបរាជប្រហារជីវិតខ្ញុំបាទព្រមទាំងភរិយាឲ្យអស់ចុះ **ខុងបេង**ទទួលយកសំបុត្រសញ្ញាហើយ ក៏ចាត់ពលពីរម៉ឺនប្រាំពាន់ប្រគល់ឲ្យ**ម៉ាចេក** ហើយក៏ចាត់ឲ្យ

**អងប៉េង**ទៅជាមួយផង ហើយនិយាយផ្តាំផ្តាច់ថា អ្នកឯងមានសតិបញ្ញាស្រាប់ ហើយ ចូរកុំប្រមាទ ត្រូវតែដាស់តឿនរំឭកគ្នាឲ្យធ្វើការដោយហ្មត់ចត់ល្អ បើនឹងតាំងបន្ទាយ ឬវាយកងទ័ពបញ្ឈប់ ឬប្រារព្ធនឹងលើកទៅវេលាណា ត្រូវប្រឹក្សាពិគ្រោះឲ្យចុះសម្រុងគ្នា កុំធ្វើការឲ្យបែកខ្ញែកវែកយកមុខដោយខ្លួនឲ្យបានថ្កោះថ្កោយអន្តរាយការ បើលើកពលទៅដល់ថ្ងៃណា ឲ្យគួរជាផែនទីតាមរបៀបភាពបន្ទាយវាយពលទល់តនឹងសត្រូវ ផ្ញើមកឲ្យយើងជាឆាប់ បើអ្នកឯងជានាយទ័ពជួយការពារ រក្សាគំបន់កេតេងទុកបាន គង់នឹងមានសេចក្តីគាប់ប្រសើរតទៅ។ **ម៉ាចេក**និង**អងប៉េង** ទទួលបង្គាប់**ខុងបេង**ហើយក៏គំនាប់លាលើកពលយោធាតម្រង់ទៅតំបន់កេតេង។

លុះ**ម៉ាចេក**និង**អងប៉េង**លើកផុតទៅហើយ **ខុងបេង**ក៏និយាយនឹង**កោសៀង**ថា ឯ**ម៉ាចេក** និង**អងប៉េង**ដែលលើកទ័ពទៅរក្សាទីកេតេងនោះ យើងក៏មានសេចក្តីព្រួយជាទុក្ខក្នុងចិត្តដរាប ព្រោះស្រុកលីវសៀនោះជិតគ្នានឹងទីកេតេង ហើយជាច្រកល្ហកជ្រកទៅក្នុងភ្នំទុរគមអារញ្ញញាតស្បាតណាស់ មានទំនងឲ្យពួនបង្កប់ទ័ពបានច្រើន ត្រូវអ្នកឯងនាំទាហានមួយម៉ឺនទៅតាំងនៅស្រុកលីសៀឲ្យពួនបង្កប់គ្រប់ច្រកល្ហក បើឃើញទីកេតេងនឹងជាហេតុយ៉ាងណា ត្រូវលើកពលយោធាទៅជួយ**ម៉ាចេក**និង**អងប៉េង**ឲ្យទាន់ការ **កោសៀង**ក៏គំនាប់លា**ខុងបេង**លើកទ័ពចេញទៅ។ **ខុងបេង**ក៏ឲ្យហៅ**អ៊ុយអៀន**មកនិយាយថា ឥឡូវយើងចាត់ប្រើ**កោសៀង**ឲ្យលើកទ័ពទៅតាំងនៅស្រុកលីវសៀ តែថានៅមិនទាន់ទុកចិត្តសោះ ព្រោះការគ្រានេះ មើលទៅឃើញពន្លឹកណាស់ ត្រូវអ្នកឯងលើកទ័ពទៅបង្កប់ពីក្រោយតំបន់កេតេង បើឃើញពួកយើងផ្សេងៗទន់ថយនៅទីណា ត្រូវចាត់គ្នាលើកទៅជួយឲ្យរួសរាន់រហ័ស **អ៊ុយអៀន**ថា ខ្ញុំបាទជានាយទ័ពមុខ គួរនឹងទំនុកបម្រុងប្រើឲ្យទៅមុខគេជាប្រចាំការតាមទំនៀម ឥឡូវមហាឧបរាជប្រើ**ម៉ាចេក**និង**អងប៉េង**ឲ្យទៅធ្វើសង្គ្រាម ព្រមទាំង**កោសៀង**ទៅមុខអស់ហើយ ម្តេចឡើយមកប្រើខ្ញុំបាទជានាយកងមុខឲ្យធ្លាក់មកនៅពីក្រោយ ដោយឥតប្រយោជន៍ដូច្នេះ នឹងបានអ្វីជាសេចក្តីគាប់ប្រសើរខ្លះ?

**ខុងបេង**ថា អ្នកឯងកុំអាលតូចចិត្តដ្បិតទៅក្រោយគេប៉ុណ្ណោះ ឯ**ម៉ាចេក**និង **អងប៉េង, កោសៀង**នោះ មុខជាតស៊ូនឹង**ទៀវខាប់**ពុំបានទេ អ្នកលើកទ័ពទៅក្រោយគេគ្រានោះ អ្នកកុំអាលថាជាទីតូចចង្អៀតឥតតម្លៃឡើយ បើប្រទះហើយគង់យល់ថាជាទីសំខាន់ណាស់ អ្នកកុំស្រាលរហ័សធ្វេសប្រមាទចូរខំសង្វាតយកចិត្តគិតត្រួតត្រាការពារឲ្យមាំចុះទើបនឹងមិនអន្តរាយ។ **អ៊ុយអៀន**បានស្តាប់ ក៏មិនទាន់អស់ស្តាយ ខំប្រើកិរិយារួសរាយដោយខ្លាច**ខុងបេង**ក៏គំនាប់លើកទ័ពចេញទៅ លុះដល់ហើយក៏ចាត់ទាហានឲ្យពួនបង្កប់ផ្ទាប់ក្រោយទីកេតេង តាម**ខុងបេង**បង្គាប់។

ទើប**ខុងបេង**ឲ្យហៅ**ជូឡុង**និង**តេងជី**មកបង្គាប់ថា អ្នកចូរនាំកងទ័ពទៅបញ្ឆោតទ័ព**សុម៉ាអ៊ី**នៅតំបន់គីកុក ទោះបីមិនបានតទល់មុខច្បាំងគ្នាក្តី គង់តែពល**សុម៉ាអ៊ី**នឹងរួញរាញញើតដៃមិនខាន ខ្លួនខ្ញុំឯងនឹងលើកទ័ពហ្លួងទាំងប៉ុន្មានស្រូតទៅស្រុកប៉ៃសៀតែម្តង បើវាយបានស្រុកប៉ៃសៀហើយ មិនលែងឡើយនឹងបានស្រុកទៀងអាន់ទៀត។ **ជូឡុង**និង**តេងជី**ក៏ទទួលបង្គាប់គំនាប់លា**ខុងបេង**លើកទ័ពទៅ ឯ**ខុងបេង**តាំង**កៀងអ៊ុយ**ជានាយកងទ័ពមុខ ហើយក៏លើកព្រមគ្នាចេញទៅពីទីភ្នំគីសាន់។

កាល**ម៉ាចេក**លើកទ័ពទៅដល់តំបន់កេតេង ក៏សង្កេតមើលកន្លែងភូមិឋានហើយ ក៏អស់សំណើចថា តំបន់ទីនេះមានជ្រោះជ្រលងដងព្រៃភ្នំច្រើនអន្លើ ណាឡើយ**សុម៉ាអ៊ី**រុករើចូលមកបាន មិនគួរមហាឧបរាជនឹងរំខានព្រួយបារម្ភសោះ។ **អងប៉េង**ឆ្លើយថា ឯតំបន់កេតេងនេះ គួរមហាឧបរាជនឹងកំជាប់ប្រាប់ឲ្យប្រុងប្រយ័ត្នមែន ព្រោះជាទីចង្អៀតញាតស្បាតខុសពីទីដទៃ យើងកុំគប្បីប្រមាទ សុំឲ្យលោកខំឱហាតចាត់ការឲ្យធ្វើបន្ទាយធំពាសមាត់ផ្លូវនេះទុកចុះ នឹងមិនខុសព្រោះមានផ្លូវតូចៗបែកជាប្រាំ ចំមកលើផ្លូវមួយនេះ ជួបគ្នាជាដើមផ្លូវទៅពីនេះទៅបារម្ភក្រែងមានសត្រូវលបលើកទ័ពញែកប្រសព្វចូលមក នឹងរកសម្គាល់ម្តេចបានគួរឲ្យស្មានកុំទុកចិត្តឲ្យសោះ។

**ម៉ាចេក**ថា ដែលនឹងបោះបន្ទាយរាយទទឹងផ្លូវនៅត្រង់នេះគ្មានទំនៀមទេ ព្រោះមានភ្នំនៅរីមផ្លូវនេះចំពោះជាគោលមួយហើយ នៅជើងភ្នំ ក៏មានព្រៃធំជា

របាំង ដូចទេវតាមកតែងតាំងជាជ័យភូមិឲ្យយើង ៗគួរនឹងលើកទាហានឡើងទៅបោះបន្ទាយនៅកំពូលភ្នំ នឹងមិនស្រួលទេឬ? **អងប៉េង**ថា ដែលនឹងចោលទីតាំងសំខាន់ត្រង់នេះ លះទៅធ្វើលើភ្នំមិនសមសោះ ខ្ញុំមិនឃើញផងទេ បើតាំងបន្ទាយបិទផ្លូវធំនៅត្រង់នេះ ទោះបីសត្រូវជាងចេះនឹងលើកពលដល់ម៉ឺនសែនមកកាច់កិនយ៉ាងណា ក៏ឃើញថានឹងពារទម្លាយទៅមិនបាន បើលោកនឹងនាំទាហានទៅតាំងលើភ្នំឲ្យបាន សត្រូវដឹងនឹងលើកទាហានទៅចោមព័ទ្ធវិញ នឹងមិនទាល់រត់ចុះចេញមិនរួចទេឬ?

**ម៉ាចេក**អស់សំណើចហើយថា អ្នកនិយាយយ៉ាងនេះដូចជាទាល់តម្រិះប្រាជ្ញាឧបមាដូចស្រីខ្ជីគំនិតណាស់ បុរាណចាស់ទុំនិយមទុកមកថា បើនឹងធ្វើសង្គ្រាមឲ្យព្យាយាមរកទីខ្ពស់ស្រឡះទើបនឹងរីតតបឈ្នះបច្ចាមិត្តមិនបង់ប្រៀប បើនឹងធៀបដូចគេពុះឫស្សីដូច្នោះ ទោះ**សុម៉ាអ៊ី**លើកមកយើងនឹងដេញចម្រុះឲ្យចុះទៅយ៉ាងឆាប់មិនឲ្យមានក្រើសជាប់នៅនឹងខ្លួនបានឡើយ។

**អងប៉េង**ថា បុរាណក៏មានពោទុកមកហើយថា ធ្វើសង្គ្រាមឲ្យព្យាយាមរកទីខ្ពស់ក៏មែន តែថាបើយើងគ្រានេះទៅនៅលើភ្នំ បើសត្រូវលើកទ័ពជុំបិទបាំងផ្លូវទឹកអស់ តើពលយើងនឹងចុះទៅផឹកឯណាបាន? បើយ៉ាងដូច្នេះចាស់បុរាណមានថាយ៉ាងណាទៅទៀត? **ម៉ាចេក**ថា អ្នកនេះមិនទាន់ចេះធ្វើការសឹកសោះ ព្រោះបុរាណថាធ្វើសឹកឲ្យនឹកទៅដល់ទីស្លាប់ជាមុន រួចសឹមគន់រកទីរស់ជាក្រោយ បើសត្រូវចោមព័ទ្ធយើងមិនឲ្យពលចេញទៅរកទឹកផឹកបាន ក៏ដូចគេមានទោសជាប់គុក មុខជាទាហានយើងស្ទុះទម្លាយមិនងាយនៅទ្រាំនឹងអត់ទឹកនោះឡើយ ម្ល៉ោះហើយនឹងកើតក្រដួរខឹងប្រឹងស្មើដៃគ្នា ទោះតែវាម្នាក់ក៏អាចតស៊ូនឹងគេដល់យោធាបាន គង់នឹងទម្លាយមិនក្រប៉ុន្នានទេ យើងបានគិតគ្នេរតាមក្បួនពិជ័យសង្គ្រាម ដែលព្យាយាមរៀនមកឃើញសព្វគ្រប់ហើយ សូម្បីមហាឧបរាជក៏បានប្រឹក្សាឲ្យដោះឆ្លើយមិនដែលទើសទាល់សោះ ហេតុម្ដេចក៏អ្នកនៅមិនអស់ចិត្តមកគិតមើលងាយយើង នៅរឹងទទឹងដូច្នេះ?

**អងប៉េង**ថា បើលោកមិនយកតាមពាក្យខ្ញុំ ខំតែលើកទាហានឡើងទៅតាំងលើកំពូលភ្នំ ក៏តាមអធ្យាស្រ័យលោកចុះ សុំឲ្យបែងរំលែកទាហានឲ្យខ្ញុំបាទតែពាក់កណ្ដាលប៉ុណ្ណោះ ខ្ញុំបាទនឹងបានកាប់ឆ្ការរារាំងទុកតាមកម្លាំង ខណៈកាលកំពុងនិយាយជជែកគ្នា មានពួកអ្នកស្រុកព្រៃលើមួយកងបែកឆ្លងរត់មកដល់ប្រាប់ថា ឥឡូវ**សុម៉ាអ៊ី**លើកទ័ពជិតមកដល់តំបន់នេះហើយ។ **ម៉ាចេក**ឮដូច្នោះក៏ពិគ្រោះនឹង**អងប៉េង**ថា យើងនឹងបែងរំលែកទាហានឲ្យអ្នកប្រាំពាន់ ចូរអ្នកនាំទៅតាំងឲ្យទាន់ការចុះ សល់ពីនោះយើងនឹងនាំឡើងទៅតាំងលើកំពូលភ្នំ បើយើងបានខំកម្ចាត់សត្រូវមានជ័យជម្នះវេលានេះ យើងមិនត្រូវការលើកគុណគាប់ឲ្យដល់អ្នកផងទេ។ **អងប៉េង**ទទួលពលចំណែកខ្លួនហើយ ក៏លើកទៅតាំងនៅឆ្ងាយពីភ្នំប្រមាណមួយរយសិន (៤ គ.ម) ទើបតាំងគូរព្រាងផែនទីចាត់បម្រើនាំស្រូតទៅជូន**ខុងបេង**។

ឯ**សុម៉ាអ៊ី** ក៏ប្រើ**សុម៉ាជៀវ**ជាបុត្រឲ្យនាំពលចេញទៅស៊ើបល្បាតស្ដាប់ដំណឹង បើនឹងដល់ទៅតំបន់កេតេងហើយ កុំអាលជ្រួលជ្រើមត្រូវត្រៀមបង្អង់មើលកលការ បើឃើញ**ខុងបេង**ចាត់ពលយោធាទៅតាំងនៅទីនោះហើយ ត្រូវវិលទៅប្រាប់ឲ្យឆាប់វិញ នោះ**សុម៉ាជៀវ**ក៏នាំពួកល្បាតចេញទៅ ឃើញទាហាន**ខុងបេង**ទៅតាំងនៅតំបន់កេតេង ក៏ត្រឡប់ទៅថ្លែងប្រាប់**សុម៉ាអ៊ី**ជាបិតា។

**សុម៉ាអ៊ី**ដឹងការណ៍ក៏ដកដង្ហើមធំថា **ខុងបេង**នេះប្រាជ្ញាយល់ការរហូតមិនសល់សោះ ចំពោះដូចទេវតា ប្រាជ្ញាយើងមិនយល់ដល់ឡើយ **សុម៉ាជៀវ**តបឆ្លើយថា ហេតុម្ដេចបិតាប្រញាប់ព្រួយម្ល៉េះ? ខ្ញុំបាទយល់ឃើញថា តំបន់កេតេងនេះ បើនឹងច្បាំងយកតាមតម្រិះក៏បានដោយងាយមិនព្រួយអ្វីទេ។

**សុម៉ាអ៊ី**សួរថា ម្ដេចក៏ចៅហ៊ានប្រមាទដូច្នោះ? **សុម៉ាជៀវ**ឆ្លើយថា ខ្ញុំបាទទៅល្បាតឃើញហើយ តំបន់កេតេងនោះ ទាហាន**ខុងបេង**នឹងបានតាំងបន្ទាយនៅត្រង់ទីសំខាន់ក៏ទេ គឺឡើងទៅតាំងនៅលើកំពូលភ្នំ។ **សុម៉ាអ៊ី**ឮដូច្នោះ ក៏សោមនស្សក្នុងចិត្តណាស់ថា បើដូច្នោះក៏ហាក់ដូចទេវតាជួយយើងឲ្យបានសេចក្ដីគាប់ប្រសើរពិត ហើយ**សុម៉ាអ៊ី**ក៏តែងខ្លួនសម្ដែងឫទ្ធិពាក់ក្រោះឡើងជិះសេះនាំទាហានមួយរយ

ឆ្ងាយ ស្រូតទៅមើលដល់តំបន់កេតេង ស្វែងត្រួតមើលច្រកល្ហកនឹងលើកចូលចេញនៅទីភ្នំនោះ ហើយក៏ត្រឡប់មកវិញ។

ខណៈនោះ **ម៉ាចេក**ក៏បង្គាប់ពួកទាហានថា បើឃើញកងទ័ព**សុម៉ាអ៊ី**លើកមកដល់តំបន់នេះហើយ ឃើញយើងបោកទង់វេលាណា ឲ្យអ្នករាល់គ្នាស្ទុះស្រចុះពីលើភ្នំទៅតដៃវាយបំបែកទ័ព**សុម៉ាអ៊ី**ឲ្យបាន។

ឯ**សុម៉ាអ៊ី**នោះ លុះត្រឡប់ទៅដល់ទីឋាន ក៏នៅមិនទាន់ច្បាស់ថា ទីតំបន់កេតេងនេះនរណាអេះជានាយទ័ពលើកទៅតាំងនោះ ទើបចាត់បម្រើម្នាក់ឲ្យទៅស៊ើបការណ៍។ បម្រើទៅស៊ើបហើយក៏វិលសាមកប្រាប់ថា នាយកងទ័ពឈ្មោះ **ម៉ាចេក** ប្អូន**ម៉ាលៀង** លើកទាហានមកតាំងនៅទីកេតេងនោះ។ **សុម៉ាអ៊ី**ឮដូច្នោះក៏អស់សំណើចហើយថា **ម៉ាចេក**នោះប្រាកដក៏តែឈ្មោះ ឯតម្រិះនិងថ្វីដៃជាមនុស្សអប្រិយប្រាជ្ញា **ខុងបេង**ប្រើមនុស្សមិនជាការកម្លៅដូច្នេះ គង់ថ្លោះការជាប្រាកដ ហើយទើបសួរទាហានថា នឹងលើកទៅតាំងនៅទីនោះ តែ**ម៉ាចេក**មួយកងទេឬ ៗ មានទាហានតាំងនៅទីណាខ្លះ? ទាហានឆ្លើយថា **អងប៉េង**នាំទាហានទៅតាំងនៅឆ្ងាយពីភ្នំប្រហែលផ្លូវមួយរយសិន មានបន្ទាយមួយ។

**សុម៉ាអ៊ី**ក៏ចាត់ឲ្យ**ទៀវខាប់**លើកទ័ពទៅស្កាត់ផ្លូវខាំងទុក ដើម្បីមិនឲ្យ**អងប៉េង**លើកមកជួយគ្នាបាន ហើយឲ្យ**ស៊ិនតាំ** និង**ស៊ិនងី** ពីរនាយលើកទាហានទៅស្កាត់បិទផ្លូវដែល**ម៉ាចេក**នឹងលើកចុះមកដងទឹកផឹកនោះឲ្យបាន ហើយបង្គាប់ថា បើឃើញយើងធ្វើការបានចំណាប់ហើយ ត្រូវឲ្យជួយគ្នាជាប្រញាប់។ **សុម៉ាអ៊ី**ចាត់កងទ័ពស្រេចពីពេលកណ្តាលយប់ លុះភ្លឺស្រាងក៏ឲ្យលើកទ័ពចេញទៅ កងទ័ព**សុម៉ាអ៊ី**ក៏តាំងនៅព័ទ្ធជុំភ្នំ។

ឯ**ម៉ាចេក**ឃើញកងទ័ព**សុម៉ាអ៊ី**លើកមកព័ទ្ធជុំវិញហើយ ក៏បោកទង់សញ្ញាឲ្យពលយោធាទាំងអស់ចុះមកទម្លាយទ័ព**សុម៉ាអ៊ី**។ ទាហាន**ម៉ាចេក**ឃើញសឹកសត្រូវព័ទ្ធនៅច្រើនណាស់ ក៏នឹកខ្លាចពុំអាចប៉ះពាល់ទម្លាយ ចេះតែវាយមាយរារែកបែកគ្នា។ **ម៉ាចេក**ឃើញទាហានរួញរាមិនហ៊ានចូលទៅប្រកាប់ប្រចាក់ ក៏នឹកខឹងលើសលុប ស្ទុះទៅកាប់នាយទាហានពីរនាក់ស្លាប់នៅទីនោះ។ ពួកទាហានឃើញ

ដូច្នោះ ក៏ភ័យខ្លាចជ្រួលច្របល់។ **ម៉ាចេក**ក៏ស្ទុះទៅតទល់នឹងទ័ព**សុម៉ាអ៊ី**ជាសន្ធឹកសន្ធាប់។ ទ័ព**សុម៉ាអ៊ី**ក៏ចូលប្រកាប់ជាប់ដៃឥតភ្លឹកសោះ បិទផ្លូវមិនឲ្យមានចន្លោះច្រកត្រង់ណា។ ទាហាន**ម៉ាចេក**នឹករអាពុំហ៊ានពារទម្លាយ នាំគ្នារត់ព្រាត់ព្រាយថយឡើងទៅវិញ។ **ម៉ាចេក**ឃើញដូច្នោះមិញ ក៏នឹកតូចចិត្តគិតទោមនស្សពន់ប្រមាណ ប្រមូលទាហានឡើងទៅនៅលើកំពូលភ្នំ ចាំមើលគេលើកទ័ពទៅជួយ។

ឯ**អងប៉េង**ឃើញ**សុម៉ាអ៊ី**លើកទ័ពទៅព័ទ្ធភ្នំដូច្នោះ ក៏លើកទាហានទាំងអស់នឹងទៅជួយ**ម៉ាចេក** លុះលើកទៅក៏ប្រទះនឹងទ័ព**ទៀវខាប់**ជាពន្លឹកមហិមារាំងទទឹងផ្លូវ នោះទាហានខាងសត្រូវក៏ចូលច្បាំងតាំងប្រយុទ្ធគ្នា ទាហាន**ទៀវខាប់**ចេះតែរាំងរាមិនឲ្យចូលទៅបាន ក៏ថយត្រឡប់ទៅវិញ។ **សុម៉ាអ៊ី**ក៏ជាប់ត្រួតត្រាឲ្យពលយោធានៅព័ទ្ធភ្នំពុំរាថយសោះ តាំងពីព្រឹកលុះថ្ងៃត្រង់។ ទាហាន**ម៉ាចេក**ចេះតែស្រេកទឹកទាំងអស់គ្នា នឹងចុះមកដងទឹកទៅបរិភោគក៏ពុំបាន ពលទាហានក៏កាន់តែរសេះរសោះអស់កម្លាំងណាស់ ខ្លះទ្រាំមិនបាន ក៏នាំគ្នាលបគេចរត់ចុះទៅចូលខាងទ័ព**សុម៉ាអ៊ី**ជាច្រើន។ ឯទាហានដែលសល់នៅលើកំពូលភ្នំនោះ **សុម៉ាអ៊ី**ក៏បង្គាប់ឲ្យពលទាំងអស់ឈ្លូលភ្លើងឲ្យឆេះរាលឡើងទៅ។ ទាហាន**ម៉ាចេក**ក៏ភ្ញាក់ផ្អើលដោយក្តៅរត់ប្រពាក់ប្រពូនលើគ្នា។ **ម៉ាចេក**ស្ពុតតក្កមានឹងទ្រាំតទល់ពុំបាន ក៏នាំទាហានពានទម្លាយរត់ចុះទៅ។ **សុម៉ាអ៊ី**ក្លែងឲ្យទាហានញែកបើកផ្លូវឲ្យ**ម៉ាចេក**រត់ទៅបាន។

**ទៀវខាប់**ឃើញ**ម៉ាចេក**បែកទ័ពរត់បំពានចុះមក ក៏លើកទាហានដេញជិតប្រកិតពីក្រោយឲ្យចាប់**ម៉ាចេក** ទទួល**អ៊ុយអៀន**ចេញទាហានគគ្រឹកមកជួយទាន់ក៏ពារពានទៅការយកខ្លួន**ម៉ាចេក**បាន ហើយ**អ៊ុយអៀន**ស្ទុះបំពានទៅប្រយុទ្ធនឹង**ទៀវខាប់** ៗតស៊ូមិនបានក៏ថយរត់ទៅ។ **អ៊ុយអៀន**បានចំណាប់ ក៏ដេញប្រផាប់តាម**ទៀវខាប់**ទៅនឹងដណ្តើមយកទីកេតេងវិញ លុះស្រូតតាមទៅចម្ងាយផ្លូវប្រហែលហាសិបសិន (២ គ.ម) ប្រទះនឹង**សុម៉ាអ៊ី, សុម៉ាជៀវ** លើកទាហានមកបង្កប់ត្រឡប់ចេញពីព្រៃមកខ្ទប់**អ៊ុយអៀន**សងខាងផ្លូវ។ **ទៀវខាប់**ឃើញដូច្នោះក៏ត្រឡប់ទៅតនឹង**អ៊ុយអៀន** ៗក៏នៅក្នុងចំណោម ចេះតែវិលតព្រមទាំងបីជ្រុងពុំរង់រា។

ខណៈនោះ ទ័ព**អ៊ុយអៀន**ក៏មរណាប្រហែលពាក់កណ្ដាល ទទួល**អងប៉េង**លើកទាហានមកដល់ ឃើញ**សុម៉ាអ៊ី**ព័ទ្ធ**អ៊ុយអៀន**ជាប់នៅកណ្ដាលពួកពល ក៏ចូលបំពានទៅជួយ**អ៊ុយអៀន** ៗឃើញ**អងប៉េង**ក៏មានអំណរថា ទីនេះយើងមិនស្លាប់ទេ ទាំងពីរនាយក៏វាយចាក់កាប់ទ័ព**សុម៉ាអ៊ី**ស្លាប់ដេរដាសច្រើនណាស់។ **សុម៉ាអ៊ី**និង**សុម៉ាជៀវ, ទៀវខាប់**ក៏ថយទ័ពទៅវិញ។ **អ៊ុយអៀន**និង**អងប៉េង**ក៏នាំគ្នាចូលទៅក្នុងបន្ទាយ លុះទៅនឹងដល់ក្រឡេកយល់ឃើញទង់ដោតដេរដាសលើសើនច្រើនណាស់ ដឹងច្បាស់ថាសត្រូវដណ្ដើមយកបន្ទាយបាន ទើបឲ្យទាហានបង្អង់នៅ។

ឯ**ស៊ិនតាំ** និង**ស៊ិនងី**ដែលចូលទៅនៅក្នុងបន្ទាយនោះ លុះឃើញ**អ៊ុយអៀន**និង**អងប៉េង**ត្រឡប់តម្រង់នឹងចូលបន្ទាយ ក៏វាយទាហានតទល់ខ្ទាប់។ **អ៊ុយអៀន, អងប៉េង**ក៏ត្រឡប់រត់ទៅរក**កោសៀង**ឯស្រុកលីវសៀ។ ខណៈនោះ**កោសៀង**ដឹងថា តំបន់កេតេងបែក ក៏ញែកទាហានលើកទៅជួយ ទទួលប្រទះនឹង**អ៊ុយអៀន, អងប៉េង**បែកទ័ពត្រឡប់រត់មក ក៏សាកសួរដឹងសេចក្ដីគ្រប់ប្រការហើយថា ក្នុងពេលយប់នេះ យើងត្រូវជួយគ្នាលើកទ័ពទៅលុកបន្ទាយកេតេងវិញឲ្យបាន លុះប្រឹក្សាយល់ព្រមគ្នា វេលាយប់ក៏ញែកទាហានជាបីកង ឲ្យ**អ៊ុយអៀន**ជាកងមុខ **កោសៀង**ជាកងក្រោយ។

លុះ**អ៊ុយអៀន**លើកទៅដល់តំបន់កេតេង ឃើញតែបន្ទាយសូន្យធេងទទេគ្មានមនុស្សសោះ ក៏ពិគ្រោះឃើញថា **សុម៉ាអ៊ី**ប្រើកលនឹកពិភាល់ណាស់ ឲ្យទាហានទាំងអស់រង់នៅទីនោះ **កោសៀង**ក៏ស្រូតលើកទ័ពមកទាន់គ្នាប្រឹក្សាយល់ថា យើងលើកទ័ពមកដល់យល់តែបន្ទាយទទេ មិនបានឃើញ**សុម៉ាអ៊ី**ជាមេសម្រេចរាជការ នឹងតាំងនៅឯណាក៏មិនច្បាស់ មួយទៀត **អងប៉េង**ក៏នៅមិនដឹងការលើកពលយោធាមកមិនទាន់ដល់ ថាមិនទាន់ផុតមាត់ ស្រាប់តែឮសូរផាវអុជឡើង ទាហានស្រែកហ៊ោអឺងកង ក៏ភ័យណាស់ ក្រឡេកទៅឃើញពន្លឺភ្លើងភ្លឺច្បាស់ ឆេះរាលមកដល់ក្បែរផ្លូវ ទាហានទាំងអស់ក៏ស្ទុះទៅរកគ្នា។ **សុម៉ាអ៊ី**ក៏បរពលយោធាព័ទ្ធ**កោសៀង** និង**អ៊ុយអៀន**ជុំវិញ។ **អ៊ុយអៀន** និង**កោសៀង**នោះមិញ ក៏ដេញទាហានចូលប្រយុទ្ធអាវុធនឹងអាវុធព័ទ្ធពាក់លើគ្នា **អងប៉េង**ក៏លើកពលយោធាមកដល់ជើងភ្នំ ឃើញ

**កោសៀង**, **អ៊ុយអៀន**ប្រជាន់នឹងកងទ័ពធំ **សុម៉ាអ៊ី**ក៏អុជផាវជាសញ្ញាដេញពលយោធា ចូលចោមវាយ**កោសៀង** និង**អ៊ុយអៀន**ពួកទាហានក៏វិនាសស្លាប់ជាច្រើនណាស់ **អងប៉េង**ក៏ប្រឹងជួយដោះយកខ្លួន**កោសៀង**និង**អ៊ុយអៀន**ចេញពីចំណោមបាន ហើយនាំគ្នាប្រមូលទាហានរត់ទៅស្រុកលីវសៀ។

*លោកអ្នកអានអាចរកមើលសៀវភៅផ្សេងទៀតតាមរយៈគេហទំព័រ*
www.khmerliterature.wordpress.com

# **រឿង សាមកុក**

## **អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង**

## **កណ្ឌទី ៧៣**

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ចូជីន**ចាត់ប្រើ**កោឈុយ**ជានាយកង លើកទ័ពទៅវាយយកស្រុកលីវសៀ បែងយកបំណាច់ខ្លួនកុំឲ្យ**សុម៉ាអ៊ី**មានសេចក្តីគាប់ប្រសើរតែម្នាក់ឯង លុះលើកទៅក៏មានជ័យជម្នះ**កោសៀង, អងប៉េង** និង**អ៊ុយអៀន** ដែលរត់មកជួបកណ្តាលផ្លូវ លុះនឹងលើកចូលទៅដណ្តើមយកស្រុកលីវសៀ ក៏ឃើញកងទ័ព**សុម៉ាអ៊ី** យកបានជាមុន រហូតដល់**សុម៉ាអ៊ី**ទូលព្រះចៅ**ចូយ៉យ**ឲ្យចាត់ប្រើ**ហោកជៀក**ចៅហ្វាយស្រុកហោសៃ ឲ្យលើកទ័ពទៅទប់ទ័ព**ខុងបេង**នៅតំបន់តាន់ផេង។)*

**ខណៈនោះ ចូជីន**ដែលនៅឈររក្សាស្រុកប៉ៃសៀដឹងដំណឹងថា **សុម៉ាអ៊ី**វាយបានទីកេតេងហើយ ក៏គិតថា **សុម៉ាអ៊ី**នោះមុខជាមានសេចក្តីគាប់ប្រសើរក្នុងជាន់នោះលើសជាងខ្លួន គិតដូច្នោះហើយ ទើបចាត់ប្រើក**កោឈុយ**ឲ្យលើកពលទ័ពចេញទៅនឹងដណ្តើមយកស្រុកលីវសៀ ដើម្បីបែងយកគុណបំណាច់ក្នុងរាជការខ្លះ។ លុះលើកទ័ពទៅដល់ពាក់កណ្តាលផ្លូវ ក៏ជួបប្រទះនឹង**កោសៀង, អងប៉េង, អ៊ុយអៀន** ដែលបែកទ័ពរត់ទៅ **កោឈុយ**ក៏បរពលទាហានចូលចោមព័ទ្ធនាយទ័ពទាំងបី ៗក៏បានតដៃចាក់កាប់សម្លាប់គ្នាទៅវិញទៅមក វិនាសទាំងសងខាង **កោសៀង, អងប៉េង** និង**អ៊ុយអៀន**ថយកម្លាំងណាស់ នឹងប៉ះពារតស៊ូនឹង**កោឈុយ**ពុំបាន ក៏នាំពលទាហានដោះរត់ទៅចូលគយយ៉ាំងបេងគួន។

ឯ**កោឈុយ**ឃើញថា**អ៊ុយអៀន**ចាញ់ដៃរត់ទៅហើយ ក៏និយាយនឹងទាហានទាំងពួងថា គ្រានេះ ទោះបីជាយើងយកទីកេតេងមិនបានក្តីណា បើគ្រាន់តែវាយយកបានស្រុកលីវសៀប៉ុណ្ណោះ ក៏គង់មានកេរ្តិ៍ឈ្មោះជាគាប់ប្រសើរស្មើគ្នា ទើបមន្ទីម្នាដេញទាហានឲ្យខំស្រូតរូតទៅដើម្បីនឹងវាយយកស្រុកលីវសៀ លុះទៅជិតជើងកំពែង ក្រឡេកទៅឃើញទង់ជ័យដោតហែលើសើនបន្ទាយ ទើបរំសាយទ័ពឈប់

មើលកលការ។ **សុម៉ាអ៊ី**ដឹងថា **កោឈុយ**លើកទ័ពមកក៏ទៅឈរលើសើនអើតមុខឡូកចំអកទៅថា នែអា**កោឈុយ**! ហេតុម្តេចអ្នកឯងបានជាទើបលើកទ័ពមកយឺតយូរដូច្នេះ?

**កោឈុយ**ឃើញ**សុម៉ាអ៊ី**ឈរនៅពីលើសើន ហើយស្រែកចំអកឲ្យដូច្នោះ ក៏នឹកអៀនខ្មាសពេកណាស់ គិតថា អ៎ា! **សុម៉ាអ៊ី**នេះប៉ិនប្រសប់ដូចទេវតា កាលណាគំនិតយើងនឹងស្មើគេបាន។ គិតហើយ**កោឈុយ**ក៏លើកពលចូលទៅក្នុងស្រុកនោះ លុះទៅដល់ហើយក៏ចូលទៅគំនាប់**សុម៉ាអ៊ី**តាមប្រវេណីដោយសុភាព។ **សុម៉ាអ៊ី**ក៏រាប់រៀបប្រាប់ថា វេលានេះយើងវាយយកទីកេតេងជាទីសំខាន់បានហើយ មុខជា**ខុងបេង**នឹងលើកទ័ពរត់ទៅវិញជាប្រាកដ ត្រូវអ្នកឯង និង**ចូជិន**នាំទាហានទៅតាមដេញចាប់យកខ្លួន**ខុងបេង**ឲ្យបាន។ **កោឈុយ**ទទួលបង្គាប់ហើយ ក៏គំនាប់លា**សុម៉ាអ៊ី**លើកទ័ពចេញទៅ។

**សុម៉ាអ៊ី**និយាយប្រាប់**ទៀវខាប់**ថា **ចូជិន**ប្រើ**កោឈុយ**ឲ្យលើកទ័ពមកគ្រានេះ ប្រាថ្នានឹងបែងរំលែករែកយកមុខឲ្យបានទំនុកគាប់ប្រសើរ តែពានដំណើរលើយើងវាយយកស្រុកនេះជាមុនបាន ឯខ្លួនយើងក៏គ្មានដឹងនឹងតាំងចិត្តគិតដណ្តើមគុណបំណាច់តែម្នាក់ឯងសោះ ហេតុតែត្រូវចន្លោះ ព្រោះបុណ្យភ័ព្វរបស់យើងជួយជូនឲ្យបានស្រួលឯងៗ ឥឡូវ**កោសៀង, អងប៉េង, អ៊ុយអៀន, ម៉ាចេក** ទាំងបួននាយយើងក៏វាយបែកបាក់អស់ហើយ មិនលែងឡើយនឹងនាំគ្នាទៅប្រជុំឯគយឃុំងបេងគួន បើយើងនឹងគិតឲ្យមាំមួន លើកទ័ពទៅវាយឥឡូវនេះ ក៏នឹកឲ្យខ្លាចតម្រិះ**ខុងបេង** ក្រែងលោដឹងនឹងលើកទ័ពទៅខ្ទប់វាយពីក្រោយឲ្យថ្លោះការ។ ការនេះត្រូវតែអ្នកនាំពលយោធាទៅចាំស្កាត់កណ្តាលផ្លូវ ដែលនឹងចូលទៅទីគយឃុំងបេងគួនជាមុនចុះ រួចសឹមយើងលើកទ័ពធំទាំងអស់ទៅចាំវាយទ័ព**ខុងបេង**នៅតំបន់ចាំកុក តែថា ត្រូវបែរមុខតម្រង់កងទ័ពទៅលើស្រុកសេសៀទើបបាន ព្រោះស្រុកសេសៀនោះ**ខុងបេង**ភ្ជុំក្រុមទាហាន និងប្រមូលស្បៀងអាហារទុកជាច្រើនណាស់ ទីនោះក៏សំខាន់ បើយើងបានស្រុកសេសៀជាកំណាន់ហើយ គង់នឹងបានស្រុកឡាំអាន់ និងស្រុកធៀនស៊ុយឆេង ព្រោះស្រុកនោះជាផ្លូវទៅមករួមគ្នា

តែបើឃើញ**ខុងបេង**រត់ទៅដល់កន្លែងដែលអ្នកឯងពួនបង្កប់នោះ អ្នកចូរលើកពល ទាំងអស់ចេញទៅកាត់ស្ទៀងឲ្យខាងតែបាន។ **ទៀវខាប់**បានស្តាប់ព័ត៌មានសព្វគ្រប់ ក៏គំនាប់លាលើកទ័ពចេញទៅ។ **សុម៉ាអ៊ី**ក៏ចាត់**ស៊ុនតាំ, ស៊ុនងី** ឲ្យនៅរក្សា ស្រុកលីវសៀ ហើយក៏ប្រមូលពលរេហ៍លើកចេញទៅ។

ឯបម្រើដែល**អងប៉េង**ចាត់ឲ្យនាំផែនទីទៅជូន**ខុងបេង**នោះ បានទៅដល់ ក៏យកផែនទីនោះជូនទៅ**ខុងបេង** ហើយក្រាបប្តឹងតាមដំណើរដែលបានធ្វើការនោះ គ្រប់ប្រការ។ **ខុងបេង**ក៏ទទួលផែនទីយកទៅលាមើលផ្ទៀងផ្ទាត់ពីមុខ ក៏លើកដៃ គក់ទ្រូងហើយថា ហេតុអ្វីឡើយបានជា**ម៉ាចេក**ទៅតាំងបន្ទាយនៅលើភ្នំដូច្នេះ ចុះបើ ធ្វើយ៉ាងនេះ សត្រូវនឹងលើកទ័ពទៅខ្ទប់បិទផ្លូវទឹកអស់ហើយឬ? មុខជាទាហាន ទាំងអស់ក៏នឹងវិនាសអន្តរាយខ្ចាត់ខ្ចាយស្លាប់ហើយ ដែលវាធ្វើការទាំងម្លេះ ចំពោះ ក្លែងឲ្យទាហានយើងស្លាប់ជាប្រាកដ។ **អៀវងី**ឆ្លើយថា ខ្ញុំបាទនឹងសុំអាសាទៅ ការពារតំបន់កេតេងដោយខ្លួនឯងចុះ ហើយសុំផ្លាស់ឲ្យ**ម៉ាចេក**វិលមកវិញ។

**ខុងបេង**ថា អ្នកឯងនិយាយនេះត្រូវណាស់ បើដូច្នោះកុំបង្អង់យូរ ឲ្យថយ ទៅគិតគូរលើកទាហានទៅចុះ **អៀវងី**ទទួលប្រសាសន៍ហើយ ក៏ថយទៅរៀបចំ ទាហានលើកចេញទៅ ទទួលបម្រើសេះចូលមកជម្រាបថា ឥឡូវតំបន់កេតេងនិង ស្រុកលីវសៀបែកខ្ទេចទៅហើយ **ខុងបេង**ឮដូច្នោះក៏ស្ទុះក្រោកទន្ទ្រាំជើងយំហើយ ថា ការធំរបស់យើងគ្រានេះមុខជាខូចទាំងអស់ជាមិនខាន ខូចទាំងពលទាហាន មិនមានសេសសល់ឡើយ ទើបបង្គាប់**គួនហ៊ិន, តៀវប៉ៅ** ឲ្យនាំទាហានម្នាក់បីពាន់ លើកទៅពួនបង្កប់នៅប្រហបផ្លូវតូចក្បែរភ្នំប៊ុកសេងសាន់ ហើយកំជាប់ថា បើ ឃើញទ័ព**សុម៉ាអ៊ី**លើកមកក៏កុំអាលចេញច្បាំង ត្រូវតាំងវាយឃ្មោះគោះគងទូងភេរី ស្រែកហ៊ោឲ្យខ្លាច បើប្រសិនជាទាហាន**សុម៉ាអ៊ី**អស់អំណាចលើកថយទៅ ក៏មិន ត្រូវឲ្យដេញតាម ត្រូវតែលើកពលស្រូតរូតទៅឯគយយ៉ាំងបេងគួនវិញ។

**ខុងបេង**ក៏ចាត់ការឲ្យបណ្តារេហ៍ពលទាំងអស់ ប្រុងប្រៀបរៀបស្បៀង អាហារទុកជាស្រេចទើបចាត់ប្រើ**ទៀវអេក**ឲ្យលើកទៅជាទ័ពមុខ សម្រាប់នឹងបាន ជម្រះផ្លូវឲ្យកងទ័ពដើរទៅបានដោយស្រួល ចាត់ឲ្យ**កៀងអ៊ុយ**និង**ម៉ាតាយ** ពីរនាយ

នេះជាមេកងទ័ពក្រោយ ឲ្យរារង់នៅមាត់ច្រកផ្លូវតម្រូវឲ្យការពារទាហានទាំងពួងកុំឲ្យមានអន្តរាយ ហើយចាត់បម្រើឲ្យស្រូតទៅប្រាប់អ្នកដែលរក្សាស្រុកធៀនស៊ីយ ស្រុកឡាំអាន់ ស្រុកសេសៀ ទាំងបីស្រុកនេះឲ្យដោះចោលស្រុកចេញ ហើយឲ្យរត់ស្រូតចូលទៅស្រុកហាន់តុងចុះ រួចចាត់បម្រើឲ្យទៅនាំមាតា**កៀងអ៊ុយ**ដែលមកចុះចូលនោះយកទៅជាមួយផង **ខុងបេង**រៀបចាត់ការស្រេច ក៏លើកទាហានប្រាំពាន់ចេញទៅស្រុកសេសៀ។ លុះទៅដល់ហើយក៏ប្រមូលទាហានបានពីរពាន់ប្រាំរយទៅជញ្ជូនស្បៀងអាហារពីគ្រប់តំបន់មក ឯខ្លួន**ខុងបេង**ឯងក៏នាំពលពាក់កណ្ដាលចូលទៅតាំងនៅក្នុងស្រុកនោះ។

ខណៈនោះ មានទាហានល្បាតចូលទៅប្ដឹង**ខុងបេង**ថា **សុម៉ាអ៊ី**លើកទ័ពមកជិតហើយ។ **ខុងបេង**ឮដូច្នោះក៏ភ័យណាស់ បណ្ដាពួកទាហានទាំងអស់ក៏ស្លុតដូចបាត់ស្មារតីគ្រប់គ្នា **ខុងបេង**វេលានោះមានពលទាហានតិចណាស់ នាយទាហានក៏មានតិចតួច **ខុងបេង**ថប់ធុញពន់ប្រមាណមិនជាបាននឹកគិតតាំងច្បាំងដូចម្ដេច ទើបឡើងទៅនៅលើសើនបន្ទាយ ក្រឡេកទៅឃើញកងទ័ព**សុម៉ាអ៊ី**លើកមកពីចម្ងាយច្រើនណាស់ណា ឧបមាដូចស្រមោចឬកណ្ដាច់ ដូចជានឹងមកជាន់កម្ទេចឲ្យល្អិតស្រុកនោះជាផង់ធូលី **ខុងបេង**ក៏បង្គាប់ឲ្យរើទង់ជ័យអំពីទីសើន បន្ទាយនោះចេញអស់ ហើយឲ្យបើកទ្វារស្រុកគ្រប់ចន្លោះទិសទាំងបួនចំហរហូតទៅ ក្រៅអំពីនោះក៏ចាត់ទាហាននិងពួកអ្នកស្រុកឲ្យចេញទៅបោសច្រាសតាមផ្លូវជាបែបធម្មតា ក្នុងមាត់ទ្វារនីមួយៗចំនួនមនុស្សម្ភៃនាក់ ហើយបង្គាប់កុំឲ្យភ័យភ្ញាក់ញញើតខ្លាចឲ្យសោះ ទាហានក្រៅពីនោះឲ្យដោះចេញទៅពួនបង្កប់កុំឲ្យមានស្នូរឲ្យឮសូរសម្ដី ហើយ**ខុងបេង**និយាយថា យើងធ្វើកលឧបាយនេះ ដើម្បីឲ្យ**សុម៉ាអ៊ី**លើកទ័ពថយទៅឯងឲ្យបាន បើនរណាចរចាគ្នាឲ្យឮប៉ុន្មានត្រូវកាត់ក្បាលចេញទាំងអស់។ លុះបង្គាប់ហើយ **ខុងបេង**ក៏តាក់តែងរាងកាយយ៉ាងស្អាតបាត ហើយនាំកូនក្មេងពីរនាក់ឡើងទៅអង្គុយលើសើន ឲ្យក្មេងម្នាក់កាន់គ្រប៊ី ម្នាក់កាន់ស៊ែឈរអមខ្លួន**ខុងបេង** ហើយតាំងតម្កល់ពានដុតធូបបូជាពីខាងមុខ ឯខ្លួន**ខុងបេង**អង្គុយដេញពិណលេងសប្បាយ។

ខណៈនោះ ទាហានកងទ័ពមុខ**សុម៉ាអ៊ី**លើកចូលមកជិតជើងកំពែងស្រុក ក្រឡេកមើលទៅលើសើន ឃើញ**ខុងបេង**អង្គុយដេញពិណព្រងើយដូច្នោះក៏ឲ្យនឹកញញើតខ្លាច ត្រឡប់ថយចេញទៅប្រាប់**សុម៉ាអ៊ី**ថា ដ្បិតអស់យើងខ្ញុំលើកទ័ពទៅដល់ជើងកំពែងហើយ ឃើញកណ្តាលស្រុកស្ងាត់ឈឹងគ្មានរេហ៍ពលសោះ ឃើញមានតែមនុស្សបោសផ្លូវទ្វារមួយចំនួនម្ភៃនាក់ប៉ុណ្ណោះ ឯខ្លួន**ខុងបេង**នោះឃើញឡើងទៅអង្គុយដេញពិណលើសើនព្រងើយបែបប្លែកណាស់ បើនឹងលើករូតរះចូលទៅក្រែងត្រូវកលឧបាយ**ខុងបេង** ហេតុយ៉ាងហ្នឹងបានជាមកជម្រាបប្រសាសន៍ឲ្យលោកជ្រាប។

**សុម៉ាអ៊ី**ឮដូច្នោះក៏អស់សំណើចថា **ខុងបេង**ម្តងនេះម្តេចក៏មកធ្វើដូច្នេះទៅវិញ គួរតែចេញទៅមើលបន្តិចចុះ **សុម៉ាអ៊ី**ក៏ឡើងសេះនាំទាហានប្រហែលម្ភៃនាក់ទៅឈរមើលពីចម្ងាយឃើញ**ខុងបេង**តែងខ្លួនស្អាតបាត មើលទឹកមុខបែបសប្បាយរីករាយមិនភ័យសោះ ក៏នឹកពិភាល់ថា កងទ័ពយើងលើកមកជាការប្រទាល់តួដល់ទីនេះហើយ ហេតុអ្វីឡើយបានជា**ខុងបេង**គ្មានសេចក្តីតក់ស្លុតសោះ ត្រឡប់ធ្វើស្មោះដេញពិណលេងវិញ ប្រហែលជាវានេះមិញប្រើកលឧបាយបញ្ឆោតយើងទេដឹងឬ? គិតដូច្នោះយើងក៏រឹតតែពិភាល់ចិត្តណាស់ ក្រែង**ខុងបេង**បង្កប់ទាហានទុកច្បាស់ហើយ **សុម៉ាអ៊ី**ក៏ញាក់សេះនាំទាហានត្រឡប់ទៅវិញ ដោយនឹកខ្លាចមិនអាចនឹងចាត់ការយ៉ាងណា ក៏ត្រឡប់ឲ្យកងមុខជាកងក្រោយរត់បណ្តោយថយទៅ។

**សុម៉ាជៀវ**ជាបុត្រឃាត់បិតាថា ហេតុម្តេចលោកឪពុកមកក្រែងខ្លាច**ខុងបេង**ដូច្នេះ **ខុងបេង**គ្រានេះអស់សេចក្តីគិតផុតអស់ទាហានហើយ នឹងតស៊ូនឹងយើងមិនបានទេ ប្រថុយចាំតែស្លាប់ហើយ តែនៅមានមានៈចិត្តគិតកលឧបាយទទេៗទៅ។

**សុម៉ាអ៊ី**ថា កូនឯងនៅក្មេងសេចក្តីខ្ចីគំនិតណាស់ មិនទាន់ដឹងច្បាស់កលឧបាយ**ខុងបេង**នៅឡើយ ឯ**ខុងបេង**នេះហើយជាមនុស្សមានប្រាជ្ញាជ្រាលជ្រៅ ស្គាល់យល់ផ្លូវស្ទាញស្ទាត់ប្រាកដក្នុងក្បួនពិជ័យសង្គ្រាមណាស់ បើនឹងធ្វើការអ្វីវៃក៏រហ័សមាំមួន ធ្លាប់ធ្វើកលដល់សំនួនមានជ័យមកច្រើនគ្រា កូនឯងមានសតិបញ្ញាតែត្រឹមប៉ុណ្ណោះ នឹងកន្លងមើលងាយប្រាជ្ញា**ខុងបេង** ជាមនុស្សដៃចាស់នោះមិនគួរ បើនឹង

ទទូចដោយប្រាជ្ញាប្រទល់អួតនឹង**ខុងបេង** ក៏គង់នឹងនាំគ្នាស្ដាប់អសារឥតការ ពាក្យដែលកូនឯងថានោះ ឪពុកនឹងជឿស្ដាប់ពុំបានទេ ថាហើយក៏ដេញពលទាហានថយចេញមក។

**ខុងបេង**ឃើញ**សុម៉ាអ៊ី**លើកទ័ពត្រឡប់ទៅ ក៏ក្រោកឡើងទះដៃសើច ពួកពលទាហានឃើញដូច្នោះក៏សួរថា ហេតុម្ដេចមហាឧបរាជមិនភ័យខ្លាច ត្រឡប់ជាទះដៃសើចវិញដូច្នេះ វេលានេះ**សុម៉ាអ៊ី**លើកពលមកដល់ដប់ប្រាំម៉ឺននឹងធ្វើអន្តរាយលោក ៗក៏ទាល់ច្រកជាទីបំផុតឥតទំពឹងសោះហើយ? **ខុងបេង**ថា ដែលយើងសើចនោះព្រោះឃើញថា**សុម៉ាអ៊ី**មិនស្មើប្រាជ្ញានឹងយើង សម្គាល់ថាយើងបង្កប់ទាហានទុកជាទីកំបាំង ក៏តាំងតែខ្លាចរត់ទៅឯង ឯកលឧបាយនេះ បើយើងនឹងមិនធ្វើក៏ចំពោះលើដំណើរត្រូវធ្វើខានមិនបាន ព្រោះជាទីទាល់ខ្លួនប្រាណផុតសង្ឃឹមហើយ ឯ**សុម៉ាអ៊ី**ថយទ័ពទៅវេលានេះ មុខជាទៅតាមផ្លូវតូចក្បែរភ្នំប៊ុកអងសាន់ជាប្រាកដ ត្រូវនឹងយើងសន្មតចាត់ឲ្យ**គួនហ៊ិន, តៀវប៉ោ**ទៅបង្កប់ទាហានទុកនៅទីនោះ ត្រូវតាមគំនិតយើងមិនខុសសោះឡើយ។

ទាហានទាំងពួងឮហើយ ក៏ត្រេកអរនាំគ្នាឈូឆរចូលទៅគំនាប់**ខុងបេង** ហើយថា បើប្រសិនណាអស់យើងខ្ញុំទាំងឡាយគិតយ៉ាងនេះ កាលណាឡើយនឹងមានមានះនៅបាន គង់នឹងនាំពលទាំងប៉ុន្មានរត់ចោលស្រុកអស់ទៅហើយ។ **ខុងបេង**ឆ្លើយថា បើនឹងធ្វើចិត្តឲ្យទន់មិនអត់ធន់នៅ ហើយរត់ចេញទៅចោលស្រុកដូច្នោះ ពលយើងទាំងអស់មានត្រឹមតែមួយក្ដាប់ នឹងមិនស្លាប់ដោយកម្លាំងពលរបស់គេដប់ប្រាំម៉ឺននោះទេឬ? គេក៏គង់នឹងដេញជាន់ចាប់ឈ្លេចឈ្លីដូចកូនមាន់កូនទាតែមួយវេលា ក៏ចងខ្លុះច្រមុះគ្មានសល់ ថាហើយក៏ទះដៃសើចទៀត។ ទាហានទាំងពួងត្រេកអររីករាយ **ខុងបេង**ថា **សុម៉ាអ៊ី**លើកទ័ពថយទៅហើយ ព្រោះចាញ់កលឧបាយរបស់យើង តែថាអាក្រក់ល្អគង់តែវាត្រឡប់មកខ្ទប់ធ្វើអន្តរាយយើងពុំខាន យើងមិនត្រូវគិតស្មានដោយទុកចិត្តសោះ វេលានោះ**ខុងបេង**ក៏ឲ្យកៀរគ្រប់គ្រួបណ្ដាដែលមានក្នុងស្រុកនោះសុសសព្វអន្លើ បណ្ដើរនាំទៅទុកឯស្រុកហាន់តុងទាំងអស់។

ឯ**សុម៉ាអុី**លើកទ័ពត្រឡប់ទៅដល់ភ្នំប៉ុកអងសាន់ បានឮសំឡេងទាហាន **គួនហុិន**, **តៀវប៉ៅ**ដែលបង្កប់នៅទីនោះ ស្រែកហ៊ោគឹកកងរំពងចេញមកក៏ភ័យណាស់ និយាយនឹង**សុម៉ាស៊ូ**, **សុម៉ាជៀវ**ជាបុត្រថា ប្រសិនណាយើងកុំថយទ័ពត្រឡប់មក ក៏គង់នឹងត្រូវកល**ខុងបេង**មិនខាន ថាមិនទាន់អស់ពាក្យប៉ុន្មាន ស្រាប់តែក្រឡេកទៅឃើញកងទ័ពលើកចុះមកពីលើភ្នំ មានទង់ខ្មៅធំសម្រាប់មេទ័ពចារឹកអក្សរភ្ជាប់ថា **តៀវប៉ៅ**(មេកងធំ) ទ័ព**សុម៉ាអុី**ក៏ផ្អកផ្អើលច្រឡូកច្រឡំរឹករវរណាស់ ស្ទុះចោលអស់គ្រឿងសាស្ត្រាវុធរត់ត្រឡប់ទៅក្រោយ បណ្តោយទៅដល់មាត់ផ្លូវនឹងចេញទៅផ្លូវធំ ឃើញកងទ័ពមួយក្រុមលើកមកស្កាត់ទទឹងពីមុខ មានទង់ក្រហមចារឹកអក្សរថា **គួនហុិន** (មេកងធំ) ហើយឮសំឡេងហ៊ោក្នុងព្រៃភ្នំអឹងកង។

**សុម៉ាអុី**រឹតតែភ័យក្រៃកន្លងមហិមា គិតថា មុខជា**ខុងបេង**ធ្វើកលឧបាយ ពលទាំងឡាយក៏ផ្អើលជ្រួលច្របល់ ទាំងកងទ័ពនាំគ្នារត់ពួនពាក់ចោលអស់ស្បៀងអាហារគ្រឿងសាស្ត្រាវុធច្រើនណាស់ ខ្លះក៏រត់យកតែខ្លួន **គួនហុិន**, **តៀវប៉ៅ**ក៏មិនបានលើកទ័ពដេញតាមបណ្តាំ**ខុងបេង** ប្រឹងតែរើសជញ្ជូនយកស្បៀងអាហារ និងគ្រឿងសាស្ត្រាវុធ ហើយក៏លើកទ័ពត្រឡប់ទៅវិញ។

ឯ**ចូជិន**ឮថា កងទ័ព**ខុងបេង**លើកត្រឡប់ទៅហើយ ក៏ស្រូតលើកទាហានទន្ទ្រានតាមទៅដល់មាត់ផ្លូវដែល**កៀងអុិយ**, **ម៉ាតាយ**បង្កប់ទាហាននៅនោះ លុះទៅប្រទះប្រទល់គ្នា ក៏បរពលយោធាចូលតតាំងច្បាំងទៅវិញទៅមក **កៀងអុិយ**, **ម៉ាតាយ** ក៏កាប់សម្លាប់កងទ័ព**ចូជិន**ស្លាប់អស់ជាច្រើន **ចូជិន**ចាញ់ដៃតស៊ូមិនបាន ក៏ថយទ័ពត្រឡប់ក្រោយទៅវិញ **កៀងអុិយ**, **ម៉ាតាយ**បានជ័យជម្នះហើយ ក៏លើកទ័ពត្រឡប់ទៅស្រុកហាន់តុងវិញ។

ឯ**ជូឡុង**, **តេងជី** ដែលលើកពលទៅតាំងនៅតំបន់គីកុកនោះ លុះដឹងថា **ខុងបេង**លើកទ័ពត្រឡប់ចេញពីភ្នំប៉ុកអងសាន់ហើយ ក៏ប្រឹក្សានឹង**តេងជី**ថា ឥឡូវកងទ័ពពួកយើងនៅភ្នំប៉ុកអងសាន់នោះលើកថយអស់ទៅហើយ មុខជា**សុម៉ាអុី**នឹងលើកតាមទៅពុំខាន អ្នកឯងចូរគិតអានសរសេរអក្សរចុះនៅទង់ជាឈ្មោះយើង បើឃើញ**សុម៉ាអុី**លើកមកតាមកាលណា ចូរនាំពលយោធាស្រូតរត់តម្រង់ទៅផ្លូវធំ ឯ

ខ្លួនខ្ញុំនឹងនាំទាហានពួនដើរទៅតាមដងព្រៃ ពួក**សុម៉ាអ៊ី**ឃើញគ្នាយើងតិចណាស់នៃក៏គង់នឹងរវៀសរវៃដេញតាមទៅ យើងនឹងឆ្លងផ្លូវចេញខ្ទប់ពីក្រោយកុំឲ្យគេចទាន់ អ្នកឯងត្រូវត្រឡប់ទ័ពជញ្ជាន់មកពីមុខឲ្យជាប់ មុខជាកងទ័ព**សុម៉ាអ៊ី**នឹងបែកពុំខាន លុះប្រឹក្សាគ្នាឃើញផ្លូវលំអានសព្វគ្រប់ហើយ ក៏លើកពលចេញទៅរៀងខ្លួនតាមដែលគិតគ្នា។

ឯ**កោឈុយ**លើកទ័ពទៅតាមបង្គាប់**សុម៉ាអ៊ី**គ្រានោះ ក៏កំជាប់លើឈ្មោះ**ផៅហ៊ូ**ថា អ្នកឯងត្រូវនាំទាហានទៅជាកងមុខគ្រានេះ ត្រូវតែមើលកលការតាមអធ្យាស្រ័យ កុំបីធ្វេសប្រមាថដល់សត្រូវឡើយ បើឃើញទ័ព**ជូឡុង**ហើយចាញ់រត់ទៅកាលណា កុំឲ្យបំពារដេញតាមឲ្យសោះ ត្រូវតែរារង់ទាំងអស់គ្នាមើលកលការសិន ព្រោះ**ជូឡុង**នោះជាថៅបញ្ញាចេះឆ្អិនប៉ិនប្រសប់ព្រម រមែងចេះល្បួងលោមបញ្ឆោតឲ្យសត្រូវចាញ់ដោយកលឧបាយ ហើយទាំងថ្វីដៃក៏ពូកែឆើតឆាយគ្មាននរណាស្មោះ ត្រូវតែមើលឲ្យសព្វ គួរថយឲ្យថយ គួរឈប់ឲ្យឈប់។

**ផៅហ៊ូ**ថា លោកកុំបីព្រួយបារម្ភឲ្យសោះ ការត្រង់ណោះជាធុរៈលើខ្លួនខ្ញុំបាទ ឯថ្វីដៃ**ជូឡុង**នោះ ខ្ញុំក៏សង្វាតនឹងចង់ល្បងឲ្យឃើញគ្នា ខ្ញុំបាទក៏មិនញញើតប៉ុន្មាន សុំឲ្យលោកលើកទាហានជំនួយទៅឲ្យទាន់ការចុះ បើខ្ញុំបាទបានប្រទះនឹង**ជូឡុង**វេលាណា នឹងអាសាចាប់ខ្លួនឲ្យបាន ថាហើយ**ផៅហ៊ូ**ក៏លើកទាហានបីពាន់ ស្រូតទៅដល់តំបន់គីកុក ឃើញទ័ពមុខ**តេងជីវ**ដើររលេះរលាំងរត់ទៅតាមផ្លូវធំ មានទង់ជ័យជាជួររៀងរាយ ឃើញអក្សរនៅចុងជាយថា "**ជូឡុង**" ក៏គិតថា**ជូឡុង**ពិតៗ រឹតតែដេញទាហានបំពានតាមទៅ ចម្ងាយផ្លូវប្រហែលសាមសិបសិន (១.២ គ.ម)។

**ជូឡុង**ឃើញ**ផៅហ៊ូ**ដេញប្រកិតហួសទៅ ក៏ឲ្យទាហានដុតផាវជាសញ្ញា ហើយស្រែកហ៊ោខ្ញៀវខ្ញាចេញមកពីក្រោយ ស្រែកថា អញឈ្មោះ**ជូឡុង**នៅឯណោះ ឯងស្គាល់ច្បាស់ឬទេ? **ផៅហ៊ូ**ក្រឡេកក្រោយឃើញ**ជូឡុង** ក៏ស្លុតស្លុងវិញ្ញាណ ញាក់សេះបំពានត្រឡប់មកតទទឹងខ្លួន **ជូឡុង**ក៏លើកទួនចាក់ចំចង្កេះ **ផៅហ៊ូ**គេចវេះមិនទាន់ក៏ធ្លាក់ពីលើសេះស្លាប់ ពលទាហានក៏បាក់បែកទ័ពរត់ទៅចូលក្នុងព្រៃ **ជូឡុង**ក៏រវៀសរវៃលើកកាត់ទៅរក**តេងជី**។

ខណៈកាល**ជូឡុង**កំពុងតដៃនឹង**ផៅហ៊ូ**នោះ **កោឈុយ**បានឮសន្ធឹកមាត់ប៉ោកក្រើកពីខាងមុខ **កោឈុយ**ក៏នៅពុំសុខ ប្រើ**បាន់ចេង**ឲ្យស្រូតទាហានតាមទៅមើល **ជូឡុង**ឃើញទាហានខ្មៅខ្ជួលចូលថែមមកទៀត ក៏ប្រឡៀតនៅរង់ចាំមើលតែម្នាក់ឯង លុះឃើញ**តេងជី**ឃ្លាតឆ្ងាយពីកន្លែងទៅមុខប្រហែលបីរយសិន (១២ គ.ម) **បាន់ចេង**ក្រឡេកទៅឃើញស្គាល់ភិនភាគជាក់ជា**ជូឡុង** ក៏តាំងតែខ្លាចមិនអាចចូលទៅជិត តាំងឲ្យទាហានប្រជុំជិតបង្វែរនៅទីនោះ **ជូឡុង**រង់ចាំទាល់តែដល់ថ្ងៃរសៀលទាប មិនឃើញកងទ័ពលើកចូលទៅ ក៏បរសេះសំដៅទៅតាម**តេងជី**ជាប្រក្រតី។

លុះ**កោឈុយ**លើកទ័ពទៅទាន់**បាន់ចេង** ៗក៏ថ្លែងព័ត៌មានប្រាប់ថា ខ្ញុំបាទលើកមកប្រទះនឹង**ជូឡុង** ប្រុងនឹងសង្គុញទាហានចូលទៅតដៃក៏ឲ្យញញើតខ្លាចព្រោះ**ជូឡុង** មានអំណាចខ្លាំងពូកែណាស់ បានជាមិនរូតរះរង់ចាំលោក **កោឈុយ**ឮដូច្នោះ ក៏មិនស្តាប់ ខំឲ្យ**បាន់ចង់**ប្រញាប់លើកទាហានស្រូតទៅ **បាន់ចេង**ក៏បរពលសំដៅទៅតាម**ជូឡុង** និងពលមួយរយនាក់ លុះទៅដល់ទីដំណាក់ច្រកភ្នំ ឮសំឡេង**ជូឡុង**ស្រែកសង្ឃុំយ៉ាងធំរំពងព្រៃ ហើយដេញទាហានឲ្យរវៀសរវៃត្រឡប់មកវិញ ទ័ព**បាន់ចេង**ឃើញដូច្នោះមិញ ក៏ភ័យណាស់ នាំគ្នារត់ប៉ះពារចូលក្នុងព្រៃ **បាន់ចេង**ក៏ប្រឹងមានះចូលទៅតដៃនឹង**ជូឡុង** ៗបាញ់នឹងធ្នូត្រូវម្ជូក**បាន់ចេង**របូតធ្លាក់ពីលើក្បាល ក៏បណ្តាលឲ្យតក់ស្លុតបាត់ស្មារតីភ័យធ្លាក់ពីលើសេះ **ជូឡុង**ក៏ដេញបញ្ចោះទៅទាន់យកលំពែងដែលកាន់បុកសង្កត់កណ្តាលដើមទ្រូងទុកឲ្យថា បើអញនឹងសម្លាប់ឯងឥឡូវនេះក៏បីដូចសម្លាប់ស្រីម្នាក់ មិនជាធុរៈនឹងឯងប៉ុន្មានទេ អញលែងឯងឲ្យគង់តែជីវិតទៅចុះ ឯងចូរវិលទៅប្រាប់ចៅហ្វាយឯងខាងនោះ ឲ្យស្រូតលើកទ័ពមកតស៊ូនឹងអញ ៗនៅចាំនៅទីនេះ **បាន់ចេង**ក៏ក្រោកស្ទុះឡើងសេះ បំផាយទៅប្រាប់**កោឈុយ**គ្រប់ប្រការ **កោឈុយ**ឮដូច្នោះក៏នឹករអាខ្លាចមិនអាចនឹងលើកទ័ពតាមទៅ **ជូឡុង**មិនរង់នៅ ក៏ស្រូតបរសេះទៅតាម**តេងជី**ការពារទាហានក្រែងមានទាហានអន្តរាយ ទាល់តែកងទ័ពទាំងឡាយលើកទៅដល់ស្រុកហាន់តុង ឯ**កោឈុយ**និង**ចូជិន**ក៏នាំគ្នាលើកទាហានត្រឡប់មកនឹងវាយយកស្រុកធៀនស៊ុយ និងស្រុកឡាំអាន់ ស្រុកហាន់តុង។

ខណៈនោះ **សុម៉ាអ៊ី**លើកទ័ពទៅដល់ពាក់កណ្ដាលផ្លូវឮកិត្តិស័ព្ទថា **ខុងបេង**ជាសត្រូវលើកទ័ពចេញពីស្រុកសេសៀទៅហើយ ក៏ឲ្យត្រឡប់ទ័ពលើកចូលទៅក្នុងស្រុកសេសៀ ហើយឲ្យស៊ើបយកការណ៍ពីបណ្ដាពួកអ្នកស្រុកទាំងពួងថា **ខុងបេង**លើកទ័ពមកតាំងនៅក្នុងស្រុកសេសៀនោះ មានទាហានចំនួនប៉ុន្មាន? ពួកអ្នកស្រុកឆ្លើយថា បានឃើញ**ខុងបេង**នាំពលទាហានមកតាំងនៅក្នុងស្រុកនេះតែពីរពាន់ប្រាំរយនាក់ទេ ហើយសុទ្ធតែមនុស្សចំណុះស្រុកធម្មតា មិនមែនជាក្រុមយោធាឡើយ ឯសេនាទាហាននោះហើយគ្មានថ្វីដៃខ្លាំងពូកែសោះ។

ឯ**គួនហ៊ុន, តៀវប៉ោ** ដែលលើកទៅតាំងនៅតំបន់ភ្នំប៊ុកអងសាន់នោះសោតក៏មានពលមួយនាយតែបីពាន់ ធ្វើកលរត់ប្រពូនប្រពាក់ផ្លាស់ប្ដូរគ្នាទៅខាងច្រមុះភ្នំនិងកន្ទ្បែភ្នំវិលដរាប នឹងបានមានទាហានក្រៅពីនោះលាក់បំពួននៅទីឯណាទៀតក៏ទេ។ **សុម៉ាអ៊ី**ឮដូច្នោះ ក៏យកដៃគក់ទ្រូងហើយថា យីហ្ន៎! ដូច្នោះទេតើ យើងឥតដឹងដំណើរសោះជា**ខុងបេង**នោះអស់ថ្វីដៃហើយ។ លុះ**សុម៉ាអ៊ី**ថាហើយក៏តាំងតែបញ្ឈប់ទាហាននៅក្នុងស្រុកសេសៀនោះជាយូរថ្ងៃ ឲ្យហៅមនុស្សប្រុសស្រីមកនិយាយបញ្ចុះបញ្ចូលឲ្យនៅជាប្រក្រតី ហើយក៏លើកទាហានឆ្លងទៅស្រុកទៀងអាន់ ហើយចូលទៅទូលព្រះចៅ**ចូយ៉យ**តាមដំណើរ ដែលបានធ្វើការសង្គ្រាមនោះគ្រប់ប្រការ។

ព្រះចៅ**ចូយ៉យ**ទ្រង់ព្រះសណ្ដាប់ ក៏គាប់ក្នុងព្រះទ័យត្រេកអរណាស់ត្រាស់ថា ដែលអ្នកបានលើកទ័ពទៅកម្ចាត់សត្រូវ ហើយត្រឡប់វិលមកយកបានស្រុកជាច្រើនតំបន់ដូច្នោះ ក៏ជាគុណបំណាច់អ្នកចេះធ្វើការប្រសើរជាងគេមែនៗ **សុម៉ាអ៊ី**ក្រាបទូលថា ដែលទូលបង្គំជាខ្ញុំទៅខំធ្វើការបាន ក៏ព្រោះមានបារមីព្រះអង្គជួយទ្រទ្រង់អភិបាលរក្សា តែថានៅមិនទាន់រាបទាបនៅឡើយ ព្រោះ**ខុងបេង**នោះហើយមានពលរេហ៍បែករត់ត្រឡប់ចូលទៅឈប់ក្នុងស្រុកហាន់តុងច្រើនណាស់ មុខជា**ខុងបេង**នឹងក្រឡុះបញ្ចុះបញ្ចូលទាហានឲ្យបានច្រើន ហើយវិលមកតស៊ូទៀតមិនខាន ទូលបង្គំជាខ្ញុំនឹងសុំលើកសេនាទាហានទ័ពធំ ទៅវាយដំស្រុកហាន់តុងជាកម្ទេច បើបានស្រុកហាន់តុងជាស្រេចវេលាណា ឃើញថាខបខណ្ឌសីមារបស់ព្រះអង្គនឹងបានសុខតទៅ។

ព្រះចៅ**ចូយ៉យ**ពេញព្រះទ័យណាស់ ត្រាស់ឱ្យកេណ្ឌទាហានគ្រប់អាណាខេត្តឱ្យអស់ប្រគល់ឱ្យ**សុម៉ាអ៊ី** ខណៈនោះ **ស៊ុនជូ**ជាទីនាហ្មឺនធំចូលទៅក្រាបបង្គំគាល់ព្រះចៅ**ចូយ៉យ**ហើយទូលទាស់ថា គ្រាពីព្រះអយ្យការរបស់ព្រះអង្គនៅគង់ជាមហាឧបរាជ បានលើកពលពេញអំណាចទៅវាយយកស្រុកហាន់តុង បានទាំងទ្រង់ចេញព្រះឱស្ឋត្រាស់ថា ស្រុកហាន់តុងនោះ ជាទីកន្លែងចង្អៀតនឹងធ្វើការណាស់ ឧបមាដូចជាផ្ទះសង់នៅមាត់ជ្រោះ នេះហាក់ជាបុណ្យបារមីរបស់យើងឯង ទើបសម្ដែងអានុភាពទៅបង្ក្រាបយកបាន បើជាវាសនាមិនមានក៏នឹងនាំទាហានទៅស្លាប់គរលើគ្នា ឧបមាដូចជាធ្លាក់ចុះទៅក្នុងជ្រោះជ្រៅដ៏ពន្លឹក ព្រះអង្គក៏ទ្រង់មានអានុភាពសន្ធាប់សន្ធឹកលើសមនុស្សលោកិយ ម្ដេចគង់មានព្រះទ័យរអាទ្រង់មានព្រះរាជឱង្ការដល់ម្ល៉េះ។

មួយទៀត ទូលព្រះបង្គំជាខ្ញុំនេះយល់ឃើញថា តំបន់ចាំកុកក៏ជាស្រុកប្រទល់ដែនតដែន មានអាណាខេត្តណាន់ណែននៅជុំវិញបរិវេណប្រហែលចម្ងាយផ្លូវប្រាំពាន់សិន (២០០ គ.ម) សុទ្ធតែជ្រោះជ្រលងដងស្ទឹងក្នុងព្រៃញាតស្បាត មានផ្លូវច្រកដើរដោយខំសង្វាតទើបឱហាតនាំពលទៅបានដោយកម្រណាស់ណា បើនឹងលើកពលយោធាទៅវេលានេះ ក៏សែនលំបាកពេកពន់ប្រមាណ ហេតុនេះគួរតែបង្អង់ឈប់ខានសិនទៅចុះ ដើម្បីនឹងបញ្ចុះបញ្ចូលប្រមូលពលទាហានដែលមានថ្វីដៃខ្លាំងពូកែ លើកពលរេហ៍ទៅការពាររក្សាគយគ្រប់ច្រកល្ហកឱ្យបានមួនមាំកុំឱ្យសត្រូវចូលមកញាំញីបាន ទាំងសេនាទាហានក៏គង់មានកម្លាំងដោយឈប់សម្រាំងមកយូរថ្ងៃ ចាំគន់មើលពេលណាមានជោគជ័យស្រួលល្អ ទាល់តែស្រុកសែឈ្នួន និងស្រុកកាំងតាំងកើតអធិករណ៍ជាគូសត្រូវនឹងគ្នា ឯស្រុកទាំងពីរនេះ គង់មានវេលានឹងចលាចលតទល់ច្បាំងគ្នាពុំខាន បើយើងឃើញថាមានឱកាសជាចំណាប់ហើយ សឹមលើកពលដើរសប្បាយទៅវាយយកស្រុកសែឈ្នួនតែម្ដង គង់នឹងបានដូចបំណងប្រាថ្នាជាជាងនឹងលើកបំពារទៅក្នុងពេលនេះទៀត។

ព្រះចៅ**ចូយ៉យ**ត្រាស់សួរ**សុម៉ាអ៊ី**ថា ដែល**ស៊ុនជូ**ថ្លែងការណ៍ដូច្នេះ អ្នកនឹងយល់ឃើញប្រការម្ដេច? **សុម៉ាអ៊ី**ទូលថា ពាក្យដែល**ស៊ុនជូ**ពណ៌នានោះត្រូវណាស់

ហើយ។ ព្រះចៅ**ចូយ៉យ**ក៏ឲ្យ**សុម៉ាអ៊ី**ប្រមូលរេហ៍ពលសកលយោធា ចែកមុខងារចេញទៅរក្សាគយគ្រប់តំបន់តាមមណ្ឌលខេត្ត ហើយចាត់ប្រើ**កោឈុយ, ទៀវខាប់**ទាំងពីរនាយឲ្យនាំទាហានទាំងឡាយចេញទៅរក្សាស្រុកទៀងអាន់ ត្រួតត្រាឲ្យមានគេកំណាន់កាន់កាប់គ្រប់ភូមិឋានស្រេចកាលណា **សុម៉ាអ៊ី**ក៏អញ្ជើញព្រះចៅ**ចូយ៉យ**យាងចូលទៅប្រថាប់ឯស្រុកឡកអៀងជាទីក្រុង។

ឯ**ខុងបេង** កាលនឹងលើកទ័ពត្រឡប់ទៅដល់ស្រុកហាន់តុង ក៏តាំងត្រួតត្រាពិនិត្យមើលនាយទ័ពនាយកងទាំងពួង ឃើញបាត់**ជូឡុង** និង**តេងជី** ក៏មានវិតក្កទុក្ខព្រួយណាស់ ទទួលមានពលទាហានចូលទៅជម្រាបថា **ជូឡុង** និង**តេងជី**លើកពលមកដល់ខាងក្រោយហើយ នរណាៗក៏មិនមានអន្តរាយ សូម្បីតែសេះមួយក៏មិនមានខូចសោះ **ខុងបេង**បានឮដូច្នោះក៏សោមនស្សត្រេកអរណាស់ នាំទាហានក្មេងចាស់ចេញទៅទទួលផ្លូវ**ជូឡុង** និង**តេងជី**ដល់ទ្វារស្រុក។ **ជូឡុង**ឃើញជាក់ក៏នឹកភិតភ័យលោតចុះវៃពីលើសេះស្ទុះទៅលុតជង្គង់គំនាប់**ខុងបេង**ហើយថា ខ្លួនខ្ញុំបាទជានាយទាហាន បានថយទ័ពត្រឡប់មកដោយចាញ់ដៃនៃបច្ចាមិត្ត ហេតុម្តេចមហាឧបរាជគិតគួរសមចេញមកចាំទទួលពុំត្រូវការ។

**ខុងបេង**ឮ**ជូឡុង**ថាហើយ លំឱតលំទោនអាត្មាដោយសុភាព ក៏មានសេចក្តីត្រេកអរណាស់ យកដៃបបោសអង្អែលខ្នង**ជូឡុង**ហើយថា គ្រានេះខ្លួនខ្ញុំធ្វើខុសមោះមិនគាប់ជាទម្ងន់ ព្រោះមិនបានគិតគន់ពិចារណា ចាត់ការឲ្យថ្លោះធ្លោយដោយសេចក្តីប្រមាទ បានជាអស់អ្នកទាំងឡាយមានសេចក្តីព្រួយដល់ខ្មាត ដោយទុក្ខលំបាកគ្រប់ប្រការ ដោយសារតែខ្លួនខ្ញុំមួយឲ្យខូចខាតរេហ៍ពលសកលយោធាជាច្រើន មានតែអ្នកមួយធ្វើប្រការម្តេចទើបមិនមានអន្តរាយ? **តេងជី**ឆ្លើយជម្រាប**ខុងបេង**តាមដំណើររឿងដែលបានធ្វើមកគ្រប់ប្រការ។ **ខុងបេង**ស្តាប់ហើយក៏លាន់មាត់សរសើរថា **ជូឡុង**នេះពេញជាឯកអគ្គសេនានឹងរកនរណាស្មើគ្មាន ថាហើយក៏នាំពួកពលចូលទៅ **ខុងបេង**ក៏យកមាសដប់ជញ្ជីងមកឲ្យជាបំណាច់រង្វាន់តបគុណ**ជូឡុង** និងព្រែល្អមួយម៉ឺនផាប់សម្រាប់ឲ្យចែកពលទាហាន។

**ជូឡុង**ទទួលយកនូវទ្រព្យធនធាន ហើយក៏លើកជូនទៅ**ខុងបេង**វិញ ថាខ្លួនខ្ញុំបាទជាមនុស្សខុស ធ្វើសង្គ្រាមឲ្យធ្លោយធ្លោះបែកទ័ពមក នឹងយកសេចក្ដីគាប់ប្រសើរណាក៏គ្មាន ដែលប្រសាសន៍ឲ្យទានវត្ថុទាំងនេះលើសតម្លៃការ នឹងស្រវាចាប់យកមិនសមគួរ សូមមហាឧបរាជបង្វិលទ្រព្យនេះដាក់ឃ្លាំងព្រះរាជទ្រព្យវិញចុះ បើដល់កំណត់បៀវត្តនោះ សូមឲ្យបើកចែកតែទាហាន។ **ខុងបេង**តាំងតែអង្គុយរិះធ្យានថា ព្រះចៅ**ឡៅពី**មានព្រះបណ្ដាំទុកថា **ជូឡុង**ជាមនុស្សទៀងត្រង់ក៏ឃើញត្រង់ពិតឥតល្អៀងសោះ តាំងពីថ្ងៃនោះទៅ **ខុងបេង**រឹតតែមានសេចក្ដីគារៈ**ជូឡុង**ពេកណាស់។ ខណៈនោះមានបម្រើចូលទៅជម្រាបថា ឥឡូវ**ម៉ាចេក, អងប៉េង, អ៊ុយអៀន** និង**កោសៀង**ចូលមកដល់ហើយ។

**ខុងបេង**ឲ្យហៅ**អងប៉េង**ចូលទៅសួរថា ខ្លួនអ្នកឯងជាធំ យើងបានបន្ទំលើកតម្កើងឲ្យទៅធ្វើការដោយទុកចិត្ត គិតថានឹងរក្សាទីកេតេងជាមួយនឹង**ម៉ាចេក**បាន ៗ ជាប្រើឲ្យទៅ ហេតុម្ដេចខ្លួនមិនតាំងនៅជាមនុស្សចេះដឹងនឹងរំឭកហាមប្រាម**ម៉ាចេក** បណ្ដោយឲ្យ**ម៉ាចេក**ឡើងទៅតាំងបន្ទាយលើកំពូលភ្នំទាល់តែខូចការ? **អងប៉េង**គំនាប់**ខុងបេង**ហើយជម្រាបថា ដែលមហាឧបរាជបានផ្ទុកកិច្ចធុរៈលើខ្លួនខ្ញុំបាទឲ្យទៅធ្វើការនោះ ខ្ញុំបាទនឹងបានល្មើសពីបង្គាប់ ត្រឡប់បោះបង់ចោលការជាសូន្យសោះក៏ទេ កាលទៅដល់តំបន់កេតេងនោះ ខ្ញុំបាទក៏បានទទឹងទាស់នឹង**ម៉ាចេក**ជាច្រើនគ្រា **ម៉ាចេក**ក្រទីក្រទារករឿងរ៉ាវខឹងនឹងខ្ញុំបាទចចេសធ្វើតាមចិត្ត ទាល់តែហួសខ្នាតឲ្យធ្លោះការទៅ ហើយ**អងប៉េង**ក៏តាំងតែស្រាយនិយាយរឿងរ៉ាវឲ្យ**ខុងបេង**ស្ដាប់គ្រប់ប្រការ។

**ខុងបេង**បានដឹងសេចក្ដីសព្វគ្រប់ ក៏បណ្ដេញ**អងប៉េង**ឲ្យចេញទៅក្រៅ ហើយឲ្យហៅ**ម៉ាចេក**ទៅសួរពិចារណា **ម៉ាចេក**ដឹងខ្លួនថាមានទោសយ៉ាងសាហ័សក៏ចងខ្លួនឯងចូលទៅចំពោះនាហ្មឺនមុខមន្ត្រីទាំងពួង **ខុងបេង**ក៏សួរថា អ្នកឯងជាអ្នកមានតម្រិះប្រាជ្ញា បានសិក្សាសូត្ររៀនក្នុងវិជ្ជាសឹកសង្គ្រាមតាំងពីតូចទាល់ធំ ខ្លួនបានចេញមុខសុំអាសាទៅធ្វើការគ្រានេះ យើងក៏បានដាក់កំហិតកំជាប់កំជាជាការមាំមួនណាស់ថា តំបន់កេតេងនោះជាទីសំខាន់ ខ្លួនក៏ប្រកាន់អាងអួតថ្វីដៃថ្លៃណាស់

បានទាំងធ្វើសញ្ញាជាក់ច្បាស់ទុកឲ្យយើងផង ឥឡូវខ្លួនកន្លងល្មើសពីខប្តេជ្ញាធ្វើការឲ្យខូចខាតអន្តរាយរលាយបាត់ជីវិតមនុស្ស ព្រោះចចើសលើសខ្នាត ទាំងស្រុកទេសក៏បង់ខាតច្រើនតំបន់ ទោសទម្ងន់ទាំងអម្បាលមាណ ក៏បណ្តាលឲ្យធ្លាក់ទៅលើខ្លួនទាំងអស់ វេលានេះ បើយើងស្រាយដោះខ្លួនឲ្យរួចពីកំហុស ក៏ចុះជាល្មើសពីបទអយ្យការសឹកទៅ អំណឹះតទៅមុខ ទាហានទាំងឡាយនឹងមើលងាយការសឹកសង្គ្រាម ខ្លួនអ្នកឯងត្រូវតែស្លាប់ ទុកជាបម្រាមរបស់ច្បាប់កុំឲ្យសាបសូន្យ ទើបនឹងបានជាច្បាប់ក្បួនក្នុងផ្លូវរាជការ ៗក៏មិនខូចអសារតទៅ អ្នកឯងក៏មិនត្រូវតូចចិត្តនឹងយើងឡើយ ឯភរិយាបុត្ររបស់អ្នកហើយដែលនៅឯក្រោយ យើងក៏គង់ជួយបីបាច់រក្សាព្យាបាលដូចកាលខ្លួនអ្នកនៅរស់ដូច្នោះដែរ កើតមកជាកូនប្រុសមានឈ្មោះថាជាខ្លាំងពូកែក្នុងទាហាន ក៏មិនត្រូវមានសេចក្តីស្តាយអាល័យជីវិតសង្ខារ ត្រូវតែព្រមស្លាប់តាមវេលាដែលយើងជួបប្រទះនឹងគ្រោះ ការដែលអ្នកឯងបានធ្វើខុសនោះហើយ ជាទោសឲ្យមានគ្រោះចំពោះខ្លួន ថាហើយក៏បង្គាប់ទាហានឲ្យនាំខ្លួន**ម៉ាចេក**ទៅប្រហារជីវិត។ **ម៉ាចេក**ក៏ផុតគំនិតរឹតតែយំសោក អង្វរលន់តួសុំអាយុជីវិតផ្សេងៗ។

**ខុងបេង**ឃើញ**ម៉ាចេក**ស្រែកយំកន្លង ក៏ឲ្យវង្វេងអាណិតអត់ទឹកភ្នែកពុំបានឲ្យខ្សឹកខ្សួលក្នុងប្រាណយំងាកមុខចេញ ហើយឆ្លើយតបថា អ្នកឯងនឹងយើង ៗក៏ស្រឡាញ់រាប់អានដូចញាតិសន្តានសាច់សាលោហិតពិតប្រាកដ ដែលយើងធ្វើទាំងម្ល៉េះ ព្រោះយើងធ្វើតាមព្រះរាជកំណាត់បទចុតហ្មាយជាទំនៀម យើងមិនមែនស្អប់ខ្ពើមអ្នកឯងទេ ឯភរិយាបុត្រអ្នកឯងយើងក៏នឹងចិញ្ចឹមរក្សា។

លុះថាតែប៉ុណ្ណោះ ពួកទាហានទាំងអស់ក៏ចាប់អូស**ម៉ាចេក**ចេញទៅ ក្នុងខណៈដែលទាហាននាំខ្លួន**ម៉ាចេក**ទៅដល់ទីធ្វើគុតនោះ ទទួល**ចៀវអួន**មកពីស្រុកសែឈ្លួនបានទៅប្រទះ **ចៀវអួន**ក៏រលះរលាំងរាំងរាឃាត់ ហើយចូលទៅប្រណិប័តន៍សុំទោស**ខុងបេង**ថា ដែល**ម៉ាចេក**ធ្វើឲ្យធ្លោយទាំងម្ល៉េះ ត្រូវមានទោសដល់ស្លាប់មែនហើយ តែខ្ញុំបាទយល់ឃើញថា វេលានេះស្រុកកំពុងកើតចលាចល ដែលមហាឧបរាជមិនយោគយល់អាណិត កាត់ទោសឲ្យប្រហារជីវិតទាហានឯកចេញដូច្នេះនឹងមិនស្តាយស្រណោះទេឬ? **ខុងបេង**តបថា ដែលយើងឲ្យធ្វើទោសមនុស្សខុស

ដូច្នេះ គឺមិនមែនខុសទាស់នឹងចិត្តរបស់យើងក៏ឥតអង្គីមាន ព្រោះខុសដោយបំពានទៅលើបទអយ្យការជាបញ្ញត្តិ បើយើងមិនប្រណិប័តន៍ធ្វើតាមទម្លាប់ទំនៀមនោះ ក៏នឹងសាបសូន្យតទៅ ជាតិកម្លៅក៏នឹងយកជាតួយ៉ាងមិនរាងចាលឡើយ ថាហើយក៏ស្រាប់តែឃើញ ទាហានយួរក្បាល**ម៉ាចេក** ចូលមកជូន**ខុងបេង** ៗឃើញក្បាល**ម៉ាចេក** ក៏នឹកអាក់អួលក្តួលឱរានឹកដល់ព្រះវាចាបណ្តាំព្រះចៅ**ឡៅពី**ថាទុកពីដើម ក៏ដកដង្ហើមយំម្តងទៀត។

**ចៀវអ្នួន**សួរថា **ម៉ាចេក**ធ្វើខុស លោកឲ្យចុះទោសសម្លាប់ទៅហើយ ម្តេចឡើយលោកមកយំក្រំពីអ្វី? **ខុងបេង**ថា ដែលយើងយំសោកនោះ មិនពីព្រោះរឭកអាល័យនៃខ្លួន**ម៉ាចេក**សោះ យំពីព្រោះព្រះបណ្តាំព្រះចៅ**ឡៅពី** គ្រាដែលព្រះអង្គទៅគង់នៅក្រុងបេកតេមុនទិវង្គត ព្រះអង្គក៏ទ្រង់មត់ទុកនឹងយើងថា **ម៉ាចេក**នេះចេះដឹងតែមាត់ស្ទាត់តែរហ័ស ឯគំនិតចិត្តខ្លីណាស់ណា នឹងប្រើការចេញមុខកុំទុកចិត្តឲ្យសោះ ព្រះបណ្តាំនេះយើងក៏ភ្លេចឃឹងសូន្យមិនបានជាគិត បានជាខុសគំនិតចាត់ប្រើទៅធ្វើការ ទាល់តែឃើញក្បាលកាលណាទើបរឭកបាន ៗជាទប់សំណោកពុំបានដូច្នេះ។

**ខុងបេង**និយាយហើយ ក៏ឲ្យយកក្បាល**ម៉ាចេក**ទៅស្រែកអាក្រោសជុំកំពែងស្រុក ហើយឲ្យតែងការសពតាមទម្លាប់ប្រវេណី រួចឲ្យយកមាសប្រាក់ទៅឲ្យភរិយាបុត្រ**ម៉ាចេក**ជាច្រើន លើសកាល**ម៉ាចេក**ទំនុកបម្រុងពីរស់នៅទៅទៀត ស្រេចកាលណា **ខុងបេង**ក៏ឲ្យតែងជារឿងរ៉ាវឲ្យ**ចៀវអ្នួន**នាំចូលទៅក្រាបទូលថ្វាយព្រះចៅ**ឡៅសៀន**ជាសេចក្តីថា ទូលព្រះបង្គំជាខ្ញុំ**ខុងបេង** បានលើកទ័ពទៅប្រាបសត្រូវ គឺ**សុម៉ាអ៊ី**វេលានេះ បានល្មើសធ្វេសប្រមាទដោយគិតការមិនដល់ទើបចាញ់កលសត្រូវឲ្យរេហ៍ពលដល់នូវសេចក្តីអន្តរាយក្ស័យជីវិតជាច្រើន ទោសកំហុសទូលព្រះបង្គំជាខ្ញុំលើសលុបហួសនឹងគណនា ឥឡូវទូលព្រះបង្គំជាខ្ញុំសុំដកហូតងារទីមហាឧបរាជថ្វាយតាមទោសានុទោស។

ព្រះចៅ**ឡៅសៀន**ទ្រង់ព្រះសណ្តាប់សុភអក្សរសព្វគ្រប់ ក៏ទ្រង់ប្រារព្ធពិគ្រោះនឹងអស់មុខមន្ត្រីថា ឯការរណរង្គតាមប្រវេណីពីបុរាណរាជ្យអាចឲ្យមានតែឈ្នះនិង

ចាញ់ជាធម្មតា នរណាៗខ្លាំងពូកែយ៉ាងម្ដេចក៏គង់វេះគេចមិនផុតបាន ដែលមហាឧបរាជចាញ់ប្រៀបសត្រូវទាំងប៉ុន្មាន ហើយមកសារភាពថាខុស លុះដល់ដកហូតងារខ្លួនឯងពីតំណែងយសស័ក្តិដូច្នេះមិនគួរសោះ ទោះបីជាយ៉ាងណាក៏មហាឧបរាជមិនត្រូវចរចាដូច្នេះទេ។

**ប៊ីហ៊ុយ**ជានាហ្មឺនធំ បង្គំទូលថា ព្រះរាជបញ្ញត្តិចាត់ទុកជាទំនៀមសម្រាប់ផែនដីពីបុរាណរាជ្យ ទូលព្រះបង្គំជាខ្ញុំក៏អាចចេះចាំជាប្រាកដថា បណ្ដានាយទ័ពនាយកងទាំងពួងដែលទទួលព្រះរាជឱង្ការព្រះមហាក្សត្រ ចាត់ឲ្យកាន់ពលចេញទៅធ្វើការរណរង្គសង្គ្រាមនោះ ចំពោះត្រូវកៀកកាន់ព្រះរាជបញ្ញត្តិច្បាប់ជាគោលចារឹកសម្រាប់ខ្លួន ដែលមហាឧបរាជធ្វើការមិនធួនបាន ប្រមាទឲ្យថ្លោះធ្លោយដោយសត្រូវយ៉ាងនេះ ត្រូវតែទ្រង់ព្រះតម្រិះចុះទោសឲ្យសមនឹងព្រះរាជកំណត់កត់ហ្មាយ បើព្រះអង្គនឹងសន្តោសឲ្យផុតឆ្ងាយពីសេចក្ដីល្មើសទៅហើយ កាលណាឡើយផែនដីនឹងតាំងនឹងនៅតាមផ្លូវយុត្តិធម៌បាន មានតែអន្តរធានសាបសូន្យដោយឆាប់ ហេតុនេះ គួរតែព្រះអង្គទ្រង់តម្កល់ច្បាប់ជាបន្ទាត់ កាត់ទោសមហាឧបរាជតាមទោសានុទោសចុះ។

ព្រះចៅ**ឡៅសៀន**បានទ្រង់ព្រះសណ្ដាប់ ក៏ចាប់ព្រះទ័យយល់ត្រូវ ទើបតម្រូវឲ្យមានទង់ត្រាទៅដកហូតងារ**ខុងបេង**ចេញចាកទីមហាឧបរាជ បន្ទាបអំណាចចុះបីសណ្ឋាន ឲ្យនៅបានត្រឹមទីអ៊ីវចុងគុន គ្រាន់តែបង្គាប់បញ្ជាសេនាទាហានដូចសណ្ឋានថ្នាក់មហាឧបរាជ ហើយក៏ចាត់ប្រើ**ប៊ីហ៊ុយ**កាន់ចេញទៅ លុះ**ប៊ីហ៊ុយ**បានទៅដល់ស្រុកហាន់តុង ក៏តម្រង់ចូលទៅគំនាប់**ខុងបេង** ហើយជូនទង់ត្រាទៅឲ្យដោយគិតខ្លាចថា **ខុងបេង**នឹងបានសេចក្ដីអប្បយស ទើបដោះសាថា កាលពីដើមមហាឧបរាជលើកទ័ពទៅវាយអាណាខេត្តបានដល់ដប់អន្លើ ម្ដេចមហាឧបរាជចេះធ្វើកលឧបាយទៅបាន ព្រះចៅ**ឡៅសៀន** និងនាហ្មឺនសេនាបតីអាណាប្រជានុរាស្ត្រទាំងប៉ុន្មាន ក៏មានសេចក្ដីត្រេកអរកោតសរសើរតម្រិះប្រាជ្ញាមហាឧបរាជចិញ្ចែងចិញ្ចាចពេញទាំងស្រុក ចុះវេលានេះ ទាល់អ្វីបានជានាំឲ្យទាបមុខទៅបាន?

**ខុងបេង**បានឮ**ប៊ីហ៊ុយ**ថាដូច្នោះ ក៏ខឹងខ្លាំងណាស់ មុខឡើងឈាមក្រាស់ ស្រែកថា ពីដើមយើងវាយបានអាណាខេត្តច្រើនមែន ហើយលុះឯក្រោយក៏ត្រឡប់ចាញ់ប្រៀបគេព្រោះគិតទាល់ ការត្រង់នេះក៏គង់ដឹងឮខ្លះដែរ ហេតុអ្វីមកចែៗសួរដេញដោលដូច្នោះ? នេះគឺមិនឡកចំអកឲ្យយើងទេឬ? **ប៊ីហ៊ុយ**ឃើញថា**ខុងបេង**ខឹងខ្លាំងណាស់ ក៏ក្រឡាស់ក្លែងធ្វើជាព្រងើយមិនដឹង តាំងតែដេជដែកសួរថា ព្រះចៅ**ឡៅសៀន**ជ្រាបព័ត៌មានថា មហាឧបរាជបាន**កៀងអ៊ុយ**ទាហានព្រះចៅ**ចូយ៉យ**មកទុកធ្វើការ ទ្រង់មានព្រះចិន្តាសោមនស្សណាស់។ **ខុងបេង**ថា យើងមកធ្វើការគ្រានេះ ខូចអស់ពលរេហ៍ជាច្រើន ចាញ់ប្រៀបសត្រូវលើសកើនប្រហែលមួយរយភាគ ទោះជាបានទាហានម្នាក់ឲ្យមកផ្ទឹមសាកក៏ជួយឲ្យចំណេញវិញពុំបាន តែគេនឹងមានមកធ្វើឲ្យខូចាតក៏ទេ អ្នកមកនិយាយផ្អុកវេរឲ្យយើងអប្បយសឬ?

**ប៊ីហ៊ុយ**សួរទៅទៀតថា ឥឡូវមហាឧបរាជបានជ្រើសរើសពលទាហានទុកបានសាមសែសិបម៉ឺននេះ នឹងនៅគិតធ្វើការតែខ្លួនទៀតឬឈប់បង្អង់សិន? **ខុងបេង**ថា គ្រាមុនយើងលើកពលទៅតតាំងច្បាំងចាញ់ប្រៀបសត្រូវនៅតំបន់គីកុក ខូចខាតទាហានច្រើនណាស់ វេលានេះដូចជារបួសនៅក្នុងដើមទ្រូងចាប់ពើតណាស់ គិតតែរួតរះនឹងទៅសងសឹកវិញឲ្យបាន អ្នកចូរឧស្សាហ៍មកនៅធ្វើការជាមួយយើងចុះ។ **ប៊ីហ៊ុយ**បានស្តាប់ក៏មានចិត្តត្រេកអរសាទរណាស់ គំនាប់លា**ខុងបេង**វិលទៅស្រុកសែឈ្វូនវិញ ឯ**ខុងបេង**ក៏តាំងតែប្រមូលបញ្ចុះបញ្ចូលទាហាន ហើយប្រៀនបង្ហាត់គុនអាវុធ ដែលនឹងចូលយុទ្ធនា លុះបានការហើយក៏ឲ្យប្រុងប្រៀបរៀបសព្វអាហារស្បៀងរៀងខ្លួន។

ខណៈនោះ ក៏រន្ទឺឮកិត្តិយសទៅដល់ស្រុកឡុកអៀង ព្រះចៅ**ចូយ៉យ**ត្រាស់ឲ្យហៅ**សុម៉ាអ៊ី**ចូលទៅប្រឹក្សាថា នឹងលើកទ័ពទៅវាយយកស្រុកសែឈ្វូន **សុម៉ាអ៊ី**ទូលថា ទេសកាលនេះគឺជារដូវគិម្ហន្តក្តៅណាស់ បើទោះជាកងទ័ពស្រុកសែឈ្វូន ស្រុកហាន់តុងនឹងលើកមកវាយយកស្រុកយើងវិញ ក៏លើកមកមិនបាន ឬខាងយើងនឹងរុករានលើកទៅវាយយកស្រុកសែឈ្វូនស្រុកហាន់តុងក៏គង់មិនស្រួលដូចគ្នា ព្រោះ**ខុងបេង**ដឹងការណ៍នឹងលើកពលមកទល់ស្ទាក់ត្រង់រយៈផ្លូវទាំងអស់។

ព្រះចៅ**ចូយ៉យ**ភ្លយត្រាស់ថា ដែលយើងនឹងផ្អាកសម្រាកទ័ព មិនប្រញាប់លើកទៅឥឡូវនេះ ក៏គួរណាស់ហើយ តែបើសត្រូវលើកមកជិតបង្កើយនឹងធ្វើអន្តរាយយើងឥឡូវនេះ តើអ្នកនឹងគិតម្ដេចទៅវិញ? **សុម៉ាអ៊ី**ទូលថា ព្រះអង្គកុំទ្រង់បារម្ភឡើយ ទូលព្រះបង្គំបានគិតអស់ហើយការនោះ ទោះបី**ខុងបេង**នឹងហ៊ានរុករានលើកមកធ្វើអន្តរាយយើងគ្រានេះ មុខជាមិនត្រិះរិះនឹងមកតាមផ្លូវភ្នំគីសាន់ដោយប្រមាណ មុខជាលើកមកលើតំបន់តាន់ឆងជាទំនងផ្លូវកាត់ពិតណាស់ ទូលព្រះបង្គំជាខ្ញុំសុំចាត់ទាហានយ៉ាងរហ័សឲ្យចេញទៅតាំងបន្ទាយ វាយយកជាកំពែងបិទបង្វែងផ្លូវនោះឲ្យបាន មិនឲ្យ**ខុងបេង**រុករានចូលមកដល់ដែនយើង។ ព្រះចៅ**ចូយ៉យ**សប្បាយព្រះទ័យណាស់ ត្រាស់ថា អ្នកនឹងចាត់ប្រើនរណាជានាយទ័ពលើកទៅ?

**សុម៉ាអ៊ី**ទូលថា **ហោកជីវ**ដែលជាទីចុបប៉ាចុងគុន ចៅហ្វាយស្រុកហោសៃ មានថ្វីដៃខ្លាំងពូកែពូល្បីឈ្មោះ ខ្លួនមានកម្ពស់ប្រាំមួយហត្ថប្លាយ ហើយប៉ុរកបដោយប្រាជ្ញាប្រើកលឧបាយដោយច្រើន មុខជាបានចម្រើនការ អាចក្ដៀវក្ដា-តនឹង**ខុងបេង**បាន។ ទូលព្រះបង្គំជាខ្ញុំនឹងសុំចាត់បម្រើឲ្យឈរវាំងទ័ព។ ព្រះចៅ**ចូយ៉យ**ក៏យល់ព្រមឲ្យប្រើបង្គាប់តាមត្រូវការ ទើបចាត់បម្រើឲ្យនាំសំបុត្រសារទៅដល់**ហោកជីវ**នៅស្រុកហោសៃ ឲ្យរៀសរវៃលើកទ័ពទៅវាំងការនៅនាតំបន់តាន់ឆងតាមទំនងពាក្យដែល**សុម៉ាអ៊ី**បង្គាប់គ្រប់ប្រការ។

*លោកអ្នកអានអាចរកមើលសៀវភៅផ្សេងទៀតតាមរយៈគេហទំព័រ*

www.khmerliterature.wordpress.com

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៧៤

**ចារឹកឡើងវិញដោយ ៖ ឈុល ជាក៉ា**

*(តាំងពី**ជីវហង**ចៅហ្វាយស្រុកគួនយ៉ុង បញ្ឆោត**ចូហ៊ីវ**ឲ្យលើកទ័ពទៅវាយស្រុកកាំងតាំង **ចូហ៊ីវ**ជឿ ជូនដើមសំបុត្រទៅថ្វាយព្រះចៅ**ចូយ៉យ** ៗទ្រង់ជឿ ចាត់ប្រើ**សុម៉ាអ៊ី**ឲ្យលើកទ័ពទៅច្បាំង ខាងស្រុកកាំងតាំងចាត់**ឡុកស៊ុន**ជាមេទ័ពលើកទៅតយុទ្ធនា ស្រុកកាំងតាំងឈ្នះទ័ព**សុម៉ាអ៊ី ចូហ៊ីវ**ឈឺចិត្តដោយចាញ់ប្រាជ្ញា**ជីវហង** ក្រំទ្រូងស្លាប់ **ទៀវជូឡុង**ឈឺស្លាប់ **អ៊ុយអៀន**ឧបាយសម្លាប់**អងសុង**ស្លាប់ **អ៊ុយអៀន**និង**កៀងអ៊ុយ**វាយបន្ទាយ**សុម៉ាអ៊ី**បែក។)*

**ខណៈនោះ** មានបម្រើកាន់សំបុត្រចូលមកពីស្រុកអៀវជីវថា ដ្បិត**ជីវហង**ចៅហ្វាយស្រុកគួនយ៉ុង លើកមកពីស្រុកគួនយ៉ុងអាណាខេត្តកាំងតាំងមកចំណុះ**ចូហ៊ីវ**ហើយ ទើបព្រះចៅ**ចូយ៉យ**ទទួលសំបុត្រនោះមកបើកស្រោម ទតព្រះនេត្រឃើញមានសេចក្តីប្រាំពីរខថា៖ ឲ្យលើកទ័ពទៅវាយយកស្រុកកាំងតាំងចុះ។ ព្រះចៅ**ចូយ៉យ**ទ្រង់ប្រឹក្សានឹង**សុម៉ាអ៊ី** ៗទូលថា សេចក្តីសំបុត្រនេះពិតណាស់ បើដូច្នោះទូលព្រះបង្គំជាខ្ញុំសុំលើកទ័ពទៅជួយ**ចូហ៊ីវ** ឲ្យបានកម្ចាត់សត្រូវឲ្យរាបទាប ដើម្បីនឹងយកស្រុកកាំងតាំងជាចំណុះស្រុកយើង។

**កាគុយ**ទីជាមន្ត្រីធំ បង្គំទូលទាស់ថា ដែលព្រះអង្គទ្រង់ចាត់**សុម៉ាអ៊ី**ឲ្យលើកទ័ពទៅនោះទូលព្រះបង្គំជាខ្ញុំមិនយល់ឃើញផងសោះ ព្រោះពួកអ្នកស្រុកកាំងតាំងនោះ ជាមនុស្សច្រើនមិនមានសេចក្តីសត្យទេ ច្រើនតែនិយាយឡេះឡោះផ្តេសផ្តាសនឹងយកជាការមិនបាន ឯ**ជីវហង**សោតក៏ជាជាតិស្រុកកាំងតាំង សឹងមានតម្រិះប្រាជ្ញាឆ្លាតណាស់ ដែលថានឹងប្រែផ្លាស់ទីមកចំណុះចុះចូលដោយសុចរិតនោះមិនពិតទេ បើតាមគ្នេរមើលឃើញថាជាកលឧបាយបញ្ឆោតឲ្យជឿចិត្ត ឲ្យយើងគិតទៅវាយយកស្រុកកាំងតាំង បើទៅហើយគង់នឹងបំបាំងធ្វើអន្តរាយយើងពុំខាន។

**សុម៉ាអ៊ី**ថា អ្នកនិយាយនេះមិនត្រូវសោះ **ជីវហង**នោះឬនឹងហ៊ានបញ្ឆោតយើង? ការគ្រានេះ បើទុកជាមិនចង់ធ្វើ ក៏ត្រូវតែធ្វើមិនត្រូវខាន។ ព្រះចៅ**ចូយ៉យ**ថា បើដូច្នោះ អ្នកចូរយក**កាគុយ**ទៅធ្វើការផងចុះ។ **សុម៉ាអ៊ី**ក៏ក្រាបបង្គំលាថយចេញទៅចាត់ចែងកងទ័ពបានសព្វគ្រប់ហើយ ក៏លើកទៅបញ្ចូលប្រមូលគ្នានឹងទាហានស្រុកអៀវជីវ លុះបានឫក្សសុភមង្គលហើយ **ចូហ៊ីវ**ក៏លើកពលញែកចេញទៅស្រុកអួនសៀមួយកង ឲ្យ**កាគុយ**និង**ម៉ាន់ថង, ហៅជិត** នាំពលមួយកងឆ្លងទៅផ្លូវស្រុកយ៉ុងសៀ **សុម៉ាអ៊ី**ជាកងទ័ពធំ ក៏លើកចំផ្លូវទៅស្រុកកាំងឡេង កំណត់ឲ្យលើកចេញទៅព្រមគ្នា ឲ្យដល់ស្រុកកាំងតាំង។

ឯ**ស៊ុនគួន**ដឹងថា កងទ័ព**សុម៉ាអ៊ី** និង**ចូហ៊ីវ**លើកទៅ ក៏ហៅអស់នាហ្មឺនមុខមន្ត្រីមកប្រឹក្សាថា **ជីវហង**ក្លែងកលឧបាយទៅនិយាយសុំចុះចូលខាង**ខៅហ៊ីវ** ដើម្បីបញ្ឆោតឲ្យលើកទ័ពមកជាបីផ្លូវ ឥឡូវលើកជិតមកដល់ស្រុកយើងហើយ ដែលយើងនឹងយកជ័យជម្នះគ្រានេះ តើអ្នកទាំងអស់នឹងយល់ឃើញដូចម្តេច?

**កោះយ៉ុង**ឆ្លើយថា សង្គ្រាមនេះជាធំពន្លឹកណាស់ សូមអម្ចាស់ចាត់ប្រើ**ឡុកស៊ុន**ជាមេទ័ពចេញប្រញាប់ទៅធ្វើការទើបបាន។ **ស៊ុនគួន**ក៏ឆ្លើយថ្កានថា ត្រូវណាស់ ទើបតាំង**ឡុកស៊ុន**ជាកុកតៃចុងគុន ប្រែថា “ស្តេចប្រមូលស្រុក” ឲ្យធ្វើជាមេទ័ពធំប្រជុំរាជការទាំងពួងជាសម្រេចដាច់ខាតទូទាំងខេត្តខណ្ឌសីមា ស្នងព្រះនេត្រព្រះកាណ៌ព្រះចៅ**ស៊ុនគួន**។

**ឡុកស៊ុន**ទទួលគំនាប់តាមសណ្តាប់ ដែលឡើងទីយសស័ក្តិថ្មី រួចហើយក៏ទូលសុំខ្លួន**ជូហ្វ៊ួន** និង**ជួនចង**ជាបាឡាត់ឆ្វេងស្តាំយកទៅផង។ **ស៊ុនគួន**ក៏អនុញ្ញាតតាមត្រូវការ ទើបតាំង**ជូហ្វ៊ួន**ជាបាឡាត់ទ័ពស្តាំ **ជួនចង**ជាបាឡាត់ទ័ពឆ្វេង **ឡុកស៊ុន**ក៏រៀបចំចាត់ចែងភ្ញុំពលទ័ពគ្រប់ទាំង៨៨មណ្ឌល បានរេហ៍ពលចំនួន៧៥ម៉ឺន ព្រមទាំងគ្រឿងសាស្ត្រាវុធមុតមាំប្រចាំការ លុះបានឫក្សពារជាមង្គល ក៏លើកពួកពលចេញទៅជាបីកង។

ឯ**ជូហ្វ៊ួន**ក៏បាននិយាយនឹង**ឡុកស៊ុន**ថា ដែល**ចូហ៊ីវ**ចាញ់បញ្ឆោត**ជីវហង**លើកកងទ័ពសន្ធឹកសន្ធាប់កន្លងចូលជ្រុលមកយ៉ាងនេះ គឺជាមនុស្សគ្មានតម្រិះប្រាជ្ញា

សោះ យើងលើកទាំងអស់ចេញទៅប្រទះមុខជានឹងមានជ័យជម្នះមិនខាន បើ**ចូហ៊ីវ**បែកទ័ពទៅអម្បាលម៉ាន ខ្ញុំបាទយល់ថា មុខជារត់កាត់ទៅលើតំបន់ហៀបសិន និងគុយគី ពីរផ្លូវនេះជាប្រាកដ ឯផ្លូវពីរតំបន់នេះជាច្រកសង្វែកភ្នំចង្អៀតណាស់ ខ្ញុំបាទនិង**ជួនចង**សុំលើកពលមួយកងទៅរំលំឈើបិទផ្លូវឲ្យជិត ហើយគាស់ថ្មបាំងបិទកុំឲ្យកងទ័ពដើរបានទៀត បើសត្រូវលើកតាមផ្លូវនោះមកហើយ មុខជានឹងព័ទ្ធចាប់ខ្លួន**ចូហ៊ីវ**ជាមេទ័ពឲ្យបាន បើបានខ្លួន**ចូហ៊ីវ**វេលាណា យើងត្រូវការទៅសង្កត់យកស្រុកឈីវឈុន ដែលជាស្រុកសំខាន់ឲ្យបាន បើបានស្រុកឈីវឈុនហើយ នឹងដើរសប្បាយទៅវាយយកស្រុកហ៊ូតោនិងស្រុកឡុកអៀង យ៉ាងស្រួលណាស់។

**ឡុកស៊ុន**ថា ដែលអ្នកឯងនិយាយនេះខុសពីគំនិតរបស់ខ្ញុំសោះ ព្រោះឧបាយរបស់ខ្ញុំនោះបានគិតទុកជាស្រេចហើយ អ្នកកុំបីបារម្ភឡើយការនោះ ទើបចាត់ឲ្យ**ជូកាត់កិន**ទៅនៅរក្សាស្រុកកាំងឡេងចាំទទួល**សុម៉ាអ៊ី** ឯទ័ពធំក៏ត្រៀមចាំឫក្សពិធីនៅទីនោះ។

ឯ**ជីវហាង**លុះបានដឹងថា **ចូហ៊ីវ**លើកពលចូលមកដល់ស្រុកហើយ ក៏ចេញទៅទទួលតាមប្រវេណី **ចូហ៊ីវ**ក៏ដណ្ដឹងសួរអំពីសេចក្ដីសំបុត្រ ដែល**ជីវហាង**មកប្ដឹងចូលទៅមានប្រាំពីរខនោះថា ខ្ញុំក៏បាននាំយកសេចក្ដីគ្រប់ប្រការនោះ ចូលទៅទូលស្នើដល់ព្រះចៅ**ចូយ៉យ** ៗក៏ទ្រង់មានព្រះរាជហឫទ័យមេត្រីស្មោះសរត្រេកអរនឹងអ្នកច្រើនណាស់ បានជាទ្រង់ព្រះតម្រាស់ប្រើឲ្យខ្ញុំលើកទ័ពចេញមកជាបីផ្លូវ តែថាឥឡូវខ្ញុំនៅមានចិត្តគិតពិភាល់បន្តិច ព្រោះឮពាក្យពេចន៍ពីមនុស្សផ្ដេសផ្ដាស់ច្រើននិយាយថា ខ្លួនអ្នកជាមនុស្សមានតម្រិះប្រាជ្ញា លៃបខាយប្រើកលឧបាយដោយច្រើន ខ្ញុំស្មានក្រែងអ្នកបញ្ឆោតខ្ញុំជាពួកភឿនឲ្យចាញ់ឧបាយទេដឹងឬ? តាមដែលខ្ញុំបានឮ ខ្ញុំគិតថា ទោះយ៉ាងណាចិត្តអ្នកក៏មិនដល់នឹងគិតដូច្នោះ តែពោះខាងក្នុងនៅមិនទាន់ស្រឡះ។ **ជីវហាង**បានឮពាក្យ**ចូហ៊ីវ**ច្បាស់ក៏ធ្វើជាយំ ហើយស្ទុះទន្ទ្រាំជើងហូតគ្រប៊ីឡើងនឹងអារ-កសម្លាប់។ **ចូហ៊ីវ**ក៏ស្ទុះប្រញាប់ទៅចាប់ទាញយកគ្រប៊ីបានហើយឃាត់ថា អ្នកឯងកុំសម្លាប់ខ្លួនថ្វី ខ្ញុំគ្រាន់តែធៀបសម្ដីលទេតើ។ **ជីវហាង**ថា ឯសេចក្ដីប្រាំពីរខដែលខ្ញុំបានប្ដឹងទៅដល់លោកនោះ ចំពោះជាការពិតណាស់ ដែល

លោកយកពាក្យមនុស្សទាំងផ្កាសវាចរចាថា ខ្ញុំបាទបញ្ឆោតលោកនោះខុសទទេសោះ ខ្ញុំបាទយល់ថា ពាក្យនោះប្រហែលកលឧបាយស្រុកកាំងតាំងក្លែងឲ្យលោកសង្ស័យ នឹងខ្ញុំបាទប្រាថ្នាឲ្យខ្ញុំបាទចាកឃ្លាតអំពីលោក កុំឲ្យធ្វើការនេះសម្រេចបាន ៗជា ខ្ញុំបាទមានសេចក្តីរំខានតូចចិត្តនឹងវាសនា បើជាល្តៅត្រឡាចទៅវ៉ា ខ្ញុំបាទនឹងពុះវះចេញឲ្យលោកឃើញវៀចនិងត្រង់ ថាហើយក៏ហូតគ្រប៊ីតម្រង់បំពង់កនឹងអារម្តងទៀត។

**ចូហ៊ីរ**ស្ទុះទៅបៀតចាប់ហូតយកគ្រប៊ីចេញពីដៃ ហើយឱបអង្អែលខ្លួន**ជីវហង** លួងលោមថា ខ្ញុំនិយាយចំអន់លេងទេ អ្នកកុំអាលគ្នាញ់គ្នេរនឹងសម្លាប់រូបកាយដូច្នោះ ពាក្យសម្តីដែលលើសលស់ខ្ញុំសុំខមាលទោសនឹងអ្នក។ **ជីវហង**ស្តាប់ជាក់ក៏ក្លែងនិយាយថា ខ្ញុំបាទមានសេចក្តីមេត្រីសុចរិតពិតត្រង់នឹងលោកណាស់ លោកមិនគួរមកក្រឡាស់មានប្រសាសន៍ដូច្នោះឡើយ ថាហើយក៏យកគ្រប៊ីកាត់កម្រងសក់បោះចោលទៅ ហើយថាសក់ដែលខ្មៅៗនេះ ជាទីស្រឡាញ់ពេញចិត្តមាតាបិតា ខ្ញុំបាទកាត់ឲ្យឃើញអស្ចារ្យគ្រានេះ សុំឲ្យលោកពិគ្រោះមើលចុះ! **ចូហ៊ីរ**ឃើញ**ជីវហង**ធ្វើឲ្យឃើញប្លែកដូច្នោះ ក៏ចុះចិត្តជឿប្រាកដឥតមន្ទិលសង្ស័យឡើយ ទើបប្រស្រ័យស្រាកស្រួលទទួលឲ្យរៀបតុលៀងភោជនាហារ លុះបរិភោគរួចស្រេចហើយ **ជីវហង**ក៏គំនាប់លាថយទៅវិញ។

លុះព្រឹកព្រាងស្វាងព្រះសុរិយា ទីប្រឹក្សាឈ្មោះ**កាគុយ**ក៏លើកទ័ពមកដល់ ទើបចូលទៅគំនាប់**ចូហ៊ីរ**តាមប្រវេណី **ចូហ៊ីរ**ក៏សាកសួរ**កាគុយ**ដោយកិច្ចរាជការ ហើយថា អ្នកឯងនឹងត្រូវនិយាយដោយយល់ឃើញក្នុងការសង្គ្រាមនេះយ៉ាងម៉េចខ្លះ? **កាគុយ**ឆ្លើយថា ខ្ញុំប្រាថ្នាស្រូតមកនេះដើម្បីនឹងសុំរំឭកលោកបន្តិច ព្រោះខ្ញុំយល់ឃើញថា ទាហានស្រុកកាំងតាំងនោះមុខជានឹងលើកមកស្កាត់ស្ទាក់ផ្លូវនៅត្រង់ស្រុកអ្នូនសៀវ បើដូច្នេះគួរតែលោកកុំអាលលើកពលចូលដល់ទៅក្នុងទីដែនរបស់គេ ត្រូវតែរារង់ចាំកងទ័ព**សុម៉ាអ៊ី**លើកមកដល់ព្រមសិន រួចសឹមលើកទៅសង្កត់សង្កិនជាមួយគ្នាតែម្តង។

**ចូហ៊ីវ**ថា ដែលអ្នកមកឃាត់ហាមយើងដូច្នេះ ប្រាថ្នានឹងដណ្ដើមយកសេចក្ដីគាប់ប្រសើរឬអ្វី? **កាគុយ**ឆ្លើយថា ខ្ញុំដឹងដំណឹងថា **ជីវហង**ក្លែងមកកាត់សក់ខ្លីហើយប្រណិធាននឹងលោកឲ្យជឿចិត្ត នោះជាគំនិតប្រើកលឧបាយ មិនមែនត្រង់នឹងលោកទេ ខ្ញុំគិតគ្នេរឃើញហេតុដូច្នេះ បានជាស្រូតមកជម្រាបឲ្យលោកជ្រាបដើម្បីនឹងប្រុងប្រៀបរង់ចាំឲ្យជុំគ្នាសិន បើបង្ខំលើកទៅសង្កត់សង្កិនគេដោយពលក្រែងថ្លោះធ្លោយឲ្យមានបន្ទោស។

**ចូហ៊ីវ**ថា ខ្ញុំចេញមកធ្វើការរណរង្គសង្គ្រាម គួរឬមកឃាត់ហាមនិយាយជាពាក្យមិនគប្បីដូច្នេះ អ្នកឯងនិយាយយ៉ាងនេះ នឹងឲ្យពលទាហានយើងមានចិត្តរួញរាខូចការតទៅឬ? យើងមិនត្រូវស្ដាប់អ្នកឯងទេ ថាហើយក៏បង្គាប់ពលរេហ៍ឲ្យចាប់ខ្លួន**កាគុយ**នាំទៅសម្លាប់ នោះពលទាហានបានស្ដាប់ក៏នាំគ្នាអង្វរថា ប្រសាសន៍លោកដែលនឹងឲ្យសម្លាប់**កាគុយ**ចេញនោះខុសនឹងធម៌ប្រវេណីបុរាណ ព្រោះសង្គ្រាមមិនទាន់បានតយុទ្ធគ្នា ហើយមកសម្លាប់ទីប្រឹក្សានោះមិនគួរសោះ យើងខ្ញុំទាំងអស់សុំលន់តួទោស**កាគុយ**ម្ដងសិន។ **ចូហ៊ីវ**ក៏ស្រាកកំហឹង ព្រមអនុញ្ញាតលើកទោស**កាគុយ**មិនឲ្យនាំទៅសម្លាប់ គ្រាន់តែបង្គាប់ឲ្យដកហូតងារ**កាគុយ**ពីមេកង ឲ្យហៅប្រើម្ដងៗក្នុងរាជការទ័ព ហើយក៏លើកពលប្រញាប់ទៅវាយស្រុកអ្វូនសៀ។

ឯ**ជីវហង**ដឹងទំនងជា**ចូហ៊ីវ**ដកហូតងារ**កាគុយ**ចេញពីតំណែងមេកងទ័ព ក៏គិតថា វេលានេះ បើ**ចូហ៊ីវ**ជឿស្ដាប់ពាក្យសម្ដី**កាគុយ**រំពុក ស្រុកកាំងតាំងនឹងវិនាសអន្តរាយឥឡូវនេះ ទេពតាទាំងឡាយចុះមកជួយឧបត្ថម្ភ នាំឲ្យយើងបានសេចក្ដីគាប់ប្រសើរណាស់ គិតហើយក៏បង្កើតចិត្តសោមនុស្សប្រីតា ទើបតែងសំបុត្រសារប្លឹងទៅដល់**ឡុកស៊ុន**ជាមេទ័ពធំថា ឥឡូវ**ចូហ៊ីវ**វង្វេងដោយកលឧបាយខ្ញុំបាទហើយ បានទាំងលើកកងទ័ពកន្លងចូលមកសន្ធឹកសន្ធាប់ណាស់ សូមឲ្យលោករូតរះគិតយកជ័យជម្នះឲ្យបានចុះ។ **ឡុកស៊ុន**ដឹងព័ត៌មានដូច្នោះ ក៏បង្គាប់នាយទ័ពនាយកងទាំងអស់លើកបំបែកទៅបង្កប់នៅតំបន់សេកតងមួយកង ហើយចាត់ឲ្យ**ស៊ីសេង**ជានាយកងទ័ពមុខលើកគំហុកចូលទៅ ឯ**ចូហ៊ីវ**ក៏នាំខ្លួន**ជីវហង**លើកទ័ពឆ្លងទៅដល់ពាក់កណ្ដាលផ្លូវហើយសួរ**ជីវហង**ថា ដែលនឹងទៅឈប់ទល់ទ័ពខាងមុខឈ្មោះតំបន់

ស្រុកអី? **ជីវហង**ក្លែងឆ្លើយថា ខាងមុខនោះឈ្មោះតំបន់សេកតង។ លុះព្រឹកឡើង បម្រើសេះទៅស៊ើបល្បាតបានដំណឹងថា កងទ័ពស្រុកកាំងតាំងលើកមករាំងស្កាត់នៅមាត់ផ្លូវជិតនេះ **ចូហ៊ីវ**ឮដូច្នោះក៏ភ័យណាស់ថា **ជីវហង**ប្រាប់ច្បាស់ថា តំបន់សេកតងនេះផ្លូវស្រួលបួលចំណាប់ គ្មានកងទ័ពសត្រូវមកដល់ទេ តែឥឡូវម្ដេចក៏ប្រែជាមានកងទ័ពលើកមកស្កាត់នៅដូច្នេះ? វេលានោះ**ចូហ៊ីវ**ក៏ឲ្យបម្រើទៅហៅ**ជីវហង**មកសួរការ បម្រើទៅហើយវិលមកប្រាប់ថា **ជីវហង**និងបក្សពួកប្រហែលសាមសិបនាក់នាំគ្នាគេចរត់បាត់អម្បាញ់មិញទៅហើយ។ **ចូហ៊ីវ**ឮថា**ជីវហង**រត់បាត់ក៏ខឹងខ្លាំងណាស់ថា **ជីវហង**បោកបញ្ឆោតខ្លួនឲ្យលុះដោយកលឧបាយ ក៏នឹកគិតថា បើយ៉ាងនេះយើងក៏មិនត្រូវខ្លាចសោះសង្គ្រាមប៉ុណ្ណោះ យើងត្រូវប្រឹងយកជ័យជម្នះឲ្យបាន ទើបចាត់**ទៀវផៅ**ឲ្យនាំពលចេញទៅជាទ័ពមុខ គំហុកតយុទ្ធគ្នានឹង**ស៊ីសេង** ឯ**ស៊ីសេង**ក៏បរពលចូលប្រយុទ្ធនឹង**ទៀវផៅ**បានប្រហែលដប់ភ្លែង **ទៀវផៅ**ទល់កម្លាំងពុំបានក៏ញាក់សេះវេះរត់ទៅក្រោយ ហើយទៅប្រាប់**ចូហ៊ីវ**ថា **ស៊ីសេង**មានកម្លាំងច្រើនណាស់ ខ្ញុំបាទនឹងប៉ះតពុំបាន។ **ចូហ៊ីវ**ថា ថ្វីបើ**ស៊ីសេង**ខ្លាំងពូកែប៉ុណ្ណោះ អ្នកកុំព្រួយគិតរិះបារម្ភឡើយ ទុកងារយើងនឹងខំវាយទម្លាយឲ្យបែកបាន ទើបចាត់**ទៀវផៅ**ឲ្យចេញទៅនឹងពលពីរពាន់ទៅពួនបង្កប់នៅទិសឯត្បូង ចាត់**ស៊ីកៀវ**ឲ្យនាំពលពីរពាន់ទៅពួនបង្កប់នៅទិសឯជើង ហើយសន្មតគ្នាថា បើឃើញយើងជាកងកណ្ដាលលើកទៅបញ្ឆោត ធ្វើជាចាញ់ឲ្យដេញត្រឡប់វិលមកក្រោយ បើឮស្គរផាវវេលាណា អ្នកទាំងពីរត្រូវលើកពលឃោធាចេញមកវាយខ្ទប់ទាំងសងខាង **ស៊ីកៀវ**និង**ទៀវផៅ**ទទួលបង្គាប់ហើយ ក៏លើកពលសំដៅទៅទីដែលត្រូវពួនបង្កប់ទាំងកណ្ដាលយប់នោះ។

ឯ**ឡុកស៊ុន**មេទ័ពធំ ក៏តម្រូវប្រើ**ជូហ៊្វន** និង**ជួនចង**លើកពលម្នាក់មួយកងបីម៉ឺន កាត់ផ្លូវទៅខាងក្រោយបន្ទាយ**ចូហ៊ីវ**ហើយកំណត់ថា បើបានចំណាប់ហើយឲ្យដុតភ្លើងឡើង បើយើងឃើញពន្លឺភ្លើងវេលាណា នឹងលើកគ្នាពីខាងនេះវាយប្រសព្វចូលទៅ ពីខាងនោះក៏ត្រូវវាយខ្ទប់ចូលមក មុខជានឹងចាប់យកខ្លួន**ចូហ៊ីវ**បាន **ជូហ៊្វន**និង**ជួនចង**ទទួលរ៉ាប់រងពាក្យបង្គាប់ស្រេចក៏លើកពលកាត់គេចបែកគ្នាទៅទាំងយប់។

ឯ**ទៀវផៅ**ដែលលើកទៅពួនបង្កប់ ក៏ប្រទះនឹងកងទ័ព**ជូហ៊្វន** ដោយមិនដឹងខ្លួន ជាកងទ័ពស្រុកកាំងតាំងសោះ សម្គាល់ថាពួកទាំងនោះជាទាហានល្បាតជាមួយគ្នា ក៏ម្នីម្នាបរសេះដើរទៅសួរ**ជូហ៊្វន** ៗក៏លើកដាវឡើងកាប់**ទៀវផៅ**ធ្លាក់ពីលើសេះស្លាប់ កងទ័ពក៏បែកបាក់ខ្ចាត់ខ្ចាយរត់ទៅ **ជូហ៊្វន**បានចំណាប់ក៏បង្គាប់ឲ្យដុតភ្លើងជាសញ្ញា **ជួនចង**ឃើញពន្លឺភ្លើងក៏ម្នីម្នាក់លើកពលចូលទៅ ទទួលប្រទះនឹងទ័ព**ស៊ីកៀវ**ដែលលើកទៅបង្កប់ **ជួនចង**ក៏បង្គាប់ពលឲ្យចូលប្រកាប់សម្លាប់កងទ័ព**ស៊ីកៀវ**ជាច្រើន **ស៊ីកៀវ**តស៊ូមិនបាន ក៏នាំទាហានបំពានរត់ទៅ **ជូហ៊្វន, ជួនចង**ទាំងពីរនាយក៏បរពលពារទម្លាយបន្ទាយ**ចូហ៊ីរ** កាប់សម្លាប់គ្នាជាជ្រួលច្របល់ខ្លាំងណាស់ **ចូហ៊ីរ**បែកទ័ពរត់ត្រឡប់ធ្លាយបន្ទាយទៅដល់តំបន់ហៀបសើប ប្រទះទ័ព**ស៊ីសេង** ៗក៏បំផាយសេះដេញជិតប្រកិតពីក្រោយ ទ័ព**ចូហ៊ីរ**ក៏បែកបណ្ដោយទៅ ចោលគ្រឿងសាស្ត្រាវុធនៅដាសពាសប្រើថពី **ចូហ៊ីរ**ក៏ខ្ទេចខ្ទីវិនាសពលរេហ៍ច្រើនណាស់ រត់យកតែខ្លួននិងទាហានខ្លួនដោយទៅជាមួយផង លុះទៅដល់ច្រកជ្រោះជ្រលងជើងភ្នំ ខំស្រូតទៅតែម្នាក់ឯងវង្វេងបាត់គ្នីគ្នា ប្រទះនឹង**កាគុយ**ទីប្រឹក្សាលើកទាហានមួយកងជ្រួសផ្លូវត្រូវមកជួបគ្នានឹង**កាគុយ** ក៏ម្នីម្នានាំ**ចូហ៊ីរ**ទៅបាន **ចូហ៊ីរ**ក៏ត្រេកអរពន់ប្រមាណណាស់ថា ទីនេះខ្ញុំត្រូវស្លាប់ តែមានភ័ពជួបនឹងអ្នកជួយអាយុជីវិតខ្ញុំបាន **កាគុយ**ក៏នាំទន្ទ្រានកាត់ព្រៃចេញរួចទៅ **ចូហ៊ីរ**ថា ដែលអ្នកបានឃាត់រាំងរាខ្ញុំ ៗមិនស្ដាប់នោះ ទោសកំហុសរបស់ខ្ញុំជាទម្ងន់ណាស់ណា សុំចិត្តអ្នកមានមេត្តាកុំប្រកាន់ឡើយ។ ឯ**ស៊ុម៉ាអ៊ី**ដឹងថា កងទ័ព**ចូហ៊ីរ**បែកបាក់ចាញ់សត្រូវដូច្នោះ ក៏អស់សង្ឃឹមថយទ័ពធំត្រឡប់ក្រោយទៅវិញ។

ពេលនោះ **ជូហ៊្វន** និង**ជួនចង**ក៏បង្គាប់នាយទ័ពនាយកងឲ្យរើសយកគ្រឿងសាស្ត្រាវុធនិងស្បៀងអាហារ នូវអស់មនុស្សម្នារេហ៍ពលដែលជាឈ្លើយចំណុះចុះចូលប្រហែលបីម៉ឺន ហើយក៏លើកទ័ពត្រឡប់ទៅរក**ឡុកស៊ុន**ជាមេទ័ពធំ **ឡុកស៊ុន**ក៏រង់ចាំនៅកណ្ដាលផ្លូវ លុះឃើញ**ជូហ៊្វន, ជួនចង** បានស្បៀងនិងគ្រឿងសាស្ត្រាវុធនូវឈ្លើយច្រើនដូច្នោះ ក៏សោមនស្សត្រេកអរពន់ប្រមាណណាស់ នាំគ្នារូតរះលើកទ័ពត្រឡប់ទៅស្រុកកាំងតាំងវិញ។

**ស៊ុនគួន**ដឹងថា **ឡុកស៊ុន**ឈ្នះទ័ពលើកត្រឡប់មកក៏អរណាស់ នាំអស់នាហ្មឺនមុខមន្ត្រីទាំងពួងចេញទៅទទួលដល់ក្រៅមាត់ទ្វារស្រុកក្រុង ហើយឲ្យយកសប្បធន់បើកបាំងដង្ហែ**ឡុកស៊ុន**ចូលទៅ លុះនាយទ័ពនាយកងលើកចូលទៅដល់ព្រមគ្នាហើយ ព្រះចៅ**ស៊ុនគួន**ត្រាស់ថា វេលានេះ **ជីវហង**មានតម្រិះចេះប្រើកលឧបាយឲ្យសត្រូវឆោតជឿចិត្ត ប៉ានទាំងកាត់សក់ខ្លួនឯងចោលអស់ បានជ័យជម្នះយ៉ាងធំ សមតែឲ្យឡើងយសស័ក្តិផ្តោះឡើងទៀតជាគុណបំណាច់ ទើបសម្រេចតាំងជា**គួនឡៃហៅ** ត្រូវមានតំណែងជាទីប្រឹក្សាក្នុងក្រុង ហើយទ្រង់ឲ្យបំណាច់រង្វាន់ដល់ពលទាហានគ្រប់ៗគ្នា **ឡុកស៊ុន**ក៏ក្រាបទូលព្រះចៅ**ស៊ុនគួន**ថា **ចូហ៊ីវ**ចាញ់ប្រៀបនឹងកងទ័ពខាងយើងបែកទ័ពរត់ទៅគ្រានេះ បណ្តាអស់ពួកពលយោធាក៏ទុរន់ទុរានទន់កម្លាំងខ្លាំងណាស់ហើយ សូមព្រះអង្គទ្រង់ព្រះតម្រាស់ទៅដល់ស្រុកសែឈួន ឲ្យ**ខុងបេង**លើកទាហានទៅវាយយកស្រុកឡុកអៀងចុះ ព្រះចៅ**ស៊ុនគួន**ក៏មានព្រះទ័យយល់ឃើញតាម ទើបត្រាស់តែងជាព្រះសុភអក្សរបវរមង្គលបញ្ជូនទៅដល់ស្រុកសែឈួនតាមពាក្យ**ឡុកស៊ុន**ទូលគ្រប់ប្រការ។ កាល**ចូហ៊ីវ**បរាជ័យចាញ់ដៃស្រុកកាំងតាំង បែកទ័ពដោយសត្រូវខ្លាំងរត់ទៅ គ្រានោះក៏សែនទោមនស្សតូចចិត្តគិតជាទុក្ខក្រំក្នុងទ្រូង តាំងពីពាក់កណ្តាលផ្លូវ លុះចូលទៅដល់ក្រុងឡុកអៀងវេលាណាក៏ចាប់ជំងឺទុរន់ទុរាធ្ងន់ចុះអស់ជីវិតទៅ។

ឯ**សុម៉ាអ៊ី**នោះ លុះលើកទ័ពត្រឡប់ទៅដល់ស្រុកឡុកអៀងហើយ ក៏ចូលទៅក្រាបបង្គំគាល់ព្រះចៅ**ចូយ៉យ** ជួបជុំខ្ញុំរាជការតូចធំនិយមនិយាយលើកទោស**សុម៉ាអ៊ី**ថា បើ**ចូហ៊ីវ**បែកទ័ពនឹងខ្មាំងសត្រូវដែលលើកទៅធ្វើការគ្រានេះក៏អស់នឹងថា តែ**សុម៉ាអ៊ី**ជាមេកងធំលើកតាមទៅជាក្រោយដោយឡែក ម្តេចក៏បែកលើកត្រឡប់ទាំងកងទ័ពមក ដូចជាគេដូច្នោះ ទាហានទាំងអស់ក៏មិនទាន់នឹងចូលច្បាំងផង តើទំនងជាកិច្ចកលយ៉ាងណា? **សុម៉ាអ៊ី**ឆ្លើយថា ដែលបានជាលើកទ័ពត្រឡប់មកគ្រានេះ ព្រោះគិតថាកងទ័ពបែកបាក់ទៅហើយ មិនលែងឡើយនឹងដឹងទៅដល់**ខុងបេង**ខាងស្រុកសែឈួន នឹងប្រធ្លួនលើកទ័ពមកវាយភ្ជាប់យកស្រុកទៀងអាន់ខាងនេះ បានជាវិលវេះមករវាំងភ័យឯក្រោយ មិនឲ្យកើតឡើងទាន់ អស់នាហ្មឺនទាំងនោះក៏នាំគ្នាចំអក

ឡូកថា **សុម៉ាអ៊ី**ខ្លាចស្លាប់រត់ពីគេដេញប្រផាប់មកមិនទាន់បាត់ហត់ នៅអួតតែមាត់ថាដូច្នេះដូច្នោះទៅវិញបាន ពួកនាហ្មឺនទាំងប៉ុន្មានក៏នាំគ្នាយកដៃបិទមាត់សើចឡើងព្រមគ្នា ហើយក៏លាទៅកាន់ទីលំនៅរៀងខ្លួន។

ឯព្រះចៅ**ឡៅសៀន**បានទទួលសុភអក្សរពីព្រះចៅ**ស៊ុនគួន**ឲ្យដល់ ទតយល់សេចក្តីថា វេលានេះ យើងចាត់ប្រើ**ឡុកស៊ុន**នាំកងទ័ពទៅកម្ចាត់ទាហាន**ចូយ៉យ**អស់សូន្យហើយ **ចូហ៊ីវ**ដែលជាសែជាមួយនឹង**ចូយ៉យ**ភ្លយស្លាប់ទៅ នៅឡើយតែ**សុម៉ាអ៊ី**ទាហានឯក តែក៏គង់បែករត់ទៅតាមគ្នា បណ្តាទាហានស្រុកឡុកអៀងទាំងអស់ ក៏ញញើតខ្លាចដៃស្រុកកាំងតាំងណាស់ ព្រះអង្គជាម្ចាស់ស្រុកសែឈ្វនមានចេស្តានុភាពប្រកបទាំងកិត្តិយសខ្ពស់ប្រសើរ ទាំងសេនាទាហានក៏មានថ្វីដៃពូកែគ្មានគេស្មើបាន គួរយើងទាំងពីរនិវេសនដ្ឋានតាំងជាផែនដីជាមួយគ្នា ដោយមេត្រី ឥឡូវទាហានក្នុងស្រុកឡុកអៀងក៏រៀវរោយកម្លាំងអស់ហើយ សុំឲ្យទ្រង់តាំងចាត់ការជាព្យុហៈសង្គ្រាមតាមសព្វព្រះរាជហឫទ័យ លើកទៅវាយលម្អិតយកស្រុកឡុកអៀង ក៏នឹងបានដោយងាយ។

ព្រះចៅ**ឡៅសៀន**ទ្រង់មានអំណរណាស់ ត្រាស់ឲ្យធ្វើព្រះបន្ទូលទៅដល់**ខុងបេង**ឯស្រុកហាន់តុង **ខុងបេង**បានទទួលយល់សេចក្តី ក៏រៀសរវៃកេណ្ឌពលទាហានបានព្រម នឹងលើកចេញទៅ។ ខណៈកាលប្រជុំកងទ័ពស្រាប់ស្រេច ក៏បង្កើតខ្យល់ព្យុះបក់បោកបាក់ដាច់មែកត្រង់មុខរោងប្រជុំមន្ត្រីធ្លាក់ចុះ ទាហានទាំងអស់ក៏ភ្ញាក់ផ្អើលជ្រួលច្របល់ **ខុងបេង**ក៏នឹកពិភាល់ខ្លាំងណាស់ តាំងចាប់យាមមើលដួងជតាឃើញច្បាស់ថា ទាហានឯកក្នុងរាជការនឹងស្លាប់ម្នាក់ជាប្រាកដ ទើប**ខុងបេង**ក៏កំណត់ប្រាប់ពន្យល់ពលសេនាបណ្តាដែលនៅជួបជុំក្នុងទីនោះថា ទាហានឯករបស់ម្ចាស់យើងម្នាក់ស្លាប់ហើយ ថាផុតតែពាក្យប៉ុណ្ណោះ មានមនុស្សចូលទៅជម្រាបថា **ទៀវកង, ទៀវហាង** ពីរនាក់បងនិងប្អូន ជាកូន**ទៀវជូឡុង**នឹងសុំចូលមកក្រាបប្រណិប័តន៍។

**ខុងបេង**ឮច្បាស់ក៏ឆ្លើយកាត់ថា **ទៀវជូឡុង**ស្លាប់មែនហើយ ម៉្លោះហើយក៏ក្រោកឡើងទន្ទ្រាំបាទា ហត្ថាក៏គ្រវែងបោះពែងស្រាទៅដី នោះ**ទៀវកង, ទៀវហាង**

ក៏ចូលទៅគំនាប់ប្រាប់សេចក្តីថា កាលពីយប់មិញប្រមាណយាមបី បិតាយើងខ្ញុំចាប់ជំងឺឈឺខ្យល់ដល់នូវកាលកិរិយាក្ស័យជីវិតទៅហើយ។ **ខុងបេង**ឮហើយក៏យំសោកស្រណោះ លុះដល់ដួលសន្លប់បាត់ស្មារតីភ្ញាក់ឡើងវិក៏និយាយថា ដែលបាត់**ទៀវជូឡុង**ម្នាក់ ដូចជាដាច់បាក់ព្រះបាទឆ្វេងព្រះចៅ**ឡៅសៀន** ព្រោះជានាយទាហានចម្បងក្នុងផែនដី បានធ្វើសង្គ្រាមជ័យមកច្រើនដំណអំពីព្រះវររាជបិតា នោះពួកពលយោធាក៏នាំគ្នាយំសោកាល័យ ដោយមេត្រីរឮកនឹក**ទៀវជូឡុង** ហើយ**ខុងបេង**ក៏តាំងចាត់បុត្រ**ជូឡុង**ឲ្យចូលទៅក្រុងសែឈ្មួន ក្រាបទូលព្រះចៅ**ឡៅសៀន**បានទ្រង់ជ្រាប។

ព្រះចៅ**ឡៅសៀន**បានជ្រាបថា **ទៀវជូឡុង**បានស្លាប់បង់កាលណា ព្រះឱរាក៏ខ្សឹកខ្សួលក្តួលចំបែង ទ្រង់ព្រះកន្សែងសោកា នឹកស្តាយលើសហួសឧបមានឹងរៀបរាប់ពុំបាន ទើបប្រោសព្រះរាជទានឲ្យរៀបចំសំក្ការសព ហែទៅកប់ទុកតាមទីសមគួរ ហើយត្រាស់បង្គាប់ឲ្យសង់ជាសាលទេព្រ័ក្ស ចារឹកទុកបូជាមាននៅនាទីនោះ លុះមកដល់សព្វថ្ងៃនេះ ឯបុត្រទាំងពីរក៏ទ្រង់តាំងឲ្យមានទីតំណែងជានាយទាហាន។

ខណៈនោះ **ខុងបេង**តាំងចាត់បម្រើឲ្យនាំសំបុត្រទៅក្រាបទូលព្រះចៅ**ឡៅសៀន** សេចក្តីថា ទូលព្រះបង្គំជាខ្ញុំ**ខុងបេង**នឹងសុំអាសាលើកពលយោធាទៅកម្រាបសត្រូវ ឲ្យបណ្តារាស្ត្របាននៅជាសុខក្សេមក្សាន ព្រោះបានទទួលបណ្តាំពីព្រះវររាជបិតា សូមព្រះអង្គទ្រង់ព្រះមេត្តាតាមក្រសែប្រពៃណី កុំបីជាទីទទឹងទាស់ព្រះអធ្យាស្រ័យ។ ព្រះចៅ**ឡៅសៀន**ក៏មានព្រះទ័យត្រេកអរសោមនស្សតបព្រះឱង្ការថា ឲ្យ**ខុងបេង**ប្រឹងធ្វើការទៅចុះ។ **ខុងបេង**ដឹងដូច្នោះក៏តាំង**អ៊ុយអៀន**ជាមេកងទ័ពមុខ ទើបលើកទ័ពចេញពីស្រុក៣០ម៉ឺន ទៅកាន់តំបន់តាន់ឆង។

ខណៈនោះមានទាហានសេះល្បាត នាំព័ត៌មានទៅប្រាប់**សុម៉ាអ៊ី**ឯទីក្រុងឡុកអៀងថា ឥឡូវកងទ័ពស្រុកសែឈ្មួនលើកប្រធ្មួនមកដល់តំបន់តាន់ឆងហើយ **សុម៉ាអ៊ី**ក៏នាំកិច្ចការនោះទៅក្រាបទូលព្រះចៅ**ចូយ៉យ** ៗក៏ប្រជុំមុខមន្ត្រីទាំងអស់មកប្រឹក្សា។ **ចូជិន**ទូលថា កាលពីដើមព្រះអង្គទ្រង់ប្រោសចាត់ឲ្យទូលព្រះបង្គំជាខ្ញុំទៅឈររក្សាខេត្តស្រុកឡុងសេ វេលានេះទូលព្រះបង្គំជាខ្ញុំក៏ខិតខំធ្វើការ តែនឹងអាសា

ឲ្យមានប្រយោជន៍គាប់ប្រសើរក្នុងរាជការពុំទាន់បាន មានតែល្មើសខុសជាទោសច្រើនគ្រា ទូលព្រះបង្គំជាខ្ញុំក៏ពុំទាន់បានធ្វើការកែខ្លួន គ្រានេះមានសត្រូវលើកទ័ពមកគុំគួនប្រមាថ ទូលព្រះបង្គំជាខ្ញុំសូមក្រាបលាល្អងធូលីព្រះបាទ នាំទាហានចេញទៅអាសាយកឲ្យបានជ័យជម្នះ ហើយសុំយកខ្លួន**អងសុង**នៅជួយធ្វើការផង ព្រោះ**អងសុង**នោះជាមនុស្សមានថ្វីដៃខ្លាំងពូកែកាន់សំសែទម្ងន់៦០ជញ្ជីង លាក់កូនឃ្នុបដែកក្នុងលង្វែកអាវនាំយកទៅបានបីគ្រាប់ធំៗ ចោលសត្រូវត្រូវចំមិនដែលខុស។

ព្រះចៅ**ចូយ៉យ**មានព្រះទ័យសោមនស្សត្រេកអរពន់ប្រមាណ ត្រាស់ឲ្យហៅខ្លួន**អងសុង**ចូលមកគាល់កណ្ដាលទីជំនុំ ទតព្រះនេត្រឃើញ**អងសុង**មានរូបធំមាំកម្ពស់៦ហត្ថ មុខខ្មៅ ភ្នែកក្រហម និយាយឮក្រាំងក្រឌី កិរិយាឫកពារមានអាការៈវាងវៃបីដូចខ្លា ទ្រង់ទតឃើញប្លែកអស្ចារ្យ ក៏ទះព្រះហត្ថាទ្រង់ព្រះសម្រួលហើយត្រាស់ថា យើងមានទាហានខ្លាំងពូកែដូច្នេះនឹងខ្លាចអ្វីថ្វីដៃ**ខុងបេង**នោះ! ទើបទ្រង់ព្រះរាជទានក្រើសមាស និងអាវព្រៃជារង្វាន់ ហើយក៏តាំង**អងសុង**ជាមេកងទ័ពមុខ **ចូជិន** ៗក្រាបថ្វាយបង្គំលា ហើយក៏ចេញមីម្នាទៅរៀបប្រជុំពលទាហាន ទើបចាត់ឲ្យ**ទៀវខាប់**ជាប្រធានគូគ្នានឹង**កោឈុយ** ឲ្យទៅប្រចាំគយ ឯ**ចូជិន**ក៏នាំពលដប់ប្រាំម៉ឺនចេញពីទីក្រុង ឲ្យ**អងសុង**ជាមេកងទ័ពមុខលើកចេញទៅតាមកំណត់។

ខណៈនោះកងទ័ពមុខ**ខុងបេង**លើកតម្រង់មកជិតទីតាន់ឆងហើយ ក៏ទៅជម្រាបប្ដឹង**ខុងបេង**ថា ដ្បិតតំបន់តាន់ឆងនេះ មានបន្ទាយវាយស្កាត់ពីមុខ រៀបជាកំពែងតាមមាត់ផ្លូវ ហើយមានលើកខឿនជីកគូព័ទ្ធជុំកំពែងវែងល្វឹងល្វើយជាទីមាំមួនណាស់ ឈ្មោះ**ហោកជៀវ**ជាមេទាហានមករក្សាទីនោះ ដែលនឹងលើកទម្លុះពុះពារទៅមិនបាន សូមឲ្យលោកគិតអានលះបង់ចោលទីតាន់ឆងចេញ លើកវាងទៅផ្លូវបំបែរឆៀងខាងនោះវិញ ត្រូវទៅលើភ្នំគីសាន់ទើបបានស្រួល។

**ខុងបេង**ថា ឯតំបន់តាន់ឆងមានទំនងជាទីសំខាន់ធំទូលាយរហូតទៅដល់បន្ទាយកេតេងក៏ដូចគ្នា បើប្រសិនណាយើងយកទីតាន់ឆងបាន ក៏មានលំអានដើរស្រួលចូលទៅវាយយកស្រុកឡុកអៀងដោយងាយណាស់ ដែលនឹងលើកលះវាងទៅផ្លូវបំបែរឆៀងមិនស្រួលសោះ។ វេលានោះ**ខុងបេង**ក៏ចាត់**អ៊ុយអៀន**ឲ្យលើកពល

ទាហានឡោមព័ទ្ធបន្ទាយតាន់ឆងទុកឲ្យខ្ជាប់នៅ **អ៊ុយអៀន**ក៏បង្គាប់ទាហានឲ្យពានទម្លាយបន្ទាយតាន់ឆងវំលងមកដល់ប្អូនប្រាំថ្ងៃ ក៏វាយទម្លាយពុំបាន គ្រាន់តែដាក់ទាហានឲ្យព័ទ្ធទុក ហើយ**អ៊ុយអៀន**ក៏ងាកមុខទៅជម្រាប**ខុងបេង**តាមការ **ខុងបេង**ខឹងណាស់ថា ខ្លួនជាមេកងទ័ពមុខ ត្រូវតែលុកទម្លាយបន្ទាយនេះឲ្យបាន នឹងអាលទន្ទ្រានទៅវាយយកស្រុកឡុកអៀងទៀត ហេតុអ្វីត្រឹមតែតំបន់តាន់ឆងដំណូចប៉ុណ្ណោះក៏រកតម្រិះវាយឲ្យបែកពុំបាន? ខ្លួននឹងមានកម្លាំងធ្វើការធំទៅមុខទៀតកើតឬ? ទើបប្រើទាហានឲ្យចាប់ខ្លួន**អ៊ុយអៀន**យកទៅសម្លាប់។

**គឹមសៀន**និយាយនឹង**ខុងបេង**ថា តាំងពីខ្ញុំបាទចូលមកនៅធ្វើរាជការ ជាខ្ញុំលោកក៏យូរអង្វែងហើយ នៅឡើយមិនទាន់បានធ្វើសេចក្តីគាប់ប្រសើរតបព្រះតេជព្រះគុណសោះ គ្រានេះខ្ញុំបាទចង់សុំអាសាចូលទៅនិយាយបញ្ចុះបញ្ចូល**ហេកជៀវ**ឲ្យមកចំណុះចុះចូលលោកឲ្យបាន ដែលលោកឲ្យសម្លាប់**អ៊ុយអៀន**ចេញនោះ ខ្ញុំបាទសូមទោសទុកសិន។ **ខុងបេង**ថា ដែលអ្នកមានភក្តីស្រឡាញ់ដល់យើងនោះ យើងក៏គាប់ចិត្តណាស់ហើយ តែដែលអ្នកឆ្លើយទទួលថា នឹងទៅបញ្ចុះបញ្ចូល**ហេកជៀវ**ឲ្យមកចំណុះចុះចូលយើងនោះ តើអ្នកប្រុងនឹងទៅនិយាយយ៉ាងម៉េច? **គឹមសៀន**ថា ឯ**ហេកជៀវ**និងខ្ញុំបាទនេះជាមនុស្សវិស្សាសៈ ទំនុកទុកចិត្តមិត្តសម្លាញ់តាំងពីតូចខ្ញុំបាទនឹងទៅទទួចនិយាយគង់នឹងព្រម។ **ខុងបេង**ថា បើអ្នកចង់អាសាទៅនិយាយការបាន សម្រេចគ្រានេះ អ្នកនឹងមានកេរ្តិ៍ឈ្មោះគាប់ប្រសើរច្រើនណាស់។ **គឹមសៀន**ក៏គំនាប់លាចេញរូតរះទៅដល់មុខបន្ទាយ**ហេកជៀវ** ហើយស្រែកប្រាប់ថាយើងឈ្មោះ**គឹមសៀ**ជាមិត្តសម្លាញ់គ្នានឹង**ហេកជៀវ** នឹករឭកដល់គ្នាជាខ្លាំងទើបតាំងចិត្តគិតមកសួរដោយមេត្រី ចូរឲ្យបើកទ្វារឆាប់ខ្មីឲ្យយើងចូលទៅផង។ នោះទាហានចាំទ្វារក៏ចូលទៅជម្រាបប**ហេកជៀវ**តាមទំនងគ្រប់ប្រការ។ **ហេកជៀវ**ក៏ឲ្យបើកទ្វារទទួលចូលទៅក្នុងបន្ទាយ អ្នកទាំងពីរក៏រួសរាយស្រាកស្រួលទទួលគំនាប់គ្នាទើប**ហេកជៀវ**ដណ្តឹងសួរថា អ្នកមានការមករកយើងជាយ៉ាងម្តេច? **គឹមសៀន**ឆ្លើយថា វេលានេះ ខ្លួនខ្ញុំបានចូលទៅធ្វើរាជការនឹងព្រះចៅ**ឡៅសៀន**ហើយ **ខុងបេង**

ដឹងថាអ្នកនឹងខ្ញុំជាមិត្តសម្លាញ់គ្នាមកពីដើម ទើបប្រើខ្ញុំឲ្យនាំព័ត៌មានមកជម្រាបអ្នក ជាការល្អ បើអ្នកមានមេត្រីស្មោះសរ ខ្ញុំនឹងសន្ទនាផង។

**ហេកជៀវ**បានឮក៏ដឹងទំនងច្បាស់ នឹកខឹងណាស់ចង្អុលមុខហើយថា អ្នកឯងទៅនៅខ្ញុំព្រះចៅ**ឡៅសៀន**ខាងនោះ ខ្ញុំខាងនេះ ក៏ជាខ្ញុំព្រះចៅ**ចូយ៉យ**ដូចគ្នា ឯធម្មតាជាខ្ញុំរាជការហើយ ក៏រមែងបានទទួលបៀវត្សប្រាកដពីម្ចាស់ផែនដីព្រះរាជទានឲ្យ ឥឡូវព្រះចៅ**ឡៅសៀន** និងព្រះចៅ**ចូយ៉យ**ជាបច្ចាមិត្តនឹងគ្នា អ្នកឯងនិងខ្ញុំក៏ជាខ្ញុំរាជការ មានចិត្តឈឺក្ដៅទៅតាមម្ចាស់ប្រុងតែងតាំងឲ្យបានចាញ់ឈ្នះតាមកម្លាំងរៀងខ្លួន ដែលអ្នកឯងនឹងមកគួនចង់និយាយដោយពាក្យល្អវិញ ក៏មិនពេញមាត់ទេ ឲ្យវិលទៅវិញចុះ ថាតែប៉ុណ្ណោះហើយ **ហេកជៀវ**ក៏ក្រោកក្រេះស្ទុះទៅឡើងលើសើន ពួកទាហានក៏បណ្ដេញ**គីមសៀន**ចេញពីទីនោះ។

**គីមសៀន**ក៏មានសេចក្ដីអប្បយសខ្មាសអៀនពន់ប្រមាណ ឡើងជិះសេះបរបំពានចេញទៅក្រៅបន្ទាយ ក្រឡេកមើលពីចម្ងាយទៅឃើញ**ហេកជៀវ**នៅលើសើនឈរវេរា **គីមសៀន**ក៏ស្រែកថា យើ! ប្អូនឯងនេះ ភ្លេចមេត្រីរាប់អាននឹងបងពីដើមអស់ហើយឬ បានជាចេញពាក្យសម្ដីមិនមានសេចក្ដីគួរបន្តិចសោះ? **ហេកជៀវ**ក៏ស្រែកទ្រគោះតបថា ប្រវេណីបុរាណលោករាប់អានស្នងឆ្លងព្រះតេជព្រះគុណដរាបទាល់អស់ជីវិត ទើបពិតពេញជាប្រុស អ្នកឯងជាមិត្តទ្រុស្តមិនត្រូវមកនិយាយចែៗឡើយ យើងនឹងប្រាប់ឲ្យហើយ ត្រូវទៅប្រាប់**ខុងបេង**ឲ្យប្រឹងលើកមកច្បាំងនឹងយើងឲ្យឆាប់ចុះ បើមិនទៅប្រាប់ខាងនោះឲ្យឆាប់ យើងនឹងឲ្យទាហានបាញ់ធ្នូឲ្យស្លាប់ឥឡូវនេះ។ **គីមសៀន**ក៏បរសេះចេញទៅដល់បន្ទាយ ហើយអធិប្បាយជម្រាបប្ដឹងឲ្យ**ខុងបេង**ស្ដាប់គ្រប់ប្រការ។

**ខុងបេង**ដឹងដូច្នោះ ក៏ខឹងខ្លាំងណាស់ថា **ហេកជៀវ**នោះវានឹងពូកែប៉ុន្មាន? ម្ដេចក៏ហ៊ាននិយាយកោងមើលងាយដល់ម្ល៉េះ? មែះ! អាដែងនេះ យើងលេងវាឲ្យឃើញថ្វីដៃម្ដង។ ទើប**ខុងបេង**ឲ្យហៅអ្នកស្រុកផងមកសួរថា ដែល**ហេកជៀវ**មកឈររក្សាទីតាន់ឆងនេះ តើវាមានពលទាហានប្រហែលប៉ុន្មាននាក់? អ្នកស្រុកឆ្លើយថា មានប្រហែលបីពាន់។ **ខុងបេង**ឮដូច្នោះក៏អស់សំណើចហើយថា **ហេកជៀវ**មាន

ទាហានប៉ុណ្ណេះទេតើ នឹងតស៊ូយើងម្ដេចបាន។ ទើបបង្គាប់ទាហានឲ្យធ្វើជើងជណ្ដើរ និងវេញពួរឡើងទៅពាក់លើសន្ទឹកសីមា ស្រាវគ្នាឡើងទៅលើសើនបន្ទាយ ឯគ្រឿងសាស្ត្រាវុធទាំងឡាយក៏ប្រុងប្រៀបជាស្រេច។

លុះវេលាព្រឹក **ខុងបេង**ក៏បរពលចូលកាច់យកបន្ទាយតាន់ឆង **ហេកជៀវ** ឃើញទាហាន**ខុងបេង**ពាក់បង្អោងជើងជណ្ដើរកំពែងដូច្នោះ ក៏ឲ្យទាហានយកភ្លើងដុតជម្រុះទម្លាក់ជើងជណ្ដើរនោះចេញ ហើយឲ្យទាហានបាញ់ធ្នូចម្រុះចុះមកទៀត ត្រូវទាហាន**ខុងបេង**ស្លាប់ជាច្រើន ពានឡើងពុំបានថយត្រឡប់ទៅវិញ **ខុងបេង**ខឹងណាស់ មានមានះគិតថា ដែលយើងធ្វើឲ្យខូចខាតទាហានច្រើនម្ល៉េះ ក៏ព្រោះស្រាលរហ័ស ទើបក្រឡាស់ឲ្យចាញ់ប្រៀបគេ ត្រូវតែគិតគ្នេរវាយបន្ទាយនេះឲ្យបាន ទើបបង្គាប់ឲ្យទាហានធ្វើខែលសម្រាប់លើកវាំងខាំងព្រួញធ្នូឲ្យបានគ្រប់ៗគ្នា។

លុះវេលាព្រឹក ទើបបរពលចូលកាច់បន្ទាយម្ដងទៀត **ហេកជៀវ**ឃើញទាហាន**ខុងបេង**ធ្វើខែលបាំងខ្លួនដូច្នោះ នឹងបាញ់ចម្រុះព្រួញពុំបាន ក៏ឲ្យទាហានជញ្ជូនដុំថ្មមកចោលទម្លាក់ចុះទៅ ទាហាន**ខុងបេង**នឹងយកខែលទប់ពុំឈ្នះ ថ្មក៏ធ្លាក់ប៉ះរបួសពិការជាច្រើន នឹងខំដណ្ដើមយកថ្មពីសើនក៏ពុំបាន ទាហានខាងក្នុងចេះតែរើទម្លាក់ចុះមក **ខុងបេង**ឃើញពលចូលដណ្ដើមយកជ័យជម្នះពុំបាន ក៏ឲ្យពួកទាហានថយក្រោយ។

លុះកណ្ដាលយប់ ទើបឲ្យ**លៀវហ្វ៊ូ**នាំពលបីពាន់ជីកឧម្មង្គទម្លាយចុះទៅក្នុងបន្ទាយ **ហេកជៀវ**ដឹងឧបាយក៏ឲ្យទាហានជីកស្ទាក់មិនឲ្យធ្លុះឡើងបាន។ **ខុងបេង**តាំងតែប្រើទាហានចូលធ្វើការតតាំងច្បាំងនៅតំបន់នេះអស់រវាងម្ភៃថ្ងៃ ទ័ពទាំងសងខាងក៏មិនបានចាញ់ឈ្នះ ស្លាប់អស់រេហ៍ពលច្រើនណាស់ណា **ខុងបេង**ក៏មានចិត្តវិតក្កវិចារជាខ្លាំង។

ខណៈនោះ មានមនុស្សល្បាតចូលទៅជម្រាប**ខុងបេង**ថា បានឃើញកងទ័ពមួយក្រុមលើកចំមកពីទិសឯកើត មានចារឹកអក្សរនៅទង់ឈ្មោះ “**អងសុង**” **ខុងបេង**ដឹងដូច្នោះក៏ពិគ្រោះសួរថា នរណានឹងទទួលអាសាចេញទៅទល់ទ័ព**អងសុង**គ្រានេះបាន? **ជៀយ៉ុង**ទាហានរងឆ្លើយថា ខ្ញុំបាទនឹងសុំអាសាចេញទៅឯង។ **ខុងបេង**

មានអំណរណាស់ ទើបប្រគល់ទាហានបីពាន់ឲ្យ**ជៀយ៉ុង** ៗក៏លើកតម្រង់ចេញទៅ ក្រោយនោះទើបចាត់**ចុងឃី**ឲ្យលើកពលបីពាន់ជាជំនួយតាមទៀត វេលានោះ **ខុងបេង**ឲ្យថយទ័ពហ្លួងចុះទៅតាំងនៅចុងផ្លូវប្រហែលពីររយសិន (៨ គ.ម)។

ឯ**ជៀយ៉ុង**លើកពលទៅដល់កណ្ដាលផ្លូវ ប្រទះទល់ទ័ព**អងសុង**ក៏តាំងតែ ចូលប្រយុទ្ធគ្នា **ជៀយ៉ុង**តាំងទល់កម្លាំងនឹង**អងសុង**បានបីភ្លែង **អងសុង**ក៏ចាក់ នឹងលំពែងត្រូវ**ជៀយ៉ុង**ធ្លាក់ពីលើសេះស្លាប់ ពលក៏បាក់ទ័ពរត់បែកខ្ញែកគ្នា **អងសុង** បានការក៏រលើកដេញកាប់សម្លាប់ពលរេហ៍ស្លាប់ច្រើនណាស់ ទទួលប្រទះនឹងកង ទ័ព**ចុងឃី**លើកចូលមកតយុទ្ធគ្នា **ចុងឃី**បរសេះបំពារចូលទៅតនឹង**អងសុង**បានបី ភ្លែង **អងសុង**កាប់នឹងដាវវែងត្រូវ**ចុងឃី**ដាច់ពាក់កណ្ដាលខ្លួនធ្លាក់ពីលើសេះ ទាហាន ក៏បាក់បែករត់វេះគេចទៅក្រោយ ហើយចូលទៅជម្រាប**ខុងបេង**តាមដំណឹង ការ ដែលបានធ្វើគ្រប់ប្រការ។

**ខុងបេង**ក៏តាំងតែភ័យណាស់ ទើបចាត់**លៀវហ្វា, អងប៉េង** និង**ទៀវងី**ឲ្យ លើកពលទៅទល់ទ័ព**អងសុង**ម្ដងទៀត លុះនាយកងទាំងបីលើកទៅទល់ទ័ពគ្នា ក៏ ឲ្យពលយោធាតាំងបន្ទាយរាយទ័ពខ្ជាប់ខ្ជួន **ទៀវងី**ក៏សុំខ្លួនចេញទៅតនឹង**អងសុង**បាន ម្ភៃភ្លែង មិនទាន់ចាញ់ឈ្នះ **អងសុង**ធ្វើជាក្រឡាសញ្ចាក់សេះរត់ទៅក្រោយ **ទៀវងី**ក៏ ដេញបណ្ដោយបន្តិចទៅ **លៀវហ្វា**ឃើញដូច្នោះ ក៏ស្រែកហៅឲ្យ**ទៀវងី**វាថយទៅ វិញ **អងសុង**ក៏ចោលនឹងគ្រាប់ឃ្លុបដែកទៅត្រូវដើមទ្រូវ**ទៀវងី** ៗក៏ភ្លាត់ធ្លាក់ពីលើ សេះ **អងសុង**ស្ទុះដេញប្រឆេះទៀបនឹងដល់ ទទួល**លៀវហ្វា, អងប៉េង**ស្ទុះរាំងការ នឹង**អងសុង** ហើយប្រឆាំងដណ្ដើមយកខ្លួន**ទៀវងី**ចូលទៅក្នុងបន្ទាយបាន។ ពល ទាហាន**អងសុង**ក៏ដេញបំពារវាយទម្លាយយកបន្ទាយ**លៀវហ្វា, អងប៉េង** បែកហើយ ដែកចូលកាប់សម្លាប់កងទ័ពច្រើនណាស់។ **លៀវហ្វា, អងប៉េង**និង**ទៀវងី**ក៏នាំគ្នារត់ នាំទាហានទៅរក**ខុងបេង** ហើយអធិប្បាយថា កម្លាំង**អងសុង**នោះខ្លាំងពូកែណាស់ នឹងតទល់ប៉ះពារពុំបាន សុំឲ្យលោកឈប់បង្អង់ឲ្យទាហានមានកម្លាំងក្នុងទីនេះសិន កុំអាលលើកសង្កិនចូលទៅទៀត វេលានេះ**ទៀវងី**ចេះតែក្អកធ្លាក់ឈាមចេញមកជា ច្រើនគ្រា។

**ខុងបេង**ទើបឲ្យហៅ**កៀងអ៊ុយ**ចូលមកប្រឹក្សាថា **ជៀយ៉ុង** និង**ចុងឃើ**ធ្វើកាលកិរិយាក្ស័យជីវិតអស់ទៅហើយ នៅឡើយតែ**ទៀវងី**ដែលចាញ់ទ័ពរត់ត្រឡប់ចូលមក ក៏ឈឺគ្រាក្ដួតធ្លាក់ឈាមជាខ្លាំង ឃើញថាវេលានេះសត្រូវក៏មានកម្លាំងខ្លាំងពូកែណាស់ នឹងរូតរះទម្លាយបន្ទាយតាន់ឆងក៏ឃើញទំនងជាពិបាក តើយើងនឹងគិតរកឧបាយយ៉ាងណា សុំតម្រិះប្រាជ្ញាអ្នកជួយគិតផងចុះ។ **កៀងអ៊ុយ**ឆ្លើយថា ឯតំបន់តាន់ឆងនេះជាទីច្រកចង្អៀតពេកណាស់ បើនឹងខំរូតរះក៏ទៅពុំបាន ព្រោះ**ហេកជៀវ**ជាអ្នកមានសតិបញ្ញា ទាំងថ្វីដៃក៏ក្លៀវក្លាខ្លាំងពូកែថែរក្សាជាមាំមួនណាស់ នឹងប៉ះពារទម្លាយមិនបាន សុំឲ្យលោកចាត់ទាហានដែលមានថ្វីដៃ លើកពលទៅតាំងបន្ទាយស្ទាក់ផ្លូវនៅតំបន់កេតេងទុកឲ្យមាំមួនចុះ ឯទីនេះត្រូវទុកទាហានមួយកង យើងត្រូវលើកទ័ពលបទៅដណ្ដើមយកតំបន់គីសាន់ កុំឲ្យបានដឹងដល់សត្រូវ ខ្ញុំបាទនឹងទៅធ្វើឧបាយកលចាប់យកខ្លួន**ចូជិន**ឲ្យបាន។

**ខុងបេង**យល់ឃើញត្រូវ ទើបតម្រូវឲ្យ**អងប៉េង** និង**លីអ៊ិន**នាំពលស្រូតកាត់ទៅតាមផ្លូវតូច ឲ្យរក្សាតំបន់កេតេងទុក ហើយឲ្យ**អ៊ុយអៀន**នៅរក្សាតំបន់តាន់ឆង ឲ្យ**ម៉ាតាយ**ជាមេកងទ័ពមុខ ឲ្យ**គួនហ៊ិន** និង**តៀវប៉ៅ**នៅកងក្រោយ ហើយលបលើកទ័ពទៅតាមផ្លូវចាំកុកចេញទៅតំបន់គីសាន់ **កៀងអ៊ុយ**ក៏តែងសំបុត្រសម្ងាត់មួយច្បាប់ ឲ្យបម្រើកាន់ទៅឲ្យ**ចូជិន**។

ឯ**ចូជិន**នោះ បានលើកទ័ពទៅតាំងបន្ទាយនៅមាត់គយស្រុកឡុកអៀង លុះប្រគល់ទាហានឲ្យ**អងសុង**លើកទៅជួយ**ហេកជៀវ**កាលណា ក៏បានដំណឹងជើងសាថា **អងសុង**មានជ័យជម្នះ នោះ**ចូជិន**មានអំណរណាស់ ចាត់ទាហានឲ្យមានគយល្បាតប្រយ័ត្នការជាមាំមួន ទាហានល្បាតក៏បាននាំដំណឹងដែលចាប់បានបម្រើនាំសំបុត្រ**កៀងអ៊ុយ**ជាសម្ងាត់នោះ ទៅប្ដឹង**ចូជិន** ៗក៏សាកសួរថា ឯងមកពីណា? បម្រើនេះឆ្លើយថា ខ្ញុំបាទនេះនឹងបានជាទាហានល្បាតចូលមកស៊ើបយកការណ៍អ្វីក៏ទេ គឺ**កៀងអ៊ុយ**គិតដល់គុណលោកណាស់ ប្រើខ្ញុំបាទឲ្យរូតរះនាំសំបុត្រមកជូនលោកជាការអាថ៌កំបាំង តែថាមានទាហាននៅច្រើននឹងជូនសំបុត្រទៅលោកក្រែងបែកការ។ **ចូជិន**មិនបានដឹងប្រាជ្ញា ក៏ដេញទាហានឲ្យចេញទៅក្រៅ បម្រើនោះក៏

លូកយកសំបុត្រពីក្នុងហោប៉ៅអាវហុចទៅឲ្យ**ចូជិន** ៗទទួលហែកស្រោមមើល ឃើញសេចក្តីថា ខ្ញុំបាទ**កៀងអ៊ុយ**ជាអ្នកមានទោស សូមគំនាប់មកដល់**តុកុក**ជាធំ បានជ្រាប ព្រោះពីដើមខ្ញុំបាទនឹងគិតជាមិត្តទ្រុស្តចុះជាក្បត់នឹងលោកក៏ទេ តែថា ជាហេតុអកុសលឲ្យខ្ញុំបាទចាញ់កល**ខុងបេង** ទើបប្រឹងទ្រាំនៅជាខ្ញុំឲ្យគេប្រើ ដោយ ចាំចិត្តគិតនឹងចង់ត្រឡប់មកស្រុកទេសរបស់ខ្លួន ក៏មិនមានចន្លោះឱកាសនឹងភៀស មិនផុត វេលានេះ**ខុងបេង**ក៏មានចិត្តអាណិតអាសូរណាស់ដែរ តែថានឹងយកគុណ ប្រយោជន៍ថ្មី មកបំភ័យបំភ្លេចគុណមិនស្មើទម្ងន់នាយចៅហ្វាយចាស់បានឡើយ ម្ល៉ោះហើយ ខ្ញុំបាទក៏រឹតតែទន្ទឹងទន្ទេញម្ទេញចិត្ត គិតនឹងមករកប្រយោជន៍តបស្នង សងគុណលោកឲ្យបាន ទោះបីនឹងក្ស័យបង់ប្រាណខានទៅឃើញស្រុកភូមិក៏តាម វាសនា នៅតាំងចិត្តថានឹងតបស្នងសងគុណវេលានេះឲ្យបានសិន ហេតុនេះបើ លោកនឹងលើកទ័ពមកកាច់កិនលម្អិត**ខុងបេង** សូមកុំឲ្យលោកប្រឹងឲ្យពេញដៃឡើយ បើបានតតាំងច្បាំងគ្នាហើយ ត្រូវក្លែងធ្វើជារាថយទ័ពត្រឡប់ក្រោយ ឲ្យទ័ពស្រុក សែឈ្នួនបានលើកបណ្តោយដេញតាមចុះ សឹមខ្ញុំបាទនៅខាងក្នុងឯណោះ នឹងដុត ភ្លើងជាសញ្ញា ដើម្បីឲ្យវិនាសស្បៀងអាហារទាំងអស់ បើលោកឃើញពលខាងនេះ ជ្រួលច្របល់កាលណា ត្រូវឲ្យវិលសាចូលតច្បាំងប្រឹងឲ្យពេញដៃ មុខជាលោកនឹង មានជ័យចាប់ខ្លួន**ខុងបេង**បានដោយងាយ។

**ចូជិន**មើលសំបុត្រចប់ ក៏សម្គាល់សព្វជាការពិតឥតសង្ស័យ មានសេចក្តីអរ ណាស់ស្រដីថា ប្រហែលជាទេពតានឹងមកជួយពិភ័ក្តិរក្សាយើង ឲ្យបានសេចក្តីគាប់ ប្រសើរគ្រានេះហើយ ទើបបណ្តាលឲ្យមានអ្នកគិតគំនិតដូច្នេះ ហើយក៏ឲ្យបំណាច់ រង្វាន់អ្នកកាន់សំបុត្រនោះ រួចប្រាប់ថា អ្នកឯងចូរវិលត្រឡប់ទៅប្រាប់ចៅហ្វាយ អ្នកឯងចុះថា បើយើងធ្វើការនេះបានសម្រេចប្រយោជន៍កាលណា ទើបប្រើដើងសា នាំដំណឹងទៅឲ្យដឹង។ បម្រើកាន់សំបុត្រក៏គំនាប់លាម្នីម្នាទៅប្រាប់ដល់**កៀងអ៊ុយ**។

ឯ**ចូជិន**នោះ លុះបម្រើទៅហើយក៏ឲ្យប្រជុំនាយទ័ពនាយកងទាំងពួងចូលទៅ ប្រឹក្សាថា ដ្បិត**កៀងអ៊ុយ**ឲ្យសំបុត្រដើងសាមកនិយាយដូច្នេះ តើអស់អ្នកទាំងឡាយ នឹងស្រាយយល់ថាម្តេច? **ពីអៀវ**ឆ្លើយថា ឯ**ខុងបេង**នោះចំពោះជាអ្នកមានប្រាជ្ញា

បំផុតមនុស្ស ក្រែងឧបាយញុះឲ្យ**កៀងអ៊ុយ**ក្លែងកលមកទេ នឹងជឿស្ដាប់តាមគេថាដូច្នោះម្ដេចបាន ឯ**កៀងអ៊ុយ**សោតក៏មានសេចក្ដីទុរយសប្រែចិត្តក្បត់រត់ពីយើងទៅចូលខាងគេជាយូរហើយ កាលណាឡើយវានឹងត្រឡប់មកប្រសព្វគប់នឹងយើងវិញដោយស្មោះ លោកយល់ដូច្នោះក៏ខុសទេ។

**ចូជិន**ថា ធម្មតាមនុស្សជាមិត្តទ្រុស្តដូច**កៀងអ៊ុយ**ទៅនៅនឹង**ខុងបេង** ក៏គង់ដឹងគុណឧបការពីដើមខ្លះដែរ ជួនប្រែចិត្តគិតឃើញម្ដងៗ ដែលកន្លងបែកទៅនោះសោត ក៏មិនមែនទៅដោយសុចរិត គង់ចាំចិត្តគិតស្រុកទេសរបស់ខ្លួននឹងចង់វិលត្រឡប់គ្រប់យប់ថ្ងៃ ជាវិស័យមនុស្សដូច្នោះឯង ប្រហែលមិនស្រឡាញ់ទឹកន្លែងស្រុកសៃឈ្នួនទេ បានជាវិះរេផ្ញើដំណឹងមកយើងដូច្នេះ អ្នកកុំត្រិះរិះសន្និះសង្ស័យឡើយ ឯ**កៀងអ៊ុយ**នោះហើយមិនប៉ានបញ្ឆោតយើងទេ។

**ពីអៀវ**ថា ដែលលោកនឹងជឿស្ដាប់ពាក្យនោះក៏តាមចិត្តលោកចុះ តែថាខ្លួនលោកនោះចូរនៅរក្សាបន្ទាយកុំឲ្យអញ្ជើញទៅឡើយ ភ្នាក់ងារខ្ញុំបាទហើយនឹងលើកទ័ពទៅធ្វើតាមពាក្យ**កៀងអ៊ុយ**ឲ្យបាន បើប្រសិនជា**កៀងអ៊ុយ**ទៀងត្រង់ពិតគ្រប់សណ្ឋានគង់មានកេរ្តិ៍ឈ្មោះខ្ពស់ថ្កើងដល់ថ្វីដៃលោកតែឯង បើប្រសិនជាប្រើកលឧបាយក្លែងយ៉ាងណា ក៏ទុកជាភ្នាក់ងារលើខ្លួនខ្ញុំបាទស្រាប់ ខ្ញុំបាទនឹងតស៊ូឲ្យត្រាតែស្លាប់មិនស្ដាយជីវិត សុំឲ្យតែលោកនៅគិតធ្វើរាជការតទៅ។

**ចូជិន**មានអំណរណាស់ ទើបរួតរះប្រមូលពលទាហានឲ្យ**ពីអៀវ**ប្រាំម៉ឺន **ពីអៀវ**ក៏លាលើកទាហានចេញទៅចម្ងាយផ្លូវប្រហែលពីរថ្ងៃ ទើបទៅឈប់បង្អង់កងទ័ព បម្រើល្បាតចូលមកប្រាប់ថា ឃើញកងទ័ពស្រុកសៃឈ្នួនលើកមកបោះនៅតំបន់ចាំកុកជាច្រើនបន្ទាយណាស់ **ពីអៀវ**ឮច្បាស់ក៏លើកទ័ពស្រូតរូតចូលទៅ លុះដល់តំបន់ចាំកុក ទាហានស្រុកសៃឈ្នួនក៏លើកចេញមកតដូចជានឹងចូលច្បាំង **ពីអៀវ**ក៏លើកប្រឆាំងចូលប្រយុទ្ធគ្នា កងទ័ពស្រុកសៃឈ្នួនក៏គំរាមលើកត្រឡប់មកទប់តដៃគ្នា **ពីអៀវ**ក៏ឲ្យរាសំរុកចូលទៅ កងទ័ពស្រុកសៃឈ្នួនក៏ថយសំដៅទៅក្រោយទៀត តែត្រឹមបញ្ឆោតឲ្យទ័ព**ពីអៀវ**ដេញទៅដេញមក ដោយកលស្ទៀតយ៉ាងនេះតាំងពីព្រមឹមទាល់ព្រលប់ ក្នុងយប់នោះទាល់ភ្លឺ **ពីអៀវ**ក៏ឲ្យទាហានឈប់ដាំបាយ តែនៅ

បារម្ភក្រែងសត្រូវទម្លាយចូលមក នឹងលៃលកឲ្យឈប់ក៏ពុំបាន ទើបដេញទាហានឲ្យចូលសង្គ្រុញទៅតគ្នាទាល់តែទាហានទាំងអស់នោះអស់កម្លាំងណាស់ ឯនាយទ័ពនាយកងស្រុកសៃឈ្នូន ដែលពួនបង្កប់ឃើញកងទ័ពខាងខ្លួនបានចំណាប់ ក៏ចេញប្រញាប់ហ៊ោព័ទ្ធចេញពីមុខពីក្រោយមកជុំខ្លួន**ពីអៀវ**។

**ខុងបេង**ក៏តែងខ្លួនយ៉ាងស្អាតបាត កាន់ផ្ដិតចេញរនះរនាតដោយរទេះតូចនាំទាហានទៅពីមុខហើយស្រែកថា ឲ្យចៅហ្វាយឯងចេញមុខមកនិយាយគ្នា **ពីអៀវ**ឮដូច្នោះក៏ស្រែកតបមកថា វើយគ្នាយើង! បើឯងឃើញពួកខ្មាំងនឹងដេញមចូលមកចូរឲ្យថយមកក្រោយចុះ ព្រោះកងទ័ពយើងបានលើកគេចទៅពីក្រោយបន្ទាយមួយកងហើយ បើឃើញពន្លឺភ្លើងឆេះឡើងកាលណា ចូរនាំគ្នាស្ទុះសម្រុកទៅមុខចុះ។

**ខុងបេង**ឃើញ**ពីអៀវ**ជិះសេះដើរចេញមកមុខទាហានទាំងអស់ដូច្នោះ ក៏ស្រែកថា អ្នកឯងនឹងចេញមកចរចានឹងយើងនោះមិនគួរទេ ចូរបែរត្រឡប់ទៅប្រាប់**ចូជិន**ឲ្យចេញមកសន្ទនានឹងយើងទើបសមគួរ **ពីអៀវ**ខឹងណាស់ ក៏ស្រែកតបទៅថា **ចូជិន**ចៅហ្វាយយើងជាមនុស្សតាំងនៅក្នុងសេចក្ដីសត្យន្ធូវធម៌ គួរឬនឹងមកចរចានឹងអ្នកឯងជាមនុស្សអន្ធពាលទុរយសដល់ម្ចាស់ផែនដី ចៅហ្វាយយើងបីដូចជាដើមព្រឹក្សាជាតិដ៏មានមែកស្លាកត្រួយខ្ចីលាស់ចេញមកជាមាស ដើមជាប្រាក់ចុះចាកលើនៅកំពូលភ្នំយ៉ាងខ្ពស់ អគ្គីនឹងដុះនៅលើដីវាបក៏ទេ។

**ខុងបេង**ឮដូច្នោះខឹងណាស់ ទើបលើកផ្ដិតឡើងបោកឲ្យទាហានចូលចោមព័ទ្ធចាប់យកខ្លួន**ពីអៀវ** នោះ**ម៉ាតាយ, ទៀវងី** ក៏លើកទាហានវាយប្រសព្វខ្ទប់ចេញមកព្រមគ្នាទាំងសងខាងផ្លូវ **ពីអៀវ**ក៏ឲ្យទាហានថយរត់ទៅចម្ងាយផ្លូវប្រហែលបីរយសិន (១២ គ.ម) **លោកែ**ឃើញពន្លឺភ្លើងឆេះជាប់ឡើងពីក្រោយបន្ទាយ**ខុងបេង** ក៏សម្គាល់ថា**កៀងអ៊ុយ**ដុតឲ្យឆេះតាមសញ្ញា ក៏ដេញពលយោធាចូលទៅ។ **ខុងបេង**ក៏ឲ្យទាហានថយបញ្ឆោតមកក្រោយ **ពីអៀវ**ក៏ដេញបណ្ដោយចេញទៅមុខទាហាន។ **ខុងបេង**ក៏តាំងពាក់សេះរត់បំពារចេញទៅ ពលទាហានដែលនៅក្នុងចំណោម ក៏បាក់ទ័ពរត់ប្រផាប់ជាន់គ្នាស្លាប់ជាច្រើនណាស់ ខ្លះក៏ត្រូវនឹងព្រួញរបួសពិការជាសាហ័ស

**ពីអៀវ**ក៏រត់ប៉ះទៅដល់មាត់ផ្លូវ ប្រទះទ័ព**កៀងអ៊ុយ**ស្ទាក់នៅពីមុខ ហើយស្រែកជេរថា អាចោរក្បត់ អាឯងសន្មតគិតបោកបញ្ឆោតអញឲ្យចាញ់កលឧបាយ។

**កៀងអ៊ុយ**ក៏អស់សំណើចក្អាកក្អាយហើយថា អញតាំងចិត្តគិតចាប់ខ្លួន**ចូជិន**ទៀត ឥឡូវត្រឡប់ភ្លាត់ស្នៀតអាឯងទៅវិញក៏តាមការ អាឯងត្រូវចុះមកសុំខមាទោសឲ្យអញចងខ្លួនឲ្យស្រួលទៅចុះ កុំគេចរត់ទៅដូច្នេះដូច្នោះឡើយ។ **ពីអៀវ**ឃើញទាហានព័ទ្ធជិតពីមុខពីក្រោយជាមាំមួនណាស់ ឃើញថានឹងរត់ប៉ះពារទៅមិនរួចសោះ ក៏ហូតគ្រប៊ីអារ-កស្លាប់នៅទីនោះមួយរំពេច ទាហានទាំងពួងក៏គេចត្រឡប់ទៅសុំចំណុះចុះចូលខាង**ខុងបេង**ទាំងអស់ **ខុងបេង**ក៏មានអំណរណាស់ ឲ្យប្រមូលរេហ៍ពលលើកទៅឈប់នៅភ្នំគីសាន់ ហើយក៏ឲ្យបំណាច់រង្វាន់ទាហានទាំងពួងតាមសមគួរ។

ឯ**ចូជិន**ដឹងថា **ពីអៀវ**ស្លាប់កណ្ដាលរណរង្គសង្គ្រាមហើយ ក៏ឲ្យហៅ**កោឈុយ**ចូលទៅប្រឹក្សា ហើយតែងជាសំបុត្រដើងសាចូលទៅក្រាបទូលព្រះចៅ**ចូយ៉យ**ថា ទ័ពខ្មាំងលើកទៅតាំងនៅភ្នំគីសាន់ បង្គាប់ពលទាហានដែលលើកទៅធ្វើការ ក៏ស្លាប់វិនាសលើសនឹងគណនាត្រារាប់ឡើយ ឯ**ពីអៀវ**ជានាយទាហានធំនោះក៏ស្លាប់ក្នុងសង្គ្រាមទៅហើយ។

ព្រះចៅ**ចូយ៉យ**ទ្រង់ព្រះសណ្ដាប់សព្វសារា ក៏មានព្រះទ័យវិតក្កព្រួយណាស់ត្រាស់ឲ្យហៅ**សុម៉ាអ៊ី**ចូលទៅគាល់ហើយប្រឹក្សាថា ឥឡូវ**ចូជិន**បកសំបុត្រមកថាកងទ័ពស្រុកសែឈ្មួនលើកឆ្លងចូលមកតាំងបន្ទាយនៅភ្នំគីសាន់ **ពីអៀវ**ក៏ក្ស័យជីវិតក្នុងសង្គ្រាម ខូចខាតពលទាហានច្រើនណាស់ អ្នកនឹងគិតប្រការម្ដេច?

**សុម៉ាអ៊ី**ក្រាបទូលព្រះចៅ**ចូយ៉យ**ថា ដែលកងទ័ពស្រុកសែឈ្មួននឹងលើកតាមផ្លូវតាន់ឆងនោះ ជាទីច្រកចង្អៀតពិបាកណាស់នឹងមកពុំបាន បានជាត្រឡប់លើកទាហានទៅតាមផ្លូវតំបន់គីសាន់វិញ ប្រាថ្នានឹងបំបែកពួកទ័ពលើកច្រូតកាត់ទៅតាមផ្លូវគ្រង់វិញ ទូលព្រះបង្គំសូមចាត់ទាហានលើកទៅទប់រាំងខាំងផ្លូវគ្រង់នោះឲ្យជាប់ទាំងអស់ កុំឲ្យចូលកងទ័ពមកបាន បើយូរណាស់ក៏ប្រមាណតែត្រឹមពីរខែ មុខជាកងទ័ព**ខុងបេង**នឹងដាច់ស្បៀងអាហារអស់ គង់នឹងលើកចុះត្រឡប់ទៅវិញឯងៗ

ខាងយើងក៏គង់បានកន្លែងចំណាប់នឹងលើកទ័ពត្រួតវាយឲ្យបែក មុខជាហ្លួហែកចាប់ខ្លួន**ខុងបេង**ឲ្យបាន សូមព្រះរាជទានឲ្យមានព្រះតម្រាស់ទៅកំជាប់**ចូជិន**កុំឲ្យលើកសង្កិនចូលទៅ រួចរារង់បង្អង់នៅមើលកលការសិន ដើម្បីនឹងគិតឲ្យល្អិតកុំឲ្យចាញ់កលឧបាយ**ខុងបេង** ទោះបីជាកលក៏មើលសង្កេតឲ្យដឹងសឹមធ្វើការ។

ព្រះចៅ**ចូយ៉យ**ក៏ទ្រង់យល់ឃើញផង ទើបឲ្យតែងព្រះតម្រាស់តាមពាក្យ **សុម៉ាអ៊ី** ប្រើ**ហាន់ខាយ**ឲ្យនាំទៅព្រះរាជទាន**ចូជិន** ហើយ**សុម៉ាអ៊ី**ផ្តាំផ្តាច់នឹងបម្រើនោះថា អ្នកឯងកុំប្រាប់**ចូជិន**ថា យើងទូលព្រះចៅ**ចូយ៉យ**ឲ្យចេញព្រះតម្រាស់មកកំជាប់កំជាឡើយ ក្រែង**ចូជិន**នោះហើយនឹងតូចចិត្តដល់យើង។ **ហាន់ខាយ**ដែលនាំសំបុត្រទទួលពាក្យហើយក៏គំនាប់លាទៅ លុះទៅដល់បន្ទាយ**ចូជិន**ក៏យកព្រះតម្រាស់នោះទៅឲ្យ**ចូជិន** ៗដឹងការតាមព្រះតម្រាស់ហើយ ទើបប្រឹក្សាគ្នានឹង**កោឈុយ**, **ស៊ុនឡេ** ថា ខព្រះតម្រាស់នេះ អ្នកយល់ឃើញប្រការម្តេច?

**កោឈុយ**ថា ឯខតម្រាស់នេះ គឺជាសេចក្តីគិតគំនិតរបស់**សុម៉ាអ៊ី**ឯង មិនចំពោះស្តែងពីព្រះតម្រិះទេ ព្រោះតែ**សុម៉ាអ៊ី**ឃើញថា យើងធ្វើការបើមានជ័យជម្នះគេក៏ចង់ស្វែងស្វះឲ្យមានគុណគាប់ ទៅប្រដាប់ខ្លួនឲ្យលើស ទើបឲ្យឃាត់ហាមយើងកុំឲ្យល្មើសក្នុងខបង្គាប់គ្រប់ប្រការ។ **ចូជិន**ថា អ្នកនិយាយទាំងប៉ុន្មាននេះមិនខុសទេ តែថាហើយធ្វើតាមខព្រះតម្រាស់នោះចុះ បើទ័ពស្រុកសៃឈ្នួនមិនថយទៅក្រោយ តើនឹងឲ្យធ្វើប្រការម្តេច? **កោឈុយ**ថា បើដូច្នោះសូមឲ្យលោកប្រើមនុស្សទៅប្រាប់**អងសុង** ឲ្យលើកពលទៅចាំកាត់ក្តាត់យកស្បៀង**ខុងបេង**ចេញឲ្យបាន បើទាហានខាងសត្រូវដាច់អស់ស្បៀងកាលណា គង់នឹងនាំគ្នាលើកទ័ពទៅឯង។

**ស៊ុនឡេ**ថា អ្នកនិយាយនេះពេញជាត្រូវណាស់ បើប្រសិនណា**ខុងបេង**ខ្វះស្បៀងដូច្នោះ ខ្ញុំនឹងយករំសេវ និងស្ពាន់ធម៌ផ្ទុករទេះឲ្យច្រើន ហើយយកស្មៅនិងចំបើងផ្ទុកពីលើ រួចនាំទាហានឲ្យបររទេះទៅ ធ្វើបីដូចនឹងដឹកនាំស្បៀងទៅឲ្យអ្នក ទើបនឹងចាត់ឲ្យល្បាតលបលាក់ចូលទៅប្រាប់**ខុងបេង** ៗដាច់ស្បៀងហើយ មិនលែងឡើយនឹងឲ្យទាហានមកវាយដណ្តើមយកទេ ខ្ញុំបាទនឹងរិះរេលះចោលរទេះទាំងនោះចេញ ទាហាន**ខុងបេង**គង់លើកដេញដណ្តើមស្បៀងរទេះរួចនឹងឲ្យទាហាន

យើងខាងនោះបាញ់ធ្នូចម្រុះទៅ ឲ្យភ្លើងឆេះផ្ទះរំសេវកាលណា ពលយោធា**ខុងបេង**គង់នឹងវិនាសសូន្យពុំខាន យើងត្រូវលើកទាហានចូលទៅវាយឲ្យបែក។

**ចូជិន**មានចិត្តត្រេកអរណាស់ណា ក៏បង្គាប់**ស៊ុនឡេ**ឲ្យចាត់ការតាមឧបាយ ហើយឲ្យទៅប្រាប់**អងសុង**ពីចម្ងាយ ឲ្យដឹងនឹងលើកពលមកពីកេតេងនិងគីកុក ដើម្បីមិនឲ្យទ័ព**ខុងបេង**លើកគំហុកចូលទាន់ បើមុន**អងសុង**នឹងលើកមកនោះ ត្រូវឲ្យលបទៅវាយកាត់យកស្បៀង**ខុងបេង**ឲ្យបាន ហើយឲ្យ**កោឈុយ**លើកទៅរក្សាទីឋានតាមផ្លូវដែលត្រូវមកពីកេតេងនិងគីកុក កុំឲ្យសត្រូវលើកសម្រុកមកបាន ហើយកេណ្ឌទាហានឲ្យទៅរក្សាគយគ្រប់តំបន់ចាំកាត់ស្បៀង តាំងពីនោះ**ចូជិន**ក៏កំជាប់ទាហានឲ្យតាំងខ្ជាប់កុំឲ្យលើកទ័ពចេញ។

ឯ**ខុងបេង**នោះ លុះតាំងទ័ពនៅភ្នំគីសាន់ហើយ ក៏មិនបានឃើញទ័ព**ចូជិន**លើកមកតស៊ូគ្នា ទើបប្រឹក្សានឹង**កៀងអ៊ុយ**ថា **ចូជិន**មិនបានលើកពលចេញមកទល់ច្បាំងនោះ ចេះតែឲ្យតាំងខ្ជាប់ខ្លួននៅក្នុងបន្ទាយ ហើយរំលាយបំបែកគ្នាទៅរាំងតាំងស្កាត់គ្រប់ច្រកផ្លូវ ដែលនឹងចេញទៅនាំស្រូវអង្ករអាហារស្បៀងតាមផ្លូវតាន់ឆងក៏មិនបាន បើក្នុរវាងខែនេះបញ្ជូនស្បៀងឲ្យគ្នានិងគ្នាពុំបានកាលណា ពលយោធារបស់យើងក៏នឹងលំបិនលំបាកព្រាត់ចាកគ្នាចុះជាលំដាប់ តើនឹងគិតប្រែត្រឡប់ទៅយ៉ាងណា កាល**ខុងបេង**ប្រឹក្សាទាំងនោះ មានមនុស្សល្បាតចូលមកជម្រាបថា ដ្បិតមានពួកអ្នកស្រុលសេឡុងមកប្ដឹងថា **ស៊ុនឡេ**នាំទាហានរទេះស្បៀងទៅជូនកងទ័ព**ចូជិន**តាមផ្លូវឯលិចច្រើនណាស់។

**ខុងបេង**សួរថា នរណាមួយឈ្មោះ**ស៊ុនឡេ**នោះ? អ្នកស្រុកឡុកអៀងជាឈ្លើយឆ្លើយជម្រាបថា **ស៊ុនឡេ**នោះ ពីដើមជាមន្ត្រីជាន់តូចខាងក្រសួងរដ្ឋបាល បានតាមព្រះចៅ**ចូយ៉យ**ស្ដេចទៅប្រពាតបាញ់សត្វម្ដង ខ្លាដេញខាំព្រះចៅ**ចូយ៉យ** ទាហានខាងក្រោយស្ទុះទៅជួយមិនទាន់ **ស៊ុនឡេ**សំខាន់ខាងរហ័ស ស្ទុះទៅហូតគ្រប៊ីដេញកាប់ខ្លាស្លាប់ ព្រះចៅ**ចូយ៉យ**ទ្រង់សព្វព្រះទ័យតាំងឲ្យជានាយទាហានធំ តាមគុណបំណាច់។ **ខុងបេង**ដឹងដូច្នោះក៏ថា **ចូជិន**នោះប្រហែលឃើញថា យើងទាល់ផុតស្បៀងអាហារហើយ បានជាក្លែងប្រើ**ស៊ុនឡេ**ឲ្យលើកពលប្រចាំជូនមក ប្រាថ្នា

នឹងបោកបញ្ឆោតដុតបំផ្លាញពលយើង ៗក៏ដឹងដល់ តែកាលពីដើមយើងធ្វើសង្គ្រាម ប្រើកលទាល់តែមានជ័យជម្នះ ក៏ព្រោះផ្លូវឧបាយប្រាជ្ញា យើងក៏ត្រូវគិតត្រួតកលរបស់វាដុតបំផ្លាញវាវិញឲ្យបាន ព្រោះ**ចូជិន**វាមានលួចយកគំនិតយើងទៅធ្វើ ឲ្យយើងជាម្ចាស់តម្រិះនេះ កាលណាវានឹងចេះឲ្យលើសយើងបាន យើងត្រូវតែមានយោបល់តម្រួតកលលើកលទល់គ្នា។ គិតហើយក៏ប្រើ**ម៉ាតាយ**ឲ្យនាំពលទៅស្ទាក់វាយរទេះស្បៀង កំណត់ប្រាប់ទុកថា បើឃើញទាហាន**ចូជិន**នាំស្បៀងទៅកាលណា តាមមាគ៌ាទិសខាងលិច ត្រូវឲ្យគេចទៅពីក្រោយខ្យល់ហើយយកភ្លើងដុតឲ្យដល់ព្រៃជុំវិញឲ្យរាលព័ទ្ធឲ្យបាន ឯខ្លួន**ចូជិន**សម្គាល់ថា យើងលើកទ័ពទៅធ្វើពានលើកលដែលវាគិត ក៏គង់នឹងត្រូវចិត្តត្រឡប់ទ័ពមកវាយបន្ទាយយើងមិនខាន ទើបប្រើ**ម៉ាតុង** និង**ទៀវងី**ទាំងពីរប្រាណឲ្យនាំទាហានប្រាំពាន់ ចេញទៅបង្កប់ខាងក្រៅបន្ទាយកំណត់ថា បើឃើញ**ចូជិន**លើកពលទាំងឡាយមកព័ទ្ធបន្ទាយយើង ឲ្យយើងវាយប្រសព្វខ្ទប់ចូលមក ទើបចាត់**គួនហ៊ិន**និង**តៀវប៉ៅ**នាំពលលបចេញទៅបង្កប់នៅក្បែរបន្ទាយ**ចូជិន** បើឃើញ**ចូជិន**លើកពលចេញមក ត្រូវឲ្យដណ្ដើមយកបន្ទាយឲ្យបាន ទើបតាំងឲ្យ**ង៉ប៉ាន់**និង**ង៉អ៊ី**នាំពលទៅតាំងនៅដើមផ្លូវ បើឃើញសត្រូវចាញ់ដៃវេលាណាត្រូវឲ្យលើកកាប់ឆ្ការស្ទាក់ផ្លូវឲ្យជាប់ **ខុងបេង**ចាត់ចែងរៀបកងទ័ពស្រេចហើយ ក៏នាំពលឡើងទៅនៅលើកំពូលភ្នំ។

ឯ**ស៊ុនឡេ**នោះ លុះនាំរទេះទៅដល់ក្បែរភ្នំខាងលិច បម្រើល្បាតក៏គេចនាំព័ត៌មានទៅប្រាប់ថា ឥឡូវ**ខុងបេង**ចាត់កងទ័ពមួយកងឲ្យលើកឆ្លងទៅវាយពួករទេះស្បៀងហើយ **ស៊ុនឡេ**ក៏មានអំណរណាស់ ប្រើមនុស្សឲ្យស្រូតទៅប្រាប់**ចូជិន** ៗក៏បង្គាប់ឲ្យ**ទៀវហ** និង**ងាក់លឹម**ដែលជាកងមុខឲ្យប្រុងប្រយ័ត្នការ ក្រែងភ្លើងឆេះឡើងពីទិសឯលិច ហើយខ្សឹបបង្គាប់ថា បើឃើញពន្លឺភ្លើងវេលាណាក៏សមដូចប្រាថ្នា មុខជា**ខុងបេង**នឹងត្រូវកលរបស់យើងពុំខាន ចូរបង្ខំលើកទាហានទៅឲ្យចោមរោមព័ទ្ធបន្ទាយ**ខុងបេង**ទុកឲ្យបាន។

ឯ**ស៊ុនឡេ**កាលទៅដល់ក្បែរភ្នំនៅព្រលប់ធំ ក៏ឲ្យទាហាននាំរទេះតភ្ជាប់គ្នាជាជួរ ក្លែងថា ទាហាន**ខុងបេង**នឹងលើកមកប្លន់ លុះ**ម៉ាតាយ**លើកមកទាន់ ក៏ឲ្យទាហាន

ទៅលបមើលឃើញទ័ព**ស៊ុនឡេ**នៅព័ទ្ធជុំរទេះ ទើបឲ្យទាហានលើកវេះព័ទ្ធស្កាត់ទៅក្នុងព្រៃជុំវិញទ័ព**ស៊ុនឡេ** ខណៈនោះជួនធ្លាក់ខ្យល់ព្យុះមកពីទិសឯលិច **ម៉ាតាយ**ក៏ឲ្យទាហានគេចលបយកគប់ភ្លើងដុតពីលើខ្យល់ ៗក៏បោកបក់ឆក់ឆាបរាលដរាបជាប់ទៅ **ស៊ុនឡេ**ក៏ភ័យណាស់ ស្ទុះសំដៅទៅហៅទាហានឲ្យព្រួតលត់ភ្លើង ៗក៏រឹតតែឆេះឡើងដោយកម្លាំងខ្យល់នឹងលត់មិនឈ្នះ ក៏រាលឆាបឆេះដល់រទេះដែលដាក់រំសេវ និងស្ពាន់ធម៌ផ្ទោះឡើង **ស៊ុនឡេ**ក៏ស្ទុះចចើងចេញពីក្រោមខ្យល់ជ្រួលច្របល់ទាំងទាហានពានលើគ្នា **ម៉ាតាយ**ក៏ឲ្យទាហានស្ទុះរាំងរាខ្ទប់ពីមុខ ហើយស្រែកហ៊ោគគុកគគាក់បាញ់ធ្នូប្រទាក់តម្រង់លើពួកទាហាននោះ ក៏រលស់ស្លាប់ដោយភ្លើងនិងត្រូវព្រួញវិនាសច្រើនណាស់ **ស៊ុនឡេ**ក៏ស្ទុះប្រះប៉ះពារទម្លាយទ័ពរត់រួចទៅបាន។

ឯ**ទៀវហ** និង**ងាក់លឹម**ឃើញពន្លឺភ្លើងឆេះឡើងដូច្នោះ ក៏លើកពលបង្រុះចូលទៅព័ទ្ធបន្ទាយ**ខុងបេង** ឯ**ម៉ាតុង** និង**ទៀវងី**ដែលតាំងនៅក្រៅបន្ទាយ ឃើញទាហាន**ចូជិន**លើកមកព័ទ្ធដូច្នោះ ក៏លើកពលទាំងអស់ចេញមកវាយខ្ទប់ប្រសព្វគ្នា ទាហាន**ទៀវហ** និង**ងាក់លឹម**មិនទាន់ដឹងខ្លួនក៏ត្រូវព្រួញស្លាប់ជាច្រើន ខ្លះនៅរស់ក៏ស្ទុះរត់បែកខ្ញែកគ្នាចេញទៅដល់មាត់ផ្លូវ ក៏ទទួលប្រទះនឹង**ង៉ប៉ាន់, ង៉អ៊ី** នៅទីនោះស្ទុះទៅស្ទាក់ពីមុខហើយបាញ់ធ្នូសម្រុកមកទៀត ទ័ពទាំងសងខាងក៏ដែកជៀតចូលប្រយុទ្ធគ្នាជាជ្រួលច្របល់ **ទៀវហ** និង**ងាក់លឹម**ក៏ទម្លាយចេញទៅបាន។

ខណៈកាល**ទៀវហ** និង**ងាក់លឹម**លើកពលចេញពីបន្ទាយទៅ **គួនហ៊ុន** និង**តៀវប៉ៅ**ដែលបង្កប់ប្របទីនោះ ក៏បង្រុះចូលទៅដណ្តើមយកបន្ទាយបាន លុះ**ទៀវហ**និង**ងាក់លឹម**រត់ទៅដល់នឹងវិលចូលបន្ទាយ **គួនហ៊ុន, តៀវប៉ៅ**ក៏ឲ្យទាហានបាញ់ធ្នូចម្រុះចេញមក ហើយលើកពលចេញទៅដេញកាប់សម្លាប់ទ័ពសត្រូវជាច្រើន **ទៀវហ, ងាក់លឹម** ក៏រត់បែកទៅដល់**ចូជិន**ហើយរាយរឿងឲ្យស្តាប់គ្រប់ប្រការ **ចូជិន**ក៏បង្កើតឈឺផ្សាពន់ប្រមាណ ទើបកំជាប់ទាហានឲ្យត្រួតត្រាប្រយ័ត្នការរក្សាបន្ទាយឲ្យមាំមួន មិនបានឃើញលើកចេញតច្បាំងនឹងទ័ព**ខុងបេង** ៗបានជ័យជម្នះក៏ប្រមូលរេហ៍ពលទៅប្រជុំគ្នា។

**ខុងបេង**ចាត់ភ្នាក់ងារឲ្យត្រួតរាប់មើលសព្វស្បៀងអាហារ ក៏ឃើញនៅមានស្តើងស្តួចណាស់ ទើបរូតរះឲ្យប្រមូលរេហ៍ពលមកដល់គ្រប់ពួកគ្រប់កង កំណត់នឹងលើកឆ្លងទៅស្រុកសែឈ្វនវិញ។ **អៀវងី**ក៏ចូលទៅនិយាយឃាត់ថា សង្គ្រាមគ្រានេះមានជ័យជម្នះសត្រូវទៅទៀត ហេតុម្តេចបានជាលោកគិតលើកទ័ពត្រឡប់ទៅវិញ? **ខុងបេង**ថា យើងធ្វើការគ្រានេះមានប្រៀបក៏មែនហើយ តែស្បៀងអាហារជាកម្លាំងក្នុងកងទ័ព ក៏រិះរាប់ទៅឃើញតិចស្តួចស្តើងណាស់ ក្រែងសត្រូវដឹងច្បាស់នឹងលើកវាងទៅស្ទាក់ផ្លូវមិនឲ្យទៅមកបាន ក៏នឹងមានថ្លោះធ្លោយដោយប្រហែសការ ឯកងទ័ពស្រុកឡុកអៀងក៏ក្តៀវក្លានឹងលើកមកថែមបំពេញទៀត ជាប់ច្បាំងគ្នាជាយូរ ការធ្វើសឹកនេះបើឃើញឈ្នះ ក៏ត្រូវរូតរះគិតគូធ្វើឲ្យស្រេចពីដើមដៃកុំគប្បីបង្អង់ទុក ដែលយើងលើកទ័ពវិលទៅស្រុកគ្រានេះ ក៏ព្រោះឃើញថាកងទ័ពស្រុកឡុកអៀងមិនលើកតាមយើងទេ ក៏នៅមានវិតក្កបន្តិច ព្រោះ**អ៊ុយអៀន**មិនបានដឹង យើងត្រូវឲ្យទៅប្រាប់ជាដំណឹងឲ្យគិតឧបាយសម្លាប់**អងសុង**ចេញ មុខជានឹងសម្រេចតាមប្រាថ្នា លុះចាត់ការឲ្យទៅប្រាប់ហើយ ព្រឹកឡើង**ខុងបេង**ក៏លើកទ័ពត្រឡប់ទៅស្រុកហាន់តុង។

**ទៀវខាប់**ដែលទទួលបង្គាប់ទៅឈរក្សាគយនោះ លុះលើកទាហានទៅដល់បន្ទាយ**ចូជិន**ជម្រាបថា ដ្បិតមានតម្រាស់ព្រះចៅ**ចូយ៉យ** ឲ្យខ្ញុំបាទនាំទាហានមកជូនលោកប្រើប្រាស់ក្នុងការងារ។ **ចូជិន**សួរថា កាលអ្នកនឹងលើកចេញមកតើបានលា**សុម៉ាអ៊ី**ឬទេ? **ទៀវខាប់**ឆ្លើយប្រាប់ថា ខ្ញុំបាទបានទៅលា។ **ចូជិន**សួរថា **សុម៉ាអ៊ី**មាននិយាយថាដូចម្តេចខ្លះ? **ទៀវខាប់**ប្រាប់ថា **សុម៉ាអ៊ី**និយាយនឹងខ្ញុំបាទថា បើ**ខុងបេង**ចាញ់យើងវេលានេះ មុខជាមិនលើកទ័ពវិលទៅស្រុកវិញទេ បើគេមានជ័យជម្នះគង់នឹងរូតរះលើកត្រឡប់វិញជាប្រាកដ។ ហើយ**ទៀវខាប់**សួរថា តាំងពីលោកចាញ់ប្រៀប**ខុងបេង**មកនោះ លោកបានឲ្យមនុស្សទៅស៊ើបយកការណ៍ខ្លះឬទេ? **ចូជិន**ថា នៅមិនទាន់ឲ្យបម្រើទៅស៊ើបការណ៍ទេ។ **ទៀវខាប់**ថា បើដូច្នោះសុំឲ្យលោកចាត់បម្រើទៅស៊ើបមើលឲ្យជាក់លាក់ចុះ។ **ចូជិន**ក៏ប្រើមនុស្សឲ្យចេញទៅស៊ើបការណ៍ បម្រើវិលសាមកប្រាប់ថា **ខុងបេង**លើកទ័ពទៅស្រុកវិញបានពីរថ្ងៃមកហើយ **ចូជិន**

ឮដូច្នោះក៏យកដៃទះគក់ទ្រូងថា ស្តាយណាស់ ព្រោះយើងមិនដឹងថា**ខុងបេង**គិតដូច្នោះសោះឡើយ។

ឯ**អ៊ុយអៀន**នោះ លុះបានដឹងថា**ខុងបេង**លើកត្រឡប់ទៅស្រុកហាន់តុងហើយ បង្គាប់កំហិតឲ្យគិតសម្លាប់**អងតុង**ចេញ ទើបចាត់ទាហានឲ្យលបលើកទៅបង្កប់នៅក្រោយបន្ទាយ**អងសុង** ផ្តាំថាបើឃើញ**អងសុង**លើកចេញពីបន្ទាយ ឲ្យយកភ្លើងដុតបន្ទាយឲ្យឆេះឡើង ហើយឲ្យរត់ចេញទៅជាប្រញាប់ លុះចាត់ការស្រេចហើយ ក៏បង្គាប់ទាហានឲ្យលើកគ្នាចេញទៅមុខបង្គាប់កំជាប់ថា បើ**អងសុង**លើកដេញមក ឲ្យនាំគ្នាស្រូតរូតរត់ទៅកុំនៅបង្អង់ ហើយ**អ៊ុយអៀន**និងទាហានសាមសិបនាក់ ក៏ចូលទៅពួនបង្កប់នៅក្នុងព្រៃក្នុងពេលកណ្តាលយប់នោះ បម្រើសេះចូលទៅប្រាប់**អងសុង**ថា ដ្បិត**អ៊ុយអៀន**លើកទាហានរត់ទៅពីកណ្តាលយប់ ឬតាំងពីព្រលប់បាត់ទៅហើយ **អងសុង**ឮដូច្នោះ ក៏សោមនស្សត្រេកអរណាស់ ទើបលើកទាហានទាំងអស់ចេញពីបន្ទាយស្រូតរូតតាម ទាហាន**អ៊ុយអៀន**ដែលថយទៅនោះ លុះឃើញកងទ័ព**អងសុង**ស្រែកខ្ញាន់ៗចូលមកជិត ក៏រឹតតែខំរត់ទៅ នោះទាហានដែលពួននៅក្រោយបន្ទាយបានកលការ ក៏លបម៉ីម្នាចូលទៅដុតភ្លើងបន្ទាយឆេះឡើង ហើយស្រែកប៉ោគឹកកងទំនងដូចជាចោមវាយបន្ទាយហើយគេចរត់ទៅ។

ឯ**អងសុង**ដែលលើកទ័ពតាមទៅក្នុងថ្ងៃនោះ លុះក្រឡេកក្រោយមកឃើញភ្លើងឆេះបន្ទាយក៏ដឹងចាញ់ឧបាយ**អ៊ុយអៀន**ប្រើកល ញាក់សេះនាំពលត្រឡប់ទៅក្រោយបន្ទាយ **អ៊ុយអៀន**និងទាហានសាមសិបនាក់ អែបលាក់ខ្លួនពួនក្នុងស្បាតក៏ញាក់សេះចេញទៅរនះរនាតវាំលំពែងស្ទុះទៅ ហើយស្រែកថា អញឈ្មោះ**អ៊ុយអៀន**នៅឯណេះ **អងសុង**ក្រឡេកទៅឃើញ**អ៊ុយអៀន** ក៏កន្ត្រាក់សេះងាកមុខសម្រុកទៅមិនទាន់ **អ៊ុយអៀន**ក៏ស្ទុះរន្ទាន់ទៅកាប់នឹងដាវត្រូវដាច់ពាក់កណ្តាលខ្លួន ធ្លាក់ពីលើសេះស្លាប់ ពួកកងទ័ពបែកបាក់ខ្ចាត់ខ្ចាយរត់ទៅ **អ៊ុយអៀន**ក៏ដេញសំដៅទៅសម្លាប់ទាហានបានជាច្រើន ហើយលើកទ័ពត្រឡប់ទៅស្រុកហាន់តុងរ៉ាយដំណឹងឲ្យ**ខុងបេង**ស្តាប់គ្រប់ប្រការ។ **ខុងបេង**ក៏ត្រេកអរសោមនស្សពន់ប្រមាណ ទើបរៀបតុលៀងទាហានបរិភោគអាហារ។

ខណៈនោះ បម្រើសេះនាំដំណឹងសាទៅប្រាប់**ចូជិន**ថា **អ៊ុយអៀន**សម្លាប់**អងសុង**ស្លាប់ **ចូជិន**ក៏ឈឺចាប់ក្នុងចិត្តស្ទុតអស់វិញ្ញាណ ទើបប្រគល់ទាហានឲ្យ**ទៀវខាប់**និង**ស៊ុនឡេ្វ**, **កោឈុយ**ឲ្យទៅនៅរក្សាគយផ្លូវស្រុកទៀងអាន់គ្រប់តំបន់ ហើយក៏លើកទ័ពត្រឡប់ទៅស្រុកឡុកអៀង។

*លោកអ្នកអានអាចរកមើលសៀវភៅផ្សេងទៀតតាមរយៈគេហទំព័រ*

www.khmerliterature.wordpress.com

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

### កណ្ឌទី ៧៥

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពីព្រះចៅ**ស៊ុនគួន** បានរាជាភិសេកជាបរមក្សត្រក្នុង គ.ស ៧៧២ ស្រុកទាំងពីរ គឺស្រុកសែឈួន និងស្រុកកាំងតាំងចងស្ពានមេត្រី។ **ហេកជៀវ**ឈឺស្លាប់។ **ខុងបេង**លើកទ័ពទៅវាយបន្ទាយតាន់ឆងបាន រហូតដល់**សុម៉ាអ៊ី**ចាញ់កលខុងបេង។ **តៀវប៉ោ**ឈឺស្លាប់ដោយរបួសធ្លាក់ពីលើសេះ **ខុងបេង**យំសោកាល័យទាល់តែធ្លាក់ឈាមទៅជាឈឺជាប់ លើកទ័ពថយទៅស្រុកសែឈួន ពេទ្យមើលសះជាវិញ។)*

**ខណៈ**មានពួកល្បាតសេះ នាំព័ត៌មានទៅក្រាបទូលព្រះចៅ**ស៊ុនគួន**ថា **ខុងបេង**លើកពលទាហានទៅធ្វើការសង្គ្រាមនឹង**ចូជិន** សម្លាប់ពលទាហានព្រះចៅ**ចូយ៉ យ**ស្លាប់វិនាសច្រើនណាស់ ឥឡូវនេះលើកទ័ពត្រឡប់ទៅស្រុកហាន់តុងហើយ អស់មុខមន្ត្រីទាំងឡាយក៏ថ្វាយបង្គំទូលតបព្រះរាជឱង្ការថា ឯទាហានក្នុងស្រុកឡុកអៀងនោះ សុទ្ធតែមនុស្សអស់កម្លាំងគ្រាំគ្រាទុរាទុរន់ណាស់ ព្រោះ**ខុងបេង**ធ្វើទុក្ខបុកម្នេញខ្មេចខ្ទីពីរយូរមកហើយ មួយទៀត កងទ័ពស្រុកសែឈួនក៏លើកត្រឡប់មកវិញ ព្រោះធ្វើការនោះមិញបានប្រៀប សូមព្រះអង្គទ្រង់ធៀបមើលចុះ ស្រុកឡុកអៀងខាងនោះទន់ដៃជាងគេ គួរយើងនឹងរិះរេលើកទ័ពទៅវាយ ដោយពេលនេះទាហានកំពុងបែកខ្ញែកគ្នា ព្រះចៅ**ស៊ុនគួន**ក៏ពុំមានថាដូចម្ដេច។

**ទៀវជៀវ**ក្រាបទូលថា វេលានេះស្រុកកាំងតាំងមានហ្វូងហង្សហើរចូលមកយំគ្រប់វេលាទាំងមករក៏សម្ដែងឫទ្ធានុភាពក្នុងផ្ទៃមហាសមុទ្រជាអស្ចារ្យ ហាក់បីដូចនឹងប្រាប់ថា ទេសកាលនេះជាសិរីមង្គលដ៏ប្រសើរយ៉ាងឯក សូមព្រះអង្គទ្រង់ឲ្យរៀបពិធីរាជាភិសេកឲ្យស្រេចការ រួចហើយសឹមលើកពលយោធាទៅវាយយកស្រុកឡុកអៀងចុះ ព្រះចៅ**ស៊ុនគួន**ក៏យល់ថាត្រូវ។

លុះដល់រដូវខែផល្គុន (ព.ស ៧៧២) ពួកមន្ត្រី និងរាស្ត្រប្រជាក៏ស្រុះគ្នារៀបការរាជាភិសេកព្រះចៅ**ស៊ុនគួន**ព្រមស្រេចគ្រប់ប្រការ តាមសណ្តាប់បុរាណាចារ្យអំពីដើម តាំងព្រះអង្គទ្រង់សោយរាជសម្បត្តិក្នុងចង្វាក់ដែនស្រុកកាំងតាំង ក្នុងថ្ងៃសុភមង្គលឫក្សនោះ ព្រះអង្គទ្រង់ប្រារព្ធចំពោះតាំង**ស៊ុនតេង**ជាព្រះរាជឱរសមកុដកុមារ តាំង**ជូកាត់ចេក**ជាបុត្រ**ជូកាត់កិន**ជាសេនាបតីស្តាំ តាំង**ទៀវហ៊ីវ**ជាបុត្រ**ទៀវជៀង**ជាសេនាបតីឆ្វេង ឲ្យជួយទំនុកបម្រុងតាក់តែងព្រះរាជឱរសតាមប្រពៃណី។

ឯ**ជូកាត់ចេក**នោះ ព្រះចៅ**ស៊ុនគួន**មានព្រះទ័យប្រោសប្រាណស្រឡាញ់ណាស់ ព្រោះកាលនៅពីតូចអាយុ៦ឆ្នាំ **ជូកាត់កិន**នាំចូលទៅស៊ីលៀងក្នុងផ្ទៃព្រះរោង ព្រះចៅ**ស៊ុនគួន**ទតឃើញទ្រង់មុខ**ជូកាត់ចេក**វែងស្រុងដូចមុខដាវឡោ ក៏ចាប់យកឡោមួយទៀតមកចារឹកអក្សរនៅមុខឡោនោះថា **ជូកាត់ចេក**។ អស់នាហ្មឺនព្រះពញាក៏នាំគ្នាសើចចំអន់ **ជូកាត់ចេក**ក៏គិតទាន់ ក្រោកស្ទុះទៅយកពិតមកសរសេរអក្សរនៅដើមបន្ទាត់ ជាអក្សរពីរតួទៀតថា "ឡោរបស់" ផ្សំគ្នាថាជា "ឡោរបស់**ជូកាត់ចេក**"។ អស់នាហ្មឺនឃើញដូច្នោះក៏គិតគ្នាថា **ជូកាត់ចេក**ជាអ្នករហ័សឆ្លាតក៏នាំគ្នាអួតសរសើរ។ ព្រះចៅ**ស៊ុនគួន**ក៏មានព្រះទ័យអាណិតស្រឡាញ់ប្រោសប្រាណតាំងពីនោះមកទើបតាំងឲ្យធ្វើជានាហ្មឺនខាងមុខ។

លុះព្រះចៅ**ស៊ុនគួន**ឲ្យរៀបចាត់ការរាជាភិសេក ស្តេចក៏បង្គាប់ឲ្យកេណ្ឌកងទ័ពចូលមកភ្ជុំគ្នានឹងលើកទៅវាយយកស្រុកឡុកអៀង **ទៀវជៀវ**ក៏ទូលឃាត់ថាព្រះអង្គទើបនឹងទ្រង់បានរាជាភិសេកថ្មីៗ មិនគប្បីលើកកងទ័ពទៅច្បាំងនឹងសត្រូវដូច្នោះទេ គួរតែគង់ប្រថាប់ឲ្យជាប់នៅក្នុងព្រះរាជវាំងសិន ដើម្បីនឹងហាត់ប្រៀនពួកទាហានឲ្យចេះឆ្អិនប៊ិនប្រសប់ហើយ តាំងព្រះទ័យមេត្រីរាប់អានស្រុកសៃឈួនឲ្យជាសម្ព័ន្ធមិត្តនឹងគ្នា បើកាលណាបានព្រមព្រៀងទាំងសងខាងហើយ សឹមលើកទៅប្រមូលបញ្ចូលគ្នាលើកទៅធ្វើការសង្គ្រាម កម្ចាយសត្រូវវាយយកស្រុកឡុកអៀងនឹងបានដោយងាយ។

ព្រះចៅ**ស៊ុនគួន**ក៏យល់ឃើញត្រូវផង ទើបចាត់បម្រើឲ្យនាំព្រះរាជសាសន៍ទៅថ្វាយព្រះចៅ**ឡៅសៀន**ឯស្រុកសៃឈួន នោះព្រះចៅ**ឡៅសៀន**ឲ្យប្រជុំអស់មុខ

មន្ត្រីចូលទៅប្រឹក្សា អស់នាហ្មឺនក៏ក្រាបទូលថា ដែលនឹងចងស្ពានមេត្រីនឹងផែនដីស្រុកកាំងតាំង ដើម្បីនឹងជួយច្បាំងកម្ចាត់សត្រូវនោះ គួរតែពិគ្រោះនឹង**ខុងបេង**ជាធំសិន ព្រះចៅ**ឡៅសៀន**ក៏យល់ឃើញត្រូវ ទើបត្រាស់ប្រើនាហ្មឺនធំឲ្យនាំព័ត៌មាននោះ ទៅប្រឹក្សានឹង**ខុងបេង**ឯស្រុកហាន់តុង។

**ខុងបេង**ដឹងការហើយក៏ឆ្លើយទូលតបថា ដែលស្រុកសែឈ្នួននិងស្រុកកាំងតាំង តាំងនៅក្នុងផ្ទៃដីជាមួយគ្នានោះក៏គួរណាស់ តែថាវេលានេះព្រះចៅ**ស៊ុនគួន**ទើបនឹងបានរាជាភិសេកថ្មីៗ សូមព្រះអង្គទ្រង់ព្រះរាជមេត្រីឲ្យតែងគ្រឿងបណ្ណាការទៅថ្វាយព្រះចៅ**ស៊ុនគួន** ហើយស្តាប់កិត្តិស័ព្ទមើលតាមប្រពៃណីផែនដីសិន បើព្រះចៅ**ស៊ុនគួន**ប្រាកដជាចងស្ពានមេត្រីនឹងផែនដីយើងពិតហើយ ក៏ត្រូវធ្វើកតិកាប្តេជ្ញាឲ្យបានពេញជាសត្យានុសត្យទុក តទៅឯមុខក៏មិនប្រែប្រួលទៅវិញបាន។

ព្រះចៅ**ឡៅសៀន**យល់ឃើញត្រូវ ទើបឲ្យតែងនូវព្រះរាជសាសន៍ជាផ្លូវមេត្រីទៅវិញទៅមក ហើយធ្វើគ្រឿងរាជបណ្ណាការនូវគ្រឿងយសរបស់ទ្រព្យដ៏មានតម្លៃ ឲ្យ**តាន់ជិន**នាំទៅថ្វាយព្រះចៅ**ស៊ុនគួន** ៗក៏មានព្រះទ័យសោមនស្សឲ្យលោមង ព្រះលៀវរាជបម្រើ ដោយគ្រឿងភោជនាហារតាមបុរាណរាជប្រវេណី រួចតបថ្វាយគ្រឿងបណ្ណាការនូវព្រះរាជសាសន៍ ដែលជាខណ្ឌសញ្ញាអំពីផែនដីទាំងពីរជាមេត្រីនឹងគ្នា ប្រគល់ឲ្យ**តាន់ជិន**នាំសារទៅថ្វាយព្រះចៅ**ឡៅសៀន**វិញ ហើយព្រះចៅ**ស៊ុនគួន**ក៏ប្រឹក្សានឹង**ឡុកស៊ុន** ៗក្រាបទូលថា ដែលព្រះចៅ**ឡៅសៀន**មកបានជាមេត្រីនឹងផែនដីយើងនេះ ក៏ព្រោះគំនិត**ខុងបេង**ខ្លាច**សុម៉ាអ៊ី**បានជាមកធ្វើមេត្រីនឹងយើង ការរបស់យើងក៏ត្រូវធ្វើឲ្យបានជាផ្លូវមេត្រីកុំឲ្យបាត់តាមសញ្ញា ត្រូវតែឲ្យដំណឹងតបទៅស្រុកសែឈ្នួនថា យើងនឹងលើកកងទ័ពទៅវាយស្រុកឡុកអៀង ឲ្យ**ខុងបេង**លើកទ័ពមួយកងទៅជួយ មុខជា**សុម៉ាអ៊ី**នឹងចេញមកតស៊ូខាង**ខុងបេង**ជាប្រាកដ ឯខាងយើងនឹងលបលើកចូលទៅវាយយកស្រុកឡុកអៀងតែម្តង គង់បានដោយងាយ។ ព្រះចៅ**ស៊ុនគួន**ក៏យល់ឃើញត្រូវ ទើបចាត់បម្រើឲ្យនាំព្រះរាជសាសន៍ទៅថ្វាយព្រះចៅ**ឡៅសៀន** ហើយឲ្យកេណ្ឌទ័ពទុកសម្រាប់ព្រមគ្រប់អាណាខេត្ត។

ឯព្រះចៅ**ឡៅសៀន**បានទទួលព្រះរាជសាសន៍ដឹងការហើយ ក៏ត្រាស់ឲ្យទៅប្រាប់**ខុងបេង** ៗក៏មានសេចក្តីព្រួយណាស់ គិតថាតំបន់តាន់ឆងនោះ បើនឹងលើកទ័ពទៅក៏ឃើញថាជាទីចង្អៀតណាស់ ទើបចាត់មនុស្សឲ្យទៅស៊ើបល្បាតមើលឲ្យដឹងថាយ៉ាងម្តេច បម្រើល្បាតស៊ើបដឹងការណ៍ថា **ហេកជៀវ**ឈឺធ្ងន់ **ខុងបេង**ក៏មានអំណរណាស់ ទើបចាត់ឲ្យ**អ៊ុយអៀន** និង**កៀងអ៊ុយ**ទាំងពីរនាយឲ្យទាហានប្រាំពាន់បង្គាប់ដាក់កំហិត ឲ្យលើកចូលទៅប្រជិតទល់នឹងជើងកំពែងបន្ទាយតាន់ឆង បើឃើញពន្លឺភ្លើងឆេះឡើងកាលណា ឲ្យសង្គ្រុញពលយោធាចូលទៅ ហើយអ្នកទាំងពីរត្រូវស្រូតរូតទៅក្នុងរវាងបីថ្ងៃឲ្យបានការ កុំបាច់វិលមកលាយើងឡើយ។ **អ៊ុយអៀន** និង**កៀងអ៊ុយ**ឮហើយក៏គំនាប់លាចេញទៅរៀបពលយោធាលើកទៅ **ខុងបេង**ក៏ប្រុងប្រៀបរៀបកងទ័ព ហើយប្រាប់ឲ្យ**គួនហ៊ិន** និង**តៀវប៉ៅ**ចូលមកខ្សឹបប្រាប់ព័ត៌មាន ឲ្យចេញទៅធ្វើការជាសេចក្តីស្ងាត់ ឲ្យត្រៀមពលណាត់ទុកឲ្យព្រម។

ឯ**កោឈុយ** និង**ទៀវខាប់** ដែល**ចូជិន**ឲ្យនៅរក្សាគយនៅទីនោះ លុះដឹងថា **ហេកជៀវ**ឈឺធ្ងន់ចុះ ក៏ប្រឹក្សាគ្នាឲ្យ**ទៀវខាប់**នាំកងទ័ពចំនួនពលបីពាន់ លើកទៅនៅរក្សាតំបន់តាន់ឆង។

ខណៈនោះ **ខុងបេង**កាលដែលប្រើ**គួនហ៊ិន**និង**តៀវប៉ៅ**លើកទ័ពទៅហើយ ក៏ប្រមូលរេហ៍ពលលើកស្រូតកាត់ផ្លូវទៅដល់ទីតាន់ឆងយ៉ាងប្រញាប់ មុនកងទ័ព**អ៊ុយអៀន** និង**កៀងអ៊ុយ**លើកទៅ។ លុះត្រូវពេលកណ្តាលយប់បានចំណាប់កាលណា ក៏ឲ្យទាហានបន្លំចូលទៅក្នុងកំពែងបាន ហើយដុតភ្លើងឆេះឡើង **ខុងបេង**ក៏ឲ្យទាហានស្ទុះស្រព្រមគ្នាចូលទៅក្នុងកំពែង ហើយទន្ទ្រានដេញកាប់ទ័ពខ្មាំងជាខ្លាំងជ្រួលច្របល់ ទាហានខ្មាំងក្នុងកំពែងមិនបានដឹងកល ក៏ភ័យរចល់មហិមា នាំគ្នាផ្អើលភ្ញាក់រត់ប្រពាក់ប្រពូនចេញពីកំពែងបន្ទាយ ត្រឹមតែបាក់ផ្លាយជាន់គ្នាស្លាប់ នឹងគណនារាប់ពុំបាន ឯ**ហេកជៀវ**ក៏មានអាការជំងឺកាន់តែធ្ងន់ចុះ នឹងក្រោកដោះខ្លួនពុំបាន ក៏ធ្វើកាលកិរិយាទៅ។

ឯ**អ៊ុយអៀន** និង**កៀងអ៊ុយ** ខំស្រូតលើកទ័ពទៅដល់តំបន់តាន់ឆង ឃើញស្ងាត់ឈឹងពុំមានទាហានផងនៅលើសើនបន្ទាយ ក្រឡេកទៅឃើញពីនាយជាតួ

អក្សរចារឹកស្រុកសែឈ្លួននៅទង់ជ័យដោតលើកំពែង ក៏ឲ្យពិភាល់ក្នុងចិត្តណាស់ បានឮសំឡេង**ខុងបេង**ស្រែកចេញមកថា ហេតុដូចម្ដេចក៏បានជាអ្នកទាំងពីរនៅយឺតយូរម្ល៉េះ? **អ៊ុយអៀន** និង**កៀងអ៊ុយ**បានឮសំឡេង**ខុងបេង**ស្រែកដូច្នោះ ក៏ឲ្យតក់ស្លុតក្នុងវិញ្ញាណ ញាក់សេះបំពានទៅជិត ហើយក៏នាំគ្នាលោតចុះលុតជង្គង់គំនាប់ **ខុងបេង**ក៏បង្គាប់ទាហានឲ្យបើកទ្វារទទួលចូលទៅ។ **អ៊ុយអៀន, កៀងអ៊ុយ**គំនាប់ **ខុងបេង**ហើយ ទើបជម្រាបសួរថា មហាឧបរាជធ្វើប្រការម្ដេចទើបបានមកដល់តំបន់តាន់ឆងនេះមុនអស់យើងខ្ញុំទៅទៀត?

**ខុងបេង**តបថា យើងបានដឹងច្បាស់ថា **ហេកជៀវ**ឈឺធ្ងន់ បានជាប្រគល់ទាហានឲ្យអ្នកទាំងពីរលើកស្រូតមកប្រញាប់ ប្រាថ្នានឹងឲ្យឮកិត្តិស័ព្ទទៅដល់ **ហេកជៀវ** ឲ្យប្រុងការពារកងទ័ពអ្នកឯងខាងនោះ ឯខ្លួនយើងក៏លើកស្រូតកាត់ទម្លុះផ្លូវតូចមកបន្តិ ចូលអុជបន្ទាយឲ្យឆេះឡើង ហើយចូលចោមវាយបន្ទាយបំបែកបានដោយងាយ។ **អ៊ុយអៀន, កៀងអ៊ុយ**ឮដូច្នោះក៏សរសើរថា មហាឧបរាជអាចចេះកលឧបាយដូច្នេះ ហាក់ដូចជាទេវតា។

**ខុងបេង**ថា ដែលយើងលើកទ័ពមកវាយបានតំបន់តាន់ឆងនេះហើយ ក៏គង់នឹងគិតធ្វើការតទៅទៀត បើនឹងបង្អង់ឲ្យយឺតយូរក៏មិនបាន ព្រោះសត្រូវដឹងខ្លួនប្រាណនឹងប្រុងប្រយ័ត្នការ ពលសេនារបស់យើងក៏ធ្វើបានដោយលំបាកណាស់ ហេតុនេះកុំឲ្យអ្នកទាំងពីរបង្អង់យូរឡើយ គួរយើងនឹងខំស្រូតរូតលើកទៅវាយបន្ទាយសាន់គួនកុំឲ្យសត្រូវដឹងខ្លួនទាន់។ **អ៊ុយអៀន** និង**កៀងអ៊ុយ**គំនាប់ហើយ ក៏លើកទ័ពចេញទៅ។ ឯពួកគយសាន់គួនមិនទាន់នឹងត្រៀមកងទ័ពសោះ លុះឃើញទាហានសត្រូវលើកទៅដល់តក់ស្លុតរន្ធត់ភ័យណាស់ នាំគ្នារត់ចោលគយទាំងអស់ **អ៊ុយអៀន, កៀងអ៊ុយ** ក៏លើកទាហានទន្ទ្រានចូលទៅក្នុងទីបន្ទាយគយសាន់គួនបាន ទទួលកងទ័ព**ទៀវខាប់**លើមកដល់ ដឹងថាគយសាន់គួនខូចបានទៅសត្រូវហើយ ក៏ថយទ័ពលើកត្រឡប់ទៅក្រោយវិញ។ **អ៊ុយអៀន**, **កៀងអ៊ុយ**ឃើញទាហានបានចំណាប់ដូច្នោះ ក៏លើកដេញទ័ពស្កាត់វាយបណ្ដោយទៅ សត្រូវទាំងនោះក៏ស្លាប់វិនាសច្រើនណាស់ ក៏ប្រេះរត់បែកខ្ចាត់ខ្ចាយទៅទាំងអស់។

**អ៊ុយអៀន, កៀងអ៊ុយ** ក៏ចាត់បម្រើនាំសំបុត្របកទៅដល់**ខុងបេង** ៗក៏ចូលរៀបលើកទ័ពប្រញាប់ទៅបោះនៅតំបន់ភ្នំគីសាន់ ហើយទើបប្រឹក្សានឹងនាយទ័ពនាយកងទាំងពួងថា តាំងពីយើងលើកមកធ្វើការនៅតំបន់ភ្នំគីសាន់នេះ ក៏ថ្លោះការត្រឡប់លើកទ័ពចេញចូលពីរសាហើយ មិនដែលជ័យជម្នះសោះ គ្រានេះយើងធ្វើការសមដូចគំនិតគិតហើយ មុខជា**សុម៉ាអ៊ី**សម្គាល់ថា គ្រានេះយើងលើកចូលទៅតាមផ្លូវស្រុកប៉ៃសៀវ និងស្រុកយង់ជីវ មិនលែងនឹងលើកទ័ពមកស្កាត់ត្រង់ផ្លូវនោះចាំរង់ស្ទាក់កម្ចាត់ទ័ពយើងដូចកាលពីគ្រាដំបូង បើប្រសិយើងនឹងទៅតាមផ្លូវនោះក៏មិនស្រួល គួរតែនឹងលើកទៅតាមផ្លូវស្រុកអឹមប៉េង, ប៉ូតៅ ដើរចៀសប្របលបចូលទៅវាយយកស្រុកអឹមប៉េង, ប៉ូតៅឲ្យបានជាមុនសិន ប្រសិនបានស្រុកទាំងពីរតំបន់នេះកាលណា ក៏មុខជានឹងធ្វើការស្រួលរហូតទៅបានដល់ស្រុកឡុកអៀង តើនរណានឹងទទួលអាសាទៅធ្វើការគ្រានេះបាន?

**កៀងអ៊ុយ** និង**អងប៉េង**ក៏ឆ្លើយជម្រាប**ខុងបេង**ទទួលខ្លួនថា យើងខ្ញុំនឹងសុំអាសាទៅឯង **ខុងបេង**មានអំណរណាស់ ទើបចាត់ពលឲ្យយ៉ាងរហ័ស ក្នុងម្នាក់មួយម៉ឺន កំណត់ឲ្យ**កៀងអ៊ុយ**លើកទៅវាយយកស្រុកប៉ូតៅ ឲ្យ**អងប៉េង**ទៅវាយយកស្រុកអឹមប៉េង ទាំងពីរនាយក៏គំនាប់លាលើកទ័ពចេញទៅ។

ឯ**ទៀវខាប់**នោះ លុះបានលើកទ័ពទៅដល់ស្រុលឡេអាន់ បានដឹងដំណឹងច្បាស់ក៏ជម្រាបប្រសាសន៍**កោឈុយ**ថា គ្រានេះកងទ័ពស្រុកសែឈ្មួនលើកមកយកបន្ទាយតាន់ឆងបានហើយ ឯ**ហោកជៀវ**ក៏ទទួលអនិច្ចកម្មទៅហើយ គយទឹកន្លៀតឈ្មោះសាន់គួន ក៏បានទៅសត្រូវអស់ ឥឡូវនេះ**ខុងបេង**លើកទ័ពធំមកតាំងនៅតំបន់ភ្នំគីសាន់។ **កោឈុយ**ឮដូច្នោះក៏ធ្វើសំបុត្រមកក្រាបបង្គំទូលព្រះចៅ**ចូយ៉យ** ហើយទើបប្រឹក្សាគ្នាថា កងទ័ព**ខុងបេង**គ្រានេះ មុខជានឹងលើកមកផ្លូវស្រុកប៉ៃសៀ និងស្រុកយង់ជីវជាប្រាកដ នឹងទុកចិត្តមិនបាន ទើបចាត់**ទៀវខាប់**ឲ្យនៅរក្សាស្រុកឡេអាន់ ឲ្យ**ស៊ុនឡេ**ទៅរក្សាស្រុកយង់ជីវ ឯខ្លួន**កោឈុយ**ឯងក៏លើកពលទៅការពារស្រុកប៉ៃសៀ។

ខណៈនោះ ព្រះចៅ**ចូយ៉យ**បានជ្រាបតាមសេចក្ដីសំបុត្រមកហើយ ក៏ទ្រង់ព្រះវិតក្កណាស់ ទទួលមាននាហ្មឺននាំព័ត៌មានទៅក្រាបទូលថា ឥឡូវស្រុកកាំងតាំងនិងស្រុកសៃឈ្លួនជាសម្ព័ន្ធមេត្រីនឹងគ្នាហើយ គិតគ្នានឹងលើកកងទ័ពសន្ធប់គ្នាមកប្រទូសរ៉ាយស្រុកយើង ឯ**ឡុកស៊ុន**ក៏ត្រៀមពលទាហានជាស្រេច គុំនឹងលើកទ័ពប្រសព្វចូលមកក្នុងរវាងពីរថ្ងៃ ឬបីថ្ងៃនេះហើយ។

ព្រះចៅ**ចូយ៉យ**ទ្រង់ព្រះសណ្ដាប់ក៏ថប់ព្រួយក្នុងព្រះទ័យ ទើបត្រាស់រៃថា បើទ័ពគេទាំងពីរស្រុកនឹងលើកទ័ពមកសម្រុកធ្វើទុក្ខយើង ៗមិនលំបាកណាស់ទៅហើយឬ? **សុម៉ាអ៊ី**ថា ព្រះអង្គកុំទ្រង់វិតក្កឡើយ ព្រោះស្រុកកាំងតាំងមិនប្រុងនឹងមកប្រទូសរ៉ាយយើងទេ គេទេតើជាសត្រូវនឹងគ្នា **ខុងបេង**គិតតែចង់រេវា តាំងពីគ្រាតំបន់ហៅតេងមិនទាន់លុបកំហឹង ឥឡូវ**ខុងបេង**បារម្ភខ្លាចក្រែងទ័ពយើងនឹងលើកទៅវាយស្រុកសៃឈ្លួន ខ្លាច**ស៊ុនគួន**ភ្លូយបណ្ដោយពីក្រោយយើង បានជាក្លែងចាត់ចែងមនុស្សឲ្យទៅប្រចុបប្រចែងស្រុកកាំងតាំងជាផ្លូវមេត្រីគ្នា ឯស្រុកកាំងតាំងក៏ក្លែងសេចក្ដីធ្វើឲ្យស្ដាប់ចិត្តទទេៗ តែកុំឲ្យខ្មាស ដែល**ឡុកស៊ុន**បានប្រកាសប្រមូលពលទុកបម្រុងការទាំងម្ល៉េះ សំណេះនឹងឲ្យ**ខុងបេង**ជឿទុកក្នុងពោះជាស្មោះត្រង់ប៉ុណ្ណោះ មុខជា**ឡុកស៊ុន**នឹងស្រវាព្រួតខាងចុងដៃ សូមព្រះអង្គទ្រង់កុំព្រួយព្រះទ័យនឹងកងទ័ពស្រុកកាំងតាំងនោះធ្វើអ្វី។

ព្រះចៅ**ចូយ៉យ**បណ្ដោយថា អ្នកនិយាយនេះគួរស្ដាប់ណាស់ ឃើញថាមានប្រាជ្ញាដែលចេះឆ្លៀវឆ្លាសក៏សុខុម គឺថាអ្នកបានចេះដឹងធំរហូតទៅបាន។ ខណៈនោះ ព្រះចៅ**ចូយ៉យ**ក៏តាំង**សុម៉ាអ៊ី**ឲ្យពេញទីជាមេទ័ពដ៏ចម្បងបំផុត ឲ្យទាំងអាជ្ញាសិទ្ធិគ្រប់ប្រការ **សុម៉ាអ៊ី**ទទួលព្រះរាជឱង្ការត្រាតាំងហើយ ក៏ថ្វាយបង្គំលាចេញមករៀបប្រមូលពលយោធានឹងលើកចេញទៅ លុះលើកទ័ពទៅដល់ស្រុកឡេងអាន់ក៏ចាត់**ទៀវខាប់** និង**តៃឡេង**ឲ្យនាំពលដប់ម៉ឺនទៅភ្នំគីសាន់ ចាំទទួល**ខុងបេង**។

**កោឈុយ, ស៊ុនឡេ** លុះដឹងដំណឹងថា **សុម៉ាអ៊ី**លើកទ័ពមកបញ្ឈប់នៅភ្នំគីសាន់ ខ្លួន**សុម៉ាអ៊ី**នៅស្រុកឡេងអាន់ ក៏នាំគ្នារួសរន្ធាន់លើកទៅរក**សុម៉ាអ៊ី** ៗក៏សួរថា ដែលអ្នកទាំងពីរបានទៅឈររក្សាស្រុកទាំងពីរតំបន់នោះ បានតតាំងច្បាំងនឹង

**ខុងបេង**ខ្លះដែរឬទេ? **កោឈុយ** និង**ស៊ុនឡេ**ឆ្លើយជម្រាបថា យើងខ្ញុំទាំងពីរបានទៅតាំងទ័ពនៅតំបន់នោះ មិនបានប្រទះទ័ព**ខុងបេង** លើកមកច្បាំងទេ។ **សុម៉ាអ៊ី**សួរថា បណ្ដាអាណាខេត្តទាំងពួងនោះ អ្នកឯងដឹងថានរណាអាក្រក់ល្អដូចម្ដេចខ្លះ?

**កោឈុយ, ស៊ុនឡេ**ឆ្លើយថា អាណាខេត្តធំៗនោះ យើងខ្ញុំដឹងដំណឹងជាល្អទាំងអស់ តែទីប៉ូតៅ និងអ៊ឹងប៉េងទាំងពីរអន្លើនេះ មិនបានឮដំណឹងជាយ៉ាងណា។ **សុម៉ាអ៊ី**ថា បើដូច្នោះអ្នកឯងទាំងពីរនាក់ ចូរនាំពលម្នាក់មួយពាន់លើកទៅរក្សាស្រុកនោះឲ្យឆាប់ចុះ កុំបីឲ្យមានអន្តរាយ បើអ្នកឯងបានចាត់ការរក្សាទីទាំងឡាយខ្ជាប់ខ្ជួនមួនមាំហើយ ត្រូវជួយគ្នាខ្ដាត់ស្កាត់ទ័ព**ខុងបេង** តាំងវាយពីក្រោយឲ្យរាវែកបែកតតាំង ដើម្បីយើងនឹងធ្វើចម្បាំងចាប់យកខ្លួន**ខុងបេង**ឲ្យបាន។

**កោឈុយ, ស៊ុនឡេ** ក៏គំនាប់លា**សុម៉ាអ៊ី**លើកពលចេញទៅ លុះទៅដល់កណ្ដាលផ្លូវមានល្បាតសេះមកប្រាប់ថា ស្រុកប៉ូតៅ និងស្រុកអឹមប៉េង ទ័ព**ខុងបេង** វាយយកបានទៅហើយ ឥឡូវសត្រូវលើកពលមកនៅក្រៅស្រុកចម្ងាយផ្លូវប្រហែលមួយរយសិន (៤ គ.ម) **កោឈុយ, ស៊ុនឡេ** ឮដូច្នោះក៏ភ័យណាស់ ទើបប្រឹក្សាគ្នាថា កងទ័ពស្រុកសែឈួនលើកមកវាយស្រុកយើងទាំងពីរបានហើយ ហេតុម្ដេចក៏ទៅជាលើកពលចេញទៅនៅក្រៅស្រុកវិញដូច្នេះ ជាការប្លែកណាស់ ប្រហែលវាក្លែងកលឧបាយបញ្ឆោតយើង ៗនឹងកន្លងចូលទៅម្ដេចបាន ទើបនាំគ្នាលើកពលយោធាត្រឡប់ទៅវិញ ស្រាប់តែឮសំឡេងផាវអុជលើកំពូលភ្នំ ទាំងពីរនាយក៏ស្ដុតរន្ធត់ស្មារតីក្រឡេកទៅឃើញ**ខុងបេង**តែងខ្លួនស្អាតបាត កាន់ផ្លិតរោមសត្វជិះរទេះតូច។ **គួនហ៊ុន, តៀវប៉ោ**កាន់គ្របីដើរឆ្វេងស្ដាំ លើកពលប្រចាំស្កាត់ទ័ពដល់ជើងភ្នំ **កោឈុយ, ស៊ុនឡេ** ក៏ស្ដាំងកាំងនៅទីនោះ។

**ខុងបេង**ស្រែកថា អានាយទាហានពីរនាក់ កុំរត់ឲ្យពិបាកឡើយ ត្រូវចូលមកគំនាប់អញតាមសុភាពចុះ ឯកលរបស់**សុម៉ាអ៊ី**នោះកន្លងអញមិនបានទេ អញដឹងដល់អស់ហើយ បើឯងមិនចូលមក អញនឹងឲ្យទាហានព្រួតចាប់ខ្លួនយកសម្លាប់ឥឡូវនេះ។ **កោឈុយ, ស៊ុនឡេ**ក៏ខ្លាចពន់កម្លាំងញាក់សេះនឹងរត់ ទទួល**អងប៉េង, កៀងអ៊ុយ**លើកទាហានព័ទ្ធស្កាត់ពីក្រោយ ចូលមកកាប់សម្លាប់ទាហានស្លាប់ច្រើន

ដេរដាស លោតចោលសេះរត់ឡើងទៅលើភ្នំ **តៀវប៉ៅ**ក៏បំផាយសេះដេញប្រុងនឹងចាប់យកខ្លួន បង្ខំសេះទៅដោយកម្លាំងជាន់លើថ្មរអិលភ្លាត់ធ្លាក់ពីលើសេះសន្លប់ចុះ **តៀវប៉ៅ**គ្រានោះក៏ធ្លាក់ទៅត្រូវមុខលើថ្មបែករបួសជាទម្ងន់ ពួកទាហានក៏ស្ទុះចូលទៅទន្ទ្រានគ្រាហ៍នាំខ្លួនយកមក **កោឈុយ, ស៊ុនឡេ**រត់ដកខ្លួនឆ្ងាយរួចពីចំណោមទៅបាន **ខុងបេង**ក៏ឲ្យទាហាននាំខ្លួន**តៀវប៉ៅ**ទៅរក្សារបួសឯស្រុកសែឈួន។

ឯ**កោឈុយ, ស៊ុនឡេ** ក៏រត់ទៅជម្រាប**សុម៉ាអ៊ី**តាមសេចក្ដីដែលបានទៅច្បាំងតនឹងសត្រូវគ្រប់ប្រការ។ **សុម៉ាអ៊ី**ថា ដែលអ្នកទាំងពីរបែកទ័ពមកវេលានេះ យើងក៏មិនប្រកាន់ទោសទេ ព្រោះ**ខុងបេង**មានកលឧបាយច្រើន យើងដឹងមិនដល់ អ្នកឯងចូរនាំគ្នាស្រូតរូតទៅរក្សាស្រុកប៉ៃសៀ និងស្រុកយង់ជីវឲ្យគង់ បើទាហាន**ខុងបេង**លើកចូលទៅជន្លេញជន្លប្រការម្ដេច ក៏កុំឲ្យចេញតស៊ូនឹងគេឡើយ យើងនឹងគិតកលឧបាយមួយយ៉ាងកម្ចាត់**ខុងបេង**ចេញឲ្យបាន។ **កោឈុយ, ស៊ុនឡេ**គំនាប់ហើយក៏លើកពលតម្រង់ទៅស្រុកប៉ៃសៀ។ **សុម៉ាអ៊ី**និយាយនឹង**ទៀវខាប់** នូវ**តៃឡេង**ថា ឥឡូវ**ខុងបេង**វាយបានស្រុកប៉ូតៅ និងស្រុកអ៊ឹមប៉េងនោះ ឃើញថាពួកវាមិនបាននៅក្នុងបន្ទាយទេ ហេតុនេះ ត្រូវអ្នកឯងគិតទៅបញ្ចុះបញ្ចូលមនុស្សនៅក្នុងស្រុកដែលនឹងទៅនោះ ត្រូវនាំពលមួយម៉ឺនលើកស្រូតកាត់ផ្លូវតូចតម្រង់ទៅពីក្រោយវាយទម្លាយបន្ទាយ**ខុងបេង**ចូលទៅឲ្យបាន យើងនឹងនាំទាហានលើកព័ទ្ធទៅពីខាងមុខ វាយខ្ទប់ប្រសព្វគ្នាដណ្ដើមយកបន្ទាយឲ្យបាន បើបានសមប្រកបហើយ ត្រូវធ្វើការអ្វីនឹងទៅខ្លាច**ខុងបេង**នោះ ត្រូវគិតកម្ចាត់ចេញជាក្រោយគង់បានដោយងាយណាស់ **ទៀវខាប់, តៃឡេង**ក៏លើកទាហានច្រូតកាត់តម្រង់ទៅ។

ឯ**ខុងបេង**នោះ ក៏និយាយនឹងនាយទ័ពនាយកងទាំងពួងថា យើងមកវាយបានស្រុកពីរតំបន់នេះ អាចថាមុខជា**សុម៉ាអ៊ី**សម្គាល់ថា យើងចូលទៅនៅក្នុងហើយ បើដូច្នេះ ពេលយប់នេះមុខជាវានឹងចាត់ទាហានច្រូតកាត់តម្រង់មកលុកបន្ទាយជាប្រាកដ **ខុងបេង**ក៏តាំងចាត់រទេះដាក់ឈ្នួនភ្លើងទុកជាច្រើន ហើយបំបែកទាហានឲ្យទៅបង្កប់នៅក្នុងព្រៃសងខាងផ្លូវ ចាំស្កាត់ទ័ព**សុម៉ាអ៊ី**ដែលលើកមក។ លុះដល់ពេលយាមពីរប្លាយ **ទៀវខាប់, តៃឡេង** ក៏លើកពលមកដល់ជិតបន្ទាយ ពួកទាហានទាំង

ឡាយបានឮសូរសំឡេងមនុស្សនៅលើកំពូលភ្នំ ក៏សំងំរង់ស្តាប់ ឯ**ទៀវខាប់**ក៏ស្រូតបរសេះវិលគេចទៅក្រោយ ហើយបង្គំពលទាំងឡាយដែលរង់នៅទីនោះឲ្យខំស្រូតទៅមុខទាន់គ្នា ស្រាប់តែក្រឡេកឃើញរទេះខ្សែភ្លើងដែលទាហាន**ខុងបេង**រុញចូលមកស្កាត់ពីក្រោយ ក៏តក់ស្លុតរន្ធត់វិញ្ញាណ ទើបស្រែកហៅទាហានមុខឲ្យថយវិលត្រឡប់ក្រោយ ស្រាប់តែឮសូរផាវនិងឃើញពន្លឺភ្លើងភ្លឺជុំវិញខ្លួន ឮសូរទាហានស្រែករំពងអឺងកងទ័ពចូលមក **ខុងបេង**នៅលើកំពូលភ្នំស្រែកមកថា **សុម៉ាអ៊ី**សម្គាល់ថាយើងនៅក្នុងកំពែងស្រុកបានជាលើកសម្រុកចូលមកលុកបន្ទាយយើង ឥឡូវអ្នកឯងឃើញភ្លើងភ្លឺ អង្គឺនឹងត្រូវដូចគំនិតដែលគិតទុកនោះក៏ទេ គួរឲ្យនាំគ្នាចូលមកគំនាប់យើងដោយប្រពៃចុះ ខ្លួនអ្នកឯងថាប្រុសចំពោះដូចកូនទាហានតូចមួយ មិនមាននរណានឹងស្គាល់មុខមាត់ទេ ត្រូវតែកាត់សេចក្តីខ្មាសអៀនទៅចុះ កុំកាន់ខ្លួនឡើយ។

**ទៀវខាប់**បានឮពាក្យ**ខុងបេង**ស្រែកមកហើយ ក៏ឲ្យឈឺក្តៅពន់ប្រមាណណាស់ ទើបលើកខ្សែកន្ទុយសេះចង្អុលមុខ**ខុងបេង**ថា ឯងនេះជាជាតិអ្នកស្រែក្រៅមកអួតតាំងខ្លួនធ្វើធំអង់អាចកន្លងចូលមិនខ្លាច ព្រោះដែននេះជាដែនអញ ៗនឹងព្រួតចាប់យកខ្លួនឯងមកចិញ្ច្រាំឲ្យល្អិតខ្ទេចខ្ទី កុំឲ្យក្អែកលេបស៊ីបាន ថាហើយក៏បរសេះទន្ទ្រានឡើងលើភ្នំដើម្បីនឹងចាប់ខ្លួន**ខុងបេង** នោះអស់ទាហានក៏តាំងតែទម្លាក់ដុំថ្មបាញ់នឹងធ្នូសរថ្លាចុះមក **ទៀវខាប់**ឡើងទៅមិនបាន ក៏ញាក់សេះថយចុះមកវិញ **ខុងបេង**ឲ្យទាហាននោះមិញ ស្ទុះចុះមកដេញកាប់សម្លាប់ទាហាន**ទៀវខាប់**ស្លាប់វិនាសជាច្រើនណាស់ ខ្លះក៏របួសពិការនឹងគណនាពុំបាន **ទៀវខាប់** និង**តៃឡេង**ក៏ពារទម្លាយចេញទៅ ទាហាន**ខុងបេង**សឹងញញើតថ្វីដៃ**ទៀវខាប់** នឹងរ៉ាប់ខ្ទប់ទុកពុំបាន ក៏បើកផ្លូវឲ្យចេញទៅ។ ខណៈកាល**ទៀវខាប់**ហែកផ្លូវចេញទៅបានក្នុងថ្ងៃនោះ **ខុងបេង**សម្លឹងមើលលើកំពូលភ្នំ ក៏សរសើរ**ទៀវខាប់**ថា ឈ្មោះនេះឮតែឈ្មោះគេនិយាយមកយូរហើយថាខ្លាំងពូកែ ទើបតែថ្ងៃនេះបានឃើញច្បាស់នឹងភ្នែកថាខ្លាំងពូកែមែនៗ ទាហាននេះបើតទៅមុខគង់វានឹងធ្វើអន្តរាយយើងបានមែន គួរយើងនឹងកម្ចាត់វាចេញឲ្យឆាប់ ទើប**ខុងបេង**លើកពលត្រឡប់ចូលបន្ទាយ។

ឯ**សុម៉ាអ៊ី**វេលានោះ កំពុងតែចាត់ចែងពលទាហាននឹងលើកមក ទទួលឃើញ **ទៀវខាប់**, **តៃឡេង**ស្ដើតស្ដក់ចូលទៅ ក៏ភ័យណាស់ទើបសួរថា ហេតុម្ដេចបានជារត់ស្ដើតស្ដក់មកដូច្នេះ? **ទៀវខាប់**ក៏រ៉ាប់រាយនិយាយប្រាប់**សុម៉ាអ៊ី**ឲ្យស្ដាប់គ្រប់ប្រការ។ **សុម៉ាអ៊ី**ឮហើយក៏តូចចិត្តណាស់ថា **ខុងបេង**នេះមានសតិបញ្ញាអង់អាចណាស់ ទើបត្រឡប់វិលមកបន្ទាយ។ **សុម៉ាអ៊ី**និយាយថា ស្រុកសែឈ្វននោះផ្លូវនឹងទៅឆ្ងាយណាស់ ហេតុនេះបានជាពលខ្មាំងដែលលើកមកពីនាយចំណាយស្បៀងអាហារដោយស្ដួចស្ដើង ដែលវាមកច្បាំងនឹងយើងប្រាថ្នាឲ្យបានជ័យជម្នះឆាប់ៗ បើយើងនឹងចេញតប្រញាប់យើងមិនស្រួលសោះ គួរតែនឹងផ្អាកបង្អង់ឲ្យយូរ ដើម្បីឲ្យវាដាច់ស្បៀងអាហារ បើកាលណាស្បៀងវាស្ដើងស្ដួច មុខជាលើកត្រឡប់ទៅឯង តាំងពីនោះមក **សុម៉ាអ៊ី**ក៏មិនបើកឲ្យទាហានចេញច្បាំងឡើយ។

ឯ**ខុងបេង**ដឹងថា **សុម៉ាអ៊ី**ទំរន់មិនចេញធ្វើសង្គ្រាមដូច្នោះ ក៏ចេះតែប្រើពលឲ្យទៅស្រែកចំអកឲ្យឈឺចិត្តរាល់វេលា **សុម៉ាអ៊ី**ក៏មិនចេញយុទ្ធនាសោះ នៅតែធ្វើពុំដឹងគ្នាប្រមាណជាដប់បួនដប់ប្រាំថ្ងៃ។ ខណៈនោះ**ប៊ីហ៊ុយ**ជាព្រះរាជបម្រើ កាន់ព្រះរាជតម្រាស់ព្រះចៅ**ឡៅសៀន**ប្រទានមកដល់**ខុងបេង**ថា ដ្បិតទ្រង់បានជ្រាបដំណឹងថា មហាឧបរាជវាយបានអាណាខេត្តពីរតំបន់ទ្រង់មានព្រះរាជហឫទ័យសោមនស្សណាស់ ពេលដែលមហាឧបរាជល្មើសខុសពីមុននោះ ទ្រង់ព្រះរាជអនុញ្ញាតលើកឲ្យរួចទោសហើយ ត្រូវមហាឧបរាជនៅឋានន្តរសក្តិតាមដើមដូចដែល **ខុងបេង**បានឃើញសេចក្ដីព្រះតម្រាស់ដូច្នោះ ក៏លើកហត្ថាទាំងទ្វីអញ្ជលីប្រណមបង្គំគំនាប់ទទួលព្រះតេជះពរព្រះចៅ**ឡៅសៀន** តាមប្រវេណីហើយ ក៏ឲ្យ**ប៊ីហ៊ុយ**កាន់សំបុត្រចូលទៅក្រុងវិញ។

**ខុងបេង**គិតឧបាយបញ្ឆោត**សុម៉ាអ៊ី** ក៏ឲ្យទាហានចេញចាកបន្ទាយថយលឿនលយបញ្ឆោតទៅតាំងបោះទ័ពនៅក្បែរផ្លូវ ចម្ងាយប្រមាណបីរយសិន (១២ គ.ម) អ្នកល្បាតសេះក៏នាំដំណឹងទៅប្រាប់**សុម៉ាអ៊ី**ថា **ខុងបេង**លើកកងទ័ពត្រឡប់ទៅហើយ **សុម៉ាអ៊ី**ថា **ខុងបេង**ថយទ័ពទៅវេលានេះ សំណោះនឹងបញ្ឆោតឲ្យយើងដេញតាម បើយើងតាមគង់នឹងត្រូវដោយកលគេជាប្រាកដ **ទៀវខាប់**ឆ្លើយថា **ខុងបេង**

ទាល់ច្រកហាកគំនិត ព្រោះដ្បិតដាច់ស្បៀងអាហារហើយ បានជាថយទ័ពទៅ ហេតុម្ដេចប្រសាសន៍គេចជាមិនលើកទ័ពតាមទៅចោមវាយវិញដូច្នេះ? នឹងមកត្រឡប់ថប់ព្រួយខ្លាចកល**ខុងបេង**ដូច្នេះ ជាការមិនសមសោះ!

**សុម៉ាអ៊ី**ថា ពីឆ្នាំមុននោះ យើងក៏ដឹងថាស្រុកសែឈ្នួនបានស្រូវអង្ករបរិបូរ ពេលនេះក៏ត្រូវលើរដូវស្រូវសាលីទៀតដែរ ឃើញថាពលរេហ៍**ខុងបេង**គង់នៅស៊ីបាន ប្រមាណកន្លះឆ្នាំទៅទៀតមិនអត់ឃ្លានទេ ដែលគេធ្វើជាថយវេលានេះ ចំពោះកលឧបាយហើយ យើងតាមទៅមិនបានទេ។ ហើយ**សុម៉ាអ៊ី**ក៏ចាត់មនុស្សឲ្យទៅតាមស៊ើបមើល រួចត្រឡប់ទៅប្រាប់ថា បានឃើញកងទ័ព**ខុងបេង** តាំងនៅចម្ងាយពីបន្ទាយចាស់ប្រមាណបីរយសិន (១២ គ.ម)។ **ទៀវខាប់**ថា **ខុងបេង**ដាច់ស្បៀងអាហារហើយ បើនឹងលើកបង្ហួសខ្លាចក្រែងយើងដឹង បានជាធ្វើថយជាបន្តិចម្ដងៗ ដែលប្រសាសន៍មិនឲ្យលើកតាមទៅនោះ ខ្ញុំបាទមិនយល់ផងសោះ។

**សុម៉ាអ៊ី**ឃាត់ហាមថា ឯ**ខុងបេង**នោះឡេបខាយច្រើនណាស់ គិតបញ្ឆោតយើងទេ បើខំតាមទៅមុខជាថ្លោះការហើយ។ លុះព្រឹកឡើង **សុម៉ាអ៊ី**ឲ្យបម្រើស៊ើបការណ៍ទៀត បម្រើវិលមកប្រាប់ថា **ខុងបេង**លើកទ័ពថយពីទីនោះទៅទៀតប្រហែលបីរយសិន (១២ គ.ម)។

**ទៀវខាប់**ថា **ខុងបេង**លើកទ័ពរត់ទៅមែនហើយ ប្រសាសន៍មិនឲ្យលើកតាមទៅនោះខុសហើយ បើដូច្នោះខ្ញុំនឹងសុំលើកទ័ពទៅវាយបំបែកឲ្យបាន បើទៅថ្លោះការនឹងសត្រូវយ៉ាងណា ខ្ញុំបាទនឹងទទួលជូនក្បាលឲ្យប្រសាសន៍ជាប្រាកដ តែថាសូមឲ្យប្រសាសន៍លោកទៅជាជំនួយជួយផង។ **សុម៉ាអ៊ី**ឃាត់ហាម**ទៀវខាប់**ជាច្រើនគ្រាក៏មិនស្ដាប់ **សុម៉ាអ៊ី**ថា បើអ្នកឯងចង់ទៅក៏តាមចិត្តចុះ តែកុំគប្បីធ្វើការតាមអំពើចិត្តខ្លួនមិនបានទេ ព្រោះ**ខុងបេង**មានប្រាជ្ញាណាស់ ក្រែងមានបើបង្កប់ទាហានទុកនៅឯណាក៏នឹងថ្លោះការ យើងនឹងលើកជាជំនួយទៅតាមទៀត បើទន់ថយ នឹងបានព្រួតគ្នាជួយ បើអ្នកឯងបានតដៃនឹងកងទ័ព**ខុងបេង**គ្រានេះហើយ ចូរកុំឲ្យទន់ដៃនឹងគេ ត្រូវតែបរពលចូលកាប់កិនគ្នាឲ្យពេញកម្លាំងដោយអង់អាច យើងចាំប្រចាំជូនពីក្រោយ។ **សុម៉ាអ៊ី**បានចាត់ចែងបែងពលឲ្យ**ទៀវខាប់, តែឡេង** បីម៉ឺន

នាក់ ហើយកំជាប់ពាក្យថា ពេលព្រឹកស្អែកនេះ ត្រូវឲ្យអ្នកឯងលើកទៅឲ្យទល់ទ័ពគ្នានឹង**ខុងបេង** តែកុំអាលចូលប្រយុទ្ធគ្នា ត្រូវបង្អង់ទាហានទុកឲ្យក្លាហានសិន ចាំមើលកលការ**ខុងបេង**នឹងធ្វើម្ដេចខ្លះ។ **ទៀវខាប់, តៃឡេង**ទទួលបង្គាប់ហើយ លុះព្រឹកឡើងក៏លើកពលចេញទៅតាំងបន្ទាយតាម**សុម៉ាអ៊ី**ពន្យល់គ្រប់ប្រការ។ **សុម៉ាអ៊ី**ក៏លើកតាមជូនទៅ។

ឯ**ខុងបេង**លុះដឹងថា **សុម៉ាអ៊ី**លើកតាមដូច្នោះ លុះដល់ពេលយប់កណ្ដាលអាធ្រាត្រ ក៏ហៅនាយកងនាយទ័ពទាំងពួងមកប្រឹក្សាថា ទាហាន**សុម៉ាអ៊ី**លើកមកគ្រានេះ មុខជាច្បាំងនឹងយើងដោយមាំមួនណាស់ គង់នឹងចាញ់ឈ្នះគ្នាជាប្រាកដ ឯក្នុងកងទ័ពយើងក៏មិនឃើញមាននរណាដែលគ្រាន់បើ គួរនឹងចេញមុខទៅទទួលអាសាធ្វើការតតាំងនឹងពលខ្មាំងមួយរយ ឬមួយពាន់តែម្នាក់ឯងបាន។ **ខុងបេង**ថាដូច្នោះហើយ ក៏ធ្វើជាសម្លឹងមុខ**អ៊ុយអៀន** ហើយដាក់មុខជ្រប់ **អងប៉េង**ឆ្លើយឡើងថា វេលានេះខ្ញុំបាទនឹងសុំអាសាមហាឧបរាជឲ្យអស់តម្រិះប្រាជ្ញា។ **ខុងបេង**ថា អ្នកឯងមានចិត្តភក្ដីមេត្រីយើង សុំខ្លួនអាសាដូច្នេះ យើងក៏មានសេចក្ដីសោមនស្សណាស់ហើយ តែថាកងទ័ព**សុម៉ាអ៊ី**វេលានេះសុទ្ធតែខ្លាំងពូកែ មិនមែនដូចសព្វគ្រាបើថ្លោះការខាងយើងហើយ ក៏នឹងខូចប្រយោជន៍ច្រើនយ៉ាង។

**អងប៉េង**ថា ខ្ញុំបាទសុំអាសាទៅគ្រានេះ មិនមែននឹងអាល័យនៃជីវិតទេសោះ ទោះជាប្រការយ៉ាងណាក៏ស៊ូតែស្លាប់ បើត្រឡប់ធ្វើឲ្យថ្លោះការដោយពលក្តារខាងគេ សូមជូនក្បាលឲ្យលោកកាត់ចោលទៅចុះ។ **ខុងបេង**បានឮដូច្នោះក៏បញ្ជោះសរសើរ**អងប៉េង**ថា យើងយល់ឃើញថាពួកឯងជាមនុស្សមានសេចក្ដីសត្យពិតត្រង់នឹងយើងពិតៗ តែយើងឃើញថា ខ្លួនអ្នកឯងតែម្នាក់ពុំនិត្យ ទោះនឹងមានថ្វីដៃពូកែស័ក្តិសិទ្ធិយ៉ាងណា ក៏គង់ចេស្ដាឫទ្ធិនឹងទាហាន**សុម៉ាអ៊ី**ពុំបាន ចិត្តយើងចង់រកដៃគូដែលក្លាហានប្រហែលអ្នកឯងឲ្យទៅកំដរជួយជាពីរផង តែមើលមិនឃើញមាននរណាដូចបំណងប្រាថ្នាឡើយ។

**ទៀវអេក**ឆ្លើយឡើងថា មហាឧបរាជកុំជាទុក្ខព្រួយឡើយ ខ្លួនខ្ញុំបាទនេះហើយនឹងសុំអាសាចេញទៅធ្វើការជាមួយនឹង**អងប៉េង**ស៊ូតែស្លាប់ផងគ្នា ឯ**ខុងបេង**

ថា **ទៀវខាប់**ទាហាន**សុម៉ាអ៊ី**ម្នាក់នេះមិនល្អមទេណា អ្នកឯងមកទទួលអាសាចេញមុខទៅដោយប្រមាណមិនស្គាល់កម្លាំងក៏គង់នឹងតស៊ូថ្វីដៃ**ទៀវខាប់**ពុំបាន **ទៀវអេក**ថា ខ្លួនខ្ញុំបាទមួយនេះ ប្រសាសន៍គួររាប់ថាជាសេនាទាហានមួយដែរ ទោះបី**ទៀវខាប់**ខ្លាំងពូកែយ៉ាងណា ក៏ខ្ញុំបាទស៊ូតែស្លាប់មិនញញើតខ្លាចសោះ ទោះបីភ្លាំងភ្លាត់ធ្លោយធ្លោះការយ៉ាងណា ខ្ញុំបាទសូមជូនសិរសាឲ្យប្រសាសន៍កាត់បង់ទៅចុះ។ **ខុងបេង**ឮដូច្នោះក៏គាប់ចិត្តណាស់និយាយថា បើដូច្នោះចូរអ្នកឯងនាំពលម្នាក់មួយម៉ឺនលើកទៅពួនបង្កប់នៅក្បែរផ្លូវច្រកធំ បើឃើញទាហានកងមុខ**សុម៉ាអ៊ី**មក ចូរបណ្ដោយឲ្យវាលើកកន្លងចូលឲ្យហួសមកចុះ កុំអាលដេញតទល់ឡើយ កាលណាហើយបានឮស្នូរផាវ ដែលទាហានយើងអុជប៉ោកព្រៀវឡើង ត្រូវអ្នកឯងទាំងពីរនាក់បរពលចេញមកតទល់បិទខ្ទប់ពីក្រោយ វាយប្រសព្វតាមឲ្យរហ័សតម្រង់មករកយើងខាងមុខ បើឃើញកងទ័ព**សុម៉ាអ៊ី**ប្រចួនមកជួយ ត្រូវឲ្យ**ទៀវអេក** ងាកត្រឡប់ពលទៅទប់ទល់កងទ័ព**សុម៉ាអ៊ី** កុំឲ្យវានទីចូលមកជួយគ្នាបាន យើងនឹងគិតអានធ្វើឧបាយមួយជួយអ្នកឯងទៀត។ **អងប៉េង**និង**ទៀវអេក**ទាំងពីរនាយទទួលបង្គាប់**ខុងបេង**ហើយ ក៏លើកទាហានទាំងពីរម៉ឺនទៅពួនបង្កប់តាមពន្យល់**ខុងបេង**។

**ខុងបេង**បានឲ្យហៅ**កៀងអ៊ុយ**និង**លៀវហ្វ៊**ទៅនិយាយការ ហើយក៏សរសេរអក្ខរាជាសេចក្ដីស្ងាត់ស៊កក្នុងស្រោមបិទជិត ហើយហុចឲ្យទៅ**កៀងអ៊ុយ** រួចផ្ដាំបង្គាប់ថា អ្នកឯងទាំងពីរនាក់ត្រូវតែនាំពលបីពាន់ទៅពួនបង្កប់លើកំពូលភ្នំ បើឃើញទ័ព**សុម៉ាអ៊ី**ចោមព័ទ្ធ**អងប៉េង** និង**ទៀវអេក**នៅក្នុងចំណោមនឹងដោះមិនរួចហើយ ត្រូវហែកស្រោមមើលសំបុត្រនេះ ហើយត្រូវធ្វើតាមបង្គាប់គ្រប់ប្រការឲ្យដូចសំបុត្រនេះចុះ **កៀងអ៊ុយ**និង**លៀវហ្វ៊**ទទួលបង្គាប់ហើយក៏គំនាប់លាលើកពលចេញទៅ។ **ខុងបេង**ក៏បង្គាប់**ង៉អ៊ី** និង**ង៉ប៉ាន់, ម៉ាតុង, ទៀវងី**ថា ពេលព្រឹកស្អែកនេះបើទ័ព**សុម៉ាអ៊ី**លើកមកដល់ ចូរអស់អ្នកកុំដណ្ដើមយកជ័យជម្នះឡើយ ត្រូវធ្វើជាត្រឡប់មុខវិលមកក្រោយបណ្ដោយវិញ។ **ង៉អ៊ី, ង៉ប៉ាន់, ម៉ាតុង** និង**ទៀវងី**ទទួលបង្គាប់ហើយក៏នាំពលទាហានទៅរង់ចាំ។

**ខុងបេង**ក៏ចាត់**គួនហ៊ិន**ឲ្យនាំពលប្រាំពាន់ទៅពួនបង្កប់នៅក្បែរភ្នំ ដាក់កំហិតថា បើឃើញទង់ជ័យក្រហមនៅលើភ្នំបោកពន្យល់កាលណា ឲ្យបរពលចូលបំពារកងទ័ព**សុម៉ាអ៊ី**ទៅចុះ។

លុះដល់ពេលព្រឹក **ទៀវខាប់**នាយកងទ័ព**សុម៉ាអ៊ី, សុម៉ាអ៊ី** និង**តៃឡេង**ក៏លើកព្យុហៈទ័ពពពាក់ពពូនចូលមក ប្រទះនឹងកងទ័ព**ង៉ីអ៊ី, ង៉ីប៉ាន់, ម៉ាតុង** និង**ទៀវង៉ី** ទាំងសងខាងក៏តាំងប្រយុទ្ធគ្នាជាពន្លឹកមហិមា កងទ័ពស្រុកសែឈ្នះច្បាំងរាថយក្រោយ បណ្ដោយទៅចម្ងាយផ្លូវប្រមាណ៤០០សិន (១៦ គ.ម)។

ខណៈនោះជារដូវគិម្ហន្ត ទាហាន**សុម៉ាអ៊ី**ក៏ដេញបំពារមកតាមកម្លាំង បែកញើសជោកទាំងអស់គ្រប់ៗគ្នា សឹងតែថមថយកម្លាំងចុះ ឯ**ខុងបេង**ឡើងទៅនៅលើកំពូលភ្នំ ក្រឡេកមើលមកឃើញទាហាន**សុម៉ាអ៊ី**ហត់នឿយកម្លាំងទន់ចុះ ឯខ្លួន**គួនហ៊ិន**ដែលបង្កប់ពលខាងណោះ លុះឃើញទង់ក្រវីលើកំពូលភ្នំ ក៏បង្ហំពលចូលប្រកាប់ ឯកងទ័ព**ង៉ីអ៊ី, ង៉ីប៉ាន់, ម៉ាតុង** និង**ទៀវង៉ី**ទាំងបួននាយ ក៏ត្រឡប់ងាកមុខមកវាយខ្ទប់ប្រសព្វគ្នានឹងទ័ព**គួនហ៊ិន**។ **ទៀវខាប់** និង**តៃឡេង**ក៏មិនរាថយ រឹតតែដេញទាហានបណ្ដោយទៅមុខ លុកប្រកាប់គ្នាជាជ្រួលច្របល់ **អងប៉េង** និង**ទៀវអេក**បានចំណាប់ ក៏បរពលចូលតពីម្ខាង កងទ័ព**ទៀវខាប់, តៃឡេង**ក៏ស្លាប់វិនាសដេរដាសរបួសពិការនឹងគណនាត្រារាប់ពុំបាន។

**សុម៉ាអ៊ី**ឃើញដូច្នោះ ក៏លើកទ័ពជំនួយចូលទៅប្រច្បូនជួយពីក្រោយ ចោមព័ទ្ធទ័ព**អងប៉េង** និង**ទៀវអេក**នៅកណ្ដាលចំណោម។ **ទៀវអេក**ក៏បំបែកទាហានចោមទល់ទ័ព**សុម៉ាអ៊ី**។ **អងប៉េង**និង**គួនហ៊ិន**ក៏បរពលចូលព្រួតប្រយុទ្ធគ្នានឹងទ័ព**ទៀវខាប់, តៃឡេង** កងទ័ពទាំងសងខាងក៏ប្រយុទ្ធគ្នាជាជ្រួលច្របល់ ស្លាប់គរជើងលើគ្នាលើទីចម្បាំងនឹងគណនាត្រារាប់ពុំបាន **កៀងអ៊ុយ** និង**លៀវហ្វ៊**នៅលើកំពូលភ្នំឃើញ**សុម៉ាអ៊ី**លើកទ័ពចោមព័ទ្ធ**អងប៉េង** និង**ទៀវអេក**នៅកណ្ដាលចំណោមមើលទៅឃើញទាហានទ្រោមកម្លាំងណាស់ ក៏ហែកសំបុត្រ**ខុងបេង**ដែលនៅនឹងខ្លួននោះមើល ឃើញសេចក្ដីថា បើកងទ័ព**សុម៉ាអ៊ី**ចោមព័ទ្ធ**អងប៉េង** និង**ទៀវអេក**ហើយត្រូវឲ្យស្រួតលើកទ័ពទៅវាយបន្ទាយ**សុម៉ាអ៊ី**ជាប្រញាប់ មុខជា**សុម៉ាអ៊ី**លើកទ័ព

ថយទៅភ្លាម ទោះមិនបានបន្ទាយ**សុម៉ាអ៊ី**ក្តីណា ក៏គង់បានការប្រសើរគាប់យ៉ាងធំមិនលែង **កៀងអ៊ុយ** និង**លៀវហ្វ៊ូ**ក៏លើកទ័ពប្រញាប់ទៅវាយយកបន្ទាយ**សុម៉ាអ៊ី**។

ខណៈកាល**សុម៉ាអ៊ី**លើកទ័ពចេញចាកបន្ទាយមក ក៏ឲ្យភ្នកពិភាល់ចិត្តណាស់ ទើបឲ្យវាយទាហានទុកតាមផ្លូវរៀងមក នោះទាហានដែលនៅតាមផ្លូវឃើញទ័ព **កៀងអ៊ុយ** និង**លៀវហ្វ៊ូ**លើកសំដៅទៅវាយបន្ទាយ ក៏ស្រូតទៅប្រាប់**សុម៉ាអ៊ី**ថា **ខុងបេង**ឲ្យលើកទ័ពទៅវាយយកបន្ទាយយើងហើយ **សុម៉ាអ៊ី**ឮដូច្នោះក៏ភ័យស្លុតស្មារតីឆ្លើយថា យើងដឹងហើយថា **ខុងបេង**ធ្វើកលអស់អ្នករាល់គ្នាមិនស្តាប់ពាក្យយើងសោះ បានជាថ្លោះការដូច្នេះ ថាហើយក៏ឲ្យថយទ័ពត្រឡប់ទៅក្រោយនឹងដណ្តើមយកបន្ទាយ។

**ទៀវអេក**បានចំណាប់ក៏បង្ខំបរពលវាយសង្គ្រុញពីក្រោយ ទាហាន**សុម៉ាអ៊ី**ក៏បែកព្រាត់ព្រាយខ្ចាត់ខ្ចាយស្លាប់បាត់ជាច្រើន **ទៀវខាប់**និង**តែឡេង**ឃើញពលទាហានខ្លួនថ្លោះការដូច្នោះ ក៏លះបង់ពួកពលទាំងអស់ ខំរត់ដោះទម្លាយឲ្យតែរួចខ្លួន **កៀងអ៊ុយ** និង**លៀវហ្វ៊ូ**ឃើញ**សុម៉ាអ៊ី**បែកទ័ពត្រឡប់មកពារ ក៏នាំទាហានយោធាចេញពីបន្ទាយស្រូតទៅប្រជុំគ្នានឹងនាយទ័ពនាយកង ហើយត្រឡប់ទៅរក**ខុងបេង**។

ឯ**សុម៉ាអ៊ី**នោះ លុះទៅដល់បន្ទាយ ឃើញទ័ព**ខុងបេង**លើកវិលត្រឡប់ទៅអស់ ក៏នាំទាហានទាំងនោះចូលបន្ទាយ ហើយនិយាយនឹងនាយទាហានទាំងពួងថា យើងដឹងច្បាស់ជាកលឧបាយរបស់**ខុងបេង** យើងក៏បានហាមប្រាមទទឹងទាស់ នោះអ្នកទាំងអស់គ្នាមិនព្រមស្តាប់យើងសោះ បានជាខ្លួនខាតរេហ៍ពលនិងគ្រឿងសាស្ត្រាវុធអស់ទាំងម្ល៉េះ អំណើះពីនេះទៅមុខ បើនរណាមិនស្តាប់យើង ចចេសចើងអាងតម្រិះប្រាជ្ញានិងថ្វីដៃក្លាហាន បើដូចជាគ្រានេះម្តងទៀត យើងនឹងត្រូវកាត់ក្បាលទុកជាបំរាម។

ខណៈនោះ ទទួលមានមនុស្សកាន់សំបុត្រមកពីសែឈ្នួន ឲ្យដំណឹងមក **ខុងបេង**ថា ដ្បិត**តៀវប៉ៅ**ដែលត្រូវរបួសធ្លាក់ពីលើសេះនោះ ពេទ្យព្យាបាលរក្សារបួសដែលបែកនឹងថ្មសិលាចំលលាដ៍ក្បាល ក៏បណ្តាលកំរើបខ្លាំងឡើងទទួលអនិច្ចកម្មទៅហើយ **ខុងបេង**បានដំណឹងដូច្នោះ ក៏ប្រាសប្រាណយំសោកាត្រាតែក្អួតធ្លាក់

ចេញមកសុទ្ធតែឈាម ហើយដួលសន្លប់ទៅ អស់ភ្នាក់ងារនាយទាហានក៏ភ័យស្លុតវិញ្ញាណទាំងអស់គ្នា ស្ទុះទៅគ្រាប់ឡើង ទើបបានដឹងសេចក្តីតាំងពីថ្ងៃនោះទៅ **ខុងបេង**ក៏ទៅជាឈឺជំងឺជាប់ក្រោកមិនបាន នាយទ័ពនាយកងនឹងទាហានទាំងពួងក៏នាំគ្នាទុក្ខព្រួយសោយដៃមិនចង់ធ្វើការអ្វីសោះ។

លុះកន្លងមកពីរថ្ងៃ **ខុងបេង**ក៏ឲ្យរកខ្លួន**តាំងឃួត** និង**អួនគៀន** ទាំងពីរនាយចូលមកប្រាប់ថា វេលានេះយើងក៏មានអាការៈជំងឺឈឺធ្ងន់ នឹងនិយាយបង្គាប់កិច្ចការតទៅក៏មិនបាន យើងនឹងលើកទ័ពត្រឡប់ទៅក្រុងសែឈ្វនវិញសិន តែថាកុំឲ្យការនេះផ្សាយឮអើកក្រើកឡើយ បើដឹងឮទៅដល់**សុម៉ាអ៊ី**ហើយក៏គង់នឹងលើកទ័ពជាប់តាម សង្គ្រាមយើងក៏នឹងមិនស្រួល ត្រូវអ្នកឯងក្លែងសម្រួល ទាហានទាំងពួងឲ្យប្រុងប្រៀបត្រៀមខ្លួនឲ្យព្រមចុះ។ លុះបង្គាប់ហើយ **ខុងបេង**ក៏ឲ្យរៀបខ្លួន ដល់ពេលព្រលប់ក៏លើកទាហានចេញចាកបន្ទាយ ឲ្យដើរផ្លូវកាត់ស្រូតរូតរះតម្រង់ទៅស្រុកហាន់តុង។ **សុម៉ាអ៊ី**ដឹងថា **ខុងបេង**លើកទ័ពទៅអស់រវាងប្រាំថ្ងៃហើយ ក៏អង្គុយដកដង្ហើមធំថា **ខុងបេង**នេះមានប្រាជ្ញាដូចទេវតា យើងដឹងមិនដល់កលឧបាយគេទេ ទើបឲ្យចាត់ចែងទាហាននៅរក្សាគយដានតាមលំអានផ្លូវប្រទល់ដែន កំជាប់កំជាឲ្យត្រួតត្រាគ្រប់ទីតំបន់ហើយ ក៏លើកទ័ពត្រឡប់ចូលទៅក្រុងឡកអៀង។

**ខុងបេង**នោះ លុះលើកទៅដល់ស្រុកហាន់តុងហើយ ក៏ឲ្យនាយទ័ពនាយកងនិងទាហានទាំងអស់ទៅនៅប្រជុំគ្នា ហើយក៏លើកព្យុហៈយាត្រាទៅរក្សារោគខ្លួននៅក្រុងសែឈ្វន។ ព្រះចៅ**ឡៅសៀន**និងអស់នាហ្មឺនមុខចតុស្តម្ភក្រមការបណ្តាដែលមាននៅក្នុងក្រុងខេត្តក្រៅ ក៏នាំគ្នាទៅសួរអាការជំងឺ**ខុងបេង**មហាឧបរាជដល់ទីគេហដ្ឋានជាអចិន្ត្រៃយ៍។ ព្រះចៅ**ឡៅសៀន** ទតឃើញ**ខុងបេង**ឈឺរ៉ាំរ៉ៃជាទម្ងន់ ក៏ត្រាស់ឲ្យរកពេទ្យដែលចំណានទៅមើលព្យាបាលជាមាំមួនណាស់ រោគដែលឈឺនោះក៏បានសះស្រាល។

*លោកអ្នកអានអាចរកមើលសៀវភៅផ្សេងទៀតតាមរយៈគេហទំព័រ*

www.khmerliterature.wordpress.com

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៧៦

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉**

*(តាំងពីព្រះចៅ**ចូយ៉យ**ចាត់**ចូជិន**ជាមេទ័ពស្តាំ **សុម៉ាអ៊ី**ជាមេទ័ពឆ្វេង **ឡៅហួន**ជាទីប្រឹក្សា ឲ្យលើកទាហាន៥០ម៉ឺនទៅវាយគយគឺមកុក រហូតទៅស្រុកហាន់តុង រហូតដល់**ទៀវខាប់**សេនាឯក**សុម៉ាអ៊ី** ចាញ់កល**ខុងបេង**ស្លាប់នឹងថ្វីដៃ**គួនហ៊ិន, កៀងអ៊ុយ**។ **សុម៉ាអ៊ី**តូចចិត្តលើកទ័ពត្រឡប់ទៅស្រុកឡុកអៀងវិញ ព្រះចៅ**ចូយ៉យ**ជ្រាបទ្រង់ព្រះកន្សែងអាល័យស្តាយ**ទៀវខាប់**។ **ខុងបេង**មានជ័យជម្នះ លើកទ័ពត្រឡប់ទៅស្រុកហាន់តុង ព្រះចៅ**ឡៅសៀន**ចាត់ឲ្យ**ប៊ីហ៊ុយ**ទៅសួរ**ខុងបេង** ១ខឹងនឹង**លីង៉ៀម**បញ្ឆោតឲ្យនាំទៅសម្លាប់ នាហ្មឺនសុំទោសរួច ព្រះចៅ**ឡៅសៀន**ត្រាស់ឲ្យងារ**លីង៉ៀម**ចេញពីរាជការ **ខុងបេង**នឹកអាណិត ក៏តាំង**លីហ្លួង**ជាបុត្រជំនួសបិតា។)*

**លុះដល់ចូលឆ្នាំថ្មី ចូជិន**ក៏មកក្រាបទូលព្រះចៅ**ចូយ៉យ**ថា ដ្បិតកងទ័ពស្រុកសៃឈួនលើកមកញាំញីទល់ខបខណ្ឌសីមាជារាជអាណាខេត្តរឿយៗណាស់ កងទ័ពខាងស្រុកយើងក៏ចាញ់ប្រៀបគេច្រើនគ្រា ទាហានស្រុកសៃឈួនក៏រឹតតែកំរើបធំក្រៃលែងណាស់ វេលានេះថានឹងស្ងៀមនៅមិនបានទេ ព្រោះយូរទៅមុខជាកងទ័ពស្រុកសៃឈួននឹងធ្វើអន្តរាគមស្រុកយើង ឲ្យអាណាប្រជានុរាស្ត្របានសេចក្តីក្តៅក្រហាយឡើងទៀត។ ក្នុងទេសកាលនេះគឺជាគិម្ហន្តរដូវហើយ ទូលព្រះបង្គំជាខ្ញុំនឹងសុំអាសាលើកកងទ័ពទៅជាមួយនឹង**សុម៉ាអ៊ី** ដើម្បីវាយយកស្រុកសៃឈួន និងស្រុកហាន់តុងឲ្យត្រាតែបាន កម្ចាត់រាជសត្រូវកុំឲ្យបៀតបៀនស្រុកយើងបានទៀត។

ព្រះចៅ**ចូយ៉យ**យល់ឃើញត្រូវ ទើបតាំង**ចូជិន**ជាមេទ័ពខាងស្តាំ តាំង**សុម៉ាអ៊ី**ជាមេទ័ពខាងឆ្វេង តាំង**ឡៅហួន**ជាទីប្រឹក្សា ឲ្យកាន់ពលយោធា១៤ម៉ឺន លើកតាម

ផ្លូវគយកៀមកុកនឹងទៅវាយស្រុកហាន់តុង នោះមានល្បាតសេះនាំព័ត៍មានទៅជម្រាប**ខុងបេង**។

ខណៈនោះ **ខុងបេង**ក៏តាំងតែហ្វឹកហាត់ពលទាហានឲ្យមានវិជ្ជាគុនអាវុធសាស្ត្រា ដើម្បីនឹងលើកទៅធ្វើយុទ្ធនា តនឹងកងទ័ពស្រុកឡុកអៀងទៀត លុះឃើញពួកល្បាតទៅប្រាប់ព័ត៍មាន **ខុងបេង**ក៏ឲ្យហៅខ្លួន**ទៀវជី** និង**អងប៉េង** ចូលទៅបង្គាប់ការថា ដ្បិតមានកិត្តិស័ព្ទថា **សុម៉ាអ៊ី** នឹងលើកទ័ពមក៥០ ឬ៦០ម៉ឺន អ្នកឯងត្រូវនាំពលទាហាន១ពាន់ ទៅតាំងនៅតំបន់តាន់ឆងចាំរងទ័ព**សុម៉ាអ៊ី**ទុកឲ្យនឹង រួចសឹមលើកកងទ័ពទៅ **អងប៉េង** និង**ទៀវជី**គំនាប់លា**ខុងបេង**ហើយជម្រាបថា ដំណឹងថា**សុម៉ាអ៊ី**លើកទ័ពមកច្រើនម្ល៉េះ មហាឧបរាជមកបើកពលឲ្យយើងខ្ញុំតែត្រឹម១ពាន់ប៉ុណ្ណេះ កាលណានឹងទៅតស៊ូនឹង**សុម៉ាអ៊ី**បាន នឹងមិនខូចទៅទេឬ?

**ខុងបេង**ថា ហេតុអ្វីអ្នកឯងមកព្រួយបារម្ភដូច្នេះ យើងមិនមែនបញ្ជោតឲ្យអ្នកឯងទៅធ្វើការឲ្យ**សុម៉ាអ៊ី**សម្លាប់ទេ សូម្បីប្រើអ្នកឯងទៅធ្វើការឲ្យថ្លោះធ្លោយដោយកលសត្រូវយ៉ាងណា យើងក៏មិនយកទោសាទេ។ **អងប៉េង** និង**ទៀវជី**ក៏មិនអាចទទួល ចេះតែអង្វរករ**ខុងបេង**ជាច្រើនគ្រា។ **ខុងបេង**ថា អ្នកឯងកុំភ័យព្រួយអ្វីឡើយ យើងប្រើទៅហើយក្នុងវេលានេះ ព្រោះយើងគិតពិគ្រោះមើលក្នុងមណ្ឌលអាកាស ឃើញផ្កាយឫក្សជតាស្រុកឡុកអៀងមានរស្មីអាប់ទាបទន់ណាស់ ក្នុងខែនេះនឹងមានភ្លៀងរំលាជាធំធ្លាក់មកជាយូរថ្ងៃ យើងឃើញថាកងទ័ព**សុម៉ាអ៊ី**នឹងកន្លងចូលក្នុងដែនយើងមិនបានទេ ព្រោះមានទឹកជំនន់ធ្លាក់ពីព្រៃលើនឹងហូរមកលិចលង់កងទ័ព**សុម៉ាអ៊ី**នឹងត្រឡប់ទៅឯង បានជាយើងឲ្យពលអ្នកឯងតិចល្មម បើនឹងឲ្យទៅច្រើនក៏នាំឲ្យលំបាកឥតអំពើទទេ ខ្លួនយើងនឹងទៅរៀបពលរេហ៍ឯស្រុកហាន់តុងទុកឲ្យព្រមព្រៀង បើ**សុម៉ាអ៊ី**ថយទៅហើយ យើងនឹងលើកទ័ពសន្ធាប់ថែមពីក្រោយទៅ មិនបង្អង់នៅឲ្យរេហ៍ពលបានសេចក្តីលំបាក កងទ័ពស្រុកឡុកអៀងគង់ថ្លោះការផងយើង។ **អងប៉េង** និង**ទៀវជី**ក៏មានសេចក្តីសោមនស្សត្រេកអរណាស់ គំនាប់ហើយក៏លើកពលចេញទៅ។

ឯ**ខុងបេង**នោះ លុះចាត់ការហើយក៏កេណ្ឌប្រមូលទាហានស្រុកហាន់តុងឱ្យបម្រុងឱ្យត្រៀមប្រចាំការ ទាំងស្បៀងអាហារបាយខៅតាកច្រកទៃស្ពាយគ្រប់ខ្លួនកំណត់បម្រុងឱ្យធួនស៊ីបានជាងមួយខែអស់រដូវភ្លៀង ប្រាថ្នាមិនឱ្យពលរាល់គ្នាព្រួយរវល់ដាំបាយស៊ីនឹងបានធ្វើការលឿនរហ័ស។

ឯ**សុម៉ាអ៊ី** និង**ចូជិន** លើកទាហានទៅដល់តំបន់តាន់ឆេង មិនបានឃើញមនុស្សម្ចាស់ផ្ទះ ៗនៅទទេជាច្រើន ទើបឱ្យហៅរកអ្នកស្រុកមកពិចារណាសួរ អ្នកស្រុកឆ្លើយថា កាលណាកងទ័ពស្រុកសែឈួនលើកទៅនោះ ឱ្យទាហានដុតខ្ទេចអស់ជាច្រើន។ **ចូជិន**ឮដូច្នោះ ក៏ប្រឹក្សានឹង**សុម៉ាអ៊ី**គិតលើកទ័ពស្រួតទៅមុខទៀត។ **សុម៉ាអ៊ី**ថា ដែលនឹងលើកកងទ័ពកន្លងចូលទៅទៀតនោះមិនស្រួលទេ ព្រោះវេលាយប់នេះ យើងឃើញផ្កាយរក្សាស្រុកមានរស្មីស្រអាប់ណាស់ ក្នុងខែនេះនឹងមានភ្លៀងធំ នឹងលើកទ័ពទៅនោះមុខជាទាហានបានសេចក្ដីលំបាកខ្លាំងណាស់ សុំឱ្យលោកបង្អង់កងទ័ពទុកនៅទីនេះសិន បើផុតទេសកាលហើយ សឹមលើកទៅចុះ។ **ចូជិន**យល់ឃើញត្រូវផងក៏បង្អង់កងទ័ពទុក។ លុះតមកប្រមាណដប់ថ្ងៃ ក៏បង្អុរធ្លាក់មកមិនរាំងសោះ អស់រវាង៣០ថ្ងៃ ទឹកក្នុងទីនោះជ្រៅប្រមាណបីហត្ថលិចខូចស្បៀងអាហារ បណ្ដាពួកពលទាហានក៏មិនដឹងបើនឹងរកទីសំណាក់អាស្រ័យ អង្គុយដេកឈរក្នុងទីឯណា បានសេចក្ដីលំបាកវេទនា នាំគ្នាទួញយំឮរងំពេញទាំងព្រៃ កិត្តិស័ព្ទនោះឮរន្ទឺទៅដល់ស្រុកឡុកអៀង នាហ្មឺនទាំងពួងក៏នាំគ្នាយកសេចក្ដីក្រាបទូលព្រះចៅ**ចូយ៉យ** សុំឱ្យហៅកងទ័ពត្រឡប់ចូលមកវិញ ព្រះចៅ**ចូយ៉យ**ក៏យល់ឃើញផង ទើបឱ្យមានព្រះតម្រាស់ចេញទៅហៅកងទ័ពត្រឡប់មកវិញ។

**ខុងបេង**ក៏ចាប់យាមមើលដឹងថា **សុម៉ាអ៊ី**លើកទ័ពត្រឡប់ទៅវិញហើយ ទើបនិយាយនឹងពួកទាហានទាំងពួងថា ឥឡូវប្រហែលព្រះចៅ**ចូយ៉យ**ឱ្យមានសំបុត្រមកហៅកងទ័ពត្រឡប់ទៅហើយ និយាយមិនទាន់ផុតពីមាត់ ស្រាប់តែមានបម្រើកាន់សំបុត្រ**អងប៉េង, ទៀវងី**មកជូន**ខុងបេង** សេចក្ដីថា កងទ័ព**សុម៉ាអ៊ី**លើកទៅវិញអស់ហើយ។ **ខុងបេង**មានសេចក្ដីត្រេកអរណាស់ ទើបបង្គាប់អ្នកកាន់សំបុត្រឱ្យប្រញាប់វិលត្រឡប់ទៅប្រាប់**អងប៉េង, ទៀវងី**ថា កុំឱ្យលើកទ័ពតាមទៅឡើយ។

នាហ្មឺនទាំងពួងនាំគ្នានិយាយថា **សុម៉ាអ៊ី**លើកទ័ពត្រឡប់ទៅវិញ បានពេញចំណាប់ខាងយើងហើយ ហេតុម្ដេចបានជាមហាឧបរាជមិនឲ្យលើកទ័ពទៅតាមវាយពីក្រោយដូច្នោះ? **ខុងបេង**ថា ឯ**សុម៉ាអ៊ី**នោះជំនាញស្ទាត់ក្នុងការសង្គ្រាមណាស់ ទោះបីវាលាថយទ័ពទៅគ្រានេះក៏មិនមែនទៅទទេ មុខជាមានតែងកលឧបាយឲ្យទាហានពួនបង្កប់ទុកចាំទទួលទ័ពដែលតាមជាប្រាកដ យើងនឹងតាមទៅក៏មិនលែងត្រូវលើកលឧបាយរបស់**សុម៉ាអ៊ី**ទេ ត្រូវបណ្ដោយឲ្យវាទៅចុះ ហើយសន្សឹមយើងលើកទាហានទៅចាំនៅទីចាំកុកយកតំបន់គីសាន់ជាមុន កុំឲ្យ**សុម៉ាអ៊ី**ដឹងខ្លួនទាន់។ អស់មន្ត្រីទាំងពួងឆ្លើយថា ដែលមហាឧបរាជទៅស្រុកទៀងអាន់នោះ ទៅនឹងផ្លូវដទៃមិនបានឬ? ឬក៏ចំពោះតែនឹងដើរទៅតាមផ្លូវភ្នំគីសាន់មួយ? យើងខ្ញុំទាំងអស់គ្នាមិនពេញចិត្តសោះ ព្រោះឃើញថាបានដើរទ័ពទៅតាមផ្លូវនេះបីគ្រាមកហើយ មិនបានធ្វើការអ្វីសោះ។ **ខុងបេង**តបថា តំបន់គីសាន់នោះជាមណ្ឌលកណ្ដាលនៃទីប្រជុំក្រុងទៀងអាន់ បើនឹងកេណ្ឌកងពលទាហានឬស្បៀងអាហារផ្សេងៗ ក៏អាស្រ័យស្រុកឡុងសេ ៗនោះក៏មករួមតែផ្លូវគីសាន់ មួយទៀតក៏ជាច្រកភ្នំជ្រោះជ្រលងដងស្ទឹង បើនឹងបង្កប់ទាហានក៏បានច្រើន ឬនឹងធ្វើការសង្គ្រាមក៏បានចំណាប់ ទើបយើងដើរទៅតាមផ្លូវនោះ ព្រោះឃើញហេតុដូច្នោះ។ អស់នាយទាហានបានឮដូច្នោះ ក៏លើកដៃឡើងគំនាប់សរសើរ**ខុងបេង**ថា មានប្រាជ្ញាដូចទេវតា។

ខណៈនោះ **ខុងបេង**អាចារ្យក៏ចាត់ប្រើ**អ៊ុយអៀន, ទៀវងី, តៅខេង** និង**តាន់សេក**ឲ្យនាំពលលើកទៅតាមផ្លូវគីកុក ហើយឲ្យ**ម៉ាតាយ, អងប៉េង, ទៀវអេក** និង**ម៉ាតុង**នាំពលទៅតាមផ្លូវតំបន់ចាំកុក កំណត់ឲ្យលើកចេញព្រមគ្នាពីទីភ្នំគីសាន់ លុះចាត់ចែងគ្រប់សណ្ឋានរួចហើយ ក៏ឲ្យ**គួនហ៊ិន**និង**លៀវហ្វ៊ា**ជាមេកងទ័ពមុខ **ខុងបេង**ក៏លើកទ័ពហ្លួងចេញទៅ។

ខណៈកាល**សុម៉ាអ៊ី** និង**ចូជិន**លើកថយចាកទីតំបន់តាន់ឆងនោះ គិតបារម្ភខ្លាច**ខុងបេង**នឹងលើកទ័ពតាម ក៏លើកទ័ពសំរៀមទៅតាមមាគ៌ាជាប្រក្រតី មិនបានស្រូតរូតរែរហ័ស សេះបម្រើទៅឲ្យដំណឹងដល់ពីរគ្រាថា មិនបានឃើញកងទ័ព**ខុងបេង**លើកតាមមកទេ។ **ចូជិន**និយាយនឹង**សុម៉ាអ៊ី**ថា យើងដើរកងទ័ពសំរៀម

ដូច្នេះ អស់ពលសេនាទាហានមានសេចក្ដីលំបាកវេទនាណាស់ វេលានេះឃើញថា **ខុងបេង**មិនបានលើកទ័ពតាមមកទេ យើងត្រូវតែដើរស្រូតរូតឲ្យលឿនទៅចុះ។ **សុម៉ាអ៊ី**ថា ដែល**ខុងបេង**មិនបានលើកទ័ពតាមយើងដូច្នេះ ព្រោះហេតុថា ខ្លាចក្រែងយើងនឹងបង្កប់ទាហានទុក ទើបបណ្ដោយឲ្យយើងដើរមកដោយស្រួល កងទ័ពយើងបន្ទាយមកក៏ច្រើនថ្ងៃហើយមុខជាមិនតាមមែន ប្រហែល**ខុងបេង**តាំងទ័ពនៅទីភ្នំគីសាន់។ **ចូជិន**ថា ខ្ញុំមិនយល់ឃើញដូច្នោះផងសោះ។ **សុម៉ាអ៊ី**ថា លោកមិនជឿខ្ញុំ សូមឲ្យញែកកងទ័ពទៅម្នាក់មួយផ្លូវចុះ លោកត្រូវទៅនៅរក្សាទីចាំកុក គយទិសខាងលិច ខ្ញុំនឹងទៅរក្សាគីកុកទិសខាងកើត បើក្នុងដប់ថ្ងៃមិនឃើញ**ខុងបេង**លើកទ័ពមកទេ ខ្ញុំនឹងទៅគំនាប់លោកដល់បន្ទាយ សូមឲ្យលោកយកម្សៅលាបមុខខ្ញុំចុះ ហើយឲ្យលោកយកអាវស្រីបំពាក់ផ្ទាល់ខ្ញុំ ឲ្យបានសេចក្ដីខ្មាសអស់បណ្ដាទាហានទាំងពួង។

**ចូជិន**ថា បើ**ខុងបេង**លើកទ័ពមកដូចពាក្យលោកថា ខ្ញុំក៏នឹងយកក្រមួននិងសេះល្អដែលព្រះចៅ**ចូយ៉យ**ប្រទានខ្ញុំនោះជូនឲ្យលោក។ **សុម៉ាអ៊ី** និង**ចូជិន**ភ្នាល់សញ្ញាគ្នាហើយ ទាំងសងខាងក៏លើកបំបែកទ័ពទៅដោយខ្លួន លុះ**សុម៉ាអ៊ី**ទៅដល់តំបន់គីកុកហើយ ក៏ក្លែងខ្លួនបន្លំជាកូនទាហានដើរត្រួតត្រាក្នុងបន្ទាយឃើញទាហានម្នាក់អង្គុយដកដង្ហើមធំជាទុក្ខបន់ស្រន់ថា ភ្លៀងបង្អុរដល់៣០ថ្ងៃហើយបានសេចក្ដីលំបាកណាស់ ហើយថែមទាំងលើកមកនៅទីនេះឲ្យរឹតតែលំបាកវេទនាមួយសាក្រៃលែងទៅទៀត ដូចជាអង្គុយចាំតែរកសេចក្ដីទុក្ខដាក់ខ្លួន បើនឹងត្រឡប់ទៅស្រុកឲ្យបានឃើញមុខភរិយាបុត្រនឹងមិនល្អទេឬ?

**សុម៉ាអ៊ី**បានឮដូច្នោះក៏ត្រឡប់ទៅទីសំណាក់វិញ ឲ្យហៅនាយទ័ពនាយកងមកប្រជុំព្រមគ្នា ហើយឲ្យយកទាហានដែលចរចាមិនត្រូវនោះមកពិចារណាសួរថា យើងមកធ្វើការទាំងនេះ មិនមែននឹងប្រាថ្នារកឲ្យបានសេចក្ដីសុខដាក់ខ្លួនតែម្ដងទេ គឺគិតនឹងឲ្យកើតសេចក្ដីសុខទៅដល់ភរិយាបុត្រអស់អ្នករាល់គ្នានៅឯនាយ ហេតុម្ដេចក៏ខ្លួនមកនិយាយពាក្យដូច្នេះ គឺខ្លួនឯងនេះគ្មានសេចក្ដីភក្ដីស្នេហានឹងម្ចាស់ផែនដីរបស់ខ្លួន ១ស៊ីបៀវត្សមករយពាន់ថ្ងៃក៏នឹងអាស្រ័យបានតែមួយថ្ងៃពុំបានសោះ បើ

ដូច្នោះនឹងទុកខ្លួនឲ្យនៅក្នុងកងទ័ពនេះមិនបានទេ ចំណោរទៅនឹងត្រឡប់ជាសត្រូវខ្លាំង ទើបតាំងបង្គាប់ឲ្យចាប់ខ្លួនទាហាននោះនាំទៅប្រហារជីវិត ពេជ្ឈឃាតក៏កាត់ក្បាលនាំមកមួយរំពេច។

ខណៈនោះ អស់បណ្តាពលទាហានទាំងពួងក៏ភ័យស្លុតស្លាំងទាំងអស់គ្នា **សុម៉ាអ៊ី**ថា អស់អ្នកទាំងឡាយកុំបីភ័យបារម្ភ ត្រូវតែខិតខំធ្វើការយកអាសាផែនដីទៅចុះ បើបានឮស្គរផាវធំដែលយើងអុជឡើងកណ្តាលបន្ទាយវេលាណា ត្រូវតែស្រូតរូតដោយក្តៀវក្លាចូលតយុទ្ធសង្គ្រាមឲ្យអស់ថ្វីដៃ កុំគប្បីគិតខ្លាចសេចក្តីស្លាប់ ទាហានក្នុងកងទ័ពបានឮដូច្នោះក៏ស្រុះគ្នាថយទៅ។

ខណៈកាល**អ៊ុយអៀន, ទៀវងី, តាន់សេក** និង**តៅខេង** លើកទ័ពមកដល់ជិតតំបន់គីកុក ទទួល**ខុងបេង**ប្រើ**តេងជី**តាមមកទាន់ ទាំងបួននាយក៏សួរថា អ្នកមកមានការអ្វី? **តេងជី**ប្រាប់ថា មហាឧបរាជមិនទុកចិត្ត ទើបប្រើខ្ញុំតាមមកកំជាប់អស់លោកថា ឲ្យរវាំងកល**សុម៉ាអ៊ី**ឲ្យមែនទែន ក្រែងវាបញ្ឆោតពលទុកពួនបង្កប់ កុំឲ្យលើកស្រូតចូលរំលងហួសទៅ ត្រូវបង្អែបង្អង់មើលកលការឲ្យច្បាស់លាស់។ **អ៊ុយអៀន**និងនាយកងទាំងបីនាក់ឆ្លើយថា មហាឧបរាជមិនគួរនឹងមកព្រួយរំខាននឹងការប៉ុណ្ណេះសោះ ព្រោះពលទាហាន**សុម៉ាអ៊ី**ត្រាំទឹកមក៣០ថ្ងៃហើយ គ្រឹសអាវុធទទឹកជោកជាំ ស្បៀងអាហារក៏ផ្អូមរលួយ វាគិតតែនឹងឲ្យរបូតរលូតរួចទៅផ្ទះសម្បែងឆាប់ៗ ត្រូវការអ្វីនឹងទៅពួនបង្កប់នោះជាខុសសោះ វេលានេះបានចំណាប់នឹងវាយបំបែកទ័ពខ្មាំងស្រួលហើយ មហាឧបរាជមកនាំឲ្យខ្លាចញញើតទៅវិញដូច្នេះមិនគួរការ។

**តេងជី**ថា មហាឧបរាជនេះ នឹងមានប្រសាសន៍ពីអ្វីៗជម្រាបមកមិនដែលខុសដល់ម្តងណាសោះ ហេតុម្តេចលោកមកចចេសទើសទាស់ទៅរកមហាឧបរាជវិញដូច្នេះ មិនគួរទេ។ **តាន់សេក**ឮដូច្នោះក៏សើចហើយថា មហាឧបរាជនោះ លោកមានគំនិតគិតវិសេសមែនហើយ តែកាលពីគ្រាមុនហេតុម្តេចបានជាឲ្យខូចតំបន់កេតេងទៅ? **អ៊ុយអៀន**ថា កាលពីមុន ខ្ញុំបាទគិតការជូនមហាឧបរាជបានម្តង បើ

សិនណាជាលោកធ្វើតាមគំនិតខ្ញុំ នឹងមិនបានស្រុកឡុកអៀងពីយូរមកហើយឬ? ណាឡើយនឹងមកព្រួយឈឺវេទនាដល់ពលយោធាទាំងម្លេះ?

**តាន់សេក**និយាយនឹង**អ៊ុយអៀន**ថា មហាឧបរាជមិនទុកចិត្តឲ្យមកតាមហាមវំពុកហើយ បើដូច្នោះខ្ញុំនឹងនាំពលមួយពាន់នាក់ទៅតែម្នាក់ឯងស្រួតទៅដល់ភ្នំគីកុក ដើម្បីនឹងតាំងបន្ទាយ បើមហាឧបរាជនៅឯភ្នំគីសាន់ ឲ្យមហាឧបរាជខ្មាសយើងម្តងឲ្យបាន។ ខណៈនោះ**តាន់សេក**ក៏នាំទាហានស្រួតទៅតែម្នាក់ឯង **តេងជី**ក៏ត្រឡប់វិលទៅវិញ។

ខណៈកាល**តាន់សេក**លើកពលចេញទៅ ចម្ងាយផ្លូវប្រហែល៦០សិន (២៤០០ម) ទទួលទាហាន**សុម៉ាអ៊ី**តាំងបង្កប់នៅក្បែរនោះបានចំណាប់ ក៏អុជផាវជាសញ្ញាឡើងហើយលើកគ្នាចេញស្រមកព័ទ្ធជុំទាំងបួនទិស។ **តាន់សេក**នៅកណ្តាលចំណោមក៏បរពលចូលចោមកាប់ឆ្ការ ដើម្បីបំពាររកផ្លូវចេញ ត្រឹមតែស្លាប់ក្នុងទីចំណោមនោះមិញក៏ច្រើនណាស់ សល់នៅខ្លះប្រហែល៦០០ ក៏ចេះតែរុករានទន្ទ្រានកណ្តាលវណរង្គ នឹងរកច្រកចេញក៏មិនរួចសោះ ទ័ព**សុម៉ាអ៊ី**ព្រួតចូលមកជិតឥតចន្លោះត្រង់ណា **អ៊ុយអៀន**បានឮទាហានប៉ោគឹកកង ក៏លើកពលផងចូលជួយដោយពលក្លារ ហែកទម្លាយកងយោធា**សុម៉ាអ៊ី**ចូលទៅដណ្តើមយកខ្លួន**តាន់សេក**និងពលទាហានចេញមកបាន ទាហាន**សុម៉ាអ៊ី**ក៏លើកដេញពីក្រោយ **តៅខេង** និង**ទៀវជី**ក៏លើកទៅជួយគ្នា នាំយកខ្លួន**អ៊ុយអៀន, តាន់សេក**មកបាន ហើយដេញកាប់សម្លាប់ទាហាន**សុម៉ាអ៊ី**រាថយត្រឡប់ទៅ ទាំងបួននាយក៏នាំគ្នាមកបន្ទាយ ទើបថា មហាឧបរាជមានប្រាជ្ញាមែន។

ឯ**តេងជី**នោះ លុះវិលទៅដល់ក៏ចូលទៅជម្រាប**ខុងបេង**ថា មហាឧបរាជប្រើខ្ញុំបាទទៅហាមប្រាមនោះ **អ៊ុយអៀន** និង**តាន់សេក**នាំគ្នាសើចចំអកឲ្យមហាឧបរាជវិញ។ **ខុងបេង**ឮដូច្នោះក៏អស់សំណើចហើយថា **អ៊ុយអៀន**នោះជាមនុស្សចិត្តមិនត្រង់ បើនឹងកម្ចាត់បង់ក៏ឲ្យនឹងស្តាយថ្វីដៃ ត្រូវតែប្រាស្រ័យប្រើប្រាស់ទៅសិន យូរទៅ**អ៊ុយអៀន**គង់ជាក្បត់ផែនដីមិនខាន កំពុងតែនិយាយគ្នាមានបម្រើល្បាតចូលមកជម្រាបថា **តាន់សេក**លើកពលឆ្លងទៅក្នុងដែនគេ ថ្លោះការនឹងពល**សុម៉ាអ៊ី** ពល

រេហ៍ស្លាប់វិនាសច្រើនណាស់ សល់ពលប្រហែល៦០០នាក់ ឥឡូវថយទ័ពមកសំណាក់នៅដើមផ្លូវតំបន់គីកុក។

**ខុងបេង**ឮដូច្នោះក៏គិតថា បើនឹងយកទោសដល់នាយទ័ពនាយកងគ្រានេះ ក៏នឹងប្រែចិត្តគេចរត់ទៅចូលខាងសត្រូវអសារឥតការ ទើបប្រើ**តេងជី**ទៅចរចាយកចិត្តកុំឱ្យគិតព្រួយវិតក្កទុក្ខភ័យអ្វីឡើយ ថាយើងមិនយកទោសទេ ចូរខំឧស្សាហ៍ធ្វើរាជការកែខ្លួនយកជ័យជម្នះចុះ ហើយ**ខុងបេង**ក៏ប្រើទាហានឱ្យស្រូតទៅប្រាប់ **ម៉ាតាយ, ម៉ាតុង, អងប៉េង, ទៀវអេក**ទាំងបួននាយឱ្យលើកពលញែកគ្នាទៅជាពីរកង **ម៉ាតាយ**និង**អងប៉េង**ឱ្យលើកទាហានទៅផ្លូវស្តាំដៃ **ម៉ាតុង** និង**ទៀវអេក**ឱ្យនាំទាហានទៅខាងផ្លូវឆ្វេងដៃ ពេលថ្ងៃត្រង់ត្រូវពួនបង្កប់ ពេលកណ្តាលយប់ឱ្យដើរទៅ បើស្រូតចេញពីតំបន់គីកុកទៅដល់តំបន់គីសាន់ហើយ ត្រូវឱ្យគរគំនរខសដុតភ្លើងទុកក្បែរជាសម្គាល់ ឱ្យចូលវាយយកបន្ទាយ**ចូជិន**ឱ្យបាន យើងនឹងលើកទាហានទៅជួយវាយប្រសព្វជាបីផ្លូវ។

**ម៉ាតុង, ម៉ាតាយ, អងប៉េង** និង**ទៀវអេក** ដឹងដូច្នោះក៏ស្រូតលើកទាហានចេញទៅ **ខុងបេង**ឱ្យរក**គួនហ៊ិន** និង**លៀវហ្វ៊ូ**ចូលមកខ្សឹបប្រាប់សេចក្តីស្ងាត់កំបាំង ហើយឱ្យលើកទ័ពចេញទៅ លុះ**ខុងបេង**លើកទ័ពធំទៅដល់កណ្តាលផ្លូវ ក៏បង្គាប់ **ង៉ឺអ៊ី, ង៉ឺប៉ាន់** ឱ្យលើកកូនទាហានស្រូតទៅមុន។

ឯ**ចូជិន**នៅតាំងបន្ទាយនៅតំបន់ចាំកុកនោះ ក៏លុះដោយសេចក្តីធ្វេសប្រមាទ មិនសង្ឃាតនឹងត្រួតត្រារក្សាកងទាហានឱ្យរបៀបជាពួកទ័ព ពីព្រោះមិនចុះជឿពាក្យ**សុម៉ាអ៊ី**សោះ សម្គាល់ថាកំណត់ដប់ថ្ងៃហើយ ក៏នឹងធ្វើផ្កាល**សុម៉ាអ៊ី**តាមពាក្យប្តេជ្ញា។

លុះកន្លង៧ថ្ងៃ មានទាហានល្បាតទៅប្រាប់ថា ឥឡូវទាហានស្រុកសែឈ្នួនវាយមកតាមផ្លូវតូចខាងច្រកភ្នំច្រើនណាស់ **ចូជិន**ក៏បង្គាប់**ជិនលៀង**ឱ្យនាំទាហានប្រាំពាន់ទៅល្បាតមើលតាមផ្លូវ ដើម្បីបង្ការកុំឱ្យកងទ័ពស្រុកសែឈ្នួនកន្លងចូលមកក្នុងដែនបាន លុះ**ជិនលៀង**នាំទាហានទៅដល់កណ្តាលផ្លូវ ក៏ប្រទះនឹងកងទ័ព**ខុងបេង**លើកមក ក៏ឱ្យទាហានស្រូតលើកទៅ ទាហាន**ខុងបេង**ក៏ពួនបង្កប់អស់

**ជិនលៀង**តាមទៅមិនបានឃើញទាហានស្រុកសែឈ្នួនសោះ ក៏គិតសង្ស័យទើបឲ្យកងទ័ពឈប់បង្អង់ ពួកល្បាតសេះមកប្រាប់ថា កងទ័ពពួនបង្កប់នៅខាងមុខច្រើនណាស់ **ជិនលៀង**ឮដូច្នោះក៏ត្រៀមកងទ័ពបង្គាប់ឲ្យប្រុងប្រយ័ត្នខ្លួនគ្រប់គ្នា។

ខណៈនោះ ទទួល**ង៉អ៊ី, ង៉ប៉ាន់, គួនហ៊ិន, ទៀវអេក** វាយប្រសព្វខ្ទប់ពីក្រោយបណ្ដោយមក ទាហាន**ជិនលៀង**មិនដឹងខ្លួនសោះ នឹងដោះរត់ទៅខាងណាក៏មិនរួចព្រោះសងខាងផ្លូវនោះមានភ្នំអមឆ្វេងស្ដាំ ទាហាន**ង៉អ៊ី, ង៉ប៉ាន់, គួនហ៊ិន, ទៀវអេក**ក៏ស្រែកថា នរណាចូលទៅលន់តួសុំចំណុះចុះចូលដោយសុភាព យើងលើកទោសមិនសម្លាប់ ទាហាន**ជិនលៀង**ប្រទាល់ខ្លួនជួននឹកស្ដាយជីវិត ក៏នាំគ្នាចុះចូលមកខាង**ង៉អ៊ី, ង៉ប៉ាន់**ជាច្រើន។

**ជិនលៀង**ឃើញដូច្នោះក៏គិតមានះ បរសេះចូលទៅកាប់ចាក់សម្លាប់កងទ័ពស្រុកសែឈ្នួន ដើម្បីនឹងដោះខ្លួនឲ្យរួចចេញពីចំណោម **លៀវហ្វ៊**ក៏បរសេះចូលតដៃនឹង**ជិនលៀង**បានពីរភ្លែង ក៏យកដាវកាប់ត្រូវ**ជិនលៀង**ដាច់ពាក់កណ្ដាលខ្លួនធ្លាក់ពីលើសេះស្លាប់ ទាហានទាំងប៉ុន្មានក៏ចូលទៅនៅនឹង**ខុងបេង**ទាំងអស់។ **ខុងបេង**ក៏ឲ្យដោះក្រឹស និងអាវពួកនោះមកបំពាក់ពួកទាហានស្រុកសែឈ្នួន ហើយក៏តាំងបញ្ចុះបញ្ចូលពួកខ្មាំងទាំងប៉ុន្មានឲ្យមកនៅកងក្រោយទាំងអស់គ្នា ទើបឲ្យ**គួនហ៊ិន, លៀវហ្វ៊, ង៉អ៊ី, ង៉ប៉ាន់** នាំទាហានប្រាំពាន់ ដែលក្លែងខ្លួនបន្លំជាទាហាន**ជិនលៀង**លើកស្រូតតម្រង់ទៅបន្ទាយ**ចូជិន**។ លុះ **ង៉អ៊ី, ង៉ប៉ាន់, លៀវហ្វ៊, គួនហ៊ិន**លើកទៅជិតបន្ទាយហើយ ក៏ឲ្យទាហានឈប់នៅក្រៅ ហើយប្រើអ្នកបម្រើម្នាក់ឲ្យជិះសេះចូលទៅក្នុងបន្ទាយនិយាយជម្រាប**ចូជិន**ថា ទាហាន**ខុងបេង**ដែលវាយគ្នាមកនោះបានដេញបំបែកទៅអស់ហើយ។

ខណៈនោះទទួល**សុម៉ាអ៊ី**ឲ្យបម្រើមកប្រាប់ថា ទាហានស្រុកសែឈ្នួនលើកមកតាំងបង្កប់លបចាំសម្លាប់កងទ័ពយើងស្លាប់អស់មួយពាន់ប្លាយហើយ ឲ្យរវាំងត្រួតត្រារក្សាបន្ទាយកុំប្រមាទ។ **ចូជិន**ឮដូច្នោះក៏ឆ្លើយថា ទីចាំកុកនេះយើងមិនដែលបានឃើញទាហានស្រុកសែឈ្នួនភ្លើខ្លួនចូលមកដល់ម្នាក់ទេ ឯងត្រូវវិលទៅជម្រាបចៅហ្វាយឯងចុះ។ បម្រើនោះក៏វិលត្រឡប់ទៅវិញ ទទួលទាហាន**ង៉អ៊ី, ង៉ប៉ាន់**ដែល

បន្តំចូលទៅនោះជម្រាបថា ទាហាន**ខុងបេង**បែកអស់ទៅហើយ **ចូជិន**ឮដូច្នោះក៏រឹតតែមានសេចក្ដីត្រេកអរ សម្គាល់ថា**ជិនលៀង**ត្រឡប់មកដល់ហើយ បានជាឲ្យបម្រើចូលមកប្រាប់ ក៏លើកទាហានចេញពីបន្ទាយនឹងទៅទទួលតាមគួរសម។

ឯ**ង៉អ៊ី, ង៉ប៉ាន់, លៀវហ៊្វ** និង**គួនហ៊ិន**នោះ លុះឃើញ**ចូជិន**ចេញទៅ ក៏ស្ទុះស្រចូលទៅក្នុងបន្ទាយបាន ទាហានយកភ្លើងដុតឡើងក្នុងមួយរំពេចនោះ **ម៉ាតាយ, អងប៉េង**ក៏បរពលដេញកាប់សម្លាប់តាមក្រោយ **ទៀវអេក, ម៉ាតុង**ក៏បរពលទល់តពីមុខ ទ័ព**ចូជិន**លើសកម្លាំងនឹងទ្រាំពុំបាន ក៏បែកខ្ចាត់ខ្ចាយទៅ។ **ម៉ាតាយ, អងប៉េង, ទៀវអេក, ម៉ាតុង** ក៏ឲ្យទាហានដេញកាប់សម្លាប់ខ្មាំងអស់ជាច្រើន **ចូជិន**ប្រទល់ខ្លួនក៏ខំបំពារចេញទៅបានដោយទាំងទាហាន៥០នាក់ ទទួលជួបនឹងទ័ព**សុម៉ាអ៊ី**លើកមកជួយ **សុម៉ាអ៊ី**ក៏ទទួលយកខ្លួន**ចូជិន**នាំទៅបន្ទាយគីកុក។ ខណៈនោះ **ចូជិន**ក៏មានសេចក្ដីអប្បយសនឹង**សុម៉ាអ៊ី**ណាស់ មិនដឹងបើនឹងទុកមុខទុកមាត់ទៅខាងណាឡើយ **សុម៉ាអ៊ី**ដឹងហើយក៏និយាយនឹង**ចូជិន**ថា ឥឡូវកងទ័ព**ខុងបេង**វាយចូលមកតាំងនៅតំបន់គីសាន់ហើយ យើងនឹងតាំងទទួលក្នុងទីគីកុកនេះ ក៏គង់នឹងប្រៀបច្រើនស៊ូនឹងគេមិនបាន ត្រូវតែលើកពលទាហានទៅចាំទទួលនៅទន្លេហ៊ុយហោ។

**ចូជិន**ក៏សួរ**សុម៉ាអ៊ី**ថា ហេតុម្ដេចបានជាលោកដឹងថាខ្ញុំចាញ់ប្រៀបដល់សត្រូវ ហើយលោកលើកពលទៅជួយ? **សុម៉ាអ៊ី**ថា ខ្ញុំបានដឹងថា**ខុងបេង**នឹងលើកមកវាយលោក បានជាខ្ញុំឲ្យបម្រើទៅរំឭកលោកឲ្យប្រយ័ត្នត្រួតត្រាការពាររក្សាខ្លួន លុះបម្រើត្រឡប់មកប្រាប់ខ្ញុំតាមពាក្យដែលលោកថានោះ ខ្ញុំក៏ដឹងថា លោកដឹងមិនដល់ការនឹងថ្លោះការជាប្រាកដ បានជាខ្ញុំខំស្រូតទៅជួយលោក ក៏សមដូចបានគិតគ្នេរមិនខុស។

**ចូជិន**ឮដូច្នោះ ក៏រឹតតែមានសេចក្ដីខ្មាសពេកណាស់ តាំងតែទុក្ខក្រំដំទៅជាឈឺធ្ងន់ **សុម៉ាអ៊ី**ឃើញ**ចូជិន**ឈឺធ្ងន់ដូច្នោះ លុះនឹងលើកទ័ពត្រឡប់មកស្រុកក្រុងវិញ ក៏បារម្ភក្រែងទាហានផ្អើលភ្ញាក់ខូចចិត្តគំនិតអស់ទៅ ក៏តាំងតែវារង់បង្អង់នៅៗទីនោះ។

ឯ**ខុងបេង**នោះ លុះវេលាចូលទៅដល់ភ្នំគីសាន់ហើយ ក៏ឲ្យបំណាច់រង្វាន់ពលទាហានតាមមានគុណបំណាច់ ខណៈនោះ**អ៊ុយអៀន, តាន់សេក, តៅខេង, ទៀវងី**លើកទ័ពទៅដល់ ក៏ចូលទៅគំនាប់សារភាពទោសដល់**ខុងបេង** ៗទើបសួរថា នរណាដែលមិនបាននៅក្នុងបង្គាប់បញ្ជាយើង ជាមេទ័ពក្នុងគ្រានេះធ្វើឲ្យខូចការ? **អ៊ុយអៀន**ឆ្លើយថា **តាន់សេក**មិនបានស្តាប់បង្គាប់លោក លើកកន្លងចូលទៅឲ្យថ្លោះការ **តាន់សេក**ឆ្លើយថា ខ្ញុំបាទបានធ្វើល្មើសឲ្យខូចការគ្រានេះ ព្រោះ**អ៊ុយអៀន**ប្រើខ្ញុំបាទលើកទៅមុន។

**ខុងបេង**ថា **អ៊ុយអៀន**លើកកងទ័ពទៅជួយអ្នកឯង ទើបបានរួចខ្លួនចេញមកអំពីកន្លែងស្លាប់មិនមែនឬ? ហេតុម្តេចអ្នកឯងឆ្លើយទម្លាក់ទោសទៅលើគេ? ដែលអ្នកឯងមិននៅក្នុងបង្គាប់យើង ធ្វើឲ្យខូចថ្លោះការយ៉ាងនេះ បើនឹងមិនលើកទោសសោះក៏មិនបាន ទៅឯមុខពួកទាហានទាំងឡាយនឹងយកយឿងយ៉ាងតទៅ ទើបបង្គាប់ឲ្យចាប់យកខ្លួន**តាន់សេក**ទៅប្រហារជីវិតបង់ ដែល**ខុងបេង**មិនបានឲ្យសម្លាប់**អ៊ុយអៀន**ចេញផងនោះ ព្រោះគិតថា**អ៊ុយអៀន**នោះមានថ្វីដៃខ្លាំងពូកែជាងគេ ទុកឲ្យនៅធ្វើការសង្គ្រាមតទៅ ក៏នឹងបានប្រើឲ្យទៅសម្លាប់ជាខាងមុខទៀត។ ខណៈនោះមានបម្រើល្បាតសេះនាំយកព័ត៌មានទាំងពួងទៅជម្រាប**ខុងបេង**ថា ឥឡូវ**ចូជិន**ឈឺធ្ងន់ណាស់ ថយទ័ពទៅរក្សារោគនៅបន្ទាយទន្លេហ៊ុយហោ។ **ខុងបេង**ឮដូច្នោះក៏ថា ប្រសិនបើ**ចូជិន**ឈឺជាប្រមាណទេ កាលណា**សុម៉ាអ៊ី**នៅគង់នឹងលើកទ័ពត្រឡប់ទៅ នេះប្រហែល**ចូជិន**ឈឺណាស់ហើយបានជាមិនលើកទ័ពទៅ ព្រោះខ្លាចរេហ៍ពលទាំងពួងនឹងខូចចិត្ត យើងនឹងធ្វើសំបុត្រមួយច្បាប់ទៅដល់**ចូជិន** ប្រសិនបើបានឃើញសំបុត្រយើងហើយ គង់នឹងក្រំចិត្តស្លាប់ជាប្រាកដ គិតហើយ**ខុងបេង**ឲ្យហៅទាហាន**ជិនលៀង** ដែលបានមកទុកជាឈ្លើយនោះចូលមកហើយនិយាយថា អ្នកឯងរាល់គ្នាជាពួកស្រុកឡុកអៀង អ្នកទាំងអស់គ្នាសុទ្ធតែមានញាតិសាហោហិតភរិយាបុត្របងប្អូននៅទាំងអស់ ដែលនឹងមកនៅនឹងយើងក៏ឆ្ងាយដាច់អាល័យ ហាក់បីដូចយើងក្លែងឲ្យអ្នកឯងរាល់គ្នាព្រាត់ប្រាសចាកគ្នា ក៏ជាវេរាបាបកម្មដល់យើងធ្ងន់ណាស់ យើងនឹងឲ្យអ្នករាល់គ្នាវិលត្រឡប់ទៅភូមិស្រុកតាមប្រាថ្នា បើនរណាចង់

ទៅក៏តាមចិត្ត ដ្បិត**ចូជិន**មានសំបុត្រមកយើងក៏យូរណាស់ហើយ យើងនៅឡើយមិនទាន់ឆ្លើយតបសោះ យើងនឹងធ្វើសំបុត្រមួយទៅឲ្យ**ចូជិន**ផង បើអ្នករាល់គ្នាកាន់សំបុត្រនេះទៅឲ្យ**ចូជិន**ហើយ គង់នឹងមានបំណាច់រង្វាន់ទៀត។ ពួកឈ្លើយទាំងនោះបានស្ដាប់ក៏អរណាស់ នាំគ្នាក្រាបគំនាប់ហើយក៏លា**ខុងបេង**ទៅ។

លុះទៅដល់ទន្លេហ៊ុយហោក៏ចូលទៅគំនាប់**ចូជិន** ហើយយកសំបុត្រនោះជូនទៅ**ចូជិន**ជម្រាបថា **ខុងបេង**ធ្វើសំបុត្រជូនលោក។ **ចូជិន**ឈឺធ្ងន់ពន់កម្លាំង តែឧស្សាហ៍ញ៉ាំងខ្លួនក្រោកទទួលសំបុត្រហែកស្រោមហូតយកមកមើល ឃើញសេចក្ដីថា មហាឧបរាជឲ្យមកដល់**ចូជិន**មេកងទ័ពធំបំផុត ដ្បិតបុរាណលោកពោលទុកមកថា បើនរណាធ្វើជាមេទ័ពកាន់ពលទាហានចេញទៅធ្វើការរណរង្គសង្គ្រាមសង្គ្រោះនោះ គប្បីស្គាល់លក្ខណៈក្នុងកលសឹកឲ្យជាក់ច្បាស់គ្រប់ប្រការ ហើយឲ្យមានសតិបញ្ញាដ៏ប្រែប្រួលកែខៃយកជ័យជម្នះជាដើមឲ្យបាន ដែលខ្លួនអ្នកជាមេទ័ពធំមិនដឹងប្រមាណការក្នុងកលឧបាយ ធ្វើឲ្យអន្តរាយរេហ៍ពលចាញ់កលយើង មិនខូចត្រឹមពលខូចដល់គ្រឿងសព្វាវុធជាច្រើន ដូច្នេះអ្នកនឹងវេះត្រឡប់មុខចូលទៅស្រុកឡុកអៀងវេលានេះ បើព្រះចៅ**ចូយ៉យ**មិនទ្រង់តម្រិះនឹងយកទោសក៏ជាការល្អ តែថាមុខអ្នកគួរឲ្យខ្មាសមុខបណ្ដារាស្ត្រចំណុះស្រុកឡុកអៀង និងពលទាហានពន់ប្រមាណណាស់ វីចិត្តអ្នកមិនមែនគិតខ្មាសដូចគេធម្មតា នៅប្រើអាការៈជាមេទ័ពថោកទាបទៅបាន យើងប្រមាណមិនទាន់ច្បាស់ បើដូច្នេះ គួរឲ្យអ្នកប្រែមុខទៅលំអុតលំឱនចូលជ្រកកោនយើងដោយសុភាពចុះ បើមិនដូច្នោះទេនឹងនៅរឹងទទឹងមិនចង់ចំណុះយើង ៗ នឹងលើកទ័ពទៅជាន់លម្អិតស្រុកឡុកអៀងឲ្យរាបដូចផ្ទៃស្គរ ព្រោះខ្លួនអ្នកឯងនិងពួកពលនិករ ឧបមាដូចហ្វូងពពែដ៏កម្លៅនាំចូលទៅត្រង់មាត់ខ្លា សម្រាប់តែនឹងបង់វិនាសសង្ខារ ដោយអំណាចខ្លាចធំមាំមានឫទ្ធិជាទីសម្បើម ដូចយើងជាឆ្មើមចមលោក មិនគួរនឹងប៊ាននាំមកប្រឡងចេស្ដានុភាពសោះឡើយ។ **ចូជិន**មើលចប់ហើយក៏ឲ្យកើតទោសៈដោយបដិឃៈចង្អៀតណែនក្នុងឱរា រោគដែលឈឺក៏បណ្ដាលឲ្យក្អៀវក្លាកម្រើកសព្វសព៌ាង្គ **ចូជិន**ក៏រំលាយជីវិតផុតអាយុនៅកណ្ដាលយប់នោះឯង។

ឯ**សុម៉ាអ៊ី**លុះដឹងថា**ចូជិន**ធ្វើកាលកិរិយា ក៏រៀបសពក្ការតម្កល់លើរទេះ ហើយធ្វើសំបុត្រមកបញ្ជូនចូលទៅក្រុងឡុកអៀង ព្រះចៅ**ចូយ៉យ**ក៏ឲ្យតែងសំស្ការសពដោយសមត្ថភាពតាមប្រពៃណី ហើយមានសារព្រះតម្រាស់ទៅដល់**សុម៉ាអ៊ី**ឲ្យខំស្រូតរូតធ្វើការសង្គ្រាមយកជ័យជម្នះ**ខុងបេង**ឲ្យត្រាតែបាន។ **សុម៉ាអ៊ី**បានដឹងសេចក្តីព្រះតម្រាស់ហើយ ក៏ឲ្យប្រមូលរេហ៍ពលយោធាមកត្រៀមប្រចាំការ ហើយចាត់បម្រើនាំសំបុត្រសារទៅដល់**ខុងបេង** កំណត់ថា ពេលព្រឹកស្អែកឲ្យលើកពួកពលយោធាមកតយុទ្ធនាគ្នា។

**ខុងបេង**ទទួលដំណឹងហើយថា វេលានេះប្រហែល**ចូជិន**ស្លាប់ហើយឬ? បានជា**សុម៉ាអ៊ី**ឲ្យបម្រើកាន់សំបុត្រមកកំណត់តច្បាំងនឹងយើង។ លុះដល់ពេលយប់**ខុងបេង**ឲ្យហៅ**កៀងអ៊ុយ**និង**គួនហ៊ុន**ចូលមកខ្សឹបបង្គាប់ជាសេចក្តីស្ងាត់ **កៀងអ៊ុយ**និង**គួនហ៊ុន**ទទួលបង្គាប់គ្រប់ប្រការហើយ ក៏លើកទ័ពចេញទៅតាំងពីពេលកណ្តាលអាធ្រាត្រ។ លុះព្រឹកឡើង**ខុងបេង**ក៏លើកកងទ័ពចេញពីបន្ទាយគីសាន់ទាំងអស់ លុះទៅដល់មាត់ទន្លេហ៊ុយហោជាទីវាលកណ្តាលត្រាញ់។ **សុម៉ាអ៊ី**ក៏លើកទ័ពមកប្រទល់មុខគ្នា ក្រឡេកឃើញ**ខុងបេង**ជិះរទេះតូច តែងខ្លួនយ៉ាងស្អាតបាតកាន់ផ្លិតរោមសត្វកាត់ទៅនៅកណ្តាលរណរង្គ **សុម៉ាអ៊ី**ក៏ស្ទុះស្ទុងទៅមុខទាហានស្រែកថា ម្ចាស់យើងបានសោយរាជសម្បត្តិនៅទីក្រុងឡុកអៀងបានពីរជួរព្រះអង្គហើយ មិនដែលបានទៅធ្វើទុក្ខដល់ស្រុកសៃឈួន ឬស្រុកហាន់តុងដល់ម្តងណាសោះ ពីព្រោះលះបង់នូវអំពើអាក្រក់ ចង់ឲ្យគេសុខសប្បាយដោយចាំព្រះទ័យរីករាយផ្សាយមេត្តាអាណិតអាណាប្រជានុរាស្ត្រទាសកម្មករ ឲ្យនៅស្មោះសរជាសុខនិរទុក្ខ ដោយអំពើព្រះពង្សទ្រង់ធម៌ តែខ្លួន**ខុងបេង**នេះមិនល្អត្រង់ណាសោះ ព្រោះជាជាតិអ្នកស្រែក្រៅនៅចុងស្រុកឡាំយ៉ុង គួរឬមកទ្រនង់អង់អាចឲ្យលើសហួសជាតិកំណើតរបស់ខ្លួន គិតគុំគួន ហ៊ានលើកកន្លងចូលមកញាំញីដល់ទីដែនស្រុកធំខ្ពស់អស់វារៈជាច្រើនដងច្រើនគ្រាមកហើយ នេះឯងហើយឃើញថាជាការមិនសមគួរសោះ ហេតុនេះត្រូវឲ្យអ្នកឯងតែងតាំងចិត្តប្រដៅខ្លួនកុំឲ្យកំរើប ដោយលោកចេតនាលើកពលយោធាមកសង្កត់សង្កិនគេដូច្នេះតទៅ ត្រូវតែលើកទ័ពត្រឡប់ទៅរក្សាខបខណ្ឌសីមានៃម្ចាស់ខ្លួនតាម

ប្រវេណីប្រសើរជាង បើនៅអ្នួតអាងកាងក្រទាខំតែបំពារចូលមកតាមអំពើចិត្ត ឃើញថាជីវិតរបស់អ្នកឯងមិនបានវិលទៅដល់ទីកន្លែងស្រុកទេសរបស់ខ្លួនវិញទេ គឺនឹងត្រូវចោលថ្វីដៃពលរេហ៍របស់យើងប្រហារ។

**ខុងបេង**បានសវនាការ**សុម៉ាអ៊ី**ដូច្នោះ ក៏អស់សំណើចហើយថា ខ្លួនយើងជាខ្ញុំព្រះចៅ**ឡៅពី** ៗទ្រង់ព្រះរាជទានបៀវត្សសម្រាប់ឆ្នាំទ្រាំរក្សាយើងមកជាយូរ អំឡុងកាលព្រះអង្គប្រឈួនមុននឹងទិវង្គត បានទ្រង់ព្រះវាចាផ្ដាំឲ្យយើងជួយបម្រុងរក្សាផែនដីនៃព្រះចៅ**ហៀនតេ** ដ៏មាននូវព្រះគុណឲ្យបានរុងរឿងឡើងវិញ ខ្លួនយើងនេះមិញពេញជាបុរសសត្បានុសត្បកតញ្ញូដល់ផែនដី មិនសមដើរនិងដេកស្ងៀមត្រៀមចាំស៊ីតែបៀវត្ស មិនគិតកម្ចាត់អាចោរសត្រូវរាជសម្បត្តិឲ្យវិនាសចេញ ក៏មិនពេញជាបុរសកតញ្ញូ យ៉ាងខ្លួនឯងទៀតសោតក៏ជីទួតជីតាមាតាបិតាក៏សុទ្ធតែជាខ្ញុំព្រះករុណាព្រះចៅ**ហៀនតេ**-ត ៗមក គួរណាស់នឹងយកចិត្តគិតឈឺជួសពូជអំបូរ ម្ដេចមកទទូរស្បែកសុនខ ចូលដៃនឹងពួកអាចោរចិត្តអាក្រក់ទ្រុស្តម្ចាស់ឯងវិញដូច្នេះ ខ្លួនអ្នកឯងនេះជាជាតិអ្នកចម្ការចុងនិគម បានជាគេលើកឲ្យធ្វើធំ ក៏ចេះតែសំងំបំភ្លេច គុណដូនតាម៉ែឪ មកចូលដៃនឹងអាសត្រូវផែនដី គប្បីឲ្យខ្មាសមុខពេកណាស់។

**សុម៉ាអ៊ី**ឮពាក្យ**ខុងបេង**ដៀលត្មេះ ក៏ខំអត់គិតនឹងរកពាក្យឆ្លើយតបពុំរួច ក៏ខំផ្ដួចផ្ដើមពាក្យបានថា បើដូច្នោះយើងត្រូវតែច្បាំងគ្នាចុះ។ **ខុងបេង**ថា បើអ្នកឯងច្បាំងនឹងយើងខ្លួនតនឹងខ្លួនក៏បាន ឬក៏ច្បាំងដោយថ្វីដៃទាហាននឹងទាហាន យើងក៏មានច្រើនមិនខ្លាចទេ។ **សុម៉ាអ៊ី**ថា បើដូច្នោះយើងនឹងច្បាំងគ្នាដោយយកកលព្យុហៈសឹក។ **ខុងបេង**ថា បើដូច្នោះត្រូវអ្នកឯងធ្វើកលមកឲ្យយើងមើលជាមុនចុះ **សុម៉ាអ៊ី**ត្រឡប់ចូលទៅខាងក្នុង អស់ពួកទាហានក៏លើកទង់ក្រហមដោតឡើង ទាហានក៏ចូលព្យុហៈព្រមគ្នាឈ្មោះថា “អ៊ីគុយទិន” ព្យុហៈ ហើយទើបស្រែកសួរ**ខុងបេង**ថា កលព្យុហៈរបស់យើងនេះអ្នកឯងដឹងឬទេ? **ខុងបេង**ឆ្លើយប្រាប់ថា យើងដឹងហើយឈ្មោះ “អ៊ីគុយទិន” កលព្យុហៈ។

**សុម៉ាអ៊ី**ថា អ្នកដឹងព្យុហៈរបស់យើងហើយ ចូរតាំងព្យុហៈរបស់អ្នកយើងនឹងមើលវិញ **ខុងបេង**ក៏ត្រឡប់ចូលមកយកផ្លិតបក់តែម្ដង ទាហានទាំងពួងក៏តាំង

ជាព្យុហៈចូលមួយរំពេច **សុម៉ាអ៊ី**ក៏ញាក់សេះដេញពលនឹងចូលវាយ ទើបហៅ **តៃលៀង, ទៀវហាង, ងាក់លឹម** ទាំងបីនាយចូលមកបង្គាប់ថា ឯព្យុហៈរបស់ **ខុងបេង**តាំងក្នុងវេលានេះ មានទ្វារប្រាំបីអន្លើ គឺទ្វាររស់និងទ្វារស្លាប់ ទ្វារចេញនិងចូល ទ្វារសូន្យ ទ្វារភ័យ ទ្វារបញ្ឆោត ទ្វារបង្កប់ អ្នករាល់គ្នាត្រូវវាយចូលទៅតាមទិសបូព៌ចេញទៅបស្ចិម ហើយគេចមកទិសឧត្តរ ឯទិសទក្សិណកុំគប្បីកន្លងវាយចូលទៅឡើយ បើធ្វើតាមយើងហើយ ទាហាន**ខុងបេង**គង់នឹងបែកទៅឯង។

**តៃលៀង, ទៀវហាង** និង**ងាក់លឹម** ទាំងបីនាយទទួលពាក្យហើយ ក៏លើកពល៣០០វាយចូលទៅតាមផ្លូវទិសបូព៌ ទាហាន**ខុងបេង**ក៏ត្រឡប់ព្យុហៈចេញអស់ក្នុងមួយរំពេចនោះ ឲ្យទៅជាទ្វារដប់វិញ ទាហាន**សុម៉ាអ៊ី**ក៏មិនដឹងដែលនឹងវាយចូលទៅបាន រត់ពានប៉ះទង្គិចគ្នា ទាហាន**ខុងបេង**ក៏ខ្ទប់ចាប់បានចងសេកទាំងអស់គ្នា។ **ខុងបេង**ថា នាយទាហានទាំងបី និងកូនទាហាននេះ បើយើងនឹងសម្លាប់ចេញក៏មិនចំណេញខាតទៅប៉ុន្មានដែរ ទើបឲ្យទាហានផ្លាស់យកអាវមួយទុកជាមួយនឹងសេះ ហើយឲ្យយកដីផ្នាំងលាបមុខមាត់ទាំងអស់គ្នា ហើយបង្គាប់ថា ឯងរាល់គ្នាចូរវិលទៅប្រាប់**សុម៉ាអ៊ី**ចៅហ្វាយឯងចុះថា ឲ្យទៅសិក្សារៀនកលព្យុហៈពីអាចារ្យណាដែលចំណាប់ទៀតសិន រួចសឹមមកតនឹងយើង ថាយើងក៏លែងពួកនោះទាំងអស់ទៅ។

លុះទាហានពួកនោះទៅដល់ ក៏ពណ៌នាប្រាប់**សុម៉ាអ៊ី**តាមពាក្យ**ខុងបេង**ប្រាប់គ្រប់ប្រការ **សុម៉ាអ៊ី**បានស្តាប់ហើយក៏ខឹងខ្លាំងណាស់ និយាយនឹងអស់ទាហានថា **ខុងបេង**ធ្វើកិរិយាអាក្រក់ដល់យើងឲ្យបានសេចក្តីអប្បយសពេកណាស់ បើយើងមិនយកជ័យជម្នះឲ្យបានគ្រានេះ កាលណានឹងមានមុខត្រឡប់ទៅស្រុកឡុកអៀងបាន អស់អ្នករាល់គ្នាចូរឧស្សាហ៍យកចិត្តទុកដាក់ជួយគ្នាធ្វើការឲ្យបានជ័យជម្នះចុះ **សុម៉ាអ៊ី**កាន់គ្រប៏អាជ្ញាសិទ្ធិឲ្យលើកពលចេញទៅចាកបន្ទាយ ហើយនាំទាហានជូនតាមក្រោយមកទៀត។

**គួនហ៊ិន**តាំងពួនបង្កប់នៅខាងក្រោយបានចំណាប់ ក៏នាំលើកកងពលស្រែកហ៊ោវាយចូលមក **សុម៉ាអ៊ី**ក៏ញែកទាហានបែរទៅតពីក្រោយ នាយកងទ័ព**ខុងបេង**ក៏

វាយខ្ទប់ពីមុខគំហុកចូល ទាហាន**សុម៉ាអ៊ី**ក៏ប្រមូលនៅកណ្តាលវណរង្គ **កៀងអ៊ុយ**ក៏វាយខ្ទប់ពីខាងស្តាំ ស្ទុះស្ទុងចូលមកជាបីផ្លូវ តាំងតែវាយចាក់កាប់សម្លាប់គ្នាជាជ្រួលច្របល់ ទាហាន**សុម៉ាអ៊ី**ត្រូវអាវុធជុំខ្លួន ស្លាប់ពិការជាអនេកណាស់ **សុម៉ាអ៊ី**ឃើញលើសកម្លាំងនឹងតស៊ូពុំបាន ទាហានស្លាប់អស់មួយភាគ ក៏តាំងតែច្បាំងពារទម្លាយចេញរួចទៅបាន ហើយនាំទាហានឆ្លងទៅត្រើយម្ខាង រត់ទៅតាំងបន្ទាយនៅទិសបស្ចិម តាំងពីថ្ងៃនោះមក**សុម៉ាអ៊ី**ក៏តាំងខ្ជាប់នៅក្នុងបន្ទាយ មិនបានឲ្យពលទាំងឡាយចេញច្បាំង។

ឯ**ខុងបេង**នោះ លុះបានជ័យជម្នះហើយ ក៏ឲ្យលើកទ័ពទៅតាំងនៅភ្នំគីសាន់ ទទួល**លីង៉ៀម**ប្រើឲ្យ**កិអាន់**ជាមេកំណាន់នាំស្បៀងមកឲ្យកងទ័ព ហួសកម្រិតរាប់ដល់ដប់ថ្ងៃ ព្រោះពី**កិអាន់**នោះជាមនុស្សប្រមឹក ផឹកស្រាវរវល់តែស្រវឹងឡូឡាជាអចិន្ត្រៃយ៍ មិនគិតនឹងនាំអាហារចំណីទៅឲ្យទាន់ការ **ខុងបេង**ខឹងណាស់ក៏បង្គាប់ក្រមការឲ្យចាប់ខ្លួន**កិអាន់**ទៅសម្លាប់ **ទៀវងី**ជម្រាបថា ដែល**កិអាន់**ជូនស្បៀងមិនទាន់នោះ មហាឧបរាជនឹងឲ្យសម្លាប់ចេញក៏គួរហើយ តែថារាជការសឹកនៅមានច្រើនទៅមុខ ខ្ញុំបាទឃើញថានរណាដែលជាមេកំណាន់នាំស្បៀងមកជូនកងទ័ពនោះក៏ក្រណាស់ សុំមហាឧបរាជលើកទោសម្តងសិនចុះ **ខុងបេង**ក៏យល់តាម តែនៅខឹងខ្លាំងណាស់ទើបឲ្យទាហានយកខ្លួន**កិអាន់**ទៅវាយ៨០ខ្វាប់ **កិអាន់**ក៏មានសេចក្តីឈឺចាប់ ក្តៅក្រហាយក្នុងចិត្តណាស់ លុះវេលាកណ្តាលយប់ក៏នាំបាវរបស់ខ្លួនដែលស្និទ្ធិលបរត់ទៅចូល**សុម៉ាអ៊ី**ឯបន្ទាយ ទាហានយាមក៏ចូលទៅអធិប្បាយប្រាប់**សុម៉ាអ៊ី**ៗក៏ឲ្យហៅខ្លួន**កិអាន់**ចូលទៅខាងក្នុង **កិអាន់**ក៏រ៉ាយរឿងប្រាប់**សុម៉ាអ៊ី**ស្តាប់គ្រប់ប្រការ។ **សុម៉ាអ៊ី**ថា ឯ**ខុងបេង**នោះមានកលឧបាយច្រើនណាស់ យើងនឹងជឿអ្នកឯងមិនទាន់បាន បើអ្នកឯងធ្វើការឲ្យយើងឃើញអ្វីៗមួយយ៉ាង ទើបយើងជឿ។ **កិអាន់**ថា លោកនឹងឲ្យខ្ញុំបាទធ្វើប្រការម្តេច? ដូច្នោះឲ្យអ្នកឯងត្រឡប់ទៅវិញ ត្រូវទៅឲ្យដល់ស្រុកសែឈួន ហើយត្រូវដើរបរិហារឲ្យអ្នកនគរគេឮថា **ខុងបេង**គិតក្បត់នឹងចាប់ព្រះចៅ**ឡៅសៀន**សម្លាប់ដណ្តើមយករាជសម្បត្តិតាំងខ្លួនជាធំ បើពាក្យនោះល្បីឮខ្ទរខ្ទារទៅដល់ព្រះចៅ**ឡៅសៀន** ៗក៏នឹងមិនទុកចិត្ត**ខុងបេង** ខូចជាគង់

នឹងមានទង់ត្រាស់ឲ្យហៅកងទ័ពលើកត្រឡប់ទៅវិញ បើអ្នកឯងធ្វើបានដូច្នេះមិញ យើងនឹងទូលព្រះចៅ**ចូយ៉យ**ឲ្យបានសេចក្ដីគាប់ប្រសើរ ហើយតាំងឲ្យធ្វើជានាហ្មឺនធំ ។

**កិអាន់**បានស្ដាប់ដូច្នោះ ក៏ទទួលគំនាប់**សុម៉ាអ៊ី**លាត្រឡប់ទៅស្រុកសែឈួន ទើបនិយាយនឹងខន្ទីទាំងពួងតាមពាក្យ**សុម៉ាអ៊ី**បង្គាប់គ្រប់ប្រការ ខន្ទីទាំងឡាយក៏នាំយកសេចក្ដីឡើងក្រាបទូលព្រះចៅ**ឡៅសៀន** ៗក៏ស្គុតព្រះទ័យសម្គាល់ថាពិត ទើបប្រឹក្សានឹងអស់ពួកខន្ទីថា យើងនឹងគិតប្រការម្ដេចស្រួល ទើបអស់ខន្ទីទូលថា គ្រានេះព្រះអង្គប្រទានអាជ្ញាសិទ្ធិទៅ**ខុងបេង** មនុស្សទាំងពួង ក៏សឹងនៅក្នុងអំណាចគេអស់ហើយ ទោះ**ខុងបេង**ដឹងថាដូចម្ដេចក៏ជាស្រេចដាច់ខាតហេតុនេះសុំឲ្យព្រះអង្គមានទង់ត្រាហៅ**ខុងបេង**ឲ្យចូលមកឆាប់ ហើយត្រូវដកយកត្រាអាជ្ញាសិទ្ធិដែលប្រគល់ឲ្យនោះមកវិញ ទើប**ខុងបេង**នឹងមិនធ្វើអន្តរាយបាន ព្រោះអស់មនុស្សម្នាមិនកោតក្រែងហើយក៏ទាល់ឯងទៅវិញ ព្រះចៅ**ឡៅសៀន**ព្រមព្រះទ័យយល់ត្រូវ ទើបឲ្យធ្វើព្រះតម្រាស់ឲ្យហៅ**ខុងបេង**លើកទ័ពត្រឡប់ចូលទៅក្រុងវិញ។

ខណៈនោះ **ជៀវអួន**សេនាបតីដឹងសេចក្ដីក៏ចូលក្រាបទូលថា មហាឧបរាជលើកទ័ពចេញទៅធ្វើការគ្រានេះ ឃើញថាបានការជាទីចំណាប់ចំនួនមួយមាំណាស់ ហេតុអ្វីព្រះអង្គទ្រង់ឲ្យហៅត្រឡប់មកវិញដូច្នោះ? ព្រះចៅ**ឡៅសៀន**ត្រាស់ថា យើងមានធុរៈជាសេចក្ដីស្ងាត់ បានជាហៅមហាឧបរាជមកប្រឹក្សា ត្រាស់ហើយក៏ប្រើរាជអាជ្ញាឲ្យកាន់ព្រះតម្រាស់ចេញទៅ លុះទៅដល់**ខុងបេង** ៗដឹងសេចក្ដីក៏អង្គុយដកដង្ហើមធំហើយថា ម្ចាស់យើងនេះនៅក្មេងសេចក្ដីខ្លីគំនិតពន់ពេកណាស់ ហេតុអ្វីទៅជឿស្ដាប់ពាក្យផ្ដាស់ដែលមនុស្សវាញុះញង់ បើម្ល៉េះក៏គង់នឹងធ្វើការតទៅពុំបាន វេលានេះបើយើងរង់ខានមិនចូលទៅ ក៏ត្រូវមានកំហុសព្រោះទទឹងនឹងខព្រះតម្រាស់ បើទៅវេលានេះក៏គួរឲ្យស្ដាយណាស់ នឹងការដែលធ្វើហៀបនឹងបានចម្រើនការតទៅមុខ បើត្រឡប់មកវិញកាលណានឹងធ្វើការមួយរយដង ក៏មិនអាចកន្លងចូលមកដល់ទីនេះបាន។

ទើប**កៀងអ៊ុយ**សួរថា មហាឧបរាជនឹងថយទ័ពទៅគ្រានេះ បើ**សុម៉ាអ៊ី**ដឹងគង់នឹងលើកមកច្បាំងជាមាំពុំខាន តើនឹងរិះគិតអានយ៉ាងណា? **ខុងបេង**ថា អ្នកកុំព្រួយរំខានឡើយ យើងនឹងលើកថយទៅគ្រានេះ ហើយត្រូវធ្វើឧបាយមួយមិនឲ្យ**សុម៉ាអ៊ី**លើកតាមទៅបាន ត្រូវយើងបំបែកទាហានលើកទៅជាប្រាំកង បើទៅឈប់នៅទីណា យើងនឹងឲ្យធ្វើគុបភ្លើងបំពេញឡើងគ្រប់ថ្ងៃទៅ **សុម៉ាអ៊ី**គង់នឹងមានសេចក្ដីសង្ស័យ។

**អៀវង៉ី**ថា កាលគ្រា**ស៊ុតបិត**ធ្វើសឹកនឹង**បាំងកួន**នោះ លាក់ចង្ក្រានភ្លើងចេញអស់ ទើបមានជ័យជម្នះបាន ហេតុអ្វីមហាឧបរាជមកឲ្យចេញចង្ក្រានភ្លើងឡើងវិញដូច្នោះ? **ខុងបេង**ថា នឹងបញ្ឆោតឲ្យឃើញថាមនុស្សតិច បានជាប្រើល្បិចលាក់ចង្ក្រានកុំឲ្យឃើញ ឥឡូវយើងនឹងធ្វើឲ្យឃើញថាពលយើងមានបំពេញមកគ្រប់ៗថ្ងៃ ដ្បិតអី**សុម៉ាអ៊ី**នោះជាមនុស្សមានប្រាជ្ញាស្រៀវស្រួចណាស់ បើឃើញកលយើងធ្វើទុក ក៏នឹងសម្គាល់ថាទាហានយើងមានប្រចាំជូនមកគ្រប់ថ្ងៃជាច្រើនហើយក្លែងថយចេញ ធ្វើកលទុកបញ្ឆោតឲ្យតាម ក៏នឹងបានសេចក្ដីកោតខ្លាចមិនហ៊ានតាមទៅ យើងក៏បានលើកទៅដោយស្រួល លុះប្រឹក្សាហើយ**ខុងបេង**ក៏លើកកងពលថយទៅ។

ឯ**សុម៉ាអ៊ី**តាំងចិត្តគិតចាំមើលផ្លូវ**កិអាន់**ណាស់ នោះមានពួកល្បាតចូលមកប្រាប់ថា កងទ័ពស្រុកសែឈួនលើកអស់ទៅហើយ **សុម៉ាអ៊ី**មិនជឿ ទើបប្រើបម្រើឲ្យលបទៅមើល**ខុងបេង** លុះព្រឹកឡើងថ្ងៃមួយ បម្រើវិលចូលទៅប្រាប់**សុម៉ាអ៊ី** តាមរយៈផ្លូវកងទ័ពស្រុកសែឈួនលើកទៅដល់កន្លែងណាៗ ឃើញមានសុទ្ធតែចង្ក្រានភ្លើងដាំបាយច្រើនណាស់រាល់កន្លែង។ **សុម៉ាអ៊ី**ក៏និយាយនឹងនាយទ័ពនាយកងថាទាហាន**ខុងបេង**មានបញ្ជូនចេញមកពីក្រុងច្រើនណាស់ ហើយបានជាមានចង្ក្រានច្រើនកើនឡើងគ្រប់កន្លែង តែថាឃើញយើងតាំងនៅមិនចេញតសោះ នឹងធ្វើមិនស្រួល បានជាថយទៅ ដែលថយទៅគ្រានេះ មុខជាមានដាក់ទាហានឲ្យពួនបង្កប់កន្លែង បើយើងមិនខែងរែងស្រាលគំនិតតែលើកតាមទៅ មុខជានឹងត្រូវលើកល**ខុងបេង**មិនខាន។

លុះកន្លងមកពីរបីថ្ងៃ មានអ្នកស្រុកនាំសេចក្តីទៅប្រាប់**សុម៉ាអ៊ី**ថា **ខុងបេង**ថយទ័ពទៅនោះ ក្លែងធ្វើចង្ក្រានភ្លើងទុកតាមដំណាក់រយៈផ្លូវឲ្យមើលទៅឃើញថាទាហានច្រើននោះមិនមែនទេ។ **សុម៉ាអ៊ី**ដកដង្ហើមធំ យកដៃដំដើមទ្រូងហើយថា **ខុងបេង**ធ្វើកលបញ្ឆោតយើងគ្រានេះយើងដឹងមិនដល់សោះ ព្រោះយើងមានប្រាជ្ញាតិចពេក ដែលនឹងធ្វើសឹកទៅខាង ឯភ្អែកនោះឃើញថាកម្រនឹងសម្គាល់ប្រមាណសឹក**ខុងបេង**បាន **សុម៉ាអ៊ី**ក៏លើកទ័ពត្រឡប់ចូលទៅស្រុកឡុកអៀង។

ខណៈនោះ កាល**ខុងបេង**លើកទ័ពទៅដល់ស្រុកហាន់តុង ក៏ឲ្យបង្អង់កងទ័ពឈប់នៅទីនោះ ហើយលើករំលងចូលទៅចំពោះក្រុងសែឈួន ទើប**ខុងបេង**រៀបខ្លួនចូលទៅគាល់ព្រះចៅ**ឡៅសៀន** បានយកសេចក្តីក្រាបទូលសួរថា គ្រានេះទូលបង្គំជាខ្ញុំ បានលើកទ័ពចូលទៅដល់ភ្នំគីសាន់ មានសេចក្តីប្រាថ្នានឹងវាយយកស្រុកទៀងអាន់ ទទួលមានព្រះតម្រាស់ព្រះករុណាឲ្យហៅខ្លួនទូលព្រះបង្គំជាខ្ញុំចូលមកមានការ តើជាការអ្វីណាព្រះអង្គ? ព្រះចៅ**ឡៅសៀន**ត្រាស់ថា មិនមានការអ្វីជាចម្លែកទេ យើងរឭកនឹកដល់មហាឧបរាជ បានជាឲ្យហៅមកជួប។ **ខុងបេង**ទូលថា ហេតុទាំងនេះទូលព្រះបង្គំជាខ្ញុំក៏ដឹងអស់ហើយ អាពួកឡែបឡបប្រចុប វាទូលសម្អប់ញុះញង់ព្រះអង្គថា ទូលព្រះបង្គំជាខ្ញុំប្រែចិត្តក្បត់នឹងព្រះអង្គ បានជាទ្រង់ឲ្យហៅខ្លួនមកដូច្នេះ។

ព្រះចៅ**ឡៅសៀន**ឮដូច្នោះមិនត្រាស់ថាអ្វីសោះ **ខុងបេង**ក៏ទូលថា ខ្លួនទូលព្រះបង្គំជាខ្ញុំបានដល់ទីប៉ុណ្ណេះហើយ ៗបានទទួលព្រះបណ្តាំព្រះវររាជបិតាទុកជាចារឹកមាំណាស់ ទើបតាំងចិត្តគិតតែនឹងទំនុកបម្រុងផែនដីរបស់ព្រះអង្គឲ្យគង់ជាសុខតទៅ ឥឡូវមានសត្រូវញុះញង់ដូចជាវណ្ណរោគ ដ៏មានពិសកម្រើកនៅក្នុងខិរា ដែលទូលព្រះបង្គំជាខ្ញុំខំគិតការកម្ចាត់សត្រូវខាងក្រៅចេញនោះ ឃើញថាជាទីកម្រក្រៃណាស់។ ព្រះចៅ**ឡៅសៀន**ត្រាស់ថា ហេតុទាំងនេះព្រោះយើងស្រាលសេចក្តីខ្លីគំនិតជឿស្តាប់ពាក្យមនុស្សទុច្ចរិតអាក្រក់ នេះហាក់ថាមហាឧបរាជមកមានប្រសាសន៍ឡើងទើបដឹងហេតុ កុំអីយើងនឹងប្រកាន់ឲ្យខុសសង្កេតទទេទៅ បើលោកនឹងប្រកាន់កំណាន់ចិត្តយកជាទោសក៏មិនគួរ ព្រោះសព្វថ្ងៃនេះ ខ្លួនយើងបីដូចជា

មនុស្សមានចក្ខុពិការ ងងឹត បានលោកជួយដឹកនាំឲ្យដើរទៅឆ្ងាយជិតបាន គ្រានេះយើងគិតខុសហួសប្រមាណណាស់ គឺធ្វើឲ្យលោកលើកថយទ័ពមកខូចខាតផលប្រយោជន៍ច្រើនណាស់។

**ខុងបេង**ឲ្យស៊ើបស៊ព្ទស្តាប់យកព័ត៌មានពីបណ្តានាហ្មឺនទាំងពួង បានសេចក្តីច្បាស់ថា **កិអាន់**នាំពាក្យឲ្យពិតទូលញុះញង់ **ខុងបេង**នឹងយកខ្លួន ទទួលដឹងថា វារត់ចូលទៅនៅនឹង**សុម៉ាអ៊ី**ទៅហើយ **ខុងបេង**និយាយនឹង**ជៀវអួន, ប៊ីហ៊ុយ**ដែលជាសេនាបតីធំថា កាល**កិអាន់**ទូលញុះញង់នោះ ហេតុម្តេចអ្នកទាំងពីរមិនបានពិតទាស់ទៅខ្លះ លុះត្រាតែមានព្រះរាជតម្រាស់ឲ្យហៅយើងមក? **ជៀវអួន, ប៊ីហ៊ុយ**ទទួលសារភាពទោសថា ដែលយើងខ្ញុំពុំបានទូលទាស់នោះ ទោសកំហុសខុសណាស់ហើយ។ **ខុងបេង**ក៏ឲ្យព្យួរទោសទុក ទើបបង្គាប់ឲ្យ**លីងៀម**ជានាយកកងសម្រាប់ប្រចាំជូនពលទាហានកុំឲ្យខ្វះខាតបាន ហើយក៏ថ្វាយបង្គំលាចេញទៅស្រុកហាន់តុង ទើបចាត់ចែងរេហ៍ពលនឹងទៅវាយយកមណ្ឌលខេត្តទៀងអាន់។

**អៀវងី**ថា ទាហានក្នុងកងទ័ពយើងចំនួន២០ម៉ឺន លើកទៅធ្វើសឹកគ្រាមុននោះ នៅមិនទាន់បាត់នឿយហត់ ដែលប្រសាសន៍នឹងលើកទៅគ្រានេះ សុំឲ្យយកចិត្តទាហានទុកដោយស្រួល ចូរបែងគ្នា ត្រូវធ្វើជាពីរបន្លាស់ ឲ្យលើកទៅធ្វើការដប់ម៉ឺន លុះដល់កំណត់មួយរយថ្ងៃ ទើបឲ្យទាហានដប់ម៉ឺនដែលនៅនោះទៅផ្លាស់គ្នានឹងបានមានកម្លាំងធ្វើការចម្បាំងតទៅ។ **ខុងបេង**ថា អ្នកនិយាយនេះត្រូវនឹងគំនិតរបស់យើងគិត ដែលនឹងធ្វើសង្គ្រាមនោះមិនមែននឹងសម្រេចក្នុងមួយថ្ងៃពីរថ្ងៃទេ ត្រូវតែគិតជាខួបឆ្នាំទើបនឹងបានស្រុកទៀងអាន់ ហើយក៏ឲ្យកំណត់ទាហានទាំងពួងតាមពាក្យ**អៀវងី** បើដល់កំណត់ហើយអ្នកដែលនឹងទៅផ្លាស់នោះមកមិនទាន់ការអាជ្ញាសឹកត្រូវប្រហារជីវិតបង់។ ខណៈនោះព្រះចៅ**ឡៅសៀន**សោយរាជសម្បត្តិបាន៩ឆ្នាំ (ព.ស៧៧៤) ជាទេសកាលខែផល្គុន **ខុងបេង**នាំពលដប់ម៉ឺន លើកជាក្បួនទ័ពចេញចាកស្រុកហាន់តុង។

ឯព្រះចៅ**ចូយ៉យ**សោយរាជបាន៥ឆ្នាំ មានបម្រើល្បាតសេះនាំសេចក្តីទៅក្រាបទូលថា ដ្បិតបានឃើញ**ខុងបេង**លើកទ័ពដល់ភ្នំគីសាន់។ ព្រះចៅ**ចូយ៉យ**ជ្រាប

ហើយ ក៏ឲ្យប្រជុំប្រឹក្សាព្រមទាំង**សុម៉ាអ៊ី**មេកងទ័ពធំថា **ខុងបេង**លើកទ័ពមកគ្រានេះ យើងគិតប្រការម្ដេចស្រួល? **សុម៉ាអ៊ី**ទូលថា **ចូជិន**ក៏ទទួលអនិច្ចកម្មទៅហើយ ដែល**ខុងបេង**លើកមកគ្រានេះ ទុកជាភ្នាក់ងារទូលព្រះបង្គំជាខ្ញុំចុះ នឹងសុំអាសារិះគិតចេញទៅតនឹងបច្ចាមិត្តយកជ័យជម្នះឲ្យបាន។ ព្រះចៅ**ចូយ៉យ**ទ្រង់ព្រះសណ្ដាប់ដូច្នោះ ក៏មានព្រះទ័យសោមនស្សត្រេកអរ ទើបបង្គាប់ឲ្យ**សុម៉ាអ៊ី**ស្រួតចេញទៅធ្វើការជាប្រញាប់ **សុម៉ាអ៊ី**ឲ្យកេណ្ឌពលបានស្រេច ក៏ថ្វាយបង្គំលាលើកទ័ពចេញចាកក្រុងឡកអៀង។ ខណៈនោះព្រះចៅ**ចូយ៉យ**ទ្រង់រថព្រះទីនាំងចេញទៅជូនដំណើរ**សុម៉ាអ៊ី**ដល់ទ្វារក្រុង។

**សុម៉ាអ៊ី**នោះ លុះលើកទ័ពទៅដល់ស្រុកទៀងអាន់ហើយ ក៏ឲ្យចាត់ចែងបែងរេហ៍ពលនឹងលើកទៅ **ទៀវខាប់**ថា ការសឹកគ្រានេះ តែត្រឹមខ្ញុំបាទ នឹងសុំអាសាទៅយកជ័យជម្នះឲ្យបាន។ **សុម៉ាអ៊ី**តបថា **ខុងបេង**លើកទ័ពមកគ្រានេះជាទ័ពធំពន្លឹកណាស់ អ្នកនឹងទៅតែម្នាក់ឯងនោះឃើញថានឹងតស៊ូកម្រិតប្រាជ្ញា**ខុងបេង**មិនបានទេ បើអ្នកនឹងទទួលជាកងមុខហើយ យើងនឹងតែងកងក្រោយឲ្យទៅនៅរក្សាស្រុកឡុងសេ ហើយឲ្យអ្នកឯទៀតលើកចូលទៅជាកងៗទៅព្រួតគ្នាច្បាំងនឹងកងទ័ព**ខុងបេង**នៅភ្នំគីសាន់។ **ទៀវខាប់**ក៏មានអំណរណាស់ឆ្លើយថា ដែលប្រសាសន៍នឹងឲ្យខ្ញុំបាទទៅជាកងមុខនោះ ខ្ញុំបាទនឹងសុំអាសាធ្វើការទៅត្រាតែដល់អស់ជីវិត។ **សុម៉ាអ៊ី**ក៏ឲ្យ**កោឈុយ**នាំទាហានទៅនៅរក្សាស្រុកឡុងសេ ឲ្យ**ទៀវខាប់**កាន់អាជ្ញាសិទ្ធិជាមេកងមុខត្រួតបញ្ជាការលើនាយទាហានគ្រប់កង ហើយក៏នាំគ្នាលើកចេញទៅមុន។

មានល្បាតសេះមកប្រាប់**សុម៉ាអ៊ី**ថា **ខុងបេង**ឲ្យ**អងប៉េង, ទៀវងី** ជានាយកងទ័ពមុខ លើកមកតាមផ្លូវកៀមកោះជាមុន ឯផ្លូវនោះមកជួបចូលគ្នានៅភ្នំគីសាន់ ហើយ**ខុងបេង**លើកទ័ពហ្លួងជាជំនួយមកតាមក្រោយ។ **សុម៉ាអ៊ី**ដឹងដូច្នោះទើបនិយាយនឹង**ទៀវខាប់**ថា ដែល**ខុងបេង**លើកទ័ពមកតាមផ្លូវកៀមកោះនោះ ប្រាថ្នានឹងឲ្យពួកពលទៅដណ្ដើមច្រូតស្រូវភោជន៍សាលីក្នុងដែនស្រុកឡុងសេ ត្រូវអ្នកឯងស្រួតលើកពលរេហ៍ទៅចាំស្ទាក់នៅទីភ្នំគីសាន់ យើងនិង**កោឈុយ**នឹងបញ្ជូនគ្នាលើកទៅ

ការពារស្រុកឡុងសេកុំឲ្យអន្តរាយ ហើយកុំឲ្យទាហាន**ខុងបេង**ច្រូតស្រូវភោជន៍សាលីបាន។ **ទៀវខាប់**ទទួលបង្គាប់**សុម៉ាអ៊ី**ហើយ ក៏នាំពលបួនម៉ឺនលើកទៅតាំងនៅភ្នំគីសាន់។ **សុម៉ាអ៊ី**ក៏លើកទាហានទៅបញ្ចូលគ្នានឹង**កោឈុយ** តាំងនៅដែនស្រុកឡុងសេ។

ឯ**ខុងបេង**លើកទៅដល់ភ្នំគីសាន់ ក៏ឲ្យតាំងបន្ទាយជាមាំមួន លុះឃើញកងទ័ពស្រុកឡុកអៀងលើកមកប្រជិតក៏គិតថា នឹងចេញច្បាំងវេលានេះ ស្បៀងក្នុងកងទ័ពយើងស្តើងស្តួច ព្រោះ**លីងៀម**មិនទាន់ឃើញបញ្ជូនស្បៀងមកឲ្យទាន់ការ ទើបចាត់**អងប៉េង** និង**ទៀវងី**ឲ្យនៅរក្សាបន្ទាយ ខ្លួន**ខុងបេង**ក៏នាំ**កៀងអ៊ុយ**និងពលទាហានជាច្រើន លើកស្រូតកាត់ទៅដល់ស្រុកឡោសៀ។ **កិនំ**ថៅហ្វាយស្រុកឡោសៀដឹងថា**ខុងបេង**លើកទ័ពមកគិតក្រែងខ្លាច ក៏ចេញមកគំនាប់ទទួលនាំចូលទៅក្នុងស្រុកនោះ **ខុងបេង**ក៏សួរ**កិនំ**ថា តំបន់ឯណាមានស្រូវភោជន៍សាលីទុំពេញបរិបូរ? **កិនំ**ឆ្លើយថា ដែនស្រុកឡុងសេនោះមានស្រូវភោជន៍សាលីទុំជាច្រើន។

**ខុងបេង**ដឹងដូច្នោះក៏មានអំណរសោមនស្សណាស់ ទើបចាត់**ទៀវអេក, ម៉ាតុង**ឲ្យនៅរក្សាស្រុកឡោសៀ ខ្លួន**ខុងបេង**ក៏នាំយោធាទាហានទៅ បំណងនឹងច្រូតស្រូវភោជន៍សាលីក្នុងដែនស្រុកឡុងសេ ក្នុងខណៈនោះ ទាហានកងមុខក៏យកសេចក្តីទៅជម្រាប**ខុងបេង**ថា **សុម៉ាអ៊ី**លើកទ័ពមកបោះការពារនៅក្នុងដែនស្រុកឡុងសេហើយ។ **ខុងបេង**ឮដូច្នោះភ័យណាស់និយាយថា **សុម៉ាអ៊ី**នេះកន្លងដឹងសេចក្តីគិតរបស់យើងបាន ៗលើកទាហានប្រចាំការពារស្រូវភោជន៍សាលីទុកដូច្នេះ។

កាល**ខុងបេង**លើកទ័ពចេញមកពីស្រុកហាន់តុងនោះ ឲ្យធ្វើរទេះដូចគ្នានឹងរទេះជំនិះ**ខុងបេង**ចំនួនបី ហើយឲ្យធ្វើរូបយន្តពីរ ដូចរូប**ខុងបេង**លាក់នាំមកជាមួយ។ ខណៈនោះ**ខុងបេង**ងូតទឹកជម្រះតែងខ្លួនហើយ ឲ្យយករទេះនិងរូបយន្តពីរនោះមកដាក់ឲ្យអង្គុយ ហើយចាត់ទាហានទាញរទេះ សុទ្ធតែស្លៀកសពាក់សរំសាយសក់ ក្នុងរទេះមួយចំនួនមនុស្សម្ភៃបួននាក់ មានទាហានសម្រាប់វាយគងស្គរ ស្រែកហ៊ោកញ្ជ្រៀវ រទេះមួយចំនួនប្រាំរយនាក់ និងទាហានសម្រាប់ចោមព័ទ្ធរង់ក្នុងរទេះមួយចំនួយមួយពាន់។ រទេះមួយឲ្យ**កៀងអ៊ុយ**ជានាយបង្គាប់លើទាហានទាំងពួង។

រទេះមួយឲ្យ**ម៉ាតាយ** និង**អ៊ុយអៀន**ជានាយត្រួតលើទាហាន ឯ**ខុងបេង**ក៏ស្លៀកពាក់ បីដូចជារូបយន្តទាំងពីរ ទើបជ្រើសរើសទាហានដែលមានថ្វីដៃឲ្យអូសរទេះ២៤នាក់ សំយាកសក់ស្លៀកពាក់ស ឲ្យ**គួនហ៊ិន**បុត្រ**គួនអ៊ូ**តែងខ្លួនដូចទេព្ដាកាន់ទង់នាំមុខរទេះ ឲ្យទាហានបីម៉ឺនកាន់កណ្ដៀវគ្រប់ដៃសម្រាប់ច្រូតកាត់ស្រូវភោជន៍សាលី ហើយលើកទៅដល់ដែនស្រុកឡុងសេ ទើបឲ្យរទេះយន្តទាំងពីរនោះចូលពួលបង្កប់នៅសងខាងផ្លូវ។

ឯបម្រើសេះល្បាតបានឃើញដូច្នោះភ័យណាស់ គិតសង្ស័យថាមានទេព្ដាឬខ្មោចព្រៃប្រការម្ដេច ទើបស្រូតប្រញាប់ទៅប្រាប់**សុម៉ាអ៊ី**តាមដែលឃើញនោះគ្រប់ប្រការ។ **សុម៉ាអ៊ី**ឮដូច្នោះក៏ចេញទៅឈរមើលមុខបន្ទាយ ឃើញ**ខុងបេង**ជិះរទេះកាន់ផ្លិតរោមសត្វបក់ទៅមក **សុម៉ាអ៊ី**ថា **ខុងបេង**ធ្វើឧបាយក្លែងកលមកទៀត ហើយបង្គាប់ទាហានសេះពីរពាន់ ឲ្យស្រុះចូលទៅចាប់យកខ្លួន**ខុងបេង**និងរទេះឲ្យបាន។ ទាហានទាំងពីរពាន់បំផាយសេះពីមុខបន្ទាយតម្រង់ទៅ។

**ខុងបេង**ឃើញដូច្នោះ ក៏សែកមន្តបង្ខាំងផ្លូវទុក មិនឲ្យសត្រូវដេញចូលមកទាន់ ហើយឲ្យទាហានបែរមុខរទេះដើរចេញទៅជាប្រក្រតី។ ពួកទាហានសេះទាំងអស់នោះ ក៏បង្ខំបំផាយសេះទៅអស់ទំហឹងចម្ងាយផ្លូវប្រមាណបីរយសិន (១២ គ.ម) រយៈផ្លូវដែលដេញនិងរត់នោះគង់នៅមិនបានឃើញជិតចូលទៅ ទើប**ខុងបេង**ឲ្យត្រឡប់មុខរទេះមកវិញ ដើម្បីនឹងឡកបញ្ឈើចិត្តទាហាន**សុម៉ាអ៊ី**ឲ្យដេញទៅទៀត។

ទាហាន**សុម៉ាអ៊ី**ឃើញដូច្នោះ ក៏បង្ខំសេះតាមទៅទៀតពីររយសិន (៨ គ.ម) ក៏មិនបានទាន់ ឯឆ្ងាយនិងជិតនោះក៏គង់នៅដូចដើមបង្អង់ឈប់ គិតសង្ស័យថា **ខុងបេង**ដើរជាប្រក្រតី ហេតុអ្វីយើងបំផាយសេះអស់ទំហឹងហើយក៏តាមមិនទាន់ លុះឃើញ**ខុងបេង**ត្រឡប់រទេះមក ក៏ស្រូតបំផាយសេះនាំទាហានស្រូតតាមទៅទៀត ក៏មិនទាន់សត្រូវ។ **សុម៉ាអ៊ី**ឃើញដូច្នោះ ក៏បំផាយសេះនាំទាហានស្រូតតាមទៅ ហើយនិយាយនឹងទាហានសេះថា **ខុងបេង**បានរៀនមន្តការពារខ្លួន បានជាដេញមិនទាន់ អស់អ្នករាល់គ្នាកុំបំពារដេញសេះទៅឡើយ ត្រូវនាំគ្នាត្រឡប់ទៅបន្ទាយវិញចុះ ស្រាប់តែឮសំឡេងប៉ោបង្រុះពីក្នុងព្រៃទាំងឆ្វេងស្ដាំសស្រាំចេញមក **សុម៉ាអ៊ី**

ក្រឡេកទៅឃើញ**ខុងបេង**អង្គុយលើរទេះ មានទាហានអូសរទេះក៏មើលទៅដូចគ្នា **ស៊ុម៉ាអ៊ី**ភ័យណាស់គិតថា **ខុងបេង**នេះរត់ទៅខាងណោះ ម្ដេចឃើញទាហាន និងទង់នៅឯណោះ ហើយឃើញទាំងខ្លួន**ខុងបេង**នៅជិះរទេះនៅខាងណោះម្នាក់ទៀត ថែមទាំងឮសំឡេងប៉ោសូរគឹកកងខាងឆ្វេងផ្លូវ ឃើញរទេះនិងរូប**ខុងបេង**មានទាហានអឹកអធឹកចេញមកដូចខាងស្ដាំដូច្នេះ ក៏រឹតតែភិតភ័យតក្កមា មានសេចក្ដីសង្កាពិភាល់ឆ្ងល់ណាស់ ក៏និយាយនឹងទាហានទាំងអស់ថា កាល**ខុងបេង**ជិះរទេះទាំងបីនេះប្រហែលជាខ្មោចបិសាច ព្រាយមាយាមកក្លែងយាយីលងបន្លាចយើងទេដឹង? ខណៈកាលទាហានទាំងឡាយឃើញហើយ បានឮ**ស៊ុម៉ាអ៊ី**ថាដូច្នោះ ក៏ផ្អើលភ្ញាក់តក់ស្លុតបែកញែកចេញទៅ **ស៊ុម៉ាអ៊ី**ស្រែកហៅឃាត់យ៉ាងណាក៏ពុំស្ដាប់ នាំគ្នារត់ត្រឡប់ចូលទៅក្នុងស្រុកឡុងសេ។ **ខុងបេង**ឃើញដូច្នោះក៏ត្រឡប់មកវិញ ហៅទាហានទាំងបីម៉ឺននោះមិញឲ្យចុះច្រូតស្រូវភោជន៍សាលីអស់រវាងពីរថ្ងៃ លុះបានស្រូវជាច្រើនហើយ ក៏នាំគ្នាលើកត្រឡប់ទៅស្រុកឡោសៀ។

**ស៊ុម៉ាអ៊ី**កាលរត់ចូលទៅក្នុងស្រុកឡុងសេបីថ្ងៃ លុះដឹងថា**ខុងបេង**លើកត្រឡប់ទៅវិញ ក៏ប្រើទាហានចេញទៅល្បាតក្រៅស្រុក ចាប់បានទាហាន**ខុងបេង**ម្នាក់ **ស៊ុម៉ាអ៊ី**ទើបសួរថា ហេតុម្ដេចឯងបានជាឲ្យពួកអញចាប់បាន? ទាហាននោះឆ្លើយថា ខ្ញុំបាទធ្លាក់ពីលើរទេះរបួសឈឺដើរមិនរួច បានជាពួកល្បាតចាប់បាន។ **ស៊ុម៉ាអ៊ី**ថា **ខុងបេង**ចេះធ្វើឫទ្ធិពូកែប្រការម្ដេចខ្លះ បានជាយើងមើលទៅឃើញ**ខុងបេង**ដល់បីនាក់ជិះរទេះដូចៗគ្នា ឬជាខ្មោចបិសាចព្រាយមាយាមកជាមួយផង បានជាយើងរកនឹងសម្គាល់ថាឯណាជាខ្លួន**ខុងបេង**ពិតនោះមិនដឹងសោះ? ទាហាននោះខ្លាចក៏ឆ្លើយតាមត្រង់ តាមដែល**ខុងបេង**ធ្វើកលគ្រប់ប្រការ។ **ស៊ុម៉ាអ៊ី**ឮដូច្នោះក៏យកដៃគក់ទ្រូងដកដង្ហើមធំហើយថា **ខុងបេង**ធ្វើការគ្រានេះដូចទេវតាមកជួយ លើសគំនិតរបស់យើង ៗដឹងមិនដល់ ទទួល**កោឈុយ**លើកមក **ស៊ុម៉ាអ៊ី**ក៏ពណ៌នារឿងឲ្យ**កោឈុយ**ស្ដាប់គ្រប់ប្រការ។

**កោឈុយ**ថា **ខុងបេង**ធ្វើបានតែលោកមិនដឹង បើដឹងដូច្នេះហើយនឹងត្រូវការអ្វីឲ្យភ័យខ្លាច ឥឡូវខ្ញុំបាទដឹងថា**ខុងបេង**កំពុងរវល់ឲ្យទាហានបែនស្រូវនៅស្រុក

ឡោសៀ សុំឲ្យលោកបំបែកពលទាហានចេញពីរកង វាយខ្ទប់ចូលទៅក៏នឹងចាប់ខ្លួន**ខុងបេង**បានដោយងាយ។ **សុម៉ាអ៊ី**យល់ឃើញត្រូវផង ក៏ចាត់ចែងពួកកងទាហានជាពីរប៉ែក ហើយលើកចេញពីស្រុកឡុងសេ។

ឯ**ខុងបេង**នោះ លុះបានស្រូវភោជន៍សាលីទៅហើយ ក៏ឲ្យទាហានបែនបោកយ៉ាងប្រញាប់ ហើយប្រាប់នាយកងនាយទ័ពថា វេលាយប់នេះនឹងមានសត្រូវលបមកវាយស្រុកឡោសៀ ឯទីក្រៅស្រុកនេះមានវាលស្រែធំទូលាយណាស់ នរណានឹងប៊ានទទួលអាសាចេញទៅពួនបង្កប់ខាងកើតខាងលិច ចាំវាយខ្ទប់សត្រូវឲ្យបាន? **កៀងអ៊ុយ, អ៊ុយអៀន, ម៉ាតុង, ម៉ាតាយ** បួននាយទទួលថា យើងខ្ញុំសូមទទួលអាសាចេញទៅពួនបង្កប់ចាំវាយទ័ពខ្មាំងឲ្យបាន។ **ខុងបេង**ក៏មានសេចក្ដីត្រេកអរណាស់ ទើបឲ្យ**កៀងអ៊ុយ, អ៊ុយអៀន**នាំទាហានមួយពាន់ ទៅពួនបង្កប់នៅទិសខាងលិច ឲ្យ**ម៉ាតុង, ម៉ាតាយ**នាំទាហានម្នាក់មួយពាន់ទៅពួនបង្កប់នៅទិសខាងកើត ហើយបង្គាប់ថា បើបានឮសំឡេងផាវកាលណា ឲ្យនាំទាហានញែកគ្នាវាយចូលមកទាំងបួនទិស។ នាយទាហានទាំងបួននាក់ទទួលបង្គាប់ហើយ ក៏លើកទាហានទៅពួនបង្កប់សព្វខ្លួន។ **ខុងបេង**ឲ្យទាហានឡើងរក្សាសើនបន្ទាយដោយមាំមួនណាស់ លុះវេលាល្ងាច**ខុងបេង**ចាត់ពលមួយរយ ឲ្យកាន់ផាវគ្រប់ដៃចេញទៅពួនបង្កប់ក្រៅទ្វារស្រុកខាងលិចទិសឯជើង។

ឯ**សុម៉ាអ៊ី**លើកពលចូលមកដល់ជិតជើងកំពែងស្រុកឡោសៀ លុះដល់ពេលព្រលប់យប់ងងឹតកាលណា ក៏ប្រឹក្សានឹង**កោឈុយ**ថា យើងនឹងចូលលុកយកស្រុកឡោសៀឲ្យបានក្នុងពេលកណ្ដាលយប់នេះ។ **កោឈុយ**ក៏យល់ត្រូវផង នោះ**សុម៉ាអ៊ី**ក៏បរពលចូលព័ទ្ធស្រុកឡោសៀជុំវិញ លុះដល់យាមមួយប្លាយ **សុម៉ាអ៊ី**ក៏ប្រើបម្រើសេះបំផាយទៅប្រាប់ឲ្យអុជផាវជាសញ្ញាតៗគ្នាទៅ នោះអស់ពលទាហានក៏ស្រែកហ៊ោបាញ់ធ្នូចម្រុះចូលទៅច្រើនណាស់ ពួកទាហាននាទីរក្សាសើនបន្ទាយ ក៏តយុទ្ធនាការពារមិនញញើតដៃ។

**ខុងបេង**ដឹងថាបានចំណាប់ ក៏បង្គាប់ឲ្យទាហានអុជផាវតាមសញ្ញាឡើងគ្រប់ទិស នោះ**កៀងអ៊ុយ** និង**អ៊ុយអៀន**, **ម៉ាតុង** និង**ម៉ាតាយ**បានឮផាវជាសញ្ញា ក៏

បរពលយោធាវាយប្រសព្វខ្ទប់ទិសទាំងបួន ពួកទាហានដែលនៅក្នុងស្រុកឡោសៀក៏បើកទ្វារចេញមក ព្រួតប្រកាប់សម្លាប់កងទ័ពខ្មាំងទាំងមុខទាំងក្រោយដោយប្រពាក់ប្រពូន ទាហាន**សុម៉ាអ៊ី**ស្លាប់វិនាសច្រើនលើសនឹងគណនា។

ឯ**សុម៉ាអ៊ី** និង**កោឈុយ**ក៏ព្រាត់ភ្លាត់បាត់អំពីគ្នា អ្នកទាំងពីរក៏បង្ខំពលយោធាដែលសល់ឲ្យបរពារទម្លាយរត់ចេញទៅក្រៅចំណោមបាន។ **សុម៉ាអ៊ី** និង**កោឈុយ**រត់ទៅប្រទះគ្នា ក៏នាំគ្នារត់ទៅជ្រកពួនលើភ្នំមួយអន្លើ លុះដល់ពេលព្រឹក **ខុងបេង**ក៏បង្គាប់**កៀងអ៊ុយ, អ៊ុយអៀន, ម៉ាតុង, ម៉ាតាយ**តាំងបន្ទាយនៅក្រៅស្រុកទាំងបួនទិស ដើម្បីបម្រុងការពារសត្រូវ។

ឯ**កោឈុយ**ក៏និយាយនឹង**សុម៉ាអ៊ី**ថា តាំងពីយើងបានធ្វើការសង្គ្រាមនឹង**ខុងបេង**មកក៏ច្រើនគ្រាហើយនៅមិនសម្រេច ព្រោះមិនទាន់បានខ្លួន**ខុងបេង** គ្រានេះ**ខុងបេង**គិតកលសឹកសម្លាប់ទាហានយើងអស់ច្រើនណាស់ បើលោកមិនរកឧបាយកម្ចាត់**ខុងបេង**ចេញឲ្យបានទេ អំណើះទៅមុខនឹងកំរើបធំឡើង សុំឲ្យលោកមានសំបុត្រទៅដល់ចៅហ្វាយស្រុកលៀងជីវ និងស្រុកឡុងជីវឲ្យលើកទ័ពមកជួយ ខ្ញុំបាទនឹងអាសាសុំពលទៅវាយយកតំបន់កៀមកោះ ហើយវាយយកស្រុកហាន់តុងឲ្យបាន កងទ័ព**ខុងបេង**គង់នឹងដាច់ស្បៀងចុះ ចូរឲ្យលោកនាំពលចូលលុកចុះគង់នឹងមានជ័យជម្នះ**ខុងបេង**ជាប្រាកដ។

**សុម៉ាអ៊ី**យល់ឃើញត្រូវ ទើបឲ្យធ្វើសំបុត្រទៅដល់ស្រុកលៀងជីវ និងស្រុកឡុងជីវតាមសម្ដី**កោឈុយ**និយាយ ឯ**ស៊ុនឡេ**បានដឹងសេចក្ដីតាមសំបុត្រនោះ ក៏ចាត់ការកេណ្ឌពលហើយលើកមកដល់បន្ទាយ**សុម៉ាអ៊ី**នៅស្រុកឡោសៀ។ **សុម៉ាអ៊ី**ក៏ចាត់ប្រើ**កោឈុយ** និង**ស៊ុនឡេ**បែងទាហានទៅវាយយកគយកៀមកោះ។

ពោលពី**ខុងបេង** កាលបើដឹងថា **សុម៉ាអ៊ី**មិនឃើញចេញធ្វើសង្គ្រាមជាយូរថ្ងៃ ក៏ហៅ**កៀងអ៊ុយ**និង**ម៉ាតាយ**មកនិយាយថា ដែល**សុម៉ាអ៊ី**មិនបានចេញច្បាំងនឹងយើងនេះ ព្រោះវាក្លែងចងយើងទុកឲ្យយូរ ប្រាថ្នាឲ្យយើងដាច់ស្បៀង ម្យ៉ាងទៀតក្រែង**សុម៉ាអ៊ី**នឹងឲ្យកងទ័ពទៅចាំវាយស្កាត់បំបាត់ផ្លូវស្បៀងខាងយើង អ្នកទាំងពីរចូរនាំ

ពលថ្មើរជើងចំនួនមួយម៉ឺនទៅស្កាត់ឲ្យឆាប់ កុំឲ្យកងទ័ព**សុម៉ាអ៊ី**ធ្វើអន្តរាយបាន។ **កៀងអ៊ុយ, ម៉ាតាយ**ក៏នាំពលមួយម៉ឺន ស្រូតទៅស្ទាក់ផ្លូវជាមុន។

មានបម្រើសេះកាន់សំបុត្រទៅឲ្យ**អៀវងី** ៗដឹងសេចក្តីក៏ចូលទៅជម្រាប**ខុងបេង**ថា ដែលមហាឧបរាជឲ្យកំណត់ទុកដល់ទាហានទាំងពួងថា បើដល់កំណត់មួយរយថ្ងៃឲ្យទាហានដប់ម៉ឺន ដែលនៅស្រុកហាន់តុងនោះ ឥឡូវគ្រប់កំណត់ហើយ ទាហានទាំងនោះលើកមកដល់កណ្តាលផ្លូវ មានសំបុត្រមកថា សុំឲ្យមេកំណាន់ទៅទទួល **ខុងបេង**ឮដូច្នោះក៏មានអំណរណាស់ សេចក្តីខនេះយើងបានប្តេជ្ញាទុកមែនហើយ តែយើងភ្លេចទៅ បើដូច្នោះត្រូវតែឲ្យទាហានលើកមុនវិលទៅស្រុកទេសវិញទើបបាន។ អស់បណ្តាទាហានឮហើយមានអំណរណាស់ នាំគ្នារៀបចំត្រៀមខ្លួននឹងត្រឡប់ទៅស្រុក។

មានបម្រើសេះល្បាតមកជម្រាប**ខុងបេង**ថា **ស៊ុនឡេ**លើកទ័ពប្រមាណ២០ម៉ឺនទៅជួយ**សុម៉ាអ៊ី** ៗបំបែកពលមួយកងឲ្យទៅវាយគយកៀមកោះ ឯខ្លួន**សុម៉ាអ៊ី**ឮថា នឹងលើកកងទ័ពមកវាយយកស្រុកឡោសៀ។ **ខុងបេង**មិនទាន់នឹងថាម្តេច ពួកទាហានទាំងអស់ឮដូច្នោះក៏ភ័យជ្រួលច្របល់រាល់គ្នា។

**អៀវងី**ជម្រាប**ខុងបេង**ថា ឥឡូវកងទ័ព**សុម៉ាអ៊ី**លើកមកជាការប្រទាល់តួណាស់ទៅហើយ ដែលលោកនឹងបើកទាហានជាន់ចាស់ឲ្យវិលទៅស្រុកក្នុងពេលនេះដូចម្តេចបាន បើទាហានបន្លាស់ថ្មីមកដល់ពេលណា សឹមបើកឲ្យពួកចាស់ទៅតែម្តង។ **ខុងបេង**ថា ខ្លួនយើងបានចេញវាចាហើយ បើនឹងប្រែត្រឡប់ពាក្យសម្តីរបស់ខ្លួនវិញ អស់រេហ៍ពលវាក៏នឹងមើលងាយប្រមាទបាន ថាយើងធ្វើធំកាន់ដល់អាជ្ញាសិទ្ធិស្តេចគេចត្រឡប់ត្រឡិនមិនទៀង វេលានេះទោះបីសង្គ្រាមយើងទ្រេតផ្អៀងថ្លោះការយ៉ាងណានឹងសត្រូវខ្លាំង យើងក៏ត្រូវតាំងរក្សាវាចាសត្យមិនឲ្យវិបត្តិខូចទៅ យើងនឹងឃាត់គេឲ្យនៅមិនត្រូវទេ ព្រោះបិតាមាតាភរិយាបុត្ររបស់គេទន្ទឹងមើលផ្លូវណាស់ទៅហើយ ៗ**ខុងបេង**ក៏ប្រកាសប្រាប់ដល់ទាហានទាំងពួងថា ពេលនេះដល់កំណត់ផ្លាស់ប្តូរគ្នាហើយ ឲ្យអស់អ្នករាល់គ្នារៀបខ្លួនវិលទៅស្រុកចុះ។

អស់ពួកពលទាហានទាំងនោះក៏ឆ្លើយថា យើងខ្ញុំទាំងឡាយនឹងសុំយកអាយុជីវិតតបស្នងព្រះតេជព្រះគុណសុំអាសាព្រះបាទម្ចាស់ នៅធ្វើការយកជ័យជម្នះអស់សត្រូវឲ្យបានសិន ទើបបានទៅ។ **ខុងបេង**បានឮដូច្នោះក៏មានចិត្តសោមនស្សត្រេកអរ ទើបថា អស់អ្នករាល់គ្នាមានចិត្តគិតកតញ្ញូនឹងរាជការគ្រានេះ យើងគាប់ចិត្តពេកណាស់ ទើបនាំពួកទាហានទាំងអស់នោះចេញទៅរក្សាបន្ទាយនៅក្រៅស្រុក ហើយបង្គាប់ថា បើឃើញកងទ័ព**សុម៉ាអ៊ី**លើកមកកាលណា ត្រូវតែខំស្រូតចេញទៅវាយកុំឲ្យតាំងនៅបាន។

ឯ**សុម៉ាអ៊ី**លើកមកជិតនឹងដល់កំពែងស្រុកឡោសៀ នឹងឲ្យទាហានតាំងបន្ទាយចុះ ពួកទាហាន**ខុងបេង**ក៏នាំគ្នាចេញមចោមវាយកាប់សម្លាប់កងទ័ព**សុម៉ាអ៊ី**ដែលមកពីស្រុកឡេងជីវស្លាប់អស់ច្រើនណាស់ **សុម៉ាអ៊ី**ក៏នាំទាហានដែលសល់នោះបែករត់ទៅ។

**ខុងបេង**ក៏លើកពលចូលស្រុក ហើយឲ្យបំណាច់រង្វាន់ពលទាហានតាមសមគួរ មានបម្រើសេះល្បាតនាំសំបុត្រ**លីងៀម**ដែលជូនស្បៀងមិនទាន់ បកមកដល់**ខុងបេង** ៗបានឃើញហើយភ័យស្តុតស្មារតី ហែកមើលឃើញសេចក្តីថា ខ្ញុំបាទ**លីងៀម** សូមជូនកិត្តិយសមហាឧបរាជដ្បិត**ស៊ុនគួន**មានសំបុត្រទៅដល់**ចូយ៉យ**ថាឲ្យលើកកងទ័ពមកប្រសព្វគ្នា នឹងចូលទៅវាយយកស្រុកសែឈ្មួន **ចូយ៉យ**ឆ្លើយតបថា ឲ្យ**ស៊ុនគួន**លើកទ័ពទៅធ្វើការមុនចុះ សឹម**ចូយ៉យ**លើកជូនតាម ឥឡូវ**ស៊ុនគួន**នៅស្ងៀមស្ងាត់ទេ ខ្ញុំបាទនឹងទុកចិត្តសត្រូវមិនបាន ៗជាមកប្តឹងសូមជ្រាប។

**ខុងបេង**ឃើញសេចក្តីសំបុត្រដូច្នោះ ក៏រឹតតែភ័យព្រួយក្នុងចិត្តឥតស្រាកទើបប្រឹក្សានឹងនាយកងនាយទ័ពថា បើយើងនឹងខំធ្វើសង្គ្រាមនឹង**សុម៉ាអ៊ី**វេលានេះក៏ជាការកង្វល់ក្រោយដោយ**ស៊ុនគួន**នឹងលើកទ័ពទៅវាយស្រុកសែឈ្មួន យើងត្រូវថយទ័ពត្រឡប់ទៅរក្សាស្រុកសិនទើបគួរ អស់នាយកងនាយទ័ពទាំងឡាយក៏យល់ឃើញផង។ **ខុងបេង**ចាត់បម្រើសេះឲ្យទៅប្រាប់កងទ័ពដែលតាំងនៅទីភ្នំគីសាន់ ឲ្យលើកថយទៅមុន យើងនឹងនៅការពារទ័ព**សុម៉ាអ៊ី** ហើយនឹងលើកទៅជាក្រោយ។

ឯនាយទ័ពនាយកងនៅទីភ្នំគីសាន់ បានដឹងហើយក៏ថយទ័ពទៅ **ទៀវខាប់**ឃើញដូច្នោះក៏មិនបានលើកជាប់តាម ព្រោះខ្លាចកលឧបាយ**ខុងបេង** ទើបត្រឡប់ទៅប្រាប់ដំណឹងដល់**សុម៉ាអ៊ី** ៗថា ឯកលសឹក**ខុងបេង**នោះជ្រៅកំបាំងណាស់ អ្នកកុំបីតាមទៅច្បាំងឡើយ ចូរទៅតាំងនៅភ្នំគីសាន់ចុះ បើកងទ័ព**ខុងបេង**ដាច់ស្បៀងអាហារកាលណា គង់នឹងលើកទ័ពត្រឡប់ទៅឯង។

**ងុយបេង**ឆ្លើយថា សត្រូវថយទៅហើយ លោកមិនឲ្យលើកទ័ពនឹងមកនៅបង្អង់ស្ងៀមដូច្នេះ រាស្ត្រប្រជាបណ្ដាអ្នកស្រុកគង់នឹងសើចឡកចំអកលេងថា លោកខ្លាចក្រែងរអែងគិតដល់ទាហានស្រុកសៃឈ្នួន បីដូចហ្វូងប្រើសក្ដាន់មានចិត្តគិតខ្លាចខ្លា សុំឲ្យលោកលើកកងយោធាតាមវាយ ឲ្យទាហាន**ខុងបេង**បែកខ្ញែក ទើបនឹងបានការជាប្លែកចម្រើនតទៅ **សុម៉ាអ៊ី**ក៏មិនបានធ្វើតាម។

ឯ**ខុងបេង**លុះដឹងថា កងទ័ពនៅភ្នំគីសាន់លើកថយទៅហើយ ក៏ឲ្យហៅ**អៀវងី**និង**ម៉ាតុង**ចូលមកបង្គាប់ថា ឲ្យអ្នកទាំងពីរនាក់នាំទាហានធ្នូមួយម៉ឺន ស្រូតទៅពួនបង្កប់នៅតំបន់ប៊ីតុក បកប៉ុន មាត់ផ្លូវនឹងទៅគយកៀមកោះ បើទាហាន**សុម៉ាអ៊ី**តាមទៅ បានឮសំឡេងផាវសញ្ញាវេលាណា ត្រូវឲ្យទាហានជញ្ជូនយកដុំថ្មសន្ធប់មាត់ផ្លូវឲ្យអស់ ហើយឲ្យទាហានបាញ់ធ្នូចម្រុះចូលទៅទាំងសងខាងផ្លូវ ចាប់យកសត្រូវឲ្យបាន **អៀវងី, ម៉ាតុង**ក៏នាំពលមួយម៉ឺនស្រូតចេញពីស្រុកឡោសៀទៅ។

ទើប**ខុងបេង**បង្គាប់**អ៊ុយអៀន** និង**គួនហ៊ុន**ឲ្យនាំទាហានជាកងក្រោយ ឲ្យរើសយកឧសមកគរដុតភ្លើងទុកឲ្យសត្រូវឃើញភ្លើងផ្សែង ឯទង់ជ័យដែលនៅលើសើនបន្ទាយក៏កុំឲ្យរមូចេញ បើកងទ័ពយើងលើកចេញពីក្នុងស្រុកនេះទៅហើយ សឹមអ្នកទាំងពីរលើកតាមទៅឯតំបន់បកប៉ុន បើ**សុម៉ាអ៊ី**លើកតាម ចូរតច្បាំងជាបញ្ឆោតទៅ លុះបង្គាប់ស្រេចហើយ **ខុងបេង**ក៏នាំកងទ័ព និងអ្នកស្រុកទាំងអស់លើកចេញចាកពីស្រុកឡោសៀ។ **អ៊ុយអៀន** និង**គួនហ៊ុន**ក៏ធ្វើតាម**ខុងបេង**បង្គាប់ ហើយលើកពលទៅតាមផ្លូវតម្រង់សំដៅទៅទីបកប៉ុន។

បម្រើសេះល្បាតឃើញហើយ ក៏នាំព័ត៌មានទៅប្រាប់**សុម៉ាអ៊ី**ថា កងទ័ព**ខុងបេង**នោះលើកចេញចាកស្រុកឡោសៀហើយ **សុម៉ាអ៊ី**បានឮដូច្នោះក៏ទៅមើល

ជិតជើងកំពែងស្រុក ឃើញទង់ជ័យដោតលើសើនបន្ទាយជុំវិញ ទាំងផ្សែងភ្លើងក៏នៅមានជាប្រក្រតី **សុម៉ាអ៊ី**សើចហើយថា **ខុងបេង**លើកទ័ពត្រឡប់ទៅហើយ នៅធ្វើកលឧបាយទុកធ្វើអ្វីទៀត ទើបឲ្យទាហានចូលទៅមើលមិនឃើញមានមនុស្សម្នាក់សោះ ទាហាននោះវិលត្រឡប់មកប្រាប់**សុម៉ាអ៊ី**ថា មានតែសំបកស្រុកទទេ។ **សុម៉ាអ៊ី**ថា នរណានឹងទទួលយកអាសាលើកទ័ពតាមទៅវាយឲ្យទាហាន**ខុងបេង**បែកខ្ញែកបាន?

**ទៀវខាប់**ថា ខ្ញុំបាទសុំអាសាទៅចោមវាយបំបែកទ័ព**ខុងបេង**នៅដើមផ្លូវបែកចេញទៅដល់ទ័ពមុខ។ **សុម៉ាអ៊ី**ថា ចិត្តអ្នកឯងស្រាលរហ័សណាស់ ដែលនឹងទៅនោះក្រែងនឹងថ្លោះការទេដឹង? **ទៀវខាប់**ថា លោកបានចាត់ខ្ញុំបាទឲ្យធ្វើជានាយកងទ័ពស្រួច ខ្ញុំបាទក៏គិតគួចប្រាថ្នាចង់ឲ្យបានតយុទ្ធនឹងសត្រូវជាដរាប ឥឡូវ**ខុងបេង**ថយទ័ពទៅ លោកក៏គង់ជ្រាបថា ទំនៀមទ័ពស្រួចត្រូវផ្ដួចផ្ដល់ជាប់តាម ហេតុម្ដេចលោកមកហាមដូច្នេះទៅវិញ?

**សុម៉ាអ៊ី**ថា ដែលសត្រូវថយទៅជាទំនៀមទ័ពស្រួចនឹងគួចគិតដិតដោយតាមក៏មែនហើយ តែការដែលនឹងទៅនោះ ជាផ្លូវច្រកជ្រោះរបោះភ្នំទុរគមឆ្ងាយណាស់ ទើបខ្លាចក្រែង**ខុងបេង**នឹងឲ្យពួនបង្កប់ពលនៅចាំតទល់ខ្ទប់វាយ ដោយមិនដឹងខ្លួន បានជាយើងហាមរំឭកប្រធ្នូន ដើម្បីឲ្យអ្នកភ្ញាក់ស្មារតីខ្លះ អ្នកនឹងទៅក៏ទៅចុះ តែត្រូវប្រយ័ត្នឲ្យណាស់ កុំស្រាលរហ័សឲ្យកើតថ្លោះការ បើគ្រានេះចាញ់ប្រៀបគេយ៉ាងណា ទៅមុខនឹងធ្វើការតដៃនឹងសត្រូវ ក៏នៅតែញញើតខ្លាច ខូចចិត្តអស់។ **ទៀវខាប់**ថា ខ្លួនខ្ញុំបាទជាជាតិទាហាន ត្រូវតែមានចិត្តគិតយកអាសាម្ចាស់ដោយសុចរិត ទោះបីនឹងក្ស័យជីវិតក៏មិនត្រូវគិតស្ដាយអាល័យ។ **សុម៉ាអ៊ី**អស់សេចក្ដីសង្ស័យ ក៏ចាត់ទាហានឲ្យ**ទៀវខាប់**ប្រាំពាន់ ហើយឲ្យ**ងុយបេង**នាំពលពីរម៉ឺនជាជំនួយតាមទៅទៀត ហើយ**សុម៉ាអ៊ី**ក៏នាំពលបីពាន់ លើកទៅជាកងក្រោយ។

**ទៀវខាប់**នោះ លុះទទួលការហើយក៏នាំពលស្រូតតាមទៅផ្លូវចម្ងាយប្រហែល ៤០០សិន (១៦ គ.ម) ក្រឡេកទៅឃើញ**អ៊ុយអៀន**នាំទាហានស្រែកហ៊ោចេញពីក្នុងព្រៃញឹក **អ៊ុយអៀន**ក៏ស្រែកបញ្ឆោះបញ្ឆឺដោយពាក្យទ្រគោះផ្សេងៗ **ទៀវខាប់**ឮ

សំឡេងដូច្នោះក៏ខឹងខ្លាំងណាស់ ញាក់សេះចូលប្រយុទ្ធនឹង**អ៊ុយអៀន**បាន១៥ភ្លែង **អ៊ុយអៀន**ធ្វើជាបំផាយសេះរត់ទៅ **ទៀវខាប់**ក៏ប្រញាប់ញាក់សេះដេញតាមទៅទៀត ចម្ងាយប្រហែល៦០០សិន (២៤ គ.ម) ក៏មិនឃើញ**អ៊ុយអៀន**។ ទទួល**គួនហ៊ុន**បរសេះស្រែកហ៊ោចេញមកវាំងទទឹងពីមុខ **ទៀវខាប់**ខឹងណាស់ស្ទុះញាក់សេះចូលទៅប្រយុទ្ធនឹង**គួនហ៊ុន**បានដប់ភ្លែង **គួនហ៊ុន**ក្លែងញាក់សេះថយរត់ទៅ **ទៀវខាប់**ដេញតាមផ្លូវទៅទៀត ចម្ងាយប្រហែល៦០០សិន (២៤ គ.ម) **គួនហ៊ុន**ពួនបាត់ត្រង់ជើងភ្នំ ទទួល**អ៊ុយអៀន**នាំទាហានស្រែកហ៊ោចេញមក ប្រយុទ្ធនឹង**ទៀវខាប់**បានប្រាំបួនឬដប់ភ្លែង **អ៊ុយអៀន**ក្លែងឲ្យទាហានចោលគ្រឿងសាស្ត្រាវុធអស់ ហើយបំផាយសេះរត់ទៅ ពួកទាហាន**ទៀវខាប់**មិនបានដឹងកលឧបាយ ក៏បបួលគ្នាចុះពីលើសេះរើសយកគ្រឿងសាស្ត្រាវុធទាំងអស់ ឯ**ទៀវខាប់** និងទាហានប្រមាណមួយរយប្លាយបំផាយសេះតាម**អ៊ុយអៀន**ទៅដល់ច្រកជើងភ្នំបកប៉ុន បានតយុទ្ធគ្នានឹង**អ៊ុយអៀន**ជាពន្លឹក **អ៊ុយអៀន**ក្លែងញាក់សេះរត់ទៅទៀត ទទួលដល់ពេលល្ងាច **ទៀវខាប់**ក្រឡេកឃើញពន្លឺភ្លើងឆេះឡើងពីសងខាងផ្លូវ លុះនឹងញាក់សេះថយក្រោយមកវិញ ទាហាន**ខុងបេង**ក៏ចេញពីប្រហាបជញ្ជូនថ្មទៅគរខ្ទប់បិទផ្លូវអស់ ទាហានខ្លះនៅពីលើកំពូលភ្នំក៏បាញ់រណ្ដំដោយធ្នូចុះមក **ទៀវខាប់**ក៏ស្លុតរន្ធត់ស្មារតីភ័យណាស់គិតថា ឱខ្លួនអញចាញ់កលសត្រូវគ្រោះនេះអស់រួចជីវិតហើយ។ ទាហានលើកំពូលភ្នំ និងនៅតាមច្រកប្រហាបភ្នំក៏នាំគ្នាបាញ់ប្រសព្វធ្នូ និងលើកដុំថ្មទម្លាក់ចុះមកហាក់បីដូចគ្រាប់ភ្លៀង មិនដឹងបើនឹងវាំងលៀងគេចចៀសទៅខាងណា **ទៀវខាប់**ត្រូវព្រួញនិងដុំថ្មសិលាទង្គិចបែករបួសសុះអស់ទាំងខ្លួន រីតតែមានចិត្តនោះក្រោធខឹងខ្លាំងណាស់ ពិសព្រួញក៏កម្រើករហ័សជ្រាបសព្វសព៌ាង្គកាយ **ទៀវខាប់**ក៏ដល់នូវសេចក្ដីអន្តរាយផង ទាហានតាមមកជាមួយក៏ត្រូវព្រួញនិងដុំថ្មស្លាប់គរលើគ្នាទាំងអស់។

ឯទាហាន**ទៀវខាប់**បានគ្រឿងសាស្ត្រាវុធហើយ ក៏ស្រូតតាម**ទៀវខាប់** ទៅឃើញដុំសិលាខ្ទប់បិទមាត់ផ្លូវបកប៉ុនពេញទាំងអស់ ក៏គិតថា **ទៀវខាប់**នោះប្រហែលអន្តរាយជាប្រាកដហើយ លុះនឹងខំតាមទៅក៏ខ្លាចសេចក្ដីស្លាប់ ទទួលឮសំឡេង**ខុងបេង**ស្រែកពីលើភ្នំថា វើយអាពួកទាហាន**ទៀវខាប់** ឯងកុំភ័យខ្លាចអ្វី ឯងចូរនាំ

គ្នាប្រញាប់ទៅប្រាប់**សុម៉ាអ៊ី**ចៅហ្វាយឯងចុះ ថាអញគិតធ្វើការគ្រានេះប៉ងនឹងចាប់យកសេះមួយ ដែលមានព្យុហៈកំណាចក៏មិនសមតាមអំណាចចិត្តប្រាថ្នា ឥឡូវអញបានចាប់សម្លាប់ខ្លាមួយទៅវិញ ឯងត្រូវទៅរំឭកចៅហ្វាយឯងនោះមិញថា ឲ្យរវាំងខ្លួនប្រាណឲ្យមួនមាំ អញគង់នឹងចាំចាប់យកឲ្យបានមិនខានទេ។ អស់ពួកទាហាននោះឮក៏ភ័យទាំងត្រេកអរ នាំគ្នាលើកករឱនគំនាប់ហើយលាត្រឡប់ទៅក្រោយវិញ លុះទៅជួបនឹង**សុម៉ាអ៊ី**ក៏ពណ៌នាប្រាប់គ្រប់ប្រការ។

**សុម៉ាអ៊ី**ដឹងហើយក៏ភ័យស្លុតវិញ្ញាណ គិតអាណិតអានាថស្តាយ**ទៀវខាប់**ពន់ប្រមាណណាស់ណាថា ដែល**ទៀវខាប់**ថ្លោះការវេលានេះ ព្រោះយើងគិតស្រាលបណ្តាលបណ្តោយទៅជាបានស្លាប់ ហើយឲ្យលើកកងទ័ពត្រឡប់ចូលទៅក្រុងឡុកអៀងវិញ លុះទៅដល់ហើយ**សុម៉ាអ៊ី**ក៏ចូលទៅក្រាបបង្គំគាល់ទូលព្រះចៅ**ចូយ៉យ**តាមដែលបានធ្វើការសង្គ្រាមលុះ**ទៀវខាប់**ស្លាប់នៅតំបន់បកប៉ុន។

ព្រះចៅ**ចូយ៉យ**ជ្រាបសេចក្តី ក៏មានព្រះទ័យអាក់អួលក្តួលក្នុងឱរា ទ្រង់ព្រះកន្សែងសោកាស្តាយ**ទៀវខាប់**ណាស់ ត្រាស់ថា **ទៀវខាប់**នោះជាទាហានឯក តាំងពីគ្រាព្រះអយ្យការ និងព្រះបិតារហូតមកដល់យើង បីរាជ្យហើយមិនគួរឡើយមកស្លាប់កណ្តាលរណរង្គ សមគួរជាជាតិទាហាន ព្រះអង្គក៏មានព្រះទ័យមេត្តាចាត់ក្រមការឲ្យទៅនាំយកសព**ទៀវខាប់**មកបាន ទ្រង់ព្រះរាជទានមាសប្រាក់ឲ្យតែងសំស្ការសពតាមយសស័ក្តិ ហើយហែទៅបញ្ចុះក្នុងស្រុកឡុកអៀង។

ខណៈកាល**ខុងបេង**មានជ័យជម្នះឈ្នះ**សុម៉ាអ៊ី**ហើយ ក៏លើកទ័ពត្រឡប់ចូលទៅតាំងនៅស្រុកហាន់តុង ឯ**លីងៀម**ដឹងថា**ខុងបេង**លើកទ័ពត្រឡប់មកក៏ភ័យណាស់ចូលទៅក្រាបទូលព្រះចៅ**ឡៅសៀន**ថា ទូលព្រះបង្គំជាខ្ញុំបញ្ជូនស្បៀងអាហារ បានចាត់ការស្រេចហើយនឹងបញ្ជូនទៅ ឥឡូវទទួលមហាឧបរាជលើកទ័ពមកដល់ស្រុកហាន់តុង។ ព្រះចៅ**ឡៅសៀន**ទ្រង់ព្រះសណ្តាប់ច្បាស់ក៏ត្រាស់ប្រើ**ប៊ីហ៊ុយ** ឲ្យទៅសួរ**ខុងបេង**ឯស្រុកហាន់តុងថា ខ្វះខាតអ្វីឬបានជាលើកកងទ័ពត្រឡប់មកវិញដូច្នេះ? **ខុងបេង**ប្រាប់ថា ខ្លួនយើងទៅធ្វើសង្គ្រាម ទទួលមានសំបុត្រ**លីងៀម**បកឲ្យ

ដំណឹងទៅថា **ស៊ុនគួន**នឹងលើកទ័ពមកវាយស្រុកសែឈ្នួន យើងភ័យណាស់ ព្រោះជាកង្វល់ក្រោយ បានជាលើកទ័ពត្រឡប់មកប្រាថ្នានឹងការពាររក្សាស្រុក។

**ប៊ឹហ៊ុយ**ជម្រាបថា ឥឡូវ**លីង៉ៀម**ចូលទៅទូលព្រះករុណាថា បានចាត់ចែងស្បៀងអាហារទុកព្រមហើយ គិតនឹងបញ្ជូនទៅ ទទួលប្រសាសន៍អញ្ជើញត្រឡប់មក ព្រះករុណាមិនជ្រាបព្រះទ័យអ្វីសោះ បានជាត្រាស់ប្រើឲ្យខ្ញុំបាទមកសួរយកសេចក្តីពិត។ **ខុងបេង**ក៏ប្រើមនុស្សជំនិតឲ្យទៅពិនិត្យមើលស្បៀងអាហារ នឹងមានប្រាកដដូចពាក្យ**លីង៉ៀម**ថាឬទេ? បម្រើទៅមើលបានសេចក្តីហើយ ក៏ត្រឡប់មកជម្រាប**ខុងបេង**វិញថា **លីង៉ៀម**ចាត់ចែងស្បៀងមិនទាន់ បានជាធ្វើសំបុត្រទៅបំភាន់បញ្ឆោតលោក។ **ខុងបេង**ឮដូច្នោះក៏នឹកខឹងខ្លាំងណាស់ ទើបចាត់ប្រើទាហានឲ្យចូលទៅក្រុងសែឈ្នួន ចាប់យកខ្លួន**លីង៉ៀម**ទៅបាន ទើប**ខុងបេង**និយាយថា ភ្នាក់ងាររបស់ខ្លួនគ្រាន់តែបញ្ជូនស្បៀងប៉ុណ្ណោះ នៅធ្វើពុំបានទៀត អាចប៊ានក្លែងសំបុត្រទៅបញ្ឆោតយើងយ៉ាងទំហំទៀត ខ្លួនត្រូវមានទោសដល់ស្លាប់ ថាហើយក៏បង្គាប់ភ្នាក់ងារឲ្យនាំខ្លួន**លីង៉ៀម**ទៅប្រហារជីវិត។

**ប៊ឹហ៊ុយ**ជម្រាបទាស់ថា ទោស**លីង៉ៀម**ដល់ស្លាប់ពិតណាស់ តែសុំឲ្យប្រសាសន៍ឈ្វេងគិតទៅដល់ព្រះចៅ**ឡៅពី** ដែលទ្រង់បានផ្តាំផ្ញើ**លីង៉ៀម**ឲ្យធ្វើរាជការនឹងប្រសាសន៍ **ខុងបេង**បានឮដូច្នោះក៏ស្រក់ទឹកភ្នែកដោយគិតដល់ព្រះចៅ**ឡៅពី**ដ៏មាននូវព្រះតេជព្រះគុណ ទើបឲ្យលើកទោស**លីង៉ៀម**ទៅវិញ ទើប**ខុងបេង**ឲ្យ**លីង៉ៀម** និង**ប៊ឹហ៊ុយ**ចូលទៅគាល់ព្រះចៅ**ឡៅសៀន**ឯស្រុកសែឈ្នួន **ប៊ឹហ៊ុយ**យកសេចក្តីក្រាបបង្គំទូលតាមរឿងរ៉ាវដែល**លីង៉ៀម**ធ្វើបញ្ឆោត ឲ្យមហាឧបរាជលើកទ័ពត្រឡប់មក។ ព្រះចៅ**ឡៅសៀន**ជ្រាបព្រឹត្តិហេតុដែល**លីង៉ៀម**ធ្វើខុសអាក្រក់ ក៏ទ្រង់ព្រះពិរោធណាស់ ត្រាស់ឲ្យយកខ្លួន**លីង៉ៀម**ទៅប្រហារជីវិតបង់ នោះអស់សេនាបតីនាហ្មឺនសព្វមុខមន្ត្រីទាំងពួង ក៏នាំគ្នាទូលសុំទោស**លីង៉ៀម**ទុក ស្តេចក៏ព្រមលើកទោសមិនឲ្យសម្លាប់ តែទ្រង់ត្រាស់បង្គាប់ឲ្យដកហូតងារចេញពីទីមន្ត្រី។ **ខុងបេង**មានសេចក្តីអាណិត**លីង៉ៀម** ទើបយក**លីល្ហង**ជាបុត្រទៅតាំងជាមន្ត្រីខ្ញុំរាជការជំនួសតំណែង**លីង៉ៀម**ជាបិតា។

ចប់រឿងសាមកុក ភាគទី៩

សូមរង់ចាំអានភាគទី១០ ដែលជាភាគបញ្ចប់

សូមអរគុណ។

ណុល ដារ៉ា

*លោកអ្នកអានអាចរកមើលសៀវភៅផ្សេងទៀតតាមរយៈគេហទំព័រ*

www.khmerliterature.wordpress.com